គន្ធាយតនំ ជិវ្ហាយតនំ រសាយតនំ កាយាយតនំ ផោដ្ឋព្វាយតនំ មនាយតនំ ធម្មាយតនំ ឯត្តាវតា អាយតនានំ អាយតនបញ្ញត្តិ ។

## ធាតុបញ្ញត្តិ

[ ៦ ] កិត្តាវតា ធាតូនំ ធាតុបញ្ញត្តិ ។ យាវតា អដ្ឋារស ធាតុយោ ចក្ខុធាតុ រូបធាតុ ចក្ខុវិញ្ញាណធាតុ សោតធាតុ សទ្ទធាតុ សោតវិញ្ញាណធាតុ ឃានធាតុ គន្ធធាតុ ឃានវិញ្ញាណធាតុ ជិវ្ហាធាតុ រសធាតុ ជិវ្ហាវិញ្ញាណធាតុ កាយធាតុ ផោដ្ឋព្វធាតុ កាយវិញ្ញាណធាតុ មនោធាតុ ធម្មធាតុ មនោវិញ្ញាណធាតុ ឯត្តាវតា ធាតូនំ ធាតុបញ្ញត្តិ ។

## សច្ចបញ្ញត្តិ

[ ៧ ] កិត្តាវតា សច្ចានំ សច្ចបញ្ញត្តិ ។ យាវតា ចត្តារិ សច្ចានិ ទុក្ខសច្ចំ សមុទយសច្ចំ និរោធសច្ចំ មគ្គសច្ចំ ឯត្តាវតា សច្ចានំ សច្ចបញ្ញត្តិ ។



គន្ធាយតនៈ ១ ជិវ្ហាយតនៈ ១ រសាយតនៈ ១ កាយាយតនៈ ១ ផោដ្ឋព្វាយតនៈ ១ មនាយតនៈ ១ ធម្មាយតនៈ ១ មានប្រមាណប៉ុនណា អាយតនបញ្ញត្តិ របស់អាយតនៈទាំងឡាយ មានប្រមាណប៉ុណ្ណោះ ។

## ធាតុបញ្ញត្តិ

[ ៦ ] ធាតុបញ្ញត្តិ របស់ធាតុទាំងឡាយ មានប៉ុន្មាន ? ធាតុ ១៨ គឺ ចក្ខុធាតុ ១ រូបធាតុ ១ ចក្ខុវិញ្ញាណធាតុ ១ សោតធាតុ ១ សទ្ទធាតុ ១ សោតវិញ្ញាណធាតុ ១ ឃានធាតុ ១ គន្ធធាតុ ១ ឃានវិញ្ញាណធាតុ ១ ជិវ្ហាធាតុ ១ រសធាតុ ១ ជិវ្ហាវិញ្ញាណធាតុ ១ កាយធាតុ ១ ផោដ្ឋព្វធាតុ ១ កាយវិញ្ញាណធាតុ ១ មនោធាតុ ១ ធម្មធាតុ ១ មនោវិញ្ញាណធាតុ ១ មានប្រមាណប៉ុនណា ធាតុបញ្ញត្តិ របស់ធាតុទាំងឡាយ មានប្រមាណប៉ុណ្ណោះ ។

## សច្ចបញ្ញត្តិ

[ ៧ ] សច្ចបញ្ញត្តិ របស់សច្ចៈទាំងឡាយ មានប៉ុន្មាន ? សច្ចៈ ៤ គឺ ទុក្ខសច្ច ១ សមុទយសច្ច ១ និរោធសច្ច ១ មគ្គសច្ច ១ មានប្រមាណប៉ុនណា សច្ចបញ្ញត្តិ របស់សច្ចៈទាំងឡាយ មានប្រមាណប៉ុណ្ណោះ ។

## ឥន្ទ្រិយបញ្ញត្តិ

(៦) កិត្តាវតា ឥន្ទ្រិយានំ ឥន្ទ្រិយបញ្ញត្តិ ។ យាវតា ពាវីសតិន្ទ្រិយានិ ចក្ខុន្ទ្រិយំ សោតិន្ទ្រិយំ ឃានិន្ទ្រិយំ ជិវ្ហិន្ទ្រិយំ កាយិន្ទ្រិយំ មនិន្ទ្រិយំ ឥត្ថិន្ទ្រិយំ បុរិសិន្ទ្រិយំ ជីវិតិន្ទ្រិយំ សុខិន្ទ្រិយំ ទុក្ខិន្ទ្រិយំ សោមនស្សិន្ទ្រិយំ ទោមនស្សិន្ទ្រិយំ ឧបេក្ខិន្ទ្រិយំ សទ្ធិន្ទ្រិយំ វីរិយិន្ទ្រិយំ សតិន្ទ្រិយំ សមាធិន្ទ្រិយំ បញ្ញិន្ទ្រិយំ អនញ្ញាតញ្ញស្សាមីតិន្ទ្រិយំ អញ្ញិន្ទ្រិយំ អញ្ញាតាវិន្ទ្រិយំ ឯត្តាវតា ឥន្ទ្រិយានំ ឥន្ទ្រិយបញ្ញត្តិ ។

## បុគ្គលបញ្ញត្តិ

កិត្តាវតា បុគ្គលានំ បុគ្គលបញ្ញត្តិ ។



## ឥន្ទ្រិយបញ្ញត្តិ

(៦) ឥន្ទ្រិយបញ្ញត្តិ របស់ឥន្ទ្រិយទាំងឡាយ មានប៉ុន្មាន ។ ឥន្ទ្រិយ ២២ គឺ ចក្ខុន្ទ្រិយ ១ សោតិន្ទ្រិយ ១ ឃានិន្ទ្រិយ ១ ជិវ្ហិន្ទ្រិយ ១ កាយិន្ទ្រិយ ១ មនិន្ទ្រិយ ១ ឥត្ថិន្ទ្រិយ ១ បុរិសិន្ទ្រិយ ១ ជីវិតិន្ទ្រិយ ១ សុខិន្ទ្រិយ ១ ទុក្ខិន្ទ្រិយ ១ សោមនស្សិន្ទ្រិយ ១ ទោមនស្សិន្ទ្រិយ ១ ឧបេក្ខិន្ទ្រិយ ១ សទ្ធិន្ទ្រិយ ១ វីរិយិន្ទ្រិយ ១ សតិន្ទ្រិយ ១ សមាធិន្ទ្រិយ ១ បញ្ញិន្ទ្រិយ ១ អនញ្ញាតញ្ញស្សាមីតិន្ទ្រិយ ១ អញ្ញិន្ទ្រិយ ១ អញ្ញាតាវិន្ទ្រិយ ១[1] មានប្រមាណប៉ុនណា ឥន្ទ្រិយបញ្ញត្តិ របស់ឥន្ទ្រិយទាំងឡាយ មានប្រមាណប៉ុណ្ណេះ ។

## បុគ្គលបញ្ញត្តិ

បុគ្គលបញ្ញត្តិ របស់បុគ្គលទាំងឡាយ មានប៉ុន្មាន ។

---

១ ពីចក្ខុន្ទ្រិយ ទៅដល់សុខិន្ទ្រិយ ១០ នេះ ជាកាមាវចរ (ប្រព្រឹត្តទៅក្នុងកាម) ពីទុក្ខិន្ទ្រិយ ទៅដល់បញ្ញិន្ទ្រិយ ៩ នេះ ជាមិស្សកៈ (ប្រឡូកប្រឡំ) ឯឥន្ទ្រិយ ៣ ខាងចុង ជាលោកុត្តរ ។

# ឯកកមាតិកា

[៧] សមយវិមុត្តោ អសមយវិមុត្តោ កុប្បធម្មោ អកុប្បធម្មោ បរិហានធម្មោ អបរិហានធម្មោ ចេតនាភព្វោ អនុរក្ខនាភព្វោ បុថុជ្ជនោ គោត្រភូ ភយូបរតោ អភយូបរតោ ភព្វាគមនោ[១] អភព្វាគមនោ និយតោ អនិយតោ បដិបន្នកោ ផលេដ្ឋិតោ សមសីសី ឋិតកប្បី អរិយោ អនរិយោ សេក្ខោ អសេក្ខោ នេវសេក្ខោនាសេក្ខោ តេវិជ្ជោ ឆឡភិញ្ញោ

១ អភព្វាគមនោ ភព្វាគមនោតិ បាឋោ យុត្តតរោ និរុត្តិសាសនុលោម យុត្តិ ។



# ឯកកមាតិកា

[៧] បុគ្គលជាសមយវិមុត្ត (អ្នករួចស្រឡះតាមកាលគួរ) បុគ្គលជាអសមយវិមុត្ត (អ្នករួចស្រឡះចាកអាសវៈតាមកាលមិនគួរ) បុគ្គលជាកុប្បធម្មៈ (មានធម៌កម្រើក) បុគ្គលជាអកុប្បធម្មៈ (មានធម៌មិនកម្រើក) បុគ្គលជាបរិហានធម្មៈ (មានធម៌សាបសូន្យ) បុគ្គលជាអបរិហានធម្មៈ (មានធម៌មិនសាបសូន្យ) បុគ្គលជាចេតនាភព្វៈ (គួរដោយចេតនា) បុគ្គលជាអនុរក្ខនាភព្វៈ (គួរដោយការរក្សា) បុគ្គលជាបុថុជ្ជន បុគ្គលជាគោត្រភូ បុគ្គលជាភយូបរតៈ (វៀរចាកបាបដោយភ័យ) បុគ្គលជាអភយូបរតៈ (វៀរចាកបាបដោយមិនមានភ័យ) បុគ្គលជាភព្វាគមនៈ (គួរដល់កិរិយាមកកាន់សម្មត្តនិយាម គឺមគ្គ) បុគ្គលជាអភព្វាគមនៈ (មិនគួរដល់កិរិយាមកកាន់សម្មត្តនិយាម) បុគ្គលជានិយតៈ (បុគ្គលទៀង) បុគ្គលជាអនិយតៈ (បុគ្គលមិនទៀង) បុគ្គលជាបដិបន្នកៈ (បុគ្គលប្រតិបត្តិព្រមព្រៀងដោយមគ្គ) បុគ្គលជាផលេដ្ឋិតៈ (បុគ្គលឋិតនៅក្នុងផល) បុគ្គលជាសមសីសី (មានធម៌ជាប្រធានស្មើគ្នា) បុគ្គលជាឋិតកប្បី (ញុំាងកប្បឲ្យឋិតនៅ) បុគ្គលជាអរិយៈ បុគ្គលមិនមែនជាអរិយៈ បុគ្គលជាសេក្ខៈ បុគ្គលជាអសេក្ខៈ បុគ្គលមិនមែនសេក្ខៈ ទាំងមិនមែនអសេក្ខៈ បុគ្គលមានវិជ្ជា ៣ បុគ្គលមានអភិញ្ញា ៦ បុគ្គល

សម្មាសម្ពុទ្ធោ បច្ចេកសម្ពុទ្ធោ(១) ឧភតោភាគវិមុត្តោ បញ្ញាវិមុត្តោ កាយសក្ខី ទិដ្ឋិប្បត្តោ សទ្ធាវិមុត្តោ ធម្មានុសារី សទ្ធានុសារី សត្តក្ខត្តុំបរមោ កោលំកោលោ ឯកពីជី សកទាគាមី អនាគាមី អន្តរាបរិនិព្វាយី ឧបហច្ចបរិនិព្វាយី អសង្ខារបរិនិព្វាយី សសង្ខារបរិនិព្វាយី ឧទ្ធំសោតោ អកនិដ្ឋគាមី សោតាបន្នោ សោតាបត្តិផលសច្ឆិកិរិយាយ បដិបន្នោ សកទាគាមី សកទាគាមិផលសច្ឆិកិរិយាយ បដិបន្នោ អនាគាមី

១ បច្ចេកពុទ្ធោតិបិ បាឋោ ។





ជាព្រះសម្មាសម្ពុទ្ធ បុគ្គលជាព្រះបច្ចេកពុទ្ធ បុគ្គលជាឧភតោភាគវិមុត្ត (រួចស្រឡះដោយចំណែកទាំងពីរ) បុគ្គលជាបញ្ញាវិមុត្ត (រួចស្រឡះដោយបញ្ញា) បុគ្គលជាកាយសក្ខី (មានកាយជាបន្ទាល់) បុគ្គលជាទិដ្ឋិប្បត្តៈ (សម្រេចដោយទិដ្ឋិ) បុគ្គលជាសទ្ធាវិមុត្ត (រួចស្រឡះដោយសទ្ធា) បុគ្គលជាធម្មានុសារី (រលឹកតាមធម៌) បុគ្គលជាសទ្ធានុសារី (រលឹកតាមសទ្ធា) បុគ្គលជាសត្តក្ខត្តុំបរមៈ (កើតអស់វារៈ ៧ ដង) បុគ្គលជាកោលំកោលៈ (ចេញពីត្រកូលទៅកាន់ត្រកូល) បុគ្គលជាឯកពីជី (មានពូជគឺខន្ធតែមួយ) បុគ្គលជាសកទាគាមី (មកកាន់លោកនេះម្ដងទៀត) បុគ្គលជាអនាគាមី (មិនមកកាន់លោកនេះទៀត) បុគ្គលជាអន្តរាបរិនិព្វាយី (បរិនិព្វានពាក់កណ្ដាលអាយុ) បុគ្គលជាឧបហច្ចបរិនិព្វាយី (កន្លងហួសពាក់កណ្ដាលអាយុទើបបរិនិព្វាន) បុគ្គលជាអសង្ខារបរិនិព្វាយី (បរិនិព្វានដោយមិនបាច់ព្យាយាមខ្លាំង) បុគ្គលជាសសង្ខារបរិនិព្វាយី (បរិនិព្វានដោយព្យាយាមខ្លាំង) បុគ្គលជាឧទ្ធំសោតអកនិដ្ឋគាមី (មានខ្សែមគ្គទៅខាងលើរហូតដល់អកនិដ្ឋព្រហ្មហើយបរិនិព្វាន) បុគ្គលជាសោតាបន្នៈ ប្រតិបត្តិដើម្បីធ្វើឲ្យជាក់ច្បាស់នូវសោតាបត្តិផល បុគ្គលជាសកទាគាមី ប្រតិបត្តិដើម្បីធ្វើឲ្យជាក់ច្បាស់នូវសកទាគាមិផល បុគ្គលជាអនាគាមី

អនាគាមិផលសច្ឆិកិរិយាយ បដិបន្នោ អរហា អរហត្តផលសច្ឆិកិរិយាយ បដិបន្នោ ។

ឯកកមាតិកា និដ្ឋិតា ។

## ទុកមាតិកា

(៤) ទ្វេ បុគ្គលា ។ កោធនោ ច ឧបនាហី ច ។ មក្ខី ច បឡាសី ច ។ ឥស្សុកី ច មច្ឆរី ច ។ សឋោ ច មាយាវី ច ។ អហិរិកោ ច អនោត្តប្បី ច ។ ទុព្វចោ ច បាបមិត្តោ ច ។ ឥន្ទ្រិយេសុ អគុត្តទ្វារោ ច ភោជនេ អមត្តញ្ញូ ច ។ មុដ្ឋស្សតិ ច អសម្បជានោ ច ។ សីលវិបន្នោ ច ទិដ្ឋិវិបន្នោ ច ។ អជ្ឈត្តសញ្ញោជនោ ច ពហិទ្ធាសញ្ញោជនោ ច ។ អក្កោធនោ ច អនុបនាហី ច ។ អមក្ខី ច អបឡាសី ច ។ អនិស្សុកី ច អមច្ឆរី ច ។ អសឋោ ច អមាយាវី ច ។ ហិរិមា ច ឱត្តប្បី ច ។ សុវចោ ច កល្យាណមិត្តោ ច ។



ប្រតិបត្តិ ដើម្បីធ្វើឲ្យជាក់ច្បាស់ នូវអនាគាមិផល បុគ្គលជាអរហន្ត ប្រតិបត្តិ ដើម្បីធ្វើឲ្យជាក់ច្បាស់ នូវអរហត្តផល ។

ចប់ ឯកកមាតិកា ។

## ទុកមាតិកា

(៤) បុគ្គលពីរពួក ។ គឺ បុគ្គលមានសេចក្តីក្រោធ ១ បុគ្គលចងសេចក្តីក្រោធទុក ១ ។ បុគ្គលអ្នកលុបគុណគេ ១ បុគ្គលអ្នកប្រណាំងកសនា ១ ។ បុគ្គលមានសេចក្តីប្រច័ណ្ឌ ១ បុគ្គលមានសេចក្តីកំណាញ់ ១ ។ បុគ្គលមានសេចក្តីអួតអាង ១ បុគ្គលមានមាយា ១ ។ បុគ្គលមិនខ្មាសបាប ១ បុគ្គលមិនខ្លាចបាប ១ ។ បុគ្គលប្រដៅក្រ ១ បុគ្គលមានមិត្តអាក្រក់ ១ ។ បុគ្គលមានទ្វារមិនគ្រប់គ្រងនូវឥន្ទ្រិយទាំងឡាយ ១ បុគ្គលមិនដឹងប្រមាណក្នុងភោជន ១ ។ បុគ្គលភ្លេចស្មារតី ១ បុគ្គលមិនដឹងខ្លួន ១ ។ បុគ្គលវិបត្តិសីល ១ បុគ្គលវិបត្តិទិដ្ឋិ ១ ។ បុគ្គលមានសញ្ញោជនៈខាងក្នុង ១ បុគ្គលមានសញ្ញោជនៈខាងក្រៅ ១ ។ បុគ្គលមិនមានសេចក្តីក្រោធ ១ បុគ្គលមិនចងសេចក្តីក្រោធទុក ១ ។ បុគ្គលមិនលុបគុណគេ ១ បុគ្គលមិនប្រណាំងកសនា ១ ។ បុគ្គលមិនមានសេចក្តីប្រច័ណ្ឌ ១ បុគ្គលមិនមានសេចក្តីកំណាញ់ ១ ។ បុគ្គលមិនអួតអាង ១ បុគ្គលមិនមានមាយា ១ ។ បុគ្គលមានសេចក្តីខ្មាសបាប ១ បុគ្គលមានសេចក្តីខ្លាចបាប ១ ។ បុគ្គលប្រដៅងាយ ១ បុគ្គលមានមិត្តល្អ ១ ។

ឥន្ទ្រិយេសុ គុត្តទ្វារោ ច ភោជនេ មត្តញ្ញូ ច ។ ឧបដ្ឋិតស្សតិ ច សម្បជានោ ច ។ សីលសម្បន្នោ ច ទិដ្ឋិសម្បន្នោ ច ។ ទ្វេ បុគ្គលា ទុល្លភា លោកស្មឹ ។ ទ្វេ បុគ្គលា ទុត្តប្បយា ។ ទ្វេ បុគ្គលា សុតប្បយា ។ ទ្វិន្នំ បុគ្គលានំ អាសវា វឌ្ឍន្តិ ។ ទ្វិន្នំ បុគ្គលានំ អាសវា ន វឌ្ឍន្តិ ។ ហីនាធិមុត្តោ ច បណីតាធិមុត្តោ ច ។ តិត្តោ ច តប្បេតា ច ។

ទុកមាតិកា និដ្ឋិតា ។

## តិកមាតិកា

[៩] តយោ បុគ្គលា ។ និរាសោ អាសំសោ វិគតាសោ ។ តយោ គិលានូបមា បុគ្គលា ។ កាយសក្ខិ ទិដ្ឋិប្បត្តោ សទ្ធាវិមុត្តោ ។ គូថភាណី បុប្ផភាណី មធុភាណី ។ អរុកូបមចិត្តោ បុគ្គលោ វិជ្ជូបមចិត្តោ បុគ្គលោ វជិរូបមចិត្តោ បុគ្គលោ ។ អន្ធោ ឯកចក្ខុ ទ្វិចក្ខុ ។



បុគ្គលមានទ្វារគ្រប់គ្រងហើយ ក្នុងឥន្ទ្រិយទាំងឡាយ ១ បុគ្គលអ្នកដឹងប្រមាណក្នុងភោជន ១ ។ បុគ្គលមានស្មារតីតម្កល់ខ្ជាប់ ១ បុគ្គលអ្នកដឹងខ្លួន ១ ។ បុគ្គលបរិបូណ៌ដោយសីល ១ បុគ្គលបរិបូណ៌ដោយទិដ្ឋិ ១ ។ បុគ្គលពីរពួក គេបានដោយក្រក្នុងលោក ។ បុគ្គលពីរពួក គេចំអែតបានដោយក្រ ។ បុគ្គលពីរពួក គេចំអែតបានដោយងាយ ។ អាសវៈរបស់បុគ្គលពីរពួក រមែងចំរើន ។ អាសវៈរបស់បុគ្គលពីរពួក រមែងមិនចំរើន បុគ្គលមានអធ្យាស្រ័យថោកទាប ១ បុគ្គលមានអធ្យាស្រ័យខ្ពង់ខ្ពស់ ១ ។ បុគ្គលឆ្អែតដោយខ្លួនឯង ១ បុគ្គលញុំាងអ្នកដទៃឲ្យឆ្អែត ១ ។

ចប់ ទុកមាតិកា ។

## តិកមាតិកា

[៩] បុគ្គល ៣ ពួក ។ គឺបុគ្គលមិនមានបំណង ១ បុគ្គលមានបំណង ១ បុគ្គលប្រាសចាកបំណង ១ ។ បុគ្គល ៣ ពួក ប្រៀបដោយបុគ្គលមានជម្ងឺ ។ បុគ្គលជាកាយសក្ខី (មានកាយជាបន្ទាល់) ១ បុគ្គលជាទិដ្ឋិប្បត្តៈ (សម្រេចដោយទិដ្ឋិ) ១ បុគ្គលជាសទ្ធាវិមុត្ត (រួចស្រឡះចាកអាសវៈដោយសទ្ធា) ១ ។ បុគ្គលមានសំដីដូចលាមក ១ បុគ្គលមានសំដីដូចផ្កា ១ បុគ្គលមានសំដីដូចទឹកឃ្មុំ ១ ។ បុគ្គលមានចិត្តប្រៀបដោយដំបៅ ១ បុគ្គលមានចិត្តប្រៀបដោយផ្លេកបន្ទោរ ១ បុគ្គលមានចិត្តប្រៀបដោយពេជ្រ ១ ។ បុគ្គលខ្វាក់ ១ បុគ្គលមានភ្នែកម្ខាង ១ បុគ្គលមានភ្នែកទាំងពីរ ១ ។

អត្ថេកច្ចោ បុគ្គលោ សីលេសុ បរិបូរការី ស-មាធិស្មឹ មត្តសោការី បញ្ញាយ មត្តសោការី អត្ថេ-កច្ចោ បុគ្គលោ សីលេសុ ច បរិបូរការី សមាធិស្មឹ ច បរិបូរការី បញ្ញាយ មត្តសោការី អត្ថេកច្ចោ បុគ្គលោ សីលេសុ ច បរិបូរការី សមាធិស្មឹ ច បរិបូរការី បញ្ញាយ ច បរិបូរការី ។ ឥមេ តយោ សត្ថា-រោ អបរេបិ តយោ សត្ថារោ ។

តិកមាតិកា និដ្ឋិតា ។

## ចតុក្កមាតិកា

( ១០ ) ចត្តារោ បុគ្គលា ។ អសប្បុរិសោ អសប្បុរិសេន អសប្បុរិសតរោ សប្បុរិសោ សប្បុរិ-សេន សប្បុរិសតរោ ។ បាបោ បាបេន បាបតរោ កល្យាណោ កល្យាណេន កល្យាណតរោ ។ បាបធម្មោ បាបធម្មេន បាបធម្មតរោ កល្យាណ-ធម្មោ កល្យាណធម្មេន កល្យាណធម្មតរោ ។ សាវជ្ជោ វជ្ជពហុលោ អប្បសាវជ្ជោ អនវជ្ជោ ។



ធិ ក៏មាន១ ។ បុគ្គលខ្លះធ្វើពេញលេញក្នុងសីល តែធ្វើបន្តិចបន្តួចក្នុងសមាធិ ធ្វើបន្តិចបន្តួចក្នុងបញ្ញា ក៏មាន១ បុគ្គលខ្លះធ្វើពេញលេញក្នុងសីលផង ធ្វើពេញលេញក្នុងសមាធិផង តែធ្វើបន្តិចបន្តួចក្នុងបញ្ញា ក៏មាន១ បុគ្គលខ្លះធ្វើពេញលេញក្នុងសីលផង ធ្វើពេញលេញក្នុងសមាធិផង ធ្វើពេញលេញក្នុងបញ្ញាផង ក៏មាន១ ។ បុគ្គលជាគ្រូមាន ៣ ពួក បុគ្គលជាគ្រូ ៣ ពួក ដទៃទៀត ។

ចប់ តិកមាតិកា ។

## ចតុក្កមាតិកា

( ១០ ) បុគ្គល ៤ ពួក ។ គឺ បុគ្គលជាអសប្បុរស១ បុគ្គលជាអសប្បុរសក្រៃលែងជាងអសប្បុរស១ បុគ្គលជាសប្បុរស១ បុគ្គលជាសប្បុរសក្រៃលែងជាងសប្បុរស១ ។ បុគ្គលអាក្រក់១ បុគ្គលអាក្រក់ក្រៃលែងជាងបុគ្គលអាក្រក់១ បុគ្គលល្អ១ បុគ្គលល្អក្រៃលែងជាងបុគ្គលល្អ១ ។ បុគ្គលមានធម៌អាក្រក់១ បុគ្គលមានធម៌អាក្រក់ក្រៃលែងជាងបុគ្គលមានធម៌អាក្រក់១ បុគ្គលមានធម៌ល្អ១ បុគ្គលមានធម៌ល្អក្រៃលែងជាងបុគ្គលមានធម៌ល្អ១ ។ បុគ្គលប្រកបដោយទោស១ បុគ្គលច្រើនដោយទោស១ បុគ្គលប្រកបដោយទោសតិច១ បុគ្គលមិនមានទោស១ ។

ឧគ្ឃដិតញ្ញូ វិបចិតញ្ញូ នេយ្យោ បទបរមោ ។ យុត្តប្បដិភាណោ នោ មុត្តប្បដិភាណោ មុត្តប្បដិភាណោ នោ យុត្តប្បដិភាណោ យុត្តប្បដិភាណោ ច មុត្តប្បដិភាណោ ច នេវ យុត្តប្បដិភាណោ នោ មុត្តប្បដិភាណោ ។ ចត្តារោ ធម្មកថិកា បុគ្គលា ។ ចត្តារោ វលាហកូបមា បុគ្គលា ។ ចត្តារោ មូសិកូបមា បុគ្គលា ។ ចត្តារោ អម្ពូបមា បុគ្គលា ។ ចត្តារោ កុម្ភូបមា បុគ្គលា ។ ចត្តារោ ឧទករហទូបមា បុគ្គលា ។ ចត្តារោ ពលិពទ្ទូបមា បុគ្គលា ។ ចត្តារោ អាសីវិសូបមា បុគ្គលា ។ អត្ថេកច្ចោ បុគ្គលោ អននុវិច្ច អបរិយោគាហេត្វា អវណ្ណារហស្ស វណ្ណំ ភាសិតា ហោតិ អត្ថេកច្ចោ បុគ្គលោ អននុវិច្ច អបរិយោគាហេត្វា វណ្ណារហស្ស អវណ្ណំ ភាសិតា ហោតិ អត្ថេកច្ចោ បុគ្គលោ អននុវិច្ច អបរិយោគាហេត្វា អប្បសាទនីយេ ឋានេ បសាទំ ឧបទំសិតា ហោតិ អត្ថេកច្ចោ បុគ្គលោ អននុវិច្ច អបរិយោគាហេត្វា បសាទនីយេ ឋានេ អប្បសាទំ ឧបទំសិតា ហោតិ ។



បុគ្គលជាឧគ្ឃដិតញ្ញូ ១ បុគ្គលជាវិបចិតញ្ញូ ១ បុគ្គលជានេយ្យៈ ១ បុគ្គលជាបទបរមៈ ១ ។ បុគ្គលមានប្រាជ្ញាគួរ តែឥតប្រាជ្ញាមិនស្រាក់ ១ បុគ្គលមានប្រាជ្ញាស្រាក់ តែមានប្រាជ្ញាមិនគួរ ១ បុគ្គលមានប្រាជ្ញាគួរ ទាំងមានប្រាជ្ញាស្រាក់ ១ បុគ្គលមានប្រាជ្ញាមិនគួរ ទាំងមានប្រាជ្ញាមិនស្រាក់ ១ ។ បុគ្គលជាធម្មកថិក ៤ ពួក ។ បុគ្គល ៤ ពួក ប្រៀបដោយមេឃ ។ បុគ្គល ៤ ពួក ប្រៀបដោយកណ្ដុរ ។ បុគ្គល ៤ ពួក ប្រៀបដោយផ្លែស្វាយ ។ បុគ្គល ៤ ពួក ប្រៀបដោយក្អម ។ បុគ្គល ៤ ពួក ប្រៀបដោយអន្លង់ទឹក ។ បុគ្គល ៤ ពួក ប្រៀបដោយគោបម្រើ ។ បុគ្គល ៤ ពួក ប្រៀបដោយសត្វអាសិរពិស ។ បុគ្គលខ្លះ មិនពិចារណា មិនស្ទង់មើល ហើយពោលសរសើរបុគ្គលដែលគួរតិះដៀល ក៏មាន ១ បុគ្គលខ្លះ មិនពិចារណា មិនស្ទង់មើល ហើយពោលតិះដៀលបុគ្គលដែលគួរសរសើរ ក៏មាន ១ បុគ្គលខ្លះ មិនពិចារណា មិនស្ទង់មើល ហើយសំដែងសេចក្ដីជ្រះថ្លា ក្នុងទីដែលមិនគួរជ្រះថ្លា ក៏មាន ១ បុគ្គលខ្លះ មិនពិចារណា មិនស្ទង់មើល ហើយសំដែងសេចក្ដីមិនជ្រះថ្លា ក្នុងទីដែលគួរជ្រះថ្លា ក៏មាន ១ ។ បុគ្គលខ្លះ

អត្ថេកច្ចោ បុគ្គលោ អនុវិច្ច បរិយោគាហេត្វា
អវណ្ណារហស្ស អវណ្ណំ ភាសិតា ហោតិ អត្ថេកច្ចោ
បុគ្គលោ អនុវិច្ច បរិយោគាហេត្វា វណ្ណារហស្ស វណ្ណំ
ភាសិតា ហោតិ អត្ថេកច្ចោ បុគ្គលោ អនុវិច្ច បរិយោ-
គាហេត្វា អប្បសាទនីយេ ឋានេ អប្បសាទំ ឧបទំសិតា
ហោតិ អត្ថេកច្ចោ បុគ្គលោ អនុវិច្ច បរិយោគាហេត្វា
បសាទនីយេ ឋានេ បសាទំ ឧបទំសិតា ហោតិ ។
អត្ថេកច្ចោ បុគ្គលោ អវណ្ណារហស្ស អវណ្ណំ ភាសិតា
ហោតិ ភូតំ តច្ឆំ កាលេន នោ ច ខោ វណ្ណា-
រហស្ស វណ្ណំ ភាសិតា ហោតិ ភូតំ តច្ឆំ កាលេន
អត្ថេកច្ចោ បុគ្គលោ វណ្ណារហស្ស វណ្ណំ ភាសិតា
ហោតិ ភូតំ តច្ឆំ កាលេន នោ ច ខោ អវណ្ណារ-
ហស្ស អវណ្ណំ ភាសិតា ហោតិ ភូតំ តច្ឆំ កាលេន
អត្ថេកច្ចោ បុគ្គលោ អវណ្ណារហស្ស ច អវណ្ណំ
ភាសិតា ហោតិ ភូតំ តច្ឆំ កាលេន វណ្ណារហស្ស
ច វណ្ណំ ភាសិតា ហោតិ ភូតំ តច្ឆំ កាលេន



ពិចារណា ស្ទង់មើល ហើយពោលតិះដៀលបុគ្គលដែលគួរតិះដៀល
ក៏មាន ១ បុគ្គលខ្លះ ពិចារណា ស្ទង់មើល ហើយពោលសរសើរបុគ្គល
ដែលគួរសរសើរ ក៏មាន ១ បុគ្គលខ្លះ ពិចារណា ស្ទង់មើល ហើយ
សំដែងសេចក្តីមិនជ្រះថ្លា ក្នុងទីដែលមិនគួរជ្រះថ្លា ក៏មាន ១ បុគ្គលខ្លះ
ពិចារណា ស្ទង់មើល ហើយសំដែងសេចក្តីជ្រះថ្លា ក្នុងទីដែលគួរ
ជ្រះថ្លា ក៏មាន ១ ។ បុគ្គលខ្លះ ពោលតិះដៀលបុគ្គលដែលមិនគួរតិះ
ដៀល ពិតប្រាកដតាមកាលគួរ តែមិនពោលសរសើរបុគ្គលដែលគួរ
សរសើរ ពិតប្រាកដតាមកាលគួរ ក៏មាន ១ បុគ្គលខ្លះ ពោលសរសើរ
បុគ្គលដែលគួរសរសើរ ពិតប្រាកដតាមកាលគួរ តែមិនពោលតិះដៀល
បុគ្គលដែលគួរតិះដៀល ពិតប្រាកដតាមកាលគួរ ក៏មាន ១ បុគ្គល
ខ្លះ ពោលតិះដៀលបុគ្គលដែលគួរតិះដៀល ពិតប្រាកដតាមកាលគួរផង
ពោលសរសើរបុគ្គលដែលគួរសរសើរ ពិតប្រាកដតាមកាលគួរផង ក៏មាន

ឥធេកច្ចោ បុគ្គលោ នេវ អវណ្ណារហស្ស អវណ្ណំ ភាសិតា ហោតិ ភូតំ តច្ឆំ កាលេន នោ ច វណ្ណារហស្ស វណ្ណំ ភាសិតា ហោតិ ភូតំ តច្ឆំ កាលេន ។ ឧដ្ឋានផលូបជីវី នោ បុញ្ញផលូបជីវី បុញ្ញផលូបជីវី នោ ឧដ្ឋានផលូបជីវី ឧដ្ឋានផលូបជីវី ច បុញ្ញផលូបជីវី ច នេវ ឧដ្ឋានផលូបជីវី នោ បុញ្ញផលូបជីវី ។ តមោ តមបរាយណោ តមោ ជោតិបរាយណោ ជោតិ តមបរាយណោ ជោតិ ជោតិបរាយណោ ។ ឱណតោណតោ ឱណតុណ្ណតោ ឧណ្ណតោណតោ ឧណ្ណតុណ្ណតោ ។ ចត្តារោ រុក្ខូបមា បុគ្គលា ។ រូបប្បមាណោ រូបប្បសន្នោ ឃោសប្បមាណោ ឃោសប្បសន្នោ លូខប្បមាណោ លូខប្បសន្នោ ធម្មប្បមាណោ ធម្មប្បសន្នោ ។ ឥធេកច្ចោ បុគ្គលោ អត្តហិតាយ បដិបន្នោ ហោតិ នោ បរហិតាយ



បុគ្គលខ្លះ មិនពោលតិះដៀលបុគ្គលដែលគួរតិះដៀល ពិតប្រាកដតាមកាលគួរផង មិនពោលសរសើរបុគ្គលដែលគួរសរសើរ ពិតប្រាកដតាមកាលគួរផង ក៏មាន ១ ។ បុគ្គលចិញ្ចឹមជីវិតដោយផលនៃការព្យាយាម មិនចិញ្ចឹមជីវិត ដោយផលនៃបុណ្យ ១ បុគ្គលចិញ្ចឹមជីវិតដោយផលនៃបុណ្យមិនចិញ្ចឹមជីវិត ដោយផលនៃការព្យាយាម ១ បុគ្គលចិញ្ចឹមជីវិតដោយផលនៃការព្យាយាម ផងចិញ្ចឹមជីវិតដោយផលនៃបុណ្យ ១ បុគ្គលមិនចិញ្ចឹមជីវិត ដោយផលនៃការព្យាយាម ផងមិនចិញ្ចឹមជីវិត ដោយផលនៃបុណ្យ ១ ។ បុគ្គលងងឹត មានងងឹតប្រព្រឹត្តទៅខាងមុខ ១ បុគ្គលងងឹត មានពន្លឺប្រព្រឹត្តទៅខាងមុខ ១ បុគ្គលភ្លឺ មានងងឹតប្រព្រឹត្តទៅខាងមុខ ១ បុគ្គលភ្លឺ មានពន្លឺប្រព្រឹត្តទៅខាងមុខ ១ ។ បុគ្គលឱនចុះ ហើយឱនចុះទៀត ១ បុគ្គលឱនចុះហើយងើបឡើង ១ បុគ្គលងើបឡើង ហើយឱនចុះវិញ ១ បុគ្គលងើបឡើងហើយងើបឡើងទៀត ១ ។ បុគ្គល ៤ ពួក ប្រៀបដោយដើមឈើ ។ បុគ្គលមានរូបជាប្រមាណ ជ្រះថ្លាព្រោះរូប ១ បុគ្គលមានសំឡេងជាប្រមាណ ជ្រះថ្លាព្រោះសំឡេង ១ បុគ្គលមានវត្ថុសៅហ្មងជាប្រមាណ ជ្រះថ្លាព្រោះវត្ថុសៅហ្មង ១ បុគ្គលមានធម៌ជាប្រមាណ ជ្រះថ្លាព្រោះធម៌ ១ ។ បុគ្គលខ្លះប្រតិបត្តិ ដើម្បីប្រយោជន៍ខ្លួន តែមិនប្រតិបត្តិ ដើម្បីប្រយោជន៍បុគ្គលដទៃ

អត្ថេកច្ចោ បុគ្គលោ លាភី ហោតិ អធិប្បញ្ញា-ធម្មវិបស្សនាយ ន លាភី អជ្ឈត្តំ ចេតោសមថស្ស អត្ថេកច្ចោ បុគ្គលោ លាភី ចេវ ហោតិ អជ្ឈត្តំ ចេតោសមថស្ស លាភី ច អធិប្បញ្ញាធម្មវិបស្សនាយ អត្ថេកច្ចោ បុគ្គលោ នេវ លាភី ហោតិ អជ្ឈត្តំ ចេតោសមថស្ស ន លាភី អធិប្បញ្ញាធម្មវិបស្សនាយ ។ អនុសោតគាមី បុគ្គលោ បដិសោតគាមី បុគ្គលោ ឋិតត្តោ បុគ្គលោ តិណ្ណោ បារគតោ ថលេ តិដ្ឋតិ ព្រាហ្មណោ ។ អប្បស្សុតោ សុតេន អនុបបន្នោ អប្បស្សុតោ សុតេន ឧបបន្នោ ពហុស្សុតោ សុតេន អនុបបន្នោ ពហុស្សុតោ សុតេន ឧបបន្នោ ។ សមណមចលោ សមណបទុមោ សមណបុណ្ឌរីកោ សមណេសុ សមណសុខុមាលោ ។

ចតុក្កមាតិកា និដ្ឋិតា ។

## បញ្ចកមាតិកា

[១១] បញ្ច បុគ្គលា ។ អត្ថេកច្ចោ បុគ្គលោ អារព្ភតិ[១] ច វិប្បដិសារី ច ហោតិ តញ្ច ចេតោវិមុត្តិ

១ ឱ. ម. អារភតិ ។



បុគ្គលខ្លះ ជាអ្នកបានអធិប្បញ្ញាធម្មវិបស្សនា មិនបានចេតោសមថៈក្នុងសន្តាន ក៏មាន ១ បុគ្គលខ្លះ ជាអ្នកបានចេតោសមថៈក្នុងសន្តាន ទាំងបានអធិប្បញ្ញាធម្មវិបស្សនា ក៏មាន ១ បុគ្គលខ្លះ ជាអ្នកមិនបានចេតោសមថៈក្នុងសន្តាន ទាំងមិនបានអធិប្បញ្ញាធម្មវិបស្សនា ក៏មាន ១ ។ បុគ្គលទៅបណ្តោយតាមខ្សែទឹក គឺវដ្តៈ ១ បុគ្គលទៅច្រាសខ្សែទឹក គឺវដ្តៈ ១ បុគ្គលមានខ្លួនតាំងនៅនឹង ១ បុគ្គលឆ្លងទៅដល់ត្រើយ ជាព្រាហ្មណ៍ឋិតនៅលើគោក ១ ។ បុគ្គលជាអ្នកចេះដឹងតិច មិនប្រតិបត្តិតាមដោយសេចក្តីចេះដឹង ១ បុគ្គលជាអ្នកចេះដឹងតិច តែប្រតិបត្តិតាមសេចក្តីចេះដឹង ១ បុគ្គលជាអ្នកចេះដឹងច្រើន មិនប្រតិបត្តិ តាមសេចក្តីចេះដឹង ១ បុគ្គលចេះដឹងច្រើន ប្រតិបត្តិតាមសេចក្តីចេះដឹង ១ ។ បុគ្គលជាសមណៈមិនកម្រើក ១ បុគ្គលជាសមណៈដូចផ្កាឈូកក្រហម ១ បុគ្គលជាសមណៈដូចផ្កាឈូកស ១ បុគ្គលជាសមណៈចម្រើនដោយសុខ ក្នុងពួកសមណៈ ១ ។

ចប់ ចតុក្កមាតិកា ។

## បញ្ចកមាតិកា

[១១] បុគ្គល ៥ ពួក ។ គឺបុគ្គលខ្លះ ប្រព្រឹត្តល្មើស (ត្រូវអាបត្តិ) ផង មានសេចក្តីក្តៅក្រហាយផង មិនដឹងច្បាស់តាមពិត នូវចេតោវិមុត្តិ

បញ្ញាវិមុត្តឹ យថាភូតំ នប្បជានាតិ យត្ថស្ស តេ ឧប្បន្នា បាបកា អកុសលា ធម្មា អបរិសេសា និរុជ្ឈន្តិ អញ្ញតរោ បុគ្គលោ អារព្ភតិ ន វិប្បដិសារី ហោតិ តញ្ច ចេតោវិមុត្តឹ បញ្ញាវិមុត្តឹ យថាភូតំ នប្បជានាតិ យត្ថស្ស តេ ឧប្បន្នា បាបកា អកុសលា ធម្មា អបរិសេសា និរុជ្ឈន្តិ អញ្ញតរោ បុគ្គលោ នារព្ភតិ វិប្បដិសារី ហោតិ តញ្ច ចេតោវិមុត្តឹ បញ្ញាវិមុត្តឹ យថាភូតំ នប្បជានាតិ យត្ថស្ស តេ ឧប្បន្នា បាបកា អកុសលា ធម្មា អបរិសេសា និរុជ្ឈន្តិ អញ្ញតរោ បុគ្គលោ នារព្ភតិ ន វិប្បដិសារី ហោតិ តញ្ច ចេតោវិមុត្តឹ បញ្ញាវិមុត្តឹ យថាភូតំ នប្បជានាតិ យត្ថស្ស តេ ឧប្បន្នា បាបកា អកុសលា ធម្មា អបរិសេសា និរុជ្ឈន្តិ អញ្ញតរោ បុគ្គលោ នារព្ភតិ ន វិប្បដិសារី ហោតិ តញ្ច ចេតោវិមុត្តឹ បញ្ញាវិមុត្តឹ យថាភូតំ បជានាតិ យត្ថស្ស តេ ឧប្បន្នា បាបកា អកុសលា ធម្មា អបរិសេសា និរុជ្ឈន្តិ ។



និងបញ្ញាវិមុត្តិនោះ ដែលជាហេតុធ្វើឲ្យពួកអកុសលធម៌លាមកទាំងនោះ របស់បុគ្គលនោះ ដែលកើតឡើងហើយ ឲ្យរលត់ទៅវិញ មិនមានសេសសល់ផង គឺមាន ១ បុគ្គលខ្លះ ប្រព្រឹត្តល្មើស មិនមានសេចក្តីក្តៅក្រហាយ ទាំងមិនដឹងច្បាស់តាមពិត នូវចេតោវិមុត្តិ និងបញ្ញាវិមុត្តិនោះ ដែលជាហេតុធ្វើឲ្យពួកអកុសលធម៌លាមកទាំងនោះ របស់បុគ្គលនោះ ដែលកើតឡើងហើយ ឲ្យរលត់ទៅវិញ មិនមានសេសសល់ គឺមាន ១ បុគ្គលខ្លះ មិនប្រព្រឹត្តល្មើសទេ មានសេចក្តីក្តៅក្រហាយ ទាំងមិនដឹងច្បាស់តាមពិត នូវចេតោវិមុត្តិនិងបញ្ញាវិមុត្តិនោះ ដែលជាហេតុធ្វើឲ្យអកុសលធម៌លាមកទាំងនោះ របស់បុគ្គលនោះ ដែលកើតឡើងហើយ ឲ្យរលត់ទៅវិញ មិនមានសេសសល់ គឺមាន ១ បុគ្គលខ្លះ មិនប្រព្រឹត្តល្មើស មិនមានសេចក្តីក្តៅក្រហាយទេ មិនដឹងច្បាស់តាមពិត នូវចេតោវិមុត្តិនិងបញ្ញាវិមុត្តិនោះ ដែលជាហេតុធ្វើឲ្យអកុសលធម៌លាមកទាំងនោះ របស់បុគ្គលនោះ ដែលកើតឡើងហើយឲ្យរលត់ទៅវិញ មិនមានសេសសល់ គឺមាន ១ បុគ្គលខ្លះ មិនប្រព្រឹត្តល្មើស មិនមានសេចក្តីក្តៅក្រហាយផង ដឹងច្បាស់តាមពិត នូវចេតោវិមុត្តិនិងបញ្ញាវិមុត្តិនោះ ដែលជាហេតុធ្វើអកុសលធម៌លាមកទាំងនោះ របស់បុគ្គលនោះ ដែលកើតឡើងហើយ ឲ្យរលត់ទៅវិញ មិនមានសេសសល់ផង គឺមាន ១ ។

ទត្វា អវជានាតិ សំវាសេន អវជានាតិ អាធេយ្យមុខោ ហោតិ លោលោ ហោតិ មន្ទោ មោមូហោ ហោតិ ។ បញ្ច យោធាជីវូបមា បុគ្គលា ។ បញ្ច បិណ្ឌបាតិកា ។ បញ្ច ខលុបច្ឆាភត្តិកា ។ បញ្ច ឯកាសនិកា ។ បញ្ច បំសុកូលិកា ។ បញ្ច តេចីវរិកា ។ បញ្ច អារញ្ញិកា ។ បញ្ច រុក្ខមូលិកា ។ បញ្ច អព្ភោកាសិកា ។ បញ្ច នេសជ្ជិកា ។ បញ្ច យថាសន្ថតិកា ។ បញ្ច សោសានិកា ។

បញ្ចកមាតិកា និដ្ឋិតា ។

## ឆក្កមាតិកា

(១៤) ឆ បុគ្គលា ។ អត្ថេកច្ចោ បុគ្គលោ បុព្វេ អននុស្សុតេសុ ធម្មេសុ សាមំ សច្ចានិ អភិសម្ពុជ្ឈតិ តត្ថ ច សព្វញ្ញុតំ បាបុណាតិ ពលេសុ ច វសីភាវំ



បុគ្គលឲ្យហើយត្រឡប់មើលងាយវិញ ១ បុគ្គលមើលងាយព្រោះការនៅរួម ១ បុគ្គលមានមាត់គាំទុកត្រាម ១ បុគ្គលលេះលោះ ១ បុគ្គលទន់អន់ល្ងង់ខ្លៅ ១ ។ បុគ្គល ៥ ពួក ប្រៀបដោយទាហាន ។ បុគ្គល ៥ ពួក ជាអ្នកប្រព្រឹត្តបិណ្ឌបាតិកធុតង្គ ។ បុគ្គល ៥ ពួក ជាអ្នកប្រព្រឹត្តខលុបច្ឆាភត្តិកធុតង្គ ។ បុគ្គល ៥ ពួក ជាអ្នកប្រព្រឹត្តឯកាសនិកធុតង្គ ។ បុគ្គល ៥ ពួក ជាអ្នកប្រព្រឹត្តបំសុកូលិកធុតង្គ ។ បុគ្គល ៥ ពួក ជាអ្នកប្រព្រឹត្តតេចីវរិកធុតង្គ ។ បុគ្គល៥ ពួក ជាអ្នកប្រព្រឹត្តអារញ្ញិកធុតង្គ ។ បុគ្គល ៥ ពួក ជាអ្នកប្រព្រឹត្តរុក្ខមូលិកធុតង្គ ។ បុគ្គល ៥ ពួក ជាអ្នកប្រព្រឹត្តអព្ភោកាសិកធុតង្គ ។ បុគ្គល ៥ ពួក ជាអ្នកប្រព្រឹត្តនេសជ្ជិកធុតង្គ ។ បុគ្គល ៥ ពួក ជាអ្នកប្រព្រឹត្តយថាសន្ថតិកធុតង្គ ។ បុគ្គល ៥ ពួក ជាអ្នកប្រព្រឹត្តសោសានិកធុតង្គ ។

ចប់ បញ្ចកមាតិកា ។

## ឆក្កមាតិកា

(១៤) បុគ្គល ៦ ពួក ។ គឺបុគ្គលខ្លះ ត្រាស់ដឹងដោយខ្លួនឯង នូវសច្ចៈ ក្នុងធម៌ដែលខ្លួនមិនធ្លាប់ស្តាប់ក្នុងកាលមុន ក៏ដល់នូវសព្វញ្ញុតញ្ញាណក្នុងធម៌ទាំងនោះផង ដល់នូវភាពស្ទាត់ក្នុងទសពលញ្ញាណផង

ឥធេកច្ចោ បុគ្គលោ បុព្វេ អននុស្សុតេសុ ធម្មេសុ សាមំ សច្ចានិ អភិសម្ពុជ្ឈតិ ន ច តត្ថ សព្វញ្ញុតំ បាបុណាតិ ន ច ពលេសុ(១) វសីភាវំ ឥធេកច្ចោ បុគ្គលោ បុព្វេ អននុស្សុតេសុ ធម្មេសុ សាមំ សច្ចានិ អនភិសម្ពុជ្ឈតិ(២) ទិដ្ឋេ ធម្មេ ទុក្ខស្សន្តករោ ហោតិ សាវកបារមិញ្ច បាបុណាតិ ឥធេកច្ចោ បុគ្គលោ បុព្វេ អននុស្សុតេសុ ធម្មេសុ សាមំ សច្ចានិ អនភិសម្ពុជ្ឈតិ(២) ទិដ្ឋេ ធម្មេ ទុក្ខស្សន្តករោ ហោតិ ន ច សាវកបារមី បាបុណាតិ ឥធេកច្ចោ បុគ្គលោ បុព្វេ អននុស្សុតេសុ ធម្មេសុ សាមំ សច្ចានិ អនភិសម្ពុជ្ឈតិ(២) ន ច ទិដ្ឋេ ធម្មេ ទុក្ខស្សន្តករោ ហោតិ អនាគាមី ហោតិ អនាគន្តា ឥត្ថត្តំ ឥធេកច្ចោ បុគ្គលោ បុព្វេ អននុស្សុតេសុ ធម្មេសុ សាមំ សច្ចានិ អនភិសម្ពុជ្ឈតិ(២) ន ច ទិដ្ឋេ ធម្មេ ទុក្ខស្សន្តករោ ហោតិ សោតាបន្នសកទាគាមី ហោតិ អាគន្តា ឥត្ថត្តំ ។

ឆក្កមាតិកា និដ្ឋិតា ។

---

១ ម. ពលេសុ ច វសីភាវំ ។ ២ ម. សច្ចានិ អភិសម្ពុជ្ឈតិ វសីភាវោ ។



ក៏មាន១ បុគ្គលខ្លះ ត្រាស់ដឹងដោយខ្លួនឯង នូវសច្ចៈ ក្នុងធម៌ដែលខ្លួនមិនធ្លាប់ស្តាប់ក្នុងកាលមុន មិនដល់នូវសព្វញ្ញុតញ្ញាណ ក្នុងធម៌ទាំងនោះផង មិនដល់នូវភាពស្ទាត់ក្នុងទសពលញ្ញាណផង ក៏មាន១ បុគ្គលខ្លះ មិនត្រាស់ដឹងដោយខ្លួនឯង នូវសច្ចៈ ក្នុងធម៌ដែលខ្លួនមិនធ្លាប់ស្តាប់ ក្នុងកាលមុន ក៏ធ្វើនូវទីបំផុតទុក្ខក្នុងបច្ចុប្បន្នផង ដល់នូវសាវកបារមីញាណផង ក៏មាន១ បុគ្គលខ្លះ មិនត្រាស់ដឹងដោយខ្លួនឯង នូវសច្ចៈ ក្នុងធម៌ដែលខ្លួនមិនធ្លាប់ស្តាប់ក្នុងកាលមុន ក៏ធ្វើនូវទីបំផុតទុក្ខក្នុងបច្ចុប្បន្ន មិនដល់នូវសាវកបារមីញាណ ក៏មាន១ បុគ្គលខ្លះ មិនត្រាស់ដឹងដោយខ្លួនឯង នូវសច្ចៈ ក្នុងធម៌ដែលខ្លួនមិនធ្លាប់ស្តាប់ក្នុងកាលមុន មិនធ្វើនូវទីបំផុតទុក្ខក្នុងបច្ចុប្បន្នទេ ជាអនាគាមិបុគ្គល មិនមកកាន់មនុស្សលោកនេះ ក៏មាន១ បុគ្គលខ្លះ មិនត្រាស់ដឹងដោយខ្លួនឯង នូវសច្ចៈ ក្នុងធម៌ដែលខ្លួនមិនធ្លាប់ស្តាប់ក្នុងកាលមុន មិនធ្វើនូវទីបំផុតទុក្ខក្នុងបច្ចុប្បន្នទេ ជាសោតាបន្នបុគ្គល និងសកទាគាមិបុគ្គល មកកាន់មនុស្សលោកនេះទៀត ក៏មាន១ ។

ចប់ ឆក្កមាតិកា ។

## សត្តកមាតិកា

(១៣) សត្ត បុគ្គលា ។ សត្ត ឧទកូបមា បុគ្គលា សកឹ និមុគ្គោ និមុគ្គោវ ហោតិ ឧម្មុជ្ជិត្វា និមុជ្ជតិ ឧម្មុជ្ជិត្វា ឋិតោ ហោតិ ឧម្មុជ្ជិត្វា វិបស្សតិ វិលោកេតិ ឧម្មុជ្ជិត្វា បតរតិ ឧម្មុជ្ជិត្វា បដិគាធប្បត្តោ ហោតិ ឧម្មុជ្ជិត្វា តិណ្ណោ ហោតិ បារគតោ ថលេ តិដ្ឋតិ ព្រាហ្មណោ ។ ឧភតោភាគវិមុត្តោ បញ្ញាវិមុត្តោ កាយសក្ខី ទិដ្ឋិប្បត្តោ សទ្ធាវិមុត្តោ ធម្មានុសារី សទ្ធានុសារី ។

សត្តកមាតិកា និដ្ឋិតា ។

## អដ្ឋកមាតិកា

(១៤) អដ្ឋ បុគ្គលា ។ ចត្តារោ មគ្គសមង្គិនោ ចត្តារោ ផលសមង្គិនោ បុគ្គលា ។

អដ្ឋកមាតិកា និដ្ឋិតា ។



## សត្តកមាតិកា

(១៣) បុគ្គល ៧ ពួក ។ គឺបុគ្គល ៧ ពួក ប្រៀបដោយទឹក គឺ បុគ្គលមុជចុះតែម្តងហើយចេះតែមុជចុះទៅទៀត ១ បុគ្គលងើបឡើងហើយមុជចុះទៅវិញ ១ បុគ្គលងើបឡើងហើយឋិតនៅ ១ បុគ្គលងើបឡើងហើយ មើលមើល ក្រឡេកមើល ១ បុគ្គលងើបឡើងហើយហែលទៅ ១ បុគ្គលងើបឡើង ដល់កំពង់ ហើយឋិតនៅ ១ បុគ្គលងើបឡើង ឆ្លងដល់ត្រើយ ជាព្រាហ្មណ៍ឋិតនៅលើគោក ១ ។ បុគ្គលជាឧភតោភាគវិមុត្ត ១ បុគ្គលជាបញ្ញាវិមុត្ត ១ បុគ្គលជាកាយសក្ខី ១ បុគ្គលជាទិដ្ឋិប្បត្តៈ ១ បុគ្គលជាសទ្ធាវិមុត្ត ១ បុគ្គលជាធម្មានុសារី ១ បុគ្គលជាសទ្ធានុសារី ១ ។

ចប់ សត្តកមាតិកា ។

## អដ្ឋកមាតិកា

(១៤) បុគ្គល ៨ ពួក ។ គឺបុគ្គល ៤ ពួក ព្រមព្រៀងដោយមគ្គ បុគ្គល ៤ ពួក ព្រមព្រៀងដោយផល ។

ចប់ អដ្ឋកមាតិកា ។

# ឯកកនិទ្ទេសោ

[ ១៧ ] កតមោ ច បុគ្គលោ សមយវិមុត្តោ ។ ឥធេកច្ចោ បុគ្គលោ កាលេន កាលំ សមយេន សមយំ អដ្ឋ វិមោក្ខេ កាយេន ផុសិត្វា វិហរតិ បញ្ញាយ ចស្ស ទិស្វា ឯកច្ចេ អាសវា បរិក្ខីណា ហោន្តិ អយំ វុច្ចតិ បុគ្គលោ សមយវិមុត្តោ ។



# ឯកកនិទ្ទេស

[ ១៧ ] បុគ្គលជាសមយវិមុត្ត តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ បានវិមោក្ខ ៨[១] ដោយនាមកាយ តាមកាលគួរ[២] តាមសម័យគួរ អាសវៈពួកខ្លះ របស់បុគ្គលនោះ ក៏បានអស់ទៅ ព្រោះឃើញដោយបញ្ញា[៣] នេះហៅថា បុគ្គលជាសមយវិមុត្ត[៤] ។

---

១ សមាបត្តិ ៨ ជារូបាវចរនិងអរូបាវចរ គឺរូបជ្ឈាន ៤ អរូបជ្ឈាន ៤ ឈ្មោះថាវិមោក្ខ ព្រោះរួចស្រឡះចាកធម៌ជាសត្រូវនៃសមាបត្តិទាំងនោះ ។ ២ បុគ្គលប្រាថ្នានឹងចូលសមាបត្តិមានកាល ២ គឺកាលគួរ ១ កាលមិនគួរ ១ ។ កាលដែលកំពុងជម្រះសរីរៈព្រលឹមនិងកាលកំពុងធ្វើវត្ត ឈ្មោះថាកាលមិនគួរ កាលដែលជម្រះសរីរៈហើយ ធ្វើវត្តហើយ ចូលទៅអង្គុយក្នុងលំនៅហើយ មិនទាន់ដល់កាលទៅបិណ្ឌបាតនៅឡើយ ក្នុងចន្លោះនេះ ឈ្មោះថាកាលគួរ ។ មួយទៀត ភិក្ខុកំណត់កាលនឹងចេញទៅបិណ្ឌបាត ហើយកំពុងថ្វាយបង្គំចេតិយ កាលដែលភិក្ខុមានភិក្ខុសង្ឃ ចោមរោមកំពុងឈរក្នុងរោងសម្រាប់ធ្វើវិតក្កៈ កាលកំពុងទៅបិណ្ឌបាត កាលកំពុងត្រាច់ទៅក្នុងស្រុក កាលកំពុងឆាន់បបរ ក្នុងអាសនសាលា និងកាលកំពុងធ្វើវត្ត ទាំងអស់នេះ ឈ្មោះថាកាលមិនគួរ កាលដែលមានឱកាសស្ងាត់ក្នុងអាសនសាលា មិនទាន់ដល់ពេលភត្តកាល (ពេលឆាន់) នៅឡើយ ក្នុងចន្លោះនេះឯង ឈ្មោះថាកាលគួរ មួយទៀត កាលកំពុងឆាន់ភត្ត កាលកំពុងទៅកាន់វិហារ កាលកំពុងទុកដាក់បាត្រចីវរ វេលាថ្ងៃ កាលកំពុងធ្វើវត្ត និងកាលកំពុងឡបរិបុច្ឆា ទាំងអស់នេះ ឈ្មោះថា កាលមិនគួរ ដល់ការចូលសមាបត្តិទេ ។ ឯពាក្យថាសម័យ ក៏មានន័យដូចគ្នានឹងកាលនេះដែរ ។ ៣ ឃើញច្បាស់នូវសង្ខារដោយវិបស្សនាបញ្ញា ឃើញចតុរារិយសច្ចធម៌ដោយមគ្គបញ្ញា ។ ៤ ជាឈ្មោះបុគ្គល ៣ ពួក គឺ សោតាបន្នបុគ្គល សកទាគាមិបុគ្គល អនាគាមិបុគ្គល ។ អដ្ឋកថា ។

ឯកកនិទ្ទេសោ

[១៨] កតមោ ច បុគ្គលោ អសមយវិមុត្តោ ។ ឥធេកច្ចោ បុគ្គលោ ន ហេវ ខោ កាលេន កាលំ សមយេន សមយំ អដ្ឋ វិមោក្ខេ កាយេន ផុសិត្វា វិហរតិ បញ្ញាយ ចស្ស ទិស្វា អាសវា បរិក្ខីណា ហោន្តិ អយំ វុច្ចតិ បុគ្គលោ អសមយវិមុត្តោ ។ សព្វេបិ អរិយបុគ្គលា អរិយេ វិមោក្ខេ អសមយវិមុត្តា ។

[១៩] កតមោ ច បុគ្គលោ កុប្បធម្មោ ។ ឥធេកច្ចោ បុគ្គលោ លាភី ហោតិ រូបសហគតានំ វា អរូបសហគតានំ វា សមាបត្តីនំ សោ ច ខោ ន និកាមលាភី ហោតិ ន អកិច្ឆលាភី ន អកសិរលាភី ន យត្ថិច្ឆកំ យទិច្ឆកំ យាវតិច្ឆកំ សមាបជ្ជតិបិ វុដ្ឋាតិបិ ឋានំ ខោ បនេតំ វិជ្ជតិ យំ តស្ស បុគ្គលស្ស បមាទមាគម្ម តា សមាបត្តិយោ កុប្បេយ្យុំ អយំ វុច្ចតិ បុគ្គលោ កុប្បធម្មោ ។



ឯកកនិទ្ទេស

[១៨] បុគ្គលជាអសមយវិមុត្ត តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ មិនបានពាល់វិមោក្ខ ៨ ដោយនាមកាយ តាមកាលគួរ តាមសម័យគួរ(១) តែអាសវៈរបស់បុគ្គលនោះបានអស់ទៅ ព្រោះឃើញដោយបញ្ញា នេះហៅថា បុគ្គលជាអសមយវិមុត្ត ។ សព្វអរិយបុគ្គលទាំងអស់ ក៏ឈ្មោះថា អសមយវិមុត្ត ក្នុងអរិយវិមោក្ខ (លោកុត្តរវិមោក្ខផង) ។

[១៩] បុគ្គលជាកុប្បធម្ម តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ បានសមាបត្តិ ប្រកបដោយរូបក្តី ប្រកបដោយអរូបក្តី បុគ្គលនោះឯង មិនបានតាមប្រាថ្នា មិនបានដោយមិនលំបាក មិនបានដោយងាយ ចូលមិនបានផង ចេញមិនបានផង តាមឱកាស ដែលប្រាថ្នា តាមសមាបត្តិ ដែលប្រាថ្នា តាមកាលកំណត់ ដែលប្រាថ្នា ទេ ដំណើរនុ៎ះឯង រមែងមាន ត្រង់ដែលសមាបត្តិទាំងនោះ កម្រើក ព្រោះអាស្រ័យសេចក្តីប្រមាទ របស់បុគ្គលនោះ នេះហៅថា បុគ្គលជាកុប្បធម្ម ។

១ បុគ្គលណា មានសេចក្តីអាចនឹងចូលឈានក្បៀវក្លា កាលបើបុគ្គលនោះប្រាថ្នាហើយ ចូលទាំងក្នុងដើរក្តី ឈរក្តី អង្គុយក្តី ដេកក្តី ទំពាស៊ីក្តី ផឹកឬប្រើប្រាស់ក្តី គង់តែបាន សម្រេចតាមចិត្តដល់បរិ ព្រោះបុគ្គលនឹងសម្រេចឈ្មោះថាសមាបត្តិវិមោក្ខ មិនចាំបាច់សម័យគួរ សម័យមិនគួរឡើយ ។ អដ្ឋកថា ។

(២០) កតមោ ច បុគ្គលោ អកុប្បធម្មោ ។ ឥធេកច្ចោ បុគ្គលោ លាភី ហោតិ រូបសហគតានំ វា អរូបសហគតានំ វា សមាបត្តីនំ សោ ច ខោ និកាមលាភី ហោតិ អកិច្ឆលាភី អកសិរលាភី យត្ថិច្ឆកំ យទិច្ឆកំ យាវទិច្ឆកំ សមាបជ្ជតិបិ វុដ្ឋាតិបិ អដ្ឋានមេតំ អនវកាសោ យំ តស្ស បុគ្គលស្ស បមាទមាគម្ម តា សមាបត្តិយោ កុប្បេយ្យុំ អយំ វុច្ចតិ បុគ្គលោ អកុប្បធម្មោ ។ សព្វេបិ អរិយបុគ្គលា អរិយេ វិមោក្ខេ អកុប្បធម្មា ។

(២១) កតមោ ច បុគ្គលោ បរិហានធម្មោ ។ ឥធេកច្ចោ បុគ្គលោ លាភី ហោតិ រូបសហគតានំ វា អរូបសហគតានំ វា សមាបត្តីនំ សោ ច ខោ ន និកាមលាភី ហោតិ ន អកិច្ឆលាភី ន អកសិរលាភី ន យត្ថិច្ឆកំ យទិច្ឆកំ យាវទិច្ឆកំ សមាបជ្ជតិបិ វុដ្ឋាតិបិ ឋានំ ខោ បនេតំ វិជ្ជតិ យំ សោ បុគ្គលោ បមាទមាគម្ម តាហិ សមាបត្តីហិ បរិហាយេយ្យ អយំ វុច្ចតិ បុគ្គលោ បរិហានធម្មោ ។



(២០) បុគ្គលជាអកុប្បធម្មៈ តើដូចម្តេច ? បុគ្គលខ្លះ ក្នុងលោកនេះ បានសមាបត្តិទាំងឡាយ ប្រកបដោយរូបក្តី ប្រកបដោយអរូបក្តី បុគ្គលនោះឯង បានតាមប្រាថ្នា បានមិនលំបាក បានដោយងាយ ចូលផង ចេញផង តាមឱកាសដែលប្រាថ្នា តាមសមាបត្តិដែលប្រាថ្នា តាមកាលកំណត់ដែលប្រាថ្នា ដំណើរនុ៎ះ មិនមែនជាហេតុ មិនមែនជាឱកាសទេ គឺដែលសមាបត្តិទាំងនោះ កម្រើក ព្រោះអាស្រ័យសេចក្តីប្រមាទរបស់បុគ្គលនោះ នេះហៅថា បុគ្គលជាអកុប្បធម្មៈ ។ សូម្បីពួកអរិយបុគ្គលទាំងអស់ ក៏ឈ្មោះថា អកុប្បធម្មៈ ក្នុងអរិយវិមោក្ខដែរ ។

(២១) បុគ្គលជាបរិហានធម្មៈ តើដូចម្តេច ? បុគ្គលខ្លះ ក្នុងលោកនេះ បានសមាបត្តិទាំងឡាយ ប្រកបដោយរូបក្តី ប្រកបដោយអរូបក្តី បុគ្គលនោះឯង មិនបានតាមប្រាថ្នា មិនបានដោយមិនលំបាក មិនបានដោយងាយ ចូលមិនបានផង ចេញមិនបានផង តាមឱកាសដែលប្រាថ្នា តាមសមាបត្តិដែលប្រាថ្នា តាមកាលកំណត់ដែលប្រាថ្នាទេ ដំណើរនុ៎ះឯងរមែងមាន គឺដែលបុគ្គលនោះ សាបសូន្យចាកសមាបត្តិទាំងនោះ ព្រោះអាស្រ័យសេចក្តីប្រមាទ នេះហៅថា បុគ្គលជាបរិហានធម្មៈ ។

( ២២ ) កតមោ ច បុគ្គលោ អបរិហានធម្មោ ។ ឥធេកច្ចោ បុគ្គលោ លាភី ហោតិ រូបសហគតានំ វា អរូបសហគតានំ វា សមាបត្តីនំ សោ ច ខោ និកាមលាភី ហោតិ អកិច្ឆលាភី អកសិរលាភី យត្ថិច្ឆកំ យទិច្ឆកំ យាវតិច្ឆកំ សមាបជ្ជតិបិ វុដ្ឋាតិបិ អដ្ឋានមេតំ អនវកាសោ យំ សោ បុគ្គលោ បមាទមាគម្ម តាហិ សមាបត្តីហិ បរិហាយេយ្យ អយំ វុច្ចតិ បុគ្គលោ អបរិហានធម្មោ ។ សព្វេបិ អរិយបុគ្គលា អរិយេ វិមោក្ខេ អបរិហានធម្មា ។

( ២៣ ) កតមោ ច បុគ្គលោ ចេតនាភព្វោ ។ ឥធេកច្ចោ បុគ្គលោ លាភី ហោតិ រូបសហគតានំ វា អរូបសហគតានំ វា សមាបត្តីនំ សោ ច ខោ ន និកាមលាភី ហោតិ ន អកិច្ឆលាភី ន អកសិរលាភី ន យត្ថិច្ឆកំ យទិច្ឆកំ យាវតិច្ឆកំ សមាបជ្ជតិបិ វុដ្ឋាតិបិ សចេ អនុសញ្ចេតេតិ ន បរិហាយតិ តាហិ សមាបត្តីហិ សចេ ន អនុសញ្ចេតេតិ បរិហាយតិ តាហិ សមាបត្តីហិ អយំ វុច្ចតិ បុគ្គលោ ចេតនាភព្វោ ។





( ២២ ) បុគ្គលជាអបរិហានធម្មៈ តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ បានសមាបត្តិទាំងឡាយ ប្រកបដោយរូបក្តី ប្រកបដោយអរូបក្តី បុគ្គលនោះឯង បានតាមប្រាថ្នា បានដោយមិនលំបាក បានដោយងាយ ចូលផង ចេញផង តាមឱកាស ដែលប្រាថ្នា តាមសមាបត្តិ ដែលប្រាថ្នា តាមកាលកំណត់ ដែលប្រាថ្នា ដំណើរនុ៎ះឯង មិនមែនជាហេតុ មិនមែនជាឱកាសទេ ត្រង់ដែលបុគ្គលនោះ សាបសូន្យចាកសមាបត្តិទាំងនោះ ព្រោះអាស្រ័យសេចក្តីប្រមាទ នេះហៅថា បុគ្គលជាអបរិហានធម្មៈ ។ សូម្បីពួកព្រះអរិយបុគ្គលទាំងអស់ ក៏ឈ្មោះថា អបរិហានធម្មៈ ក្នុងអរិយវិមោក្ខដែរ ។

( ២៣ ) បុគ្គលជាចេតនាភព្វៈ តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ បានសមាបត្តិទាំងឡាយ ប្រកបដោយរូបក្តី ប្រកបដោយអរូបក្តី បុគ្គលនោះឯង មិនបានតាមប្រាថ្នា មិនបានដោយមិនលំបាក មិនបានដោយងាយ ចូលមិនបានផង ចេញមិនបានផង តាមឱកាស ដែលប្រាថ្នា តាមសមាបត្តិដែលប្រាថ្នា តាមកាលកំណត់ដែលប្រាថ្នា បើចូល ( សមាធិ ) ក៏មិនសាបសូន្យចាកសមាបត្តិទាំងនោះ បើមិនចូលទេ ក៏សាបសូន្យចាកសមាបត្តិទាំងនោះ នេះហៅថា បុគ្គលជាចេតនាភព្វៈ ។

[១៦] កតមោ ច បុគ្គលោ អនុរក្ខណាភព្វោ ។ ឥធេកច្ចោ បុគ្គលោ លាភី ហោតិ រូបសហគតានំ វា អរូបសហគតានំ វា សមាបត្តីនំ សោ ច ខោ ន និកាមលាភី ហោតិ ន អកិច្ឆលាភី ន អកសិរលាភី ន យត្ថិច្ឆកំ យទិច្ឆកំ យាវតិច្ឆកំ សមាបជ្ជិតុម្បិ វុដ្ឋាតុម្បិ សចេ អនុរក្ខតិ ន បរិហាយតិ តាហិ សមាបត្តីហិ សចេ នានុរក្ខតិ បរិហាយតិ តាហិ សមាបត្តីហិ អយំ វុច្ចតិ បុគ្គលោ អនុរក្ខណាភព្វោ ។

[១៧] កតមោ ច បុគ្គលោ បុថុជ្ជនោ ។ យស្ស បុគ្គលស្ស តីណិ សញ្ញោជនានិ អប្បហីនានិ ន ច តេសំ ធម្មានំ បហានាយ បដិបន្នោ អយំ វុច្ចតិ បុគ្គលោ បុថុជ្ជនោ ។

[១៨] កតមោ ច បុគ្គលោ គោត្រភូ ។ យេសំ ធម្មានំ សមនន្តរា អរិយធម្មស្ស អវក្កន្តិ ហោតិ តេហិ ធម្មេហិ សមន្នាគតោ បុគ្គលោ អយំ វុច្ចតិ បុគ្គលោ គោត្រភូ ។

អភិធម្មបិដក បុគ្គលបញ្ញត្តិ

[១៦] បុគ្គលជាអនុរក្ខនាភព្វៈ តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ បានសមាបត្តិទាំងឡាយ ប្រកបដោយរូបក្តី ប្រកបដោយអរូបក្តី បុគ្គលនោះឯង មិនបានតាមប្រាថ្នា មិនបានដោយមិនលំបាក មិនបានដោយងាយ ចូលមិនបានផង ចេញមិនបានផង តាមទីកន្លែងដែលប្រាថ្នា តាមសមាបត្តិដែលប្រាថ្នា តាមកាលកំណត់ដែលប្រាថ្នា បើរក្សា គឺសេពគប់ចំរើនហើយចូលសមាបត្តិ រមែងមិនសាបសូន្យចាកសមាបត្តិទាំងនោះ បើមិនរក្សាទេ រមែងសាបសូន្យចាកសមាបត្តិទាំងនោះ នេះហៅថា បុគ្គលជាអនុរក្ខនាភព្វៈ ។

[១៧] បុគ្គលជាបុថុជ្ជន តើដូចម្តេច ។ បុគ្គលណា មិនទាន់លះបង់សញ្ញោជនៈ ៣[១] ទាំងមិនប្រតិបត្តិដើម្បីលះបង់ធម៌ទាំងនោះ នេះហៅថា បុគ្គលជាបុថុជ្ជន ។

[១៨] បុគ្គលជាគោត្រភូ តើដូចម្តេច ។ ការយាងចុះគឺការកើតប្រាកដនៃអរិយធម៌ (លោកុត្តរមគ្គ) ក្នុងលំដាប់ស្មើ នៃពួកធម៌ណា បុគ្គលប្រកបព្រមដោយធម៌ទាំងនោះ នេះហៅថា បុគ្គលជាគោត្រភូ[២] ។

---

១ ទិដ្ឋិសញ្ញោជនៈ ១ សីលព្វតបរាមាសសញ្ញោជនៈ ១ វិចិកិច្ឆាសញ្ញោជនៈ ១ ។

២ បុគ្គលដែលកន្លងនូវបុថុជ្ជនវង្ស៖ បុថុជ្ជនគោត្រ បុថុជ្ជនមណ្ឌល បុថុជ្ជនបញ្ញត្តិទាំងអស់ ដោយញាណ មាននិព្វានជាអារម្មណ៍ ហើយយាងចុះកាន់អរិយវង្ស៖ អរិយគោត្រ អរិយមណ្ឌល និងអរិយបញ្ញត្តិ បានឈ្មោះថា គោត្រភូបុគ្គល ។

[ ២៧ ] កតមោ ច បុគ្គលោ កប្បូបគោ ។ សត្ត សេក្ខា កប្បូបគា យេ ច បុគ្គលា បុថុជ្ជនា សីលវន្តោ ។ អរហា អកប្បូបគោ ។

[ ២៨ ] កតមោ ច បុគ្គលោ អភព្វាគមនោ ។ យេ តេ បុគ្គលា កម្មាវរណេន សមន្នាគតា កិលេសាវរណេន សមន្នាគតា វិបាកាវរណេន សមន្នាគតា អស្សទ្ធា អច្ឆន្ទិកា ទុប្បញ្ញា ជឡា(១) អភព្វា និយាមំ ឱក្កមិតុំ កុសលេសុ ធម្មេសុ សម្មត្តំ ឥមេ វុច្ចន្តិ បុគ្គលា អភព្វាគមនា ។

[ ២៩ ] កតមោ ច បុគ្គលោ ភព្វាគមនោ ។ យេ តេ បុគ្គលា ន កម្មាវរណេន សមន្នាគតា ន កិលេសាវរណេន សមន្នាគតា ន វិបាកាវរណេន សមន្នាគតា សទ្ធា ឆន្ទិកា បញ្ញវន្តោ អជឡា ភព្វា និយាមំ ឱក្កមិតុំ កុសលេសុ ធម្មេសុ សម្មត្តំ ឥមេ វុច្ចន្តិ បុគ្គលា ភព្វាគមនា ។

---
១ ម. ឯឡា ។



( ២៧ ) បុគ្គលជាកប្បូបគៈ តើដូចម្ដេច ។ សេក្ខបុគ្គល ៧ ពួក និងបុគ្គលជាបុថុជ្ជន ដែលមានសីល ឈ្មោះថា កប្បូបគបុគ្គល ។ ព្រះអរហន្ត ឈ្មោះថា អកប្បូបគបុគ្គល ។

( ២៨ ) បុគ្គលជាអភព្វាគមនៈ តើដូចម្ដេច ។ បុគ្គលណា ប្រកបដោយគ្រឿងកំបាំងគឺកម្ម ប្រកបដោយគ្រឿងកំបាំងគឺកិលេស ប្រកបដោយគ្រឿងកំបាំងគឺវិបាក ជាអ្នកមិនមានសទ្ធា មិនមានឆន្ទៈ មានបញ្ញាអាប់អោន ល្ងង់ខ្លៅ មិនគួរឈានចុះកាន់សម្មត្តនិយាម ក្នុងធម៌ជាកុសលទាំងឡាយ នេះហៅថា បុគ្គលជាអភព្វាគមនៈ ។

( ២៩ ) បុគ្គលជាភព្វាគមនៈ តើដូចម្ដេច ។ បុគ្គលណា មិនប្រកបដោយគ្រឿងកំបាំងគឺកម្ម មិនប្រកបដោយគ្រឿងកំបាំងគឺកិលេស មិនប្រកបដោយគ្រឿងកំបាំងគឺវិបាក ជាអ្នកមានសទ្ធា មានឆន្ទៈ មានបញ្ញា មិនល្ងង់ខ្លៅ គួរឈានចុះកាន់សម្មត្តនិយាម ក្នុងធម៌ជាកុសលទាំងឡាយ នេះហៅថា បុគ្គលជាភព្វាគមនៈ ។

(៣០) កតមោ ច បុគ្គលោ និយតោ ។ បញ្ច បុគ្គលា អានន្តរិកា យេ ច មិច្ឆាទិដ្ឋិកា និយតា អដ្ឋ ច អរិយបុគ្គលា និយតា ។ អវសេសា បុគ្គលា អនិយតា ។

(៣១) កតមោ ច បុគ្គលោ បដិបន្នកោ ។ ចត្តារោ មគ្គសមង្គិនោ បុគ្គលា បដិបន្នកា ។ ចត្តារោ ផលសមង្គិនោ បុគ្គលា ផលេដ្ឋិតា ។

(៣២) កតមោ ច បុគ្គលោ សមសីសី ។ យស្ស បុគ្គលស្ស អបុព្វំ អចរិមំ អាសវបរិយាទានញ្ច ហោតិ ជីវិតបរិយាទានញ្ច អយំ វុច្ចតិ បុគ្គលោ សមសីសី ។

(៣៣) កតមោ ច បុគ្គលោ ឋិតកប្បី ។ អយញ្ច បុគ្គលោ សោតាបត្តិផលសច្ឆិកិរិយាយ បដិបន្នោ អស្ស កប្បស្ស ច ឧឌ្ឌយ្ហនវេលា អស្ស នេវ តាវ កប្បោ ឧឌ្ឌយ្ហេយ្យ យាវាយំ បុគ្គលោ ន សោតាបត្តិផលំ សច្ឆិករោតិ អយំ វុច្ចតិ បុគ្គលោ ឋិតកប្បី ។ សព្វេបិ មគ្គសមង្គិនោ បុគ្គលា ឋិតកប្បិនោ ។



(៣០) បុគ្គលជានិយតៈ តើដូចម្តេច ។ បុគ្គលប្រកបដោយអនន្តរិយកម្ម ៥ ពួក បុគ្គលប្រកបដោយនិយតមិច្ឆាទិដ្ឋិ និងអរិយបុគ្គល ៨ ពួក ឈ្មោះថា និយតបុគ្គល ។ បុគ្គលក្រៅពីនេះ ឈ្មោះថា អនិយតបុគ្គល ។

(៣១) បុគ្គលជាបដិបន្នកៈ តើដូចម្តេច ។ បុគ្គល ៤ ពួក ដែលព្រមព្រៀងដោយមគ្គ ឈ្មោះថា បដិបន្នកបុគ្គល ។ បុគ្គល ៤ ពួក ដែលព្រមព្រៀងដោយផល ឈ្មោះថា ផលេដ្ឋិតបុគ្គល ។

(៣២) បុគ្គលជាសមសីសី តើដូចម្តេច ។ បុគ្គលណា មានការអស់ទៅនៃអាសវៈ និងការអស់ទៅនៃជីវិត មិនមុន មិនក្រោយ នេះហៅថា បុគ្គលជាសមសីសី ។

(៣៣) បុគ្គលជាឋិតកប្បី តើដូចម្តេច ។ បុគ្គលនេះ ជាអ្នកប្រតិបត្តិ ដើម្បីធ្វើឲ្យជាក់ច្បាស់នូវសោតាបត្តិផល ទុកជាវេលាភ្លើងឆេះកប្បនឹងមាន បើបុគ្គលនេះ មិនទាន់ធ្វើឲ្យជាក់ច្បាស់ នូវសោតាបត្តិផល ដរាបណា ភ្លើងក៏មិនគប្បីឆេះកប្ប ដរាបនោះដែរ នេះហៅថា បុគ្គលជាឋិតកប្បី ។ បុគ្គលដែលព្រមព្រៀងដោយមគ្គទាំងអស់ ក៏ហៅថា ឋិតកប្បីដែរ ។

(៣៤) កតមោ ច បុគ្គលោ អរិយោ ។ អដ្ឋ អរិយបុគ្គលា អរិយា ។ អវសេសា បុគ្គលា អនរិយា ។

(៣៥) កតមោ ច បុគ្គលោ សេក្ខោ ។ ចត្តារោ មគ្គសមង្គិនោ តយោ ផលសមង្គិនោ បុគ្គលា សេក្ខា ។ អរហា អសេក្ខោ ។ អវសេសា បុគ្គលា នេវ សេក្ខា នាសេក្ខា ។

(៣៦) កតមោ ច បុគ្គលោ តេវិជ្ជោ ។ តីហិ វិជ្ជាហិ សមន្នាគតោ បុគ្គលោ តេវិជ្ជោ ។

(៣៧) កតមោ ច បុគ្គលោ ឆឡភិញ្ញោ ។ ឆហិ អភិញ្ញាហិ សមន្នាគតោ បុគ្គលោ ឆឡភិញ្ញោ ។





(៣៤) បុគ្គលជាអរិយៈ តើដូចម្តេច ។ អរិយបុគ្គលទាំង ៨ ពួក ឈ្មោះថា អរិយៈ[1] ។ បុគ្គលក្រៅពីនេះ ឈ្មោះថា អនរិយៈ ។

(៣៥) បុគ្គលជាសេក្ខៈ តើដូចម្តេច ។ បុគ្គល ៤ ពួក ព្រមព្រៀងដោយមគ្គ បុគ្គល ៣ ពួក ព្រមព្រៀងដោយផល ឈ្មោះថា សេក្ខៈ ។ ព្រះអរហន្ត ឈ្មោះថា អសេក្ខៈ ។ បុគ្គលក្រៅពីនេះ ឈ្មោះថា មិនមែនសេក្ខៈ ទាំងមិនមែនអសេក្ខៈ ។

(៣៦) បុគ្គលបានវិជ្ជា ៣ តើដូចម្តេច ។ បុគ្គលប្រកបដោយវិជ្ជា ៣ យ៉ាង ឈ្មោះថា បុគ្គលបានវិជ្ជា ៣[2] ។

(៣៧) បុគ្គលបានអភិញ្ញា ៦ តើដូចម្តេច ។ បុគ្គលប្រកបដោយអភិញ្ញា ៦ ឈ្មោះថា អ្នកមានអភិញ្ញា ៦[3] ។

---

១ បុគ្គលដែលឆ្ងាយចាកកិលេស ឬបុគ្គលដែលមនុស្សនិងទេវតាគប្បីចូលទៅរក ឈ្មោះថា អរិយៈ ។ មួយទៀត បុគ្គលដែលឈ្មោះថា អរិយៈ ព្រោះជាអ្នកស្អាតបរិសុទ្ធ ។ ២ បុគ្គលដែលបានបុព្វេនិវាសញ្ញាណ និងទិព្វចក្ខុញ្ញាណជាមុន ទើបបានសម្រេចអរហត្តជាក្រោយ ឬបានសម្រេចអរហត្តជាមុន ទើបបានបុព្វេនិវាសញ្ញាណ និងទិព្វចក្ខុញ្ញាណ ជាខាងក្រោយ ឈ្មោះថា បានវិជ្ជា ៣ (រាប់ដោយសង្ខេប គឺ បុព្វេនិវាសានុស្សតិវិជ្ជា ១ ទិព្វចក្ខុវិជ្ជា ១ អាសវក្ខយវិជ្ជា គឺ សម្រេចអរហត្ត ១) ។ [illegible] ។ ៣ អភិញ្ញា ៦ គឺ ឥទ្ធិវិធៈ (សំដែងឫទ្ធិបានផ្សេងៗ) ១ ទិព្វសោត (ត្រចៀកទិព្វ គឺ ស្តាប់សំឡេងឮឆ្ងាយបាន) ១ ចេតោបរិយញ្ញាណ ឬ បរចិត្តវិជ្ជា (ដឹងចិត្តបុគ្គលដទៃបាន) ១ បុព្វេនិវាសានុស្សតិ (រលឹកជាតិពីកាលមុនបាន) ១ ទិព្វចក្ខុ ឬ ចុតូបបាតវិជ្ជា (ដឹងចុតិបដិសន្ធិរបស់សត្វដទៃ) ១ អាសវក្ខយវិជ្ជា (ដឹងធម៌ជាគ្រឿងអស់ទៅនៃអាសវៈ) ១ ។

[ ៣៨ ] កតមោ ច បុគ្គលោ សម្មាសម្ពុទ្ធោ ។ ឥធេកច្ចោ បុគ្គលោ បុព្វេ អននុស្សុតេសុ ធម្មេសុ សាមំ សច្ចានិ អភិសម្ពុជ្ឈតិ តត្ថ ច សព្វញ្ញុតំ បាបុណាតិ ពលេសុ(១) ច វសីភាវំ អយំ វុច្ចតិ បុគ្គលោ សម្មាសម្ពុទ្ធោ ។

[ ៣៩ ] កតមោ ច បុគ្គលោ បច្ចេកសម្ពុទ្ធោ ។ ឥធេកច្ចោ បុគ្គលោ បុព្វេ អននុស្សុតេសុ ធម្មេសុ សាមំ សច្ចានិ អភិសម្ពុជ្ឈតិ ន ច តត្ថ សព្វញ្ញុតំ បាបុណាតិ ន ច ពលេសុ វសីភាវំ អយំ វុច្ចតិ បុគ្គលោ បច្ចេកសម្ពុទ្ធោ ។

[ ៤០ ] កតមោ ច បុគ្គលោ ឧភតោភាគវិមុត្តោ ។ ឥធេកច្ចោ បុគ្គលោ អដ្ឋ វិមោក្ខេ កាយេន ផុសិត្វា វិហរតិ បញ្ញាយ ចស្ស ទិស្វា អាសវា បរិក្ខីណា ហោន្តិ អយំ វុច្ចតិ បុគ្គលោ ឧភតោភាគវិមុត្តោ ។

១ ឱ. ផលេសុ ។





[ ៣៨ ] បុគ្គលជាព្រះសម្មាសម្ពុទ្ធ តើដូចម្តេច ។ បុគ្គលខ្លះក្នុងលោកនេះ ត្រាស់ដឹងចំពោះខ្លួន នូវសច្ចៈ ក្នុងធម៌ដែលខ្លួនមិនធ្លាប់ស្តាប់ក្នុងកាលមុន ដល់នូវសព្វញ្ញុតញ្ញាណ ក្នុងធម៌នោះផង ដល់នូវភាពស្ទាត់ ក្នុងទសពលញ្ញាណផង នេះហៅថា បុគ្គលជាព្រះសម្មាសម្ពុទ្ធ ។

[ ៣៩ ] បុគ្គលជាព្រះបច្ចេកសម្ពុទ្ធ តើដូចម្តេច ។ បុគ្គលពួកខ្លះក្នុងលោកនេះ ត្រាស់ដឹងចំពោះខ្លួន នូវសច្ចៈ ក្នុងធម៌ដែលខ្លួនមិនធ្លាប់ស្តាប់ក្នុងកាលមុន មិនដល់នូវសព្វញ្ញុតញ្ញាណ ក្នុងធម៌នោះផង មិនដល់នូវភាពស្ទាត់ ក្នុងទសពលញ្ញាណផង នេះហៅថា បុគ្គលជាព្រះបច្ចេកសម្ពុទ្ធ ។

[ ៤០ ] បុគ្គលជាឧភតោភាគវិមុត្ត តើដូចម្តេច ។ បុគ្គលខ្លះក្នុងលោកនេះ ពាល់វិមោក្ខ ៨ ដោយនាមកាយ ទាំងអាសវៈរបស់បុគ្គលនោះ ក៏អស់ទៅ ព្រោះឃើញដោយបញ្ញា នេះហៅថា បុគ្គលជាឧភតោភាគវិមុត្ត(១) ។

១ ជាឈ្មោះនៃព្រះអរហន្តដែលផុតស្រឡះចាកចំណែកទាំង ២ គឺ ផុតស្រឡះចាករូបកាយដោយអរូបសមាបត្តិ ១ ផុតស្រឡះចាកនាមកាយដោយមគ្គ ១ ។ ក្នុងអដ្ឋកថា មានអធិប្បាយជាច្រើនទៀត គប្បីរកមើលនោះ ចុះ ។

[៤១] កតមោ ច បុគ្គលោ បញ្ញាវិមុត្តោ ។ ឥធេកច្ចោ បុគ្គលោ ន ហេវ ខោ អដ្ឋ វិមោក្ខេ កាយេន ផុសិត្វា វិហរតិ បញ្ញាយ ចស្ស ទិស្វា អាសវា បរិក្ខីណា ហោន្តិ អយំ វុច្ចតិ បុគ្គលោ បញ្ញាវិមុត្តោ ។

[៤២] កតមោ ច បុគ្គលោ កាយសក្ខី ។ ឥធេកច្ចោ បុគ្គលោ អដ្ឋ វិមោក្ខេ កាយេន ផុសិត្វា វិហរតិ បញ្ញាយ ចស្ស ទិស្វា ឯកច្ចេ អាសវា បរិក្ខីណា ហោន្តិ អយំ វុច្ចតិ បុគ្គលោ កាយសក្ខី ។

[៤៣] កតមោ ច បុគ្គលោ ទិដ្ឋិប្បត្តោ ។ ឥធេកច្ចោ បុគ្គលោ ឥទំ ទុក្ខន្តិ យថាភូតំ បជានាតិ អយំ ទុក្ខសមុទយោតិ យថាភូតំ បជានាតិ អយំ ទុក្ខនិរោធោតិ យថាភូតំ បជានាតិ អយំ ទុក្ខនិរោធគាមិនី បដិបទាតិ យថាភូតំ បជានាតិ តថាគតប្បវេទិតា ចស្ស ធម្មា បញ្ញាយ វោទិដ្ឋា ហោន្តិ វោចរិតា បញ្ញាយ ចស្ស ទិស្វា ឯកច្ចេ អាសវា បរិក្ខីណា ហោន្តិ អយំ វុច្ចតិ បុគ្គលោ ទិដ្ឋិប្បត្តោ ។



[៤១] បុគ្គលជាបញ្ញាវិមុត្ត តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ មិនបានវិមោក្ខ ៨ ដោយនាមកាយទេ តែអាសវៈរបស់បុគ្គលនោះ ក៏អស់ទៅ ព្រោះឃើញដោយបញ្ញា នេះហៅថា បុគ្គលជាបញ្ញាវិមុត្ត ។

[៤២] បុគ្គលជាកាយសក្ខី តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ បានវិមោក្ខ ៨ ដោយនាមកាយ ទាំងអាសវៈពួកខ្លះ របស់បុគ្គលនោះ ក៏អស់ទៅ ព្រោះឃើញដោយបញ្ញា នេះហៅថា បុគ្គលជាកាយសក្ខី(១) ។

[៤៣] បុគ្គលជាទិដ្ឋិប្បត្តៈ តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ដឹងច្បាស់តាមពិតថា នេះទុក្ខ ដឹងច្បាស់តាមពិតថា នេះហេតុនាំឲ្យកើតទុក្ខ ដឹងច្បាស់តាមពិតថា នេះទីរលត់ទុក្ខ ដឹងច្បាស់តាមពិតថា នេះបដិបទាជាដំណើរទៅកាន់ទីរលត់ទុក្ខ ធម៌ទាំងឡាយ ដែលព្រះតថាគតសំដែងហើយ បុគ្គលនោះ បានឃើញដោយល្អ បានប្រព្រឹត្តដោយល្អ ដោយបញ្ញាផង អាសវៈពួកខ្លះរបស់បុគ្គលនោះ ក៏អស់ទៅ ព្រោះឃើញដោយបញ្ញាផង នេះហៅថា បុគ្គលជាទិដ្ឋិប្បត្តៈ(២) ។

---

១ បុគ្គលដែលបានបឋមជ្ឈានជាដើម រួចបានធ្វើឲ្យជាក់ច្បាស់នូវនិរោធនិព្វានជាខាងក្រោយ ឈ្មោះថាកាយសក្ខី មាន ៦ ពួក តាំងពីសោតាបត្តិផលទៅដល់អរហត្តមគ្គ ។ អដ្ឋកថា ។ ២ បុគ្គលដែលបានដឹង បានឃើញ បានយល់ បានធ្វើឲ្យជាក់ច្បាស់ បានពាល់ត្រូវ ដោយប្រាជ្ញាថា សង្ខារទាំងឡាយជាទុក្ខ និរោធជាសុខ ឈ្មោះថា ទិដ្ឋិប្បត្តៈ មាន ៦ ពួក ដូចកាយសក្ខី ។

(៤៤) កតមោ ច បុគ្គលោ សទ្ធាវិមុត្តោ ។ ឥធេកច្ចោ បុគ្គលោ ឥទំ ទុក្ខន្តិ យថាភូតំ បជានាតិ អយំ ទុក្ខសមុទយោតិ យថាភូតំ បជានាតិ អយំ ទុក្ខនិរោធោតិ យថាភូតំ បជានាតិ អយំ ទុក្ខនិរោធគាមិនី បដិបទាតិ យថាភូតំ បជានាតិ តថាគតប្បវេទិតា ចស្ស ធម្មា បញ្ញាយ វោទិដ្ឋា ហោន្តិ វោចរិតា បញ្ញាយ ចស្ស ទិស្វា ឯកច្ចេ អាសវា បរិក្ខីណា ហោន្តិ នោ ច ខោ យថា ទិដ្ឋិប្បត្តស្ស អយំ វុច្ចតិ បុគ្គលោ សទ្ធាវិមុត្តោ ។

(៤៥) កតមោ ច បុគ្គលោ ធម្មានុសារី ។ យស្ស បុគ្គលស្ស សោតាបត្តិផលសច្ឆិកិរិយាយ បដិបន្នស្ស បញ្ញិន្ទ្រិយំ អធិមត្តំ ហោតិ បញ្ញាវាហឹ បញ្ញាបុព្វង្គមំ អរិយមគ្គំ ភាវេតិ អយំ វុច្ចតិ បុគ្គលោ ធម្មានុសារី ។ សោតាបត្តិផលសច្ឆិកិរិយាយ បដិបន្នោ បុគ្គលោ ធម្មានុសារី ។ ផលេ ឋិតោ ទិដ្ឋិប្បត្តោ ។

(៤៦) កតមោ ច បុគ្គលោ សទ្ធានុសារី ។





(៤៤) បុគ្គល ជាសទ្ធាវិមុត្ត តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ដឹងច្បាស់តាមពិតថា នេះទុក្ខ ដឹងច្បាស់តាមពិតថា នេះហេតុនាំឲ្យកើតទុក្ខ ដឹងច្បាស់តាមពិតថា នេះធម៌រលត់ទុក្ខ ដឹងច្បាស់តាមពិតថា នេះជាបដិបទាជាដំណើរទៅកាន់ធម៌រលត់ទុក្ខ ធម៌ទាំងឡាយដែលព្រះតថាគតសំដែងហើយ បុគ្គលនោះ បានឃើញដោយល្អ បានប្រព្រឹត្តដោយល្អ ដោយបញ្ញាផង អាសវៈពួកខ្លះ របស់បុគ្គលនោះ ក៏អស់ទៅ ព្រោះឃើញ ដោយបញ្ញាផង តែមិនដូចជាទិដ្ឋិប្បត្តបុគ្គលទេ នេះហៅថា បុគ្គល ជាសទ្ធាវិមុត្ត[១] ។

(៤៥) បុគ្គល ជាធម្មានុសារី តើដូចម្តេច ។ បុគ្គលណា កំពុងប្រតិបត្តិ ដើម្បីធ្វើឲ្យជាក់ច្បាស់ នូវសោតាបត្តិផល មានឥន្ទ្រិយគឺបញ្ញាដ៏ក្រៃលែង ចំរើនអរិយមគ្គ មានបញ្ញាជាគ្រឿងនាំ មានបញ្ញាជាប្រធាន នេះហៅថា បុគ្គល ជាធម្មានុសារី[២] ។ បុគ្គលកំពុងប្រតិបត្តិ ដើម្បីធ្វើឲ្យជាក់ច្បាស់ នូវសោតាបត្តិផល ឈ្មោះថា ធម្មានុសារី ។ បុគ្គលឋិតនៅក្នុងផល ឈ្មោះថា ទិដ្ឋិប្បត្តៈ ។

(៤៦) បុគ្គល ជាសទ្ធានុសារី តើដូចម្តេច ។ បុគ្គលណា

---

១ ប្រែថា រួចស្រឡះដោយសទ្ធា ៦ ពួក ធ្វើតាមសទ្ធា ។ ២ ប្រែថា ដើរតាមធម៌បញ្ញា ជាឈ្មោះនៃបុគ្គលដែលឋិតនៅក្នុងសោតាបត្តិមគ្គ ។

យស្ស បុគ្គលស្ស សោតាបត្តិផលសច្ឆិកិរិយាយ បដិបន្នស្ស សទ្ធិន្ទ្រិយំ អធិមត្តំ ហោតិ សទ្ធាវាហី សទ្ធាបុព្វង្គមំ អរិយមគ្គំ ភាវេតិ អយំ វុច្ចតិ បុគ្គលោ សទ្ធានុសារី ។ សោតាបត្តិផលសច្ឆិកិរិយាយ បដិបន្នោ បុគ្គលោ សទ្ធានុសារី ។ ផលេ ឋិតោ សទ្ធាវិមុត្តោ ។

[៤៧] កតមោ ច បុគ្គលោ សត្តក្ខត្តុំបរមោ ។ ឥធេកច្ចោ បុគ្គលោ តិណ្ណំ សញ្ញោជនានំ បរិក្ខយា សោតាបន្នោ ហោតិ អវិនិបាតធម្មោ និយតោ សម្ពោធិបរាយណោ សោ សត្តក្ខត្តុំ ទេវេ ច មានុសេ ច សន្ធាវិត្វា សំសរិត្វា ទុក្ខស្សន្តំ ករោតិ អយំ វុច្ចតិ បុគ្គលោ សត្តក្ខត្តុំបរមោ ។

[៤៨] កតមោ ច បុគ្គលោ កោលំកោលោ ។ ឥធេកច្ចោ បុគ្គលោ តិណ្ណំ សញ្ញោជនានំ បរិក្ខយា សោតាបន្នោ ហោតិ អវិនិបាតធម្មោ និយតោ សម្ពោធិបរាយណោ សោ ទ្វេ វា តីណិ វា កុលានិ



ប្រតិបត្តិ ដើម្បីធ្វើឲ្យជាក់ច្បាស់ នូវសោតាបត្តិផល មានសទ្ធិន្ទ្រិយក៏ក្លាដ៏ក្រៃលែង ចំរើនអរិយមគ្គ មានសទ្ធាជាគ្រឿងនាំ មានសទ្ធាជាប្រធាន នេះហៅថា បុគ្គល ជាសទ្ធានុសារី(១) ។ បុគ្គលកំពុងប្រតិបត្តិ ដើម្បីធ្វើឲ្យជាក់ច្បាស់ នូវសោតាបត្តិផល ឈ្មោះថា សទ្ធានុសារី ។ ឯបុគ្គលឋិតនៅក្នុងផល ឈ្មោះថា សទ្ធាវិមុត្ត ។

[៤៧] បុគ្គល ជាសត្តក្ខត្តុំបរមៈ តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ដល់នូវសោតៈ ព្រោះអស់ទៅនៃសញ្ញោជនៈ ៣(២) មានសភាពមិនធ្លាក់ចុះ ក្នុងអបាយ ជាបុគ្គលទៀង មានការត្រាស់ដឹង ប្រព្រឹត្តទៅខាងមុខ បុគ្គលនោះ ស្ទុះទៅ អន្ទោលទៅ ក្នុងទេវតានិង មនុស្ស អស់ ៧ ដង ហើយក៏ធ្វើនូវទីបំផុតនៃទុក្ខ នេះហៅថា បុគ្គល ជាសត្តក្ខត្តុំបរមៈ(៣) ។

[៤៨] បុគ្គល ជាកោលំកោលៈ តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ដល់នូវសោតៈ ព្រោះអស់ទៅនៃសញ្ញោជនៈ ៣ មានសភាពមិនធ្លាក់ចុះក្នុងអបាយ ជាបុគ្គលទៀង មានការត្រាស់ដឹងប្រព្រឹត្តទៅខាងមុខ បុគ្គលនោះ ស្ទុះទៅ អន្ទោលទៅ កាន់ត្រកូល ២ ឬ ៣

១ ជាឈ្មោះនៃបុគ្គលដែលឋិតនៅក្នុងសោតាបត្តិមគ្គ ។ អដ្ឋកថា ។ ២ សញ្ញោជនៈ ៣ គឺ សក្កាយទិដ្ឋិ ១ វិចិកិច្ឆា ១ សីលព្វតបរាមាសៈ ១ ។ ៣ ជាឈ្មោះនៃសោតាបន្នបុគ្គលទី ១ ។

សន្ធាវិត្វា សំសរិត្វា ទុក្ខស្សន្តំ ករោតិ អយំ វុច្ចតិ បុគ្គលោ កោលំកោលោ ។

[៤៩] កតមោ ច បុគ្គលោ ឯកពីជី ។ ឥធេកច្ចោ បុគ្គលោ តិណ្ណំ សញ្ញោជនានំ បរិក្ខយា សោតាបន្នោ ហោតិ អវិនិបាតធម្មោ និយតោ សម្ពោធិបរាយណោ សោ ឯកំយេវ មានុសកំ ភវំ និព្វត្តេត្វា ទុក្ខស្សន្តំ ករោតិ អយំ វុច្ចតិ បុគ្គលោ ឯកពីជី ។

[៥០] កតមោ ច បុគ្គលោ សកទាគាមី ។ ឥធេកច្ចោ បុគ្គលោ តិណ្ណំ សញ្ញោជនានំ បរិក្ខយា រាគទោសមោហានំ តនុត្តា សកទាគាមី ហោតិ សកិទេវ ឥមំ លោកំ អាគន្ត្វា ទុក្ខស្សន្តំ ករោតិ អយំ វុច្ចតិ បុគ្គលោ សកទាគាមី ។



ហើយធ្វើនូវទីបំផុតនៃទុក្ខ នេះហៅថា បុគ្គល ជាកោលំកោលៈ(១) ។

[៤៩] បុគ្គល ជាឯកពីជី តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ដល់នូវសោតៈ ព្រោះអស់ទៅនៃសញ្ញោជនៈ ៣ មានសភាពមិនធ្លាក់ចុះ ក្នុងអបាយ ជាបុគ្គលទៀង មានការត្រាស់ដឹងប្រព្រឹត្តទៅខាងមុខ បុគ្គលនោះ កើតក្នុងភពជារបស់មនុស្ស តែម្តងទៀត ហើយធ្វើនូវទីបំផុតនៃទុក្ខ នេះហៅថា បុគ្គល ជាឯកពីជី(២) ។

[៥០] បុគ្គលជាសកទាគាមី តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ជាសកទាគាមិបុគ្គល ព្រោះអស់ទៅនៃសញ្ញោជនៈ ៣ ព្រោះស្រាលស្តើងនៃរាគៈ ទោសៈ មោហៈ មកកាន់លោកនេះ អស់វារៈម្តងទៀត ហើយធ្វើនូវទីបំផុតនៃទុក្ខ នេះហៅថា បុគ្គលជាសកទាគាមី(៣) ។

---

១ ជាឈ្មោះនៃសោតាបន្នបុគ្គលទី ២ បុគ្គលនេះតាំងពីបានសោតាបត្តិផលហើយ មិនកើតក្នុងត្រកូលទាបទេ កើតតែក្នុងត្រកូលខ្ពស់ អន្ទោលកើតរលត់អស់ ៦ ជាតិ ទើបធ្វើនូវទីបំផុតនៃទុក្ខ ។ អដ្ឋកថា ។ ២ ជាឈ្មោះនៃសោតាបន្នបុគ្គលទី ៣ ។ ៣ បុគ្គលដែលមកកាន់មនុស្សលោកនេះ អស់វារៈម្តងទៀត ដោយអំណាចបដិសន្ធិ ឈ្មោះថាសកទាគាមិបុគ្គល ។ នេះ មាន ៥ ពួក គឺបុគ្គលខ្លះ ដល់សកទាគាមិផល ក្នុងមនុស្សលោកនេះ ហើយបរិនិព្វានក្នុងមនុស្សលោកនេះតែម្តង ១ បុគ្គលខ្លះ ដល់សកទាគាមិផល ក្នុងមនុស្សលោកនេះ ហើយទៅបរិនិព្វានក្នុងទេវលោក ១ បុគ្គលខ្លះ ដល់សកទាគាមិផលក្នុងទេវលោក ហើយបរិនិព្វានក្នុងទេវលោកនោះតែម្តង ១ បុគ្គលខ្លះ ដល់សកទាគាមិផលក្នុងទេវលោក មកកើតក្នុងមនុស្សលោកនេះ ហើយទើបបរិនិព្វាន ១ បុគ្គលខ្លះ ដល់សកទាគាមិផលក្នុងមនុស្សលោកនេះ ទៅកើតនាំអស់កំណត់អាយុក្នុងទេវលោក ហើយត្រឡប់មកកើត ក្នុងមនុស្សលោកនេះម្តងទៀត ទើបបរិនិព្វាន ១ ។ ឯពាក្យថា សកទាគាមិបុគ្គលនេះ សំដៅយកតែបុគ្គលទី ៥ ខាងចុងនុ៎ះឯណោះ ឯបុគ្គល ៤ ពួកខាងដើម មិនរាប់យកក្នុងទីនេះទេ ព្រោះអំពីឯកពីជីសោតៈ មានបដិសន្ធិតែម្តងហើយបរិនិព្វានទៅ ឯសកទាគាមិបុគ្គលមានបដិសន្ធិ ២ ដងទើបបរិនិព្វាន ។

(៤១) កតមោ ច បុគ្គលោ អនាគាមី ។ ឥធេកច្ចោ បុគ្គលោ បញ្ចន្នំ ឱរម្ភាគិយានំ សញ្ញោជនានំ បរិក្ខយា ឱបបាតិកោ ហោតិ តត្ថ បរិនិព្វាយី អនាវត្តិធម្មោ តស្មា លោកា អយំ វុច្ចតិ បុគ្គលោ អនាគាមី ។

(៤២) កតមោ ច បុគ្គលោ អន្តរាបរិនិព្វាយី ។ ឥធេកច្ចោ បុគ្គលោ បញ្ចន្នំ ឱរម្ភាគិយានំ សញ្ញោជនានំ បរិក្ខយា ឱបបាតិកោ ហោតិ តត្ថ បរិនិព្វាយី អនាវត្តិធម្មោ តស្មា លោកា សោ ឧបបន្នំ វា សមនន្តរា អប្បត្តំ វា វេមជ្ឈំ អាយុប្បមាណំ អរិយមគ្គំ សញ្ជនេតិ ឧបរិដ្ឋិមានំ សញ្ញោជនានំ បហានាយ អយំ វុច្ចតិ បុគ្គលោ អន្តរាបរិនិព្វាយី ។

(៤៣) កតមោ ច បុគ្គលោ ឧបហច្ចបរិនិព្វាយី ។



(៤១) បុគ្គល ជាអនាគាមី តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ជាឱបបាតិកកំណើត ព្រោះអស់ទៅនៃសញ្ញោជនៈជាចំណែកខាងក្រោម ៥[1] ហើយបរិនិព្វានក្នុងសុទ្ធាវាសទេវលោកនោះ មានសភាពមិនត្រឡប់ចាកលោកនោះវិញ នេះហៅថា បុគ្គលជាអនាគាមី ។

(៤២) បុគ្គល ជាអន្តរាបរិនិព្វាយី តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ជាឱបបាតិកកំណើត ព្រោះអស់ទៅនៃសញ្ញោជនៈជាចំណែកខាងក្រោម ៥ ជាអ្នកបរិនិព្វាន ក្នុងសុទ្ធាវាសទេវលោកនោះ មានសភាពមិនត្រឡប់ចាកលោកនោះវិញ បុគ្គលនោះ ញុំាងអរិយមគ្គឲ្យកើតឡើង ក្នុងប្រមាណនៃអាយុ ដែលកើតក្នុងលំដាប់ ឬដែលមិនទាន់ដល់ពាក់កណ្តាល ដើម្បីលះបង់នូវសញ្ញោជនៈខាងលើ[2] នេះហៅថា បុគ្គល ជាអន្តរាបរិនិព្វាយី ។

(៤៣) បុគ្គលជាឧបហច្ចបរិនិព្វាយី តើដូចម្តេច ។ បុគ្គលខ្លះ

---

១ គឺសក្កាយទិដ្ឋិ ១ វិចិកិច្ឆា ១ សីលព្វតបរាមាសៈ ១ កាមច្ឆន្ទៈ ១ ព្យាបាទៈ ១ ។
២ គឺរូបរាគ ១ អរូបរាគ ១ មានះ ១ ឧទ្ធច្ចៈ ១ អវិជ្ជា ១ ។ អដ្ឋកថា ។

ឥធេកច្ចោ បុគ្គលោ បញ្ចន្នំ ឱរម្ភាគិយានំ សំយោជនានំ បរិក្ខយា ឱបបាតិកោ ហោតិ តត្ថ បរិនិព្ពាយី អនាវត្តិធម្មោ តស្មា លោកា សោ អតិក្កមិត្វា វេមជ្ឈំ អាយុប្បមាណំ ឧបហច្ច វា កាលកិរិយំ អរិយមគ្គំ សញ្ជនេតិ ឧបរិដ្ឋិមានំ សំយោជនានំ បហានាយ អយំ វុច្ចតិ បុគ្គលោ ឧបហច្ចបរិនិព្ពាយី ។

(៤៦) កតមោ ច បុគ្គលោ អសង្ខារបរិនិព្ពាយី ។ ឥធេកច្ចោ បុគ្គលោ បញ្ចន្នំ ឱរម្ភាគិយានំ សំយោជនានំ បរិក្ខយា ឱបបាតិកោ ហោតិ តត្ថ បរិនិព្ពាយី អនាវត្តិធម្មោ តស្មា លោកា សោ អសង្ខារេន អរិយមគ្គំ សញ្ជនេតិ ឧបរិដ្ឋិមានំ សំយោជនានំ បហានាយ អយំ វុច្ចតិ បុគ្គលោ អសង្ខារបរិនិព្ពាយី ។

(៤៧) កតមោ ច បុគ្គលោ សសង្ខារបរិនិព្ពាយី ។ ឥធេកច្ចោ បុគ្គលោ បញ្ចន្នំ ឱរម្ភាគិយានំ សំយោជនានំ បរិក្ខយា ឱបបាតិកោ ហោតិ តត្ថ បរិនិព្ពាយី អនាវត្តិធម្មោ តស្មា លោកា សោ



ក្នុងលោកនេះ ជាឱបបាតិកកើតព្រោះអស់ទៅនៃសញ្ញោជនៈជាចំណែកខាងក្រោម ៥ ហើយជាអ្នកបរិនិព្វានក្នុងសុទ្ធាវាសទេវលោកនោះ មានសភាពមិនត្រឡប់ចាកលោកនោះវិញ បុគ្គលនោះ កន្លងកាត់កណ្ដាលអាយុជាប្រមាណ ឬទាល់នឹងកាលកិរិយា ហើយទើបញ៉ាំងអរិយមគ្គ ឲ្យកើតឡើង ដើម្បីលះបង់សញ្ញោជនៈខាងលើ នេះហៅថា បុគ្គល ជាឧបហច្ចបរិនិព្វាយី ។

(៤៦) បុគ្គល ជាអសង្ខារបរិនិព្វាយី តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ជាឱបបាតិកកើតព្រោះអស់ទៅនៃសញ្ញោជនៈជាចំណែកខាងក្រោម ៥ ហើយជាអ្នកបរិនិព្វានក្នុងសុទ្ធាវាសទេវលោកនោះ មានសភាពមិនត្រឡប់ចាកលោកនោះវិញ បុគ្គលនោះញ៉ាំងអរិយមគ្គឲ្យកើតឡើង ដោយអសង្ខារ គឺងាយស្រួលឥតបង្ខិតបង្ខំ ដើម្បីលះបង់សញ្ញោជនៈខាងលើ នេះហៅថា បុគ្គល ជាអសង្ខារបរិនិព្វាយី ។

(៤៧) បុគ្គល ជាសសង្ខារបរិនិព្វាយី តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ជាឱបបាតិកកើតព្រោះអស់ទៅនៃសញ្ញោជនៈជាចំណែកខាងក្រោម ៥ ហើយជាអ្នកបរិនិព្វានក្នុងសុទ្ធាវាសទេវលោកនោះ មានសភាពមិនត្រឡប់ ចាកលោកនោះវិញ បុគ្គលនោះ

សសង្ខារេន អរិយមគ្គំ សញ្ជនេតិ ឧបរិដ្ឋិមានំ សញ្ញោជនានំ បហានាយ អយំ វុច្ចតិ បុគ្គលោ សសង្ខារបរិនិព្វាយី ។

(៤៦) កតមោ ច បុគ្គលោ ឧទ្ធំសោតោ អកនិដ្ឋគាមី ។ ឥធេកច្ចោ បុគ្គលោ បញ្ចន្នំ ឱរម្ភាគិយានំ សញ្ញោជនានំ បរិក្ខយា ឱបបាតិកោ ហោតិ តត្ថ បរិនិព្វាយី អនាវត្តិធម្មោ តស្មា លោកា សោ អវិហា ចុតោ អតប្បំ គច្ឆតិ អតប្បា ចុតោ សុទស្សំ គច្ឆតិ សុទស្សា ចុតោ សុទស្សឹ គច្ឆតិ សុទស្សិយា ចុតោ អកនិដ្ឋំ គច្ឆតិ អកនិដ្ឋេ អរិយមគ្គំ សញ្ជនេតិ ឧបរិដ្ឋិមានំ សញ្ញោជនានំ បហានាយ អយំ វុច្ចតិ បុគ្គលោ ឧទ្ធំសោតោ អកនិដ្ឋគាមី ។

(៤៧) កតមោ ច បុគ្គលោ សោតាបន្នោ សោតាបត្តិផលសច្ឆិកិរិយាយ បដិបន្នោ ។ តិណ្ណំ សញ្ញោជនានំ បហានាយ បដិបន្នោ បុគ្គលោ សោតាបត្តិផលសច្ឆិកិរិយាយ បដិបន្នោ យស្ស បុគ្គលស្ស



ញុំាងអរិយមគ្គ ឲ្យកើតឡើងដោយសសង្ខារ គឺដោយព្យាយាមតឹង ដើម្បីលះបង់សញ្ញោជនៈខាងលើ នេះហៅថា បុគ្គល ជាសសង្ខារបរិនិព្វាយី ។

(៤៦) បុគ្គលជាឧទ្ធំសោតអកនិដ្ឋគាមី តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ជាឧបបាតិកកំណើត ព្រោះអស់ទៅនៃសញ្ញោជនៈជាចំណែកខាងក្រោម ៥ ហើយជាអ្នកបរិនិព្វាន ក្នុងសុទ្ធាវាសលោកនោះ មានសភាពមិនត្រឡប់ ចាកលោកនោះវិញ បុគ្គលនោះ ច្យុតចាកអវិហា ទៅកាន់អតប្បា ច្យុតចាកអតប្បា ទៅកាន់សុទស្សា ច្យុតចាកសុទស្សា ទៅកាន់សុទស្សី ច្យុតចាកសុទស្សី ទៅកាន់អកនិដ្ឋ ហើយញុំាងអរិយមគ្គ ឲ្យកើតឡើងក្នុងជាន់អកនិដ្ឋ ដើម្បីលះបង់សញ្ញោជនៈខាងលើ នេះហៅថា បុគ្គល ជាឧទ្ធំសោតអកនិដ្ឋគាមី ។

(៤៧) បុគ្គលជាសោតាបន្នៈ ប្រតិបត្តិដើម្បីធ្វើឲ្យជាក់ច្បាស់នូវសោតាបត្តិផល តើដូចម្តេច ។ បុគ្គលប្រតិបត្តិដើម្បីលះបង់សញ្ញោជនៈ ៣ ប្រតិបត្តិដើម្បីធ្វើឲ្យជាក់ច្បាស់ នូវសោតាបត្តិផល បានដល់

តីណិ សញ្ញោជនានិ បហីនានិ អយំ វុច្ចតិ បុគ្គលោ សោតាបន្នោ ។ កាមរាគព្យាបាទានំ តនុភាវាយ បដិបន្នោ បុគ្គលោ សកទាគាមិផលសច្ឆិកិរិយាយ បដិបន្នោ យស្ស បុគ្គលស្ស កាមរាគព្យាបាទា តនុភូតា អយំ វុច្ចតិ បុគ្គលោ សកទាគាមី ។ កាមរាគព្យាបាទានំ អនវសេសប្បហានាយ បដិបន្នោ បុគ្គលោ អនាគាមិផលសច្ឆិកិរិយាយ បដិបន្នោ យស្ស បុគ្គលស្ស កាមរាគព្យាបាទា អនវសេសា បហីនា អយំ វុច្ចតិ បុគ្គលោ អនាគាមី ។ រូបរាគអរូបរាគមានឧទ្ធច្ចអវិជ្ជាយ អនវសេសប្បហានាយ បដិបន្នោ បុគ្គលោ អរហត្តផលសច្ឆិកិរិយាយ បដិបន្នោ យស្ស បុគ្គលស្ស រូបរាគោ អរូបរាគោ មានោ ឧទ្ធច្ចំ អវិជ្ជា អនវសេសា បហីនា អយំ វុច្ចតិ បុគ្គលោ អរហា ។

ឯកកនិទ្ទេសោ និដ្ឋិតោ ។

---



បុគ្គលដែលលះបង់សញ្ញោជនៈ ៣ នេះហៅថា បុគ្គល ជាសោតាបន្នៈ ។ បុគ្គលប្រតិបត្តិ ដើម្បីឲ្យស្រាលស្តើងកាមរាគនិងព្យាបាទ ប្រតិបត្តិដើម្បីធ្វើឲ្យជាក់ច្បាស់នូវសកទាគាមិផល បានដល់បុគ្គលដែលមានកាមរាគនិងព្យាបាទស្រាលស្តើង នេះហៅថា បុគ្គល ជាសកទាគាមី ។ បុគ្គលប្រតិបត្តិ ដើម្បីលះបង់កាមរាគនិងព្យាបាទ មិនឲ្យសេសសល់ ប្រតិបត្តិ ដើម្បីធ្វើឲ្យជាក់ច្បាស់នូវអនាគាមិផល បានដល់បុគ្គលដែលលះបង់កាមរាគនិងព្យាបាទ មិនឲ្យសេសសល់ នេះហៅថា បុគ្គលជាអនាគាមី ។ បុគ្គលប្រតិបត្តិ ដើម្បីលះបង់រូបរាគ អរូបរាគ មានះ ឧទ្ធច្ចៈ និងអវិជ្ជា មិនឲ្យសេសសល់ ប្រតិបត្តិ ដើម្បីធ្វើឲ្យជាក់ច្បាស់នូវអរហត្តផល បានដល់បុគ្គលដែលលះបង់រូបរាគ អរូបរាគ មានះ ឧទ្ធច្ចៈ និងអវិជ្ជា មិនឲ្យសេសសល់ នេះហៅថា បុគ្គលជាអរហន្ត ។

ចប់ ឯកកនិទ្ទេស ។

## ទុកនិទ្ទេសោ

[៤៨] កតមោ ច បុគ្គលោ កោធនោ ។ តត្ថ កតមោ កោធោ ។ យោ កោធោ កុជ្ឈនា កុជ្ឈិតត្តំ ទោសោ ទុស្សនា ទុស្សិតត្តំ ព្យាបត្តិ ព្យាបជ្ជនា ព្យាបជ្ជិតត្តំ វិរោធោ បដិវិរោធោ ចណ្ឌិក្កំ អសុរោបោ អនត្តមនតា ចិត្តស្ស អយំ វុច្ចតិ កោធោ ។ យស្ស បុគ្គលស្ស អយំ កោធោ អប្បហីនោ អយំ វុច្ចតិ បុគ្គលោ កោធនោ ។ កតមោ ច បុគ្គលោ ឧបនាហី ។ តត្ថ កតមោ ឧបនាហោ ។ បុព្វកាលំ កោធោ អបរកាលំ ឧបនាហោ យោ ឯវរូបោ ឧបនាហោ ឧបនហនា ឧបនាហិតត្តំ[១] អដ្ឋបនា[២] ឋបនា សណ្ឋបនា អនុសំសន្ទនា អនុប្បពន្ធនា ទឡ្ហីកម្មំ កោធស្ស អយំ វុច្ចតិ ឧបនាហោ ។ យស្ស បុគ្គលស្ស អយំ ឧបនាហោ អប្បហីនោ អយំ វុច្ចតិ បុគ្គលោ ឧបនាហី ។

១ ឧ. ម. ឧបនយ្ហនា ឧបនយ្ហិតត្តំ ។ ២ ឧ. ម. អាឋបនា ។ ៣ ឧ. អនុ-សណ្ឋបនា ។



## ទុកនិទ្ទេស

[៤៨] បុគ្គលមានសេចក្ដីក្រោធ តើដូចម្ដេច ។ បណ្ដាធម៌ទាំងនោះ ក្រោធ តើដូចម្ដេច ។ ការក្រោធ អាការក្រោធ ភាពនៃសេចក្ដីក្រោធ ការប្រទូស្ត អាការប្រទូស្ត ភាពនៃសេចក្ដីប្រទូស្ត ការព្យាបាទ អាការព្យាបាទ ភាពនៃសេចក្ដីព្យាបាទ ការទឹង ការទឹងទាំង ភាពនៃចិត្តកាច ការក្រហើន ភាពនៃសេចក្ដីតូចចិត្ត ណា នេះហៅថា ក្រោធ ។ បុគ្គលដែលមិនលះបង់ក្រោធនេះ នេះហៅថា បុគ្គលមានសេចក្ដីក្រោធ ។ បុគ្គលចងសេចក្ដីក្រោធទុក តើដូចម្ដេច ។ បណ្ដាធម៌ទាំងនោះ ការចងសេចក្ដីក្រោធទុក តើដូចម្ដេច ។ សេចក្ដីក្រោធកើតក្នុងកាលខាងដើម ការចងសេចក្ដីក្រោធទុកកើតក្នុងកាលខាងក្រោយទៀត ការចងសេចក្ដីក្រោធទុក អាការចងសេចក្ដីក្រោធទុក ភាពនៃការចងសេចក្ដីក្រោធទុក ការតាំងទុក អាការតំកល់ទុក សេចក្ដីតំកល់ព្រម ការតំកល់ទុករឿយ ៗ ការចងទុករឿយ ៗ ការធ្វើដ៏មាំនៃសេចក្ដីក្រោធ ណា ដែលមានសភាពដូច្នេះ នេះហៅថា ការចងសេចក្ដីក្រោធទុក ។ បុគ្គលដែលមិនលះបង់ការចងសេចក្ដីក្រោធទុកនេះ នេះហៅថា បុគ្គលចងសេចក្ដីក្រោធទុក ។

[៥៩] កតមោ ច បុគ្គលោ មក្ខី ។ តត្ថ កតមោ មក្ខោ ។ យោ មក្ខោ មក្ខាយនា មក្ខាយិតត្តំ និដ្ឋុរិយំ និដ្ឋុរិយកម្មំ[១] អយំ វុច្ចតិ មក្ខោ ។ យស្ស បុគ្គលស្ស អយំ មក្ខោ អប្បហីនោ អយំ វុច្ចតិ បុគ្គលោ មក្ខី ។ កតមោ ច បុគ្គលោ បឡាសី ។ តត្ថ កតមោ បឡាសោ ។ យោ បឡាសោ បឡាសាយនា បឡាសាយិតត្តំ បឡាសាហារោ វិវាទដ្ឋានំ យុគគ្គាហោ[២] អប្បដិនិស្សគ្គោ អយំ វុច្ចតិ បឡាសោ ។ យស្ស បុគ្គលស្ស អយំ បឡាសោ អប្បហីនោ អយំ វុច្ចតិ បុគ្គលោ បឡាសី ។

[៦០] កតមោ ច បុគ្គលោ ឥស្សុកី ។ តត្ថ កតមា ឥស្សា ។ យា បរលាភសក្ការគរុការមានន-វន្ទនបូជនាសុ ឥស្សា ឥស្សាយនា ឥស្សាយិតត្តំ ឧសូយា ឧសូយនា ឧសូយិតត្តំ អយំ វុច្ចតិ ឥស្សា ។ យស្ស បុគ្គលស្ស អយំ ឥស្សា អប្បហីនា

១ ឱ. និដ្ឋុរិយំ និដ្ឋុរិយកម្មំ ។ ២ ឱ. យុគ្គាហោ ។



[៥៩] បុគ្គលអ្នកលុបគុណគេ តើដូចម្ដេច ។ បណ្ដាធម៌ទាំងនោះ ការលុបគុណគេ តើដូចម្ដេច ។ ការលុបគុណ អាការលុបគុណ ភាពនៃសេចក្ដីលុបគុណ ការរោយឃ្លើ អំពើរោយឃ្លើ ណា នេះហៅថា ការលុបគុណ ។ បុគ្គលដែលមិនលះបង់ការលុបគុណនេះ នេះហៅថា បុគ្គលអ្នកលុបគុណគេ ។ បុគ្គលអ្នកប្រណាំងពសនា តើដូចម្ដេច ។ បណ្ដាធម៌ទាំងនោះ ការប្រណាំងពសនា តើដូចម្ដេច ។ ការប្រណាំងពសនា អាការប្រណាំងពសនា ភាពនៃសេចក្ដីប្រណាំងពសនា ការនាំមកនៃការប្រណាំងពសនា ហេតុជាទីតាំងនៃវិវាទ ការកាន់យកជាគូ ការមិនលះបង់ ណា នេះហៅថា ការប្រណាំងពស-នា ។ បុគ្គលដែលមិនលះបង់ការប្រណាំងពសនានេះ នេះហៅថា បុគ្គលអ្នកប្រណាំងពសនា ។

[៦០] បុគ្គលមានសេចក្ដីច្រណែន តើដូចម្ដេច ។ បណ្ដាធម៌ទាំងនោះ សេចក្ដីច្រណែន តើដូចម្ដេច ។ ការច្រណែន អាការច្រណែន ភាពនៃសេចក្ដីច្រណែន ការឈ្នានីស អាការឈ្នានីស ភាពនៃសេចក្ដីឈ្នានីស ក្នុងលាភសក្ការៈ សេចក្ដីគោរព ការរាប់អាន ការថ្វាយបង្គំ និងការបូជា របស់បុគ្គលដទៃ ណា នេះហៅថា សេចក្ដីច្រណែន ។ បុគ្គលដែលមិនលះបង់សេចក្ដីច្រណែននេះ

អយំ វុច្ចតិ បុគ្គលោ ឥស្សុកី ។ កតមោ ច បុគ្គលោ មច្ឆរី ។ តត្ថ កតមំ មច្ឆរិយំ ។ បញ្ច មច្ឆរិយានិ អាវាសមច្ឆរិយំ កុលមច្ឆរិយំ លាភមច្ឆរិយំ វណ្ណមច្ឆរិយំ ធម្មមច្ឆរិយំ យំ ឯវរូបំ មច្ឆេរំ មច្ឆរាយនា មច្ឆរាយិតត្តំ វេវិច្ឆំ កទរិយំ កដុកញ្ចុកតា អគ្គហិតត្តំ ចិត្តស្ស ឥទំ វុច្ចតិ មច្ឆរិយំ ។ យស្ស បុគ្គលស្ស ឥទំ មច្ឆរិយំ អប្បហីនំ អយំ វុច្ចតិ បុគ្គលោ មច្ឆរី ។

(២១) កតមោ ច បុគ្គលោ សឋោ ។ តត្ថ កតមំ សាឋេយ្យំ ។ ឥធេកច្ចោ បុគ្គលោ សឋោ ហោតិ បរិសឋោ. យំ តត្ថ សឋំ សឋតា សាឋេយ្យំ កក្ខរតា កក្ខរិយំ(១) បរិក្ខត្តតា បារិក្ខត្តិយំ ឥទំ វុច្ចតិ សាឋេយ្យំ ។ យស្ស បុគ្គលស្ស ឥទំ សាឋេយ្យំ អប្បហីនំ អយំ វុច្ចតិ បុគ្គលោ សឋោ ។ កតមោ ច បុគ្គលោ មាយាវី ។ តត្ថ កតមា មាយា ។ ឥធេកច្ចោ បុគ្គលោ កាយេន ទុច្ចរិតំ ចរិត្វា

១ ឱ. ម. កក្ខរតា កក្ខរិយន្តិ ទិស្សតិ ។ ម. កក្ខរោ កក្ខរិយន្តិ ទិស្សតិ ។



នេះហៅថា បុគ្គលមានសេចក្ដីច្រណែន ។ បុគ្គលមានសេចក្ដីកំណាញ់ តើដូចម្ដេច ។ បណ្ដាធម៌ទាំងនោះ សេចក្ដីកំណាញ់ តើដូចម្ដេច ។ សេចក្ដីកំណាញ់ ៥ យ៉ាង គឺ កំណាញ់អាវាស ១ កំណាញ់ត្រកូល ១ កំណាញ់លាភ ១ កំណាញ់សេចក្ដីសរសើរ ១ កំណាញ់ធម៌ ១ ការកំណាញ់ អាការកំណាញ់ ភាពនៃសេចក្ដីកំណាញ់ សេចក្ដីប្រាថ្នាខ្លាំង សេចក្ដីកំណាញ់ផិត សេចក្ដីស្វិតស្វាញ ចិត្តហួងហែងមិនរើសមុខ ណា ដែលមានសភាពដូច្នេះ នេះហៅថា សេចក្ដីកំណាញ់ ។ បុគ្គលដែលមិនលះបង់សេចក្ដីកំណាញ់នេះ នេះហៅថា បុគ្គលមានសេចក្ដីកំណាញ់ ។

(២២) បុគ្គលមានសេចក្ដីអួតអាង តើដូចម្ដេច ។ បណ្ដាធម៌ទាំងនោះ សេចក្ដីអួតអាង តើដូចម្ដេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ជាអ្នកអួតអាង ជាអ្នកឡេបឡប មានការអួតអាង អាការអួតអាង ភាពនៃសេចក្ដីអួតអាង សេចក្ដីរឹងរូស សេចក្ដីរឹងត្អឹង ការបោកប្រាស សេចក្ដីបោកប្រាស ណា នេះហៅថា សេចក្ដីអួតអាង ។ បុគ្គលដែលមិនលះបង់សេចក្ដីអួតអាងនេះ នេះហៅថា បុគ្គលមានសេចក្ដីអួតអាង ។ បុគ្គលមានមាយា តើដូចម្ដេច ។ បណ្ដាធម៌ទាំងនោះ មាយា តើដូចម្ដេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ប្រព្រឹត្តទុច្ចរិតដោយកាយ

កាយេន ទុច្ចរិតំ ចរិត្វា មនសា ទុច្ចរិតំ ចរិត្វា តស្ស បដិច្ឆាទនហេតុ បាបិកំ ឥច្ឆំ បណិទហតិ មា មំ ជញ្ញាតិ ឥច្ឆតិ មា មំ ជញ្ញាតិ សង្កប្បេតិ មា មំ ជញ្ញាតិ វាចំ ភាសតិ មា មំ ជញ្ញាតិ កាយេន បរក្កមតិ យា ឯវរូបា មាយា មាយាវិតា អច្ចាស-រា(១) វញ្ចនា និកតិ វិកិរណា បរិហរណា គូហនា បរិគូហនា ឆាទនា បដិច្ឆាទនា អនុត្តានីកម្មំ អនា-វិកម្មំ វោច្ឆាទនា បាបកិរិយា អយំ វុច្ចតិ មាយា ។ យស្ស បុគ្គលស្ស អយំ មាយា អប្បហីនា អយំ វុច្ចតិ បុគ្គលោ មាយាវី ។

(៦៨) កតមោ ច បុគ្គលោ អហិរិកោ ។ តត្ថ កតមំ អហិរិកំ ។ យំ ន ហិរីយតិ ហិរីយិតព្វេន ន ហិរីយតិ បាបកានំ អកុសលានំ ធម្មានំ សមាបត្តិយា ឥទំ វុច្ចតិ អហិរិកំ ។ ឥមិនា អហិរិកេន សមន្នាគតោ បុគ្គលោ អហិរិកោ ។

១ ម. អច្ចាវតា ។



ប្រព្រឹត្តទុច្ចរិតដោយកាយ ប្រព្រឹត្តទុច្ចរិតដោយចិត្ត តំកល់ទុកនូវសេចក្តីប្រាថ្នាដ៏លាមក ព្រោះហេតុបិទបាំងនូវទុច្ចរិតនោះ ប្រាថ្នាថា កុំឲ្យគេស្គាល់អញ ត្រិះរិះថា កុំឲ្យគេស្គាល់អញ ពោលវាចាថា កុំឲ្យគេស្គាល់អញ ព្យាយាមដោយកាយថា កុំឲ្យគេស្គាល់អញ មាយា ភាពមាយា ការបិទបាំងទោស ការបញ្ឆោត ការបំភាន់ ការបោះពាលឡៀថ្ងប ការគេចពុតនូវទោស ការលាក់ ការលាក់ក្បិត ការបិទបាំងខ្ជាប់ ការបិទបាំងក្បិត អំពើមិនកក់ អំពើមិនធ្វើឲ្យប្រាកដ ការបិទបាំងជិត កិរិយាដ៏លាមក ណា ដែលមានសភាពដូច្នេះ នេះហៅថា មាយា ។ បុគ្គលដែលមិនលះបង់មាយានេះ នេះហៅថា បុគ្គលមានមាយា ។

(៦៨) បុគ្គលមិនខ្មាសបាប តើដូចម្តេច ។ បណ្តាធម៌ទាំងនោះ ការមិនខ្មាសបាប តើដូចម្តេច ។ ធម្មជាតណា ដែលបុគ្គលមិនខ្មាសដោយអំពើដែលគេត្រូវខ្មាស មិនខ្មាសដោយការកប់ប្រសប់នូវធម៌ជាអកុសលដ៏លាមក នេះហៅថា ការមិនខ្មាសបាប ។ បុគ្គលប្រកបដោយសេចក្តីមិនខ្មាសនេះ ឈ្មោះថា បុគ្គលមិនខ្មាសបាប ។

កតមោ ច បុគ្គលោ អនោត្តប្បី ។ តត្ថ កតមំ អនោត្តប្បំ ។ យំ ន ឱត្តប្បតិ ឱត្តប្បិតព្វេន ន ឱត្តប្បតិ បាបកានំ អកុសលានំ ធម្មានំ សមាបត្តិយា ឥទំ វុច្ចតិ អនោត្តប្បំ ។ ឥមិនា អនោត្តប្បេន សមន្នាគតោ បុគ្គលោ អនោត្តប្បី ។

(៦៣) កតមោ ច បុគ្គលោ ទុព្វចោ ។ តត្ថ កតមា ទោវចស្សតា ។ សហធម្មិកេ វុច្ចមានេ ទោវចស្សាយំ ទោវចស្សិយំ ទោវចស្សតា វិប្បដិកុលគ្គាហិតា វិបច្ចនីកសាតតា អនាទរិយំ អនាទរតា អគារវតា អប្បដិស្សវតា អយំ វុច្ចតិ ទោវចស្សតា ។ ឥមាយ ទោវចស្សតាយ សមន្នាគតោ បុគ្គលោ ទុព្វចោ ។ កតមោ ច បុគ្គលោ បាបមិត្តោ ។ តត្ថ កតមា បាបមិត្តតា ។ យេ តេ បុគ្គលា អស្សទ្ធា ទុស្សីលា អប្បស្សុតា មច្ឆរិនោ ទុប្បញ្ញា តេសំ សេវនា និសេវនា សំសេវនា ភជនា



បុគ្គលមិនខ្លាចបាប តើដូចម្តេច ។ បណ្តាធម៌ទាំងនោះ ការមិនខ្លាចបាប តើដូចម្តេច ។ ធម្មជាតណា ដែលបុគ្គលមិនខ្លាចដោយអំពើដែលគេត្រូវខ្លាច មិនខ្លាចដោយការគប់ប្រសប់ នឹងធម៌ជាអកុសលដ៏លាមក នេះហៅថា ការមិនខ្លាចបាប ។ បុគ្គលប្រកបដោយការមិនខ្លាចបាបនេះ ឈ្មោះថា បុគ្គលមិនខ្លាចបាប ។

(៦៣) បុគ្គលប្រដៅក្រ តើដូចម្តេច ។ បណ្តាធម៌ទាំងនោះ ភាពនៃបុគ្គលប្រដៅក្រ តើដូចម្តេច ។ ការប្រដៅក្រ សេចក្តីប្រដៅក្រ ភាពដែលគេប្រដៅបានដោយក្រ ភាពនៃបុគ្គលដែលប្រកាន់យកតែខាងខុស ភាពនៃបុគ្គលដែលត្រេកអរក្នុងធម៌ជាសត្រូវ ការមិនអើពើ ភាពនៃបុគ្គលមិនអើពើ ភាពនៃបុគ្គលមិនគោរព ភាពនៃបុគ្គលមិនទទួលស្តាប់បង្គាប់ ចំពោះសហធម្មិកដែលស្តីប្រដៅ នេះហៅថា ភាពនៃបុគ្គលប្រដៅក្រ ។ បុគ្គលប្រកបដោយសេចក្តីប្រដៅក្រនេះ ឈ្មោះថា បុគ្គលប្រដៅក្រ ។ បុគ្គលមានមិត្តអាក្រក់ តើដូចម្តេច ។ បណ្តាធម៌ទាំងនោះ ភាពនៃបុគ្គលមានមិត្តអាក្រក់ តើដូចម្តេច ។ បុគ្គលណា មិនមានសទ្ធា ទ្រុស្តសីល ជាអ្នកចេះដឹងតិច មានសេចក្តីកំណាញ់ មិនមានបញ្ញា ការសេព ការសេពដោយស្និទ្ធស្នាល ការសេពដោយត្រូវគំនិតគ្នា ការគប់រកគ្នា ការគប់រកត្រូវគំនិតគ្នា

សម្ភជនា ភត្តិ សម្ភត្តិ សម្បវង្កតា(១) អយំ វុច្ចតិ បាបមិត្តតា ។ ឥមាយ បាបមិត្តតាយ សមន្នាគតោ បុគ្គលោ បាបមិត្តោ ។

(៦៤) កតមោ ច បុគ្គលោ ឥន្ទ្រិយេសុ អគុត្តទ្វារោ ។ តត្ថ កតមា ឥន្ទ្រិយេសុ អគុត្តទ្វារតា ។ ឥធេកច្ចោ ចក្ខុនា រូបំ ទិស្វា និមិត្តគ្គាហី ហោតិ អនុព្យញ្ជនគ្គាហី យត្វាធិករណមេនំ ចក្ខុន្ទ្រិយំ អសំវុតំ វិហរន្តំ អភិជ្ឈាទោមនស្សា បាបកា អកុសលា ធម្មា អន្វាស្សវេយ្យុំ តស្ស សំវរាយ ន បដិបជ្ជតិ ន រក្ខតិ ចក្ខុន្ទ្រិយំ ចក្ខុន្ទ្រិយេ ន សំវរំ អាបជ្ជតិ ។ សោតេន សទ្ទំ សុត្វា ។បេ។ ឃានេន គន្ធំ ឃាយិត្វា ។បេ។ ជិវ្ហាយ រសំ សាយិត្វា ។បេ។ កាយេន ផោដ្ឋព្វំ ផុសិត្វា ។បេ។

១ ម. សម្បវង្កតា ។



សេចក្តីស្រឡាញ់ ការស្រឡាញ់ជិតដិតនឹងគ្នា ភាពនៃបុគ្គលមូលមិត្តជាមួយគ្នា ចំពោះបុគ្គលទាំងនោះ ណា នេះហៅថា ភាពនៃបុគ្គលមានមិត្តអាក្រក់ ។ បុគ្គលប្រកបដោយភាពជាអ្នកមានមិត្តអាក្រក់នេះ ឈ្មោះថា បុគ្គលមានមិត្តអាក្រក់ ។

(៦៤) បុគ្គលមានទ្វារមិនរក្សា ក្នុងឥន្ទ្រិយ តើដូចម្តេច ។ បណ្តាបទទាំងនោះ ភាពនៃបុគ្គលមានទ្វារមិនរក្សា ក្នុងឥន្ទ្រិយ តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ឃើញរូបដោយចក្ខុ ជាអ្នកកាន់យកនិមិត្ត កាន់យកអនុព្យញ្ជនៈ អភិជ្ឈាទោមនស្ស ជាអកុសលធម៌លាមក គប្បីគ្របសង្កត់បុគ្គលដែលមិនសង្រួមចក្ខុន្ទ្រិយនុ៎ះ ព្រោះហេតុមិនសង្រួមចក្ខុន្ទ្រិយណា មិនប្រតិបត្តិ ដើម្បីសង្រួមចក្ខុន្ទ្រិយនោះ មិនរក្សាចក្ខុន្ទ្រិយ មិនដល់នូវការសង្រួម ក្នុងចក្ខុន្ទ្រិយ ។ ឮសំឡេងដោយត្រចៀក ។បេ។ ធុំក្លិនដោយច្រមុះ ។បេ។ លិទ្ធរសដោយអណ្តាត ។បេ។ ពាល់សម្ផស្សដោយកាយ ។បេ។

មនសា ធម្មំ វិញ្ញាយ និមិត្តគ្គាហី ហោតិ អនុព្យ-
ញ្ជនគ្គាហី យត្វាធិករណមេនំ មនិន្ទ្រិយំ អសំវុតំ
វិហរន្តំ អភិជ្ឈាទោមនស្សា បាបកា អកុសលា
ធម្មា អន្វាស្សវេយ្យុំ តស្ស សំវរាយ ន បដិបជ្ជតិ
ន រក្ខតិ មនិន្ទ្រិយំ មនិន្ទ្រិយេ ន សំវរំ អាបជ្ជតិ
យា ឥមេសំ ឆន្នំ ឥន្ទ្រិយានំ អគុត្តិ អគោបនា
អនារក្ខោ អសំវរោ អយំ វុច្ចតិ ឥន្ទ្រិយេសុ អគុត្ត-
ទ្វារតា ។ ឥមាយ ឥន្ទ្រិយេសុ អគុត្តទ្វារតាយ
សមន្នាគតោ បុគ្គលោ ឥន្ទ្រិយេសុ អគុត្តទ្វារោ ។
កតមោ ច បុគ្គលោ ភោជនេ អមត្តញ្ញូ ។ តត្ថ
កតមា ភោជនេ អមត្តញ្ញុតា ។ ឥធេកច្ចោ
អប្បដិសង្ខា អយោនិសោ អាហារំ អាហារេតិ ទវាយ
មទាយ មណ្ឌនាយ វិភូសនាយ យា តត្ថ អ-
សន្តុដ្ឋិតា អមត្តញ្ញុតា អប្បដិសង្ខា ភោជនេ អយំ
វុច្ចតិ ភោជនេ អមត្តញ្ញុតា ។ ឥមាយ ភោជនេ
អមត្តញ្ញុតាយ សមន្នាគតោ បុគ្គលោ ភោជនេ
អមត្តញ្ញូ ។





ដឹងច្បាស់ធម្មារម្មណ៍ដោយចិត្តហើយ ជាអ្នកកាន់យកនិមិត្ត កាន់យក
អនុព្យញ្ជនៈ អភិជ្ឈានិងទោមនស្ស ជាអកុសលធម៌លាមក គប្បីគ្រប
សង្កត់បុគ្គលដែលមិនសង្រួមមនិន្ទ្រិយនុ៎ះ ព្រោះហេតុមិនសង្រួមមនិន្ទ្រិយ
ណា មិនប្រតិបត្តិដើម្បីសង្រួមមនិន្ទ្រិយនោះ មិនរក្សាមនិន្ទ្រិយ មិន
ដល់នូវការសង្រួមក្នុងមនិន្ទ្រិយនោះ មិនរក្សាមនិន្ទ្រិយ មិនដល់នូវការ
សង្រួមក្នុងមនិន្ទ្រិយ ការមិនគ្រប់គ្រង ការការមិនគ្រប់គ្រង ការមិនរក្សា
សេចក្តីមិនសង្រួម នូវឥន្ទ្រិយទាំង ៦ នេះ ណា នេះហៅថា ភាព
នៃបុគ្គលមានទ្វារមិនរក្សាក្នុងឥន្ទ្រិយ ។ បុគ្គលប្រកបដោយភាពជាអ្នក
មានទ្វារមិនរក្សាក្នុងឥន្ទ្រិយនេះ ឈ្មោះថា ជាអ្នកមានទ្វារមិនគ្រប់គ្រងក្នុង
ឥន្ទ្រិយ ។ បុគ្គលមិនដឹងប្រមាណក្នុងភោជន តើដូចម្តេច ។ បណ្តា
ធម៌ទាំងនោះ ភាពនៃបុគ្គលមិនដឹងប្រមាណក្នុងភោជន តើដូចម្តេច ។
បុគ្គលខ្លះ ក្នុងលោកនេះ មិនពិចារណា មិនធ្វើដោយឧបាយប្រាជ្ញ
ក៏បរិភោគអាហារ ដើម្បីលេង ដើម្បីស្រវឹង ដើម្បីប្រដាប់ ដើម្បី
ស្អិតស្អាង ការមិនសន្តោស ការមិនដឹងប្រមាណ សេចក្តីមិនពិចារណា
ក្នុងភោជនៈនោះ ណា នេះហៅថា ភាពនៃបុគ្គលមិនដឹងប្រមាណក្នុង
ភោជន ។ បុគ្គលប្រកបដោយភាពជាអ្នកមិនដឹងប្រមាណក្នុងភោជន
នេះ ឈ្មោះថា ជាអ្នកមិនដឹងប្រមាណក្នុងភោជន ។

វាចសិកោ វីតិក្កមោ កាយិកវាចសិកោ វីតិក្កមោ អយំ វុច្ចតិ សីលវិបត្តិ សព្វម្បិ ទុស្សីល្យំ សី-លវិបត្តិ ។ ឥមាយ សីលវិបត្តិយា សមន្នាគតោ បុគ្គលោ សីលវិបន្នោ ។ កតមោ ច បុគ្គលោ ទិដ្ឋិវិបន្នោ ។ តត្ថ កតមា ទិដ្ឋិវិបត្តិ ។ នត្ថិ ទិន្នំ នត្ថិ យិដ្ឋំ នត្ថិ ហុតំ នត្ថិ សុកតទុក្កដានំ កម្មានំ ផលំ វិបាកោ នត្ថិ អយំ លោកោ នត្ថិ បរោ លោកោ នត្ថិ មាតា នត្ថិ បិតា នត្ថិ សត្តា ឱបបាតិកា នត្ថិ លោកេ សមណព្រាហ្មណា សម្មគ្គតា សម្មាបដិបន្នា យេ ឥមញ្ច លោកំ បរញ្ច លោកំ សយំ អភិញ្ញា សច្ឆិកត្វា បវេទេន្តីតិ យា ឯវរូបា ទិដ្ឋិ ទិដ្ឋិគតំ ទិដ្ឋិគហនំ ទិដ្ឋិកន្តារោ ទិដ្ឋិ-វិសូកាយិកំ ទិដ្ឋិវិប្ផន្ទិតំ ទិដ្ឋិសញ្ញោជនំ គាហោ បដិគ្គាហោ អភិនិវេសោ បរាមាសោ កុម្មគ្គោ មិច្ឆាបថោ មិច្ឆត្តំ តិត្ថាយតនំ វិបរិយេសគ្គាហោ អយំ វុច្ចតិ ទិដ្ឋិវិបត្តិ សព្វាបិ មិច្ឆាទិដ្ឋិ ទិដ្ឋិវិបត្តិ ។ ឥមាយ ទិដ្ឋិវិបត្តិយា សមន្នាគតោ បុគ្គលោ ទិដ្ឋិ-វិបន្នោ ។





ការប្រព្រឹត្តិល្មើស ប្រកបដោយវាចា ការប្រព្រឹត្តិល្មើស ប្រកបដោយកាយនិងវាចា នេះហៅថា វិបត្តិសីល ភាពនៃបុគ្គលទ្រុស្តសីលទាំងអស់ ក៏ឈ្មោះថាវិបត្តិសីលដែរ ។ បុគ្គលប្រកបដោយវិបត្តិសីលនេះ ឈ្មោះថា បុគ្គលវិបត្តិសីល ។ បុគ្គលវិបត្តិទិដ្ឋិ តើដូចម្តេច ។ បណ្តាធម៌ទាំងនោះ វិបត្តិទិដ្ឋិ តើដូចម្តេច ។ (សេចក្តីយល់) ថា ទានដែលបុគ្គលឲ្យហើយមិនមានផល ការបូជាធំមិនមានផល ការបូជាតូចមិនមានផល ផលវិបាករបស់កម្ម ដែលបុគ្គលធ្វើល្អនិងធ្វើអាក្រក់មិនមាន លោកនេះមិនមាន លោកខាងមុខមិនមាន មាតាមិនមានគុណ បិតាមិនមានគុណ ពួកសត្វជាឱបបាតិកៈកើតមិនមាន ពួកសមណ-ព្រាហ្មណ៍ក្នុងលោក ប្រព្រឹត្តល្អ ប្រតិបត្តិត្រូវ ដែលធ្វើឲ្យជាក់ច្បាស់នូវលោកនេះនិងលោកខាងមុខ ដោយប្រាជ្ញាដ៏ឧត្តមដោយខ្លួនឯង ហើយសំដែងប្រាប់មិនមាន ទិដ្ឋិ ដំណើរនៃទិដ្ឋិ ព្រៃស្បាតគឺទិដ្ឋិ ផ្លូវឆ្ងាយគឺទិដ្ឋិ ប្រែប្រួលគឺទិដ្ឋិ ការយល់ឆ្វេងគឺទិដ្ឋិ ការទាក់ទងគឺទិដ្ឋិ ការកាន់ ការប្រកាន់ ការប្រកាន់ខ្ជាប់ ការស្ទាបអង្អែល ផ្លូវអាក្រក់ ផ្លូវខុស ធម្មជាតដែលខុស លទ្ធិដូចជាកំពង់ ការប្រកាន់ធម៌ការស្វែងរកខុស ណា ដែលមានសភាពដូច្នេះ នេះហៅថា វិបត្តិទិដ្ឋិ មិច្ឆាទិដ្ឋិទាំងអស់ ក៏ឈ្មោះថា វិបត្តិទិដ្ឋិដែរ ។ បុគ្គលប្រកបដោយវិបត្តិទិដ្ឋិនេះ ឈ្មោះថា បុគ្គលវិបត្តិទិដ្ឋិ ។

[៦៧] កតមោ ច បុគ្គលោ អជ្ឈត្តសញ្ញោជនោ ។ យស្ស បុគ្គលស្ស បញ្ចោរម្ភាគិយានិ សញ្ញោជនានិ អប្បហីនានិ អយំ វុច្ចតិ បុគ្គលោ អជ្ឈត្តសញ្ញោជនោ ។ កតមោ ច បុគ្គលោ ពហិទ្ធាសញ្ញោជនោ ។ យស្ស បុគ្គលស្ស បញ្ចុទ្ធម្ភាគិយានិ សញ្ញោជនានិ អប្បហីនានិ អយំ វុច្ចតិ បុគ្គលោ ពហិទ្ធាសញ្ញោជនោ ។

[៦៨] កតមោ ច បុគ្គលោ អក្កោធនោ ។ តត្ថ កតមោ កោធោ ។ យោ កោធោ កុជ្ឈនា កុជ្ឈិតត្តំ ទោសោ ទុស្សនា ទុស្សិតត្តំ ព្យាបត្តិ ព្យាបជ្ជនា ព្យាបជ្ជិតត្តំ វិរោធោ បដិវិរោធោ ចណ្ឌិក្កំ អសុរោបោ អនត្តមនតា ចិត្តស្ស អយំ វុច្ចតិ កោធោ ។ យស្ស បុគ្គលស្ស អយំ កោធោ បហីនោ អយំ វុច្ចតិ បុគ្គលោ អក្កោធនោ ។ កតមោ ច បុគ្គលោ អនុបនាហី ។ តត្ថ កតមោ ឧបនាហោ ។ បុព្វកាលំ កោធោ





(៦៧) បុគ្គលមានសញ្ញោជនៈខាងក្នុង តើដូចម្តេច ។ បុគ្គលដែលមិនបានលះបង់សញ្ញោជនៈ ជាចំណែកខាងក្រោម ៥ នេះហៅថា បុគ្គលមានសញ្ញោជនៈខាងក្នុង ។ បុគ្គលមានសញ្ញោជនៈខាងក្រៅ តើដូចម្តេច ។ បុគ្គលដែលមិនបានលះបង់សញ្ញោជនៈ ជាចំណែកខាងលើ ៥ នេះហៅថា បុគ្គលមានសញ្ញោជនៈខាងក្រៅ ។

(៦៨) បុគ្គលមិនមានសេចក្តីក្រោធ តើដូចម្តេច ។ បណ្តាធម៌ទាំងនោះ សេចក្តីក្រោធ តើដូចម្តេច ។ ការក្រោធ អាការក្រោធ ភាពនៃសេចក្តីក្រោធ ការប្រទូស្ត អាការប្រទូស្ត ភាពនៃសេចក្តីប្រទូស្ត ការព្យាបាទ អាការព្យាបាទ ភាពនៃសេចក្តីព្យាបាទ ការទាស់ ការទាស់ទាល់ ភាពនៃចិត្តកាច ការព្រហើន សេចក្តីតូចចិត្តណា នេះហៅថា សេចក្តីក្រោធ ។ បុគ្គលដែលលះបង់សេចក្តីក្រោធនេះ នេះហៅថា បុគ្គលមិនមានសេចក្តីក្រោធ ។ បុគ្គលមិនចងសេចក្តីក្រោធទុក តើដូចម្តេច ។ បណ្តាធម៌ទាំងនោះ ការចងសេចក្តីក្រោធទុក តើដូចម្តេច ។ សេចក្តីក្រោធក្នុងកាលមុន សេចក្តី

អបរកាលំ ឧបនាហោ យោ ឯវរូបោ ឧបនាហោ ឧបនាហនា ឧបនាហិតត្តំ អដ្ឋបនា ឋបនា សណ្ឋបនា អនុសំសន្ទនា អនុប្បពន្ធនា ទឡ្ហីកម្មំ កោធស្ស អយំ វុច្ចតិ ឧបនាហោ ។ យស្ស បុគ្គលស្ស អយំ ឧបនាហោ បហីនោ អយំ វុច្ចតិ បុគ្គលោ អនុបនាហី ។

(៦៤) កតមោ ច បុគ្គលោ អមក្ខី ។ តត្ថ កតមោ មក្ខោ ។ យោ មក្ខោ មក្ខាយនា មក្ខាយិតត្តំ និដ្ឋុរិយំ និដ្ឋុរិយកម្មំ អយំ វុច្ចតិ មក្ខោ ។ យស្ស បុគ្គលស្ស អយំ មក្ខោ បហីនោ អយំ វុច្ចតិ បុគ្គលោ អមក្ខី ។ កតមោ ច បុគ្គលោ អបលាសី ។ តត្ថ កតមោ បលាសោ ។ យោ បលាសោ បលាសាយនា បលាសាយិតត្តំ បលាសាហារោ វិវាទដ្ឋានំ យុគគ្គាហោ អប្បដិនិស្សគ្គោ អយំ វុច្ចតិ បលាសោ ។ យស្ស បុគ្គលស្ស អយំ បលាសោ បហីនោ អយំ វុច្ចតិ បុគ្គលោ អបលាសី ។





ចងក្រោធទុក ក្នុងកាលខាងក្រោយ ការចងក្រោធទុក អាការចងក្រោធទុក ភាពនៃសេចក្តីចងក្រោធទុក សេចក្តីតាំងទុក អាការតំកល់ទុក សេចក្តីតំកល់ព្រម ការតំកល់ទុករឿយៗ អាការចងទុករឿយៗ សំរេចដ៏មាំនៃសេចក្តីក្រោធ ណា ដែលមានសភាពដូច្នេះ នេះហៅថា ការចងសេចក្តីក្រោធទុក ។ បុគ្គលដែលលះបង់ការចងសេចក្តីក្រោធទុកនេះ នេះហៅថា បុគ្គលមិនចងសេចក្តីក្រោធទុក ។

(៦៤) បុគ្គលមិនលុបគុណគេ តើដូចម្តេច ។ បណ្តាធម៌ទាំងនោះ ការលុបគុណគេ តើដូចម្តេច ។ ការលុបគុណ អាការលុបគុណ ភាពនៃសេចក្តីលុបគុណ ការរៃឃ្លើ អំពើរៃឃ្លើ ណា នេះហៅថា ការលុបគុណគេ ។ បុគ្គលដែលលះបង់ការលុបគុណនេះ នេះហៅថា បុគ្គលមិនលុបគុណគេ ។ បុគ្គលអ្នកមិនប្រណាំងនឹងគ្នា តើដូចម្តេច ។ បណ្តាធម៌ទាំងនោះ ការប្រណាំងនឹងគ្នា តើដូចម្តេច ។ ការប្រណាំងនឹងគ្នា អាការប្រណាំងនឹងគ្នា ភាពនៃសេចក្តីប្រណាំងនឹងគ្នា អាហារនៃការប្រណាំងនឹងគ្នា ហេតុជាទីតាំងនៃវិវាទ សេចក្តីកាន់យកជាគូ ការមិនលះបង់ ណា នេះហៅថា ការប្រណាំងនឹងគ្នា ។ បុគ្គលដែលលះបង់ការប្រណាំងនឹងគ្នានេះ នេះហៅថា បុគ្គលមិនប្រណាំងនឹងគ្នា ។

(៨០) កតមោ ច បុគ្គលោ អនិស្សុកី ។ តត្ថ កតមា ឥស្សា ។ យា បរលាភសក្ការគរុការមានន-វន្ទនបូជនាសុ ឥស្សា ឥស្សាយនា ឥស្សាយិតត្តំ ឧសូយា ឧសូយនា ឧសូយិតត្តំ អយំ វុច្ចតិ ឥស្សា ។ យស្ស បុគ្គលស្ស អយំ ឥស្សា បហីនា អយំ វុច្ចតិ បុគ្គលោ អនិស្សុកី ។ កតមោ ច បុគ្គលោ អមច្ឆរី ។ តត្ថ កតមំ មច្ឆរិយំ ។ បញ្ច មច្ឆរិយានិ អាវាសមច្ឆរិយំ កុលមច្ឆរិយំ លាភមច្ឆរិយំ វណ្ណមច្ឆរិយំ ធម្មមច្ឆរិយំ យំ ឯវរូបំ មច្ឆេរំ មច្ឆរាយនា មច្ឆរាយិតត្តំ វេវិច្ឆំ កទរិយំ កដុកញ្ចុកតា អគ្គហិតត្តំ ចិត្តស្ស ឥទំ វុច្ចតិ មច្ឆរិយំ ។ យស្ស បុគ្គលស្ស ឥទំ មច្ឆរិយំ បហីនំ អយំ វុច្ចតិ បុគ្គលោ អមច្ឆរី ។

(៨១) កតមោ ច បុគ្គលោ អសឋោ ។ តត្ថ កតមំ សាឋេយ្យំ ។ ឥធេកច្ចោ បុគ្គលោ





(៨០) បុគ្គលមិនមានសេចក្តីច្រណែន តើដូចម្តេច ។ បណ្តាធម៌ទាំងនោះ សេចក្តីច្រណែន តើដូចម្តេច ។ ការច្រណែន អាការច្រណែន ភាពនៃសេចក្តីច្រណែន ការឈ្នានីស អាការឈ្នានីស ភាពនៃសេចក្តីឈ្នានីស ក្នុងលាភ សក្ការៈ ការគោរព ការកោតគាប ការថ្វាយបង្គំ និងការបូជា របស់បុគ្គលដទៃ ណា នេះហៅថា សេចក្តីច្រណែន ។ បុគ្គលដែលលះបង់សេចក្តីច្រណែននេះ នេះហៅថា បុគ្គលមិនមានសេចក្តីច្រណែន ។ បុគ្គលមិនមានសេចក្តីកំណាញ់ តើដូចម្តេច ។ បណ្តាធម៌ទាំងនោះ សេចក្តីកំណាញ់ តើដូចម្តេច ។ សេចក្តីកំណាញ់ ៥ យ៉ាង គឺ កំណាញ់អាវាស ១ កំណាញ់ត្រកូល ១ កំណាញ់លាភ ១ កំណាញ់សេចក្តីសរសើរ ១ កំណាញ់ធម៌ ១ ការកំណាញ់ អាការកំណាញ់ ភាពនៃសេចក្តីកំណាញ់ សេចក្តីព្រាច់ខ្ទាំង សេចក្តីកំណាញ់រឹង សេចក្តីស្វិតស្វាញ ចិត្តហួងហែងមិនរើសមុខ ណា ដែលមានសភាពដូច្នេះ នេះហៅថា សេចក្តីកំណាញ់ ។ បុគ្គលដែលលះបង់សេចក្តីកំណាញ់នេះ នេះហៅថា បុគ្គលមិនមានសេចក្តីកំណាញ់ ។

(៨១) បុគ្គលជាអ្នកមិនអួតអាង តើដូចម្តេច ។ បណ្តាធម៌ទាំងនោះ សេចក្តីអួតអាង តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ

(៧២) កតមោ ច បុគ្គលោ ហិរិមា ។ តត្ថ កតមា ហិរិ ។ យំ ហិរិយតិ ហិរិយិតព្វេន ហិរិយតិ បាបកានំ អកុសលានំ ធម្មានំ សមាបត្តិយា អយំ វុច្ចតិ ហិរិ ។ ឥមាយ ហិរិយា សមន្នាគតោ បុគ្គលោ ហិរិមា ។ កតមោ ច បុគ្គលោ ឱត្តប្បី ។ តត្ថ កតមំ ឱត្តប្បំ ។ យំ ឱត្តប្បតិ ឱត្តប្បិតព្វេន ឱត្តប្បតិ បាបកានំ អកុសលានំ ធម្មានំ សមាបត្តិយា ឥទំ វុច្ចតិ ឱត្តប្បំ ។ ឥមិនា ឱត្តប្បេន សមន្នាគតោ បុគ្គលោ ឱត្តប្បី ។

(៧៣) កតមោ ច បុគ្គលោ សុវចោ ។ តត្ថ កតមា សោវចស្សតា ។ សហធម្មិកេ វុច្ចមានេ សោវចស្សាយំ សោវចស្សិយំ សោវចស្សតា អប្បដិកូលគ្គាហិតា អវិបច្ចនីកសាតតា សាទរិយំ សាទរតា សប្បតិស្សតា អយំ វុច្ចតិ





(៧២) បុគ្គលមានសេចក្ដីខ្មាសបាប តើដូចម្ដេច ។ បណ្ដាធម៌ទាំងនោះ សេចក្ដីខ្មាសបាប តើដូចម្ដេច ។ ធម្មជាតណា ដែលបុគ្គលខ្មាស ដោយអំពើដែលគេត្រូវខ្មាស ខ្មាសដោយការគប់ប្រសប់នឹងធម៌ជាអកុសលដ៏លាមក នេះហៅថា សេចក្ដីខ្មាសបាប ។ បុគ្គលប្រកបដោយសេចក្ដីខ្មាសបាបនេះ ឈ្មោះថា បុគ្គលមានសេចក្ដីខ្មាសបាប ។ បុគ្គលមានសេចក្ដីខ្លាចបាប តើដូចម្ដេច ។ បណ្ដាធម៌ទាំងនោះ សេចក្ដីខ្លាចបាប តើដូចម្ដេច ។ ធម្មជាតណា ដែលបុគ្គលខ្លាច ដោយអំពើដែលគេត្រូវខ្លាច ខ្លាចដោយការគប់ប្រសប់ នឹងធម៌ជាអកុសលដ៏លាមក នេះហៅថា សេចក្ដីខ្លាចបាប ។ បុគ្គលប្រកបដោយសេចក្ដីខ្លាចបាបនេះ ឈ្មោះថា បុគ្គលមានសេចក្ដីខ្លាចបាប ។

(៧៣) បុគ្គលប្រដៅងាយ តើដូចម្ដេច ។ បណ្ដាធម៌ទាំងនោះ ភាពនៃបុគ្គលដែលគេប្រដៅងាយ តើដូចម្ដេច ។ ការប្រដៅងាយ សេចក្ដីប្រដៅងាយ ភាពដែលគេប្រដៅទូន្មានដោយងាយ ភាពនៃបុគ្គលមិនប្រកាន់យកខាងខុស ភាពនៃបុគ្គលត្រេកអរក្នុងធម៌មិនជាសត្រូវ សេចក្ដីប្រកបដោយការអើពើ ភាពនៃបុគ្គលប្រកបដោយការអើពើ ភាពនៃបុគ្គលប្រកបដោយការគោរព ភាពនៃបុគ្គលប្រកបដោយការស្ដាប់បង្គាប់ ចំពោះសហធម្មិកដែលស្ដីប្រដៅ នេះហៅថា

សោវចស្សតា ។ ឥមាយ សោវចស្សតាយ សមន្នាគតោ បុគ្គលោ សុវចោ ។ កតមោ ច បុគ្គលោ កល្យាណមិត្តោ ។ តត្ថ កតមា កល្យាណមិត្តតា ។ យេ តេ បុគ្គលា សទ្ធា សីលវន្តោ ពហុស្សុតា ចាគវន្តោ បញ្ញវន្តោ យា តេសំ សេវនា និសេវនា សំសេវនា ភជនា សម្ភជនា ភត្តិ សម្ភត្តិ សម្បវង្កតា អយំ វុច្ចតិ កល្យាណមិត្តតា ។ ឥមាយ កល្យាណមិត្តតាយ សមន្នាគតោ បុគ្គលោ កល្យាណមិត្តោ ។

[៧៦] កតមោ ច បុគ្គលោ ឥន្ទ្រិយេសុ គុត្តទ្វារោ ។ តត្ថ កតមា ឥន្ទ្រិយេសុ គុត្តទ្វារតា ។ ឥធេកច្ចោ ចក្ខុនា រូបំ ទិស្វា ន និមិត្តគ្គាហី ហោតិ នានុព្យញ្ជនគ្គាហី យត្វាធិករណមេនំ ចក្ខុន្ទ្រិយំ អសំវុតំ វិហរន្តំ អភិជ្ឈាទោមនស្សា បាបកា អកុសលា ធម្មា អន្វាស្សវេយ្យុំ តស្ស សំវរាយ បដិបជ្ជតិ រក្ខតិ ចក្ខុន្ទ្រិយំ ចក្ខុន្ទ្រិយេ សំវរំ អាបជ្ជតិ សោតេន សទ្ទំ សុត្វា ។បេ។ ឃានេន គន្ធំ ឃាយិត្វា ។បេ។ ជិវ្ហាយ រសំ សាយិត្វា ។បេ។



ភាពនៃបុគ្គលដែលគេប្រដៅបានដោយងាយ ។ បុគ្គលប្រកបដោយភាពដែលគេប្រដៅបានដោយងាយនេះ ឈ្មោះថា បុគ្គលប្រដៅងាយ ។ បុគ្គលមានមិត្តល្អ តើដូចម្តេច ។ បណ្តាបុគ្គលទាំងនោះ ភាពនៃបុគ្គលមានមិត្តល្អ តើដូចម្តេច ។ បុគ្គលណា មានសទ្ធា មានសីល ជាពហុស្សូត មានចាគៈ មានបញ្ញា ការសេពគប់ ការសេពដោយស៊ប់ខ្ជួន ការសេពដោយគ្រប់ទិសទី ការគប់រកគ្នា ការគប់រកគ្រប់ទិសទី សេចក្តីស្រឡាញ់ សេចក្តីស្រឡាញ់ជិតដិតនឹងគ្នា ភាពនៃបុគ្គលប្រួលមិត្តជាមួយគ្នា ចំពោះបុគ្គលទាំងនោះ ណា នេះ ហៅថា ភាពនៃបុគ្គលមានមិត្តល្អ ។ បុគ្គលប្រកបដោយភាពជាអ្នកមានមិត្តល្អនេះ ឈ្មោះថា បុគ្គលមានមិត្តល្អ ។

(៧៦) បុគ្គលមានទ្វារគ្រប់គ្រងឥន្ទ្រិយ តើដូចម្តេច ។ បណ្តាធម៌ទាំងនោះ ភាពនៃបុគ្គលមានទ្វារគ្រប់គ្រងឥន្ទ្រិយ តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ឃើញរូបដោយចក្ខុ ហើយជាអ្នកមិនកាន់យកនិមិត្ត មិនកាន់យកអនុព្យញ្ជនៈ អភិជ្ឈានិងទោមនស្ស ជាអកុសលធម៌ដ៏លាមក គប្បីគ្របសង្កត់បុគ្គលដែលមិនសង្រួមចក្ខុន្ទ្រិយនុ៎ះ ព្រោះហេតុមិនសង្រួមចក្ខុន្ទ្រិយណា ក៏ប្រតិបត្តិដើម្បីសង្រួមចក្ខុន្ទ្រិយនោះ រក្សាចក្ខុន្ទ្រិយ ដល់នូវសេចក្តីសង្រួមក្នុងចក្ខុន្ទ្រិយ ឮសំឡេងដោយត្រចៀក ។បេ។ ធុំក្លិនដោយច្រមុះ ។បេ។ ភ្លក់រសដោយអណ្តាត ។បេ។

ឥទំ វុច្ចតិ សម្បជញ្ញំ ។ ឥមិនា សម្បជញ្ញេន សមន្នាគតោ បុគ្គលោ សម្បជានោ ។

(៧៦) កតមោ ច បុគ្គលោ សីលសម្បន្នោ ។ តត្ថ កតមា សីលសម្បទា ។ កាយិកោ អវីតិក្កមោ វាចសិកោ អវីតិក្កមោ កាយិកវាចសិកោ អវីតិក្កមោ អយំ វុច្ចតិ សីលសម្បទា ។ សព្វោបិ សីលសំវរោ សីលសម្បទា ។ ឥមាយ សីលសម្បទាយ សមន្នាគតោ បុគ្គលោ សីលសម្បន្នោ ។ កតមោ ច បុគ្គលោ ទិដ្ឋិសម្បន្នោ ។ តត្ថ កតមា ទិដ្ឋិសម្បទា ។ អត្ថិ ទិន្នំ អត្ថិ យិដ្ឋំ អត្ថិ ហុតំ អត្ថិ សុកតទុក្កដានំ កម្មានំ ផលវិបាកោ អត្ថិ អយំ លោកោ អត្ថិ បរោ លោកោ អត្ថិ មាតា អត្ថិ បិតា អត្ថិ សត្តា ឱបបាតិកា អត្ថិ លោកេ សមណព្រាហ្មណា សម្មគ្គតា សម្មាបដិបន្នា យេ ឥមញ្ច លោកំ បរញ្ច លោកំ សយំ អភិញ្ញា សច្ឆិកត្វា បវេទេន្តីតិ យា ឯវរូបា បញ្ញា បជានា ។បេ។ អមោហោ ធម្មវិចយោ សម្មាទិដ្ឋិ អយំ វុច្ចតិ



នេះហៅថា សេចក្តីដឹងខ្លួន ។ បុគ្គលប្រកបដោយសេចក្តីដឹងខ្លួននេះ ឈ្មោះថា បុគ្គលជាអ្នកដឹងខ្លួន ។

(៧៦) បុគ្គលបរិបូណ៌ដោយសីល តើដូចម្តេច ។ បណ្តាធម៌ទាំងនោះ ការបរិបូណ៌ដោយសីល តើដូចម្តេច ។ ការមិនប្រព្រឹត្តិល្មើសប្រកបដោយកាយ ការមិនប្រព្រឹត្តិល្មើសប្រកបដោយវាចា ការមិនប្រព្រឹត្តិល្មើសប្រកបដោយកាយនិងវាចា នេះហៅថា ការបរិបូណ៌ដោយសីល ។ ការសង្រួមក្នុងសីលទាំងអស់ ក៏ឈ្មោះថា ការបរិបូណ៌ដោយសីលដែរ ។ បុគ្គលប្រកបដោយការបរិបូណ៌ដោយសីល នេះឈ្មោះថា អ្នកបរិបូណ៌ដោយសីល ។ បុគ្គលបរិបូណ៌ដោយទិដ្ឋិ តើដូចម្តេច ។ បណ្តាធម៌ទាំងនោះ ការបរិបូណ៌ដោយទិដ្ឋិ តើដូចម្តេច ។ (ការយល់)ថា ទានដែលបុគ្គលឲ្យហើយ មានផល ការបូជាធំ មានផល ការបូជាតូច មានផល ផលវិបាក នៃកម្មដែលបុគ្គលធ្វើល្អនិងអាក្រក់ មាន លោកនេះ មាន លោកខាងមុខ មាន មាតា មានគុណ បិតាមានគុណ ពួកសត្វជាឱបបាតិកៈកំណើត មាន ពួកសមណព្រាហ្មណ៍ក្នុងលោក ជាអ្នកប្រព្រឹត្តល្អ ប្រតិបត្តិត្រូវ ដែលធ្វើឲ្យជាក់ច្បាស់នូវលោកនេះនិងលោកខាងមុខ ដោយបញ្ញាដ៏ឧត្តម ដោយខ្លួនឯង ហើយសំដែងបាន មាន ការដឹង ការដឹងច្បាស់ ។ល។ ការមិនវង្វេង ការពិចារណាធម៌ ការឃើញត្រូវ ណា ដែលមានសភាពដូច្នេះ នេះហៅថា

ទិដ្ឋិសម្បទា ។ សព្វាបិ សម្មាទិដ្ឋិ ទិដ្ឋិសម្បទា ។ ឥមាយ ទិដ្ឋិសម្បទាយ សមន្នាគតោ បុគ្គលោ ទិដ្ឋិសម្បន្នោ ។

(៧៧) កតមេ ទ្វេ បុគ្គលា ទុល្លភា លោកស្មឹ ។ យោ ច បុព្វការី យោ ច កតញ្ញូ កតវេទី ឥមេ ទ្វេ បុគ្គលា ទុល្លភា លោកស្មឹ ។

(៧៨) កតមេ ទ្វេ បុគ្គលា ទុត្តប្បយា ។ យោ ច លទ្ធំ លទ្ធំ និក្ខិបតិ យោ ច លទ្ធំ លទ្ធំ វិស្សជ្ជេតិ ឥមេ ទ្វេ បុគ្គលា ទុត្តប្បយា ។

(៧៩) កតមេ ទ្វេ បុគ្គលា សុតប្បយា ។ យោ ច លទ្ធំ លទ្ធំ ន និក្ខិបតិ យោ ច លទ្ធំ លទ្ធំ ន វិស្សជ្ជេតិ ឥមេ ទ្វេ បុគ្គលា សុតប្បយា ។

(៨០) កតមេសំ ទ្វិន្នំ បុគ្គលានំ អាសវា វឌ្ឍន្តិ ។ យោ ច ន កុក្កុច្ចាយិតព្វំ កុក្កុច្ចាយតិ យោ ច កុក្កុច្ចាយិតព្វំ ន កុក្កុច្ចាយតិ ឥមេសំ ទ្វិន្នំ បុគ្គលានំ អាសវា វឌ្ឍន្តិ ។



ការបរិបូណ៌ ដោយទិដ្ឋិ ។ ការឃើញត្រូវទាំងអស់ ក៏ឈ្មោះថា ការបរិបូណ៌ ដោយទិដ្ឋិដែរ ។ បុគ្គលប្រកបដោយការបរិបូណ៌ដោយទិដ្ឋិនេះ ឈ្មោះថា អ្នកបរិបូណ៌ ដោយទិដ្ឋិ ។

(៧៧) បុគ្គល ២ ពួក រកបានដោយក្រក្នុងលោក តើដូចម្តេច ។ បុគ្គលជាបុព្វការី ១ បុគ្គលជាកតញ្ញូកតវេទី ១ បុគ្គល ២ ពួកនេះ រកបានដោយក្រក្នុងលោក ។

(៧៨) បុគ្គល ២ ពួក គេចំអែតបានដោយក្រ តើដូចម្តេច ។ បុគ្គលដែលទុកនូវរបស់ដែលខ្លួនគេបានហើយបានហើយ ១ បុគ្គលដែលលះបង់នូវរបស់ដែលខ្លួនគេបានហើយបានហើយ ១ បុគ្គល ២ ពួកនេះ គេចំអែតបានដោយក្រ ។

(៧៩) បុគ្គល ២ ពួក គេចំអែតបានដោយងាយ តើដូចម្តេច ។ បុគ្គលដែលមិនទុក នូវរបស់ដែលខ្លួនគេបានហើយបានហើយ ១ បុគ្គលដែលមិនលះបង់ នូវរបស់ដែលខ្លួនគេបានហើយបានហើយ ១ បុគ្គល ២ ពួកនេះ គេចំអែតបានដោយងាយ ។

(៨០) អាសវៈនៃ បុគ្គល ២ ពួក រមែងចំរើន តើដូចម្តេច ។ បុគ្គលដែលរង្កៀសសង្ស័យនូវវត្ថុដែលមិនត្រូវរង្កៀសសង្ស័យ ១ បុគ្គលដែលមិនរង្កៀសសង្ស័យនូវវត្ថុដែលត្រូវរង្កៀសសង្ស័យ ១ អាសវៈនៃបុគ្គល ២ ពួកនេះ រមែងចំរើន ។

( ៨១ ) កតមេសំ ទ្វិន្នំ បុគ្គលានំ អាសវា ន វឌ្ឍន្តិ ។ យោ ច ន កុក្កុច្ចាយិតព្វំ ន កុក្កុច្ចាយតិ យោ ច កុក្កុច្ចាយិតព្វំ កុក្កុច្ចាយតិ ឥមេសំ ទ្វិន្នំ បុគ្គលានំ អាសវា ន វឌ្ឍន្តិ ។

( ៨២ ) កតមោ ច បុគ្គលោ ហីនាធិមុត្តោ ។ ឥធេកច្ចោ បុគ្គលោ ទុស្សីលោ ហោតិ បាបធម្មោ សោ អញ្ញំ ទុស្សីលំ បាបធម្មំ សេវតិ ភជតិ បយិរុបាសតិ អយំ វុច្ចតិ បុគ្គលោ ហីនាធិមុត្តោ ។ កតមោ ច បុគ្គលោ បណីតាធិមុត្តោ ។ ឥធេកច្ចោ បុគ្គលោ សីលវា ហោតិ កល្យាណធម្មោ សោ អញ្ញំ សីលវន្តំ កល្យាណធម្មំ សេវតិ ភជតិ បយិរុបាសតិ អយំ វុច្ចតិ បុគ្គលោ បណីតាធិមុត្តោ ។

( ៨៣ ) កតមោ ច បុគ្គលោ តិត្តោ ។ បច្ចេកសម្ពុទ្ធា យេ ច តថាគតស្ស សាវកា អរហន្តោ តិត្តា សម្មាសម្ពុទ្ធោ តិត្តោ ច តប្បេតា ច ។

ទុកនិទ្ទេសោ និដ្ឋិតោ ។

---



( ៨១ ) អាសវៈនៃបុគ្គល ២ ពួក រមែងមិនចំរើន តើដូចម្តេច ។ បុគ្គលដែលមិនគប្បីរង្កៀសសង្ស័យ ទ្រាំតែដែលមិនគួររង្កៀសសង្ស័យ ១ បុគ្គលដែលគប្បីរង្កៀសសង្ស័យ ទ្រាំតែដែលគួររង្កៀសសង្ស័យ ១ អាសវៈនៃបុគ្គល ២ ពួកនេះ រមែងមិនចំរើន ។

( ៨២ ) បុគ្គលមានអធ្យាស្រ័យថោកទាប តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ជាអ្នកទ្រុស្តសីល មានធម៌លាមក បុគ្គលនោះ តែងសេពគប់ ចូលទៅអង្គុយជិតបុគ្គលដទៃដែលទ្រុស្តសីល មានធម៌លាមកដែរ នេះហៅថា បុគ្គលមានអធ្យាស្រ័យថោកទាប ។ បុគ្គលមានអធ្យាស្រ័យខ្ពង់ខ្ពស់ តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ជាអ្នកមានសីល មានធម៌ល្អ បុគ្គលនោះ តែងសេពគប់ ចូលទៅអង្គុយជិតបុគ្គលដទៃដែលមានសីល មានធម៌ល្អ នេះហៅថា បុគ្គលមានអធ្យាស្រ័យខ្ពង់ខ្ពស់ ។

( ៨៣ ) បុគ្គលឆ្អែតដោយខ្លួនឯង តើដូចម្តេច ។ ព្រះបច្ចេកសម្ពុទ្ធ និងព្រះអរហន្ត ជាសាវ័ករបស់ព្រះតថាគត ឈ្មោះថា ឆ្អែតដោយខ្លួនឯង ឯព្រះសម្មាសម្ពុទ្ធ ឈ្មោះថា ឆ្អែតដោយព្រះឯងផង ញុំាងគេឲ្យឆ្អែតផង ។

ចប់ ទុកនិទ្ទេស ។

## តិកនិទ្ទេសោ

[ ៨៦ ] កតមោ ច បុគ្គលោ និរាសោ ។ ឥធេកច្ចោ បុគ្គលោ ទុស្សីលោ ហោតិ បាបធម្មោ អសុចិសង្កស្សរសមាចារោ បដិច្ឆន្នកម្មន្តោ អស្សមណោ សមណបដិញ្ញោ អព្រហ្មចារី ព្រហ្មចារិបដិញ្ញោ អន្តោបូតិ អវស្សុតោ កសម្ពុជាតោ សោ សុណាតិ ឥត្ថន្នាមោ កិរ ភិក្ខុ អាសវានំ ខយា អនាសវំ ចេតោវិមុត្តឹ បញ្ញាវិមុត្តឹ ទិដ្ឋេវ ធម្មេ សយំ អភិញ្ញា សច្ឆិកត្វា ឧបសម្បជ្ជ វិហរតីតិ តស្ស ន ឯវំ ហោតិ កុទាស្សុ នាមាហម្បិ អាសវានំ ខយា អនាសវំ ចេតោវិមុត្តឹ បញ្ញាវិមុត្តឹ ទិដ្ឋេវ ធម្មេ សយំ អភិញ្ញា សច្ឆិកត្វា ឧបសម្បជ្ជ វិហរិស្សាមីតិ អយំ វុច្ចតិ បុគ្គលោ និរាសោ ។ កតមោ ច បុគ្គលោ អាសំសោ ។ ឥធេកច្ចោ បុគ្គលោ សីលវា ហោតិ កល្យាណធម្មោ សោ សុណាតិ ឥត្ថន្នាមោ កិរ ភិក្ខុ អាសវានំ ខយា អនាសវំ ចេតោវិមុត្តឹ បញ្ញាវិមុត្តឹ

## តិកនិទ្ទេស

[ ៨៦ ] បុគ្គលមិនមានបំណង តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ជាអ្នកទ្រុស្តសីល មានធម៌លាមក មានអាចារៈដែលបុគ្គលគប្បីរលឹកដោយសេចក្តីរង្កៀសដោយអំពើមិនស្អាត បិទបាំងអំពើ មិនមែនសមណៈ ប្តេជ្ញាខ្លួនថាជាសមណៈ មិនមែនព្រហ្មចារី ប្តេជ្ញាខ្លួនថាជាព្រហ្មចារី ជាអ្នកស្អុយក្នុង មានចិត្តទទឹកដោយកាមៈ ជ្រោកជ្រាកដោយកិលេស បុគ្គលនោះបានឮដំណឹងថា ភិក្ខុឈ្មោះនេះ បានធ្វើឲ្យជាក់ច្បាស់សម្រេច ដោយប្រាជ្ញាដ៏ឧត្តម ដោយខ្លួនឯង ក្នុងបច្ចុប្បន្ន នូវចេតោវិមុត្តិ បញ្ញាវិមុត្តិ ដែលមិនមានអាសវៈ ព្រោះអស់ទៅនៃអាសវៈទាំងឡាយ បុគ្គលនោះ មិនមានសេចក្តីត្រិះរិះ យ៉ាងនេះថា កាលណាហ្ន៎ អាត្មាអញនឹងបានធ្វើឲ្យជាក់ច្បាស់សម្រេច ដោយប្រាជ្ញាដ៏ឧត្តមដោយខ្លួនឯង ក្នុងបច្ចុប្បន្ន នូវចេតោវិមុត្តិ បញ្ញាវិមុត្តិ ដែលមិនមានអាសវៈ ព្រោះអស់ទៅនៃអាសវៈទាំងឡាយ នេះហៅថា បុគ្គលមិនមានបំណង ។ បុគ្គលអ្នកមានបំណង តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ជាអ្នកមានសីល មានធម៌ល្អ បុគ្គលនោះបានឮដំណឹងថា ភិក្ខុឈ្មោះនេះ បានធ្វើឲ្យជាក់ច្បាស់សម្រេច ដោយប្រាជ្ញាដ៏ឧត្តម ដោយខ្លួនឯង ក្នុងបច្ចុប្បន្ន នូវចេតោវិមុត្តិ និងបញ្ញាវិមុត្តិ

ទិដ្ឋេវ ធម្មេ សយំ អភិញ្ញា សច្ឆិកត្វា ឧបសម្បជ្ជ វិហរតិ តស្ស ឯវំ ហោតិ កុទាស្សុ នាមាហម្បិ អាសវានំ ខយា អនាសវំ ចេតោវិមុត្តឹ បញ្ញាវិមុត្តឹ ទិដ្ឋេវ ធម្មេ សយំ អភិញ្ញា សច្ឆិកត្វា ឧបសម្បជ្ជ វិហរិស្សាមីតិ អយំ វុច្ចតិ បុគ្គលោ អាសំសោ ។ កតមោ ច បុគ្គលោ វិគតាសោ ឥធេកច្ចោ បុគ្គលោ អាសវានំ ខយា អនាសវំ ចេតោវិមុត្តឹ បញ្ញាវិមុត្តឹ ទិដ្ឋេវ ធម្មេ សយំ អភិញ្ញា សច្ឆិកត្វា ឧបសម្បជ្ជ វិហរតិ សោ សុណាតិ ឥត្ថន្នាមោ កិរ ភិក្ខុ អាសវានំ ខយា អនាសវំ ចេតោវិមុត្តឹ បញ្ញាវិមុត្តឹ ទិដ្ឋេវ ធម្មេ សយំ អភិញ្ញា សច្ឆិកត្វា ឧបសម្បជ្ជ វិហរតីតិ តស្ស ន ឯវំ ហោតិ កុទាស្សុ នាមាហម្បិ អាសវានំ ខយា អនាសវំ ចេតោវិមុត្តឹ បញ្ញាវិមុត្តឹ ទិដ្ឋេវ ធម្មេ សយំ អភិញ្ញា សច្ឆិកត្វា ឧបសម្បជ្ជ វិហរិស្សាមីតិ ។ តំ កិស្ស ហេតុ ។ យា ហិស្ស បុព្វេ អវិមុត្តស្ស វិមុត្តាសា សា បដិប្បស្សទ្ធា អយំ វុច្ចតិ បុគ្គលោ វិគតាសោ ។



ដែលមិនមានអាសវៈ ព្រោះអស់ទៅនៃអាសវៈទាំងឡាយ បុគ្គលនោះ កើតមានសេចក្ដីត្រិះរិះយ៉ាងនេះថា កាលណាហ្ន៎ អាត្មាអញនឹងបានធ្វើឲ្យជាក់ច្បាស់សម្រេច ដោយប្រាជ្ញាដ៏ឧត្តម ដោយខ្លួនឯង ក្នុងបច្ចុប្បន្ន នូវចេតោវិមុត្តិ បញ្ញាវិមុត្តិ ដែលមិនមានអាសវៈ ព្រោះអស់ទៅនៃអាសវៈទាំងឡាយ នេះហៅថា បុគ្គលអ្នកមានបំណង ។ បុគ្គលអ្នកប្រាសចាកបំណង តើដូចម្ដេច ។ បុគ្គលខ្លះ ក្នុងលោកនេះ បានធ្វើឲ្យជាក់ច្បាស់សម្រេចដោយប្រាជ្ញាដ៏ឧត្តម ដោយខ្លួនឯង ក្នុងបច្ចុប្បន្ន នូវចេតោវិមុត្តិ បញ្ញាវិមុត្តិ ដែលមិនមានអាសវៈ ព្រោះអស់ទៅនៃអាសវៈទាំងឡាយ បុគ្គលនោះ ឮដំណឹងថា ភិក្ខុឈ្មោះនេះ បានធ្វើឲ្យជាក់ច្បាស់សម្រេច ដោយប្រាជ្ញាដ៏ឧត្តម ដោយខ្លួនឯង ក្នុងបច្ចុប្បន្ន នូវចេតោវិមុត្តិ បញ្ញាវិមុត្តិ ដែលមិនមានអាសវៈ ព្រោះអស់ទៅនៃអាសវៈទាំងឡាយ បុគ្គលនោះ មិនមានសេចក្ដីត្រិះរិះ យ៉ាងនេះថា កាលណាហ្ន៎ អាត្មាអញនឹងបានធ្វើឲ្យជាក់ច្បាស់សម្រេច ដោយប្រាជ្ញាដ៏ឧត្តម ដោយខ្លួនឯង ក្នុងបច្ចុប្បន្ន នូវចេតោវិមុត្តិ បញ្ញាវិមុត្តិ ដែលមិនមានអាសវៈ ព្រោះអស់ទៅនៃអាសវៈទាំងឡាយ ។ ដំណើរនោះ តើព្រោះហេតុអ្វី ។ ព្រោះថា បំណងក្នុងវិមុត្តិ របស់បុគ្គលនោះ ដែលមានចិត្តមិនទាន់រួចស្រឡះចាកអាសវៈក្នុងកាលមុន បំណងនោះ ក៏ស្ងប់រម្ងាប់ទៅ នេះហៅថា បុគ្គលប្រាសចាកបំណង ។

(៨៤) តត្ថ កតមេ តយោ គិលានូបមា បុគ្គលា ។ តយោ គិលានា ។ ឥធេកច្ចោ គិលានោ លភន្តោ វា សប្បាយានិ ភោជនានិ អលភន្តោ វា សប្បាយានិ ភោជនានិ លភន្តោ វា សប្បាយានិ ភេសជ្ជានិ អលភន្តោ វា សប្បាយានិ ភេសជ្ជានិ លភន្តោ វា បតិរូបំ ឧបដ្ឋាកំ អលភន្តោ វា បតិរូបំ ឧបដ្ឋាកំ នេវ វុដ្ឋាតិ តម្ហា អាពាធា ។ ឥធ បនេកច្ចោ គិលានោ លភន្តោ វា សប្បាយានិ ភោជនានិ អលភន្តោ វា សប្បាយានិ ភោជនានិ លភន្តោ វា សប្បាយានិ ភេសជ្ជានិ អលភន្តោ វា សប្បាយានិ ភេសជ្ជានិ លភន្តោ វា បតិរូបំ ឧបដ្ឋាកំ អលភន្តោ វា បតិរូបំ ឧបដ្ឋាកំ វុដ្ឋាតិ តម្ហា អាពាធា ។ ឥធ បនេកច្ចោ គិលានោ លភន្តោ សប្បាយានិ ភោជនានិ នោ អលភន្តោ លភន្តោ សប្បាយានិ ភេសជ្ជានិ នោ អលភន្តោ លភន្តោ បតិរូបំ ឧបដ្ឋាកំ នោ អលភន្តោ វុដ្ឋាតិ តម្ហា អាពាធា ។ តត្រ យ្វាយំ គិលានោ លភន្តោ





(៨៤) បណ្ដាបុគ្គលទាំងនោះ បុគ្គល ៣ ពួក ប្រៀបដោយបុគ្គលឈឺ តើដូចម្ដេច ។ បុគ្គលឈឺមាន ៣ ពួក គឺបុគ្គលឈឺខ្លះក្នុងលោកនេះ ទោះបាននូវភោជន ជាទីសប្បាយក្ដី មិនបាននូវភោជនជាទីសប្បាយក្ដី ទោះបាននូវភេសជ្ជៈជាទីសប្បាយក្ដី មិនបាននូវភេសជ្ជៈជាទីសប្បាយក្ដី ទោះបាននូវឧបដ្ឋាកដ៏សមគួរក្ដី មិនបាននូវឧបដ្ឋាកដ៏សមគួរក្ដី ក៏នៅតែមិនសះស្បើយចាកអាពាធនោះ ១ ។ មួយទៀត បុគ្គលឈឺខ្លះក្នុងលោកនេះ ទោះបាននូវភោជន ជាទីសប្បាយក្ដី មិនបាននូវភោជនជាទីសប្បាយក្ដី ទោះបាននូវភេសជ្ជៈជាទីសប្បាយក្ដី មិនបាននូវភេសជ្ជៈជាទីសប្បាយក្ដី ទោះបាននូវឧបដ្ឋាកដ៏សមគួរក្ដី មិនបាននូវឧបដ្ឋាកដ៏សមគួរក្ដី ក៏សះស្បើយចាកអាពាធនោះបាន ១ ។ មួយទៀត បុគ្គលឈឺខ្លះ ក្នុងលោកនេះ លុះតែបាននូវភោជន ជាទីសប្បាយ មិនមែនជាមិនបានទេ បាននូវភេសជ្ជៈ ជាទីសប្បាយ មិនមែនជាមិនបានទេ បាននូវឧបដ្ឋាកដ៏សមគួរ មិនមែនជាមិនបានទេ ទើបសះស្បើយចាកអាពាធនោះបាន ១ ។ បណ្ដាបុគ្គលឈឺទាំងបីពួកនោះ បុគ្គលឈឺណា

សប្បាយានិ ភោជនានិ នោ អលភន្តោ លភន្តោ សប្បាយានិ ភេសជ្ជានិ នោ អលភន្តោ លភន្តោ បតិរូបំ ឧបដ្ឋាកំ នោ អលភន្តោ វុដ្ឋាតិ តម្ហា អាពាធា ។ យំ គិលានំ បដិច្ច ភគវតោ គិលានភត្តំ អនុញ្ញាតំ គិលានភេសជ្ជំ អនុញ្ញាតំ គិលានុបដ្ឋាកោ អនុញ្ញាតោ ឥមញ្ច បន គិលានំ បដិច្ច អញ្ញេបិ គិលានា ឧបដ្ឋាតព្វា ។

(៨៦) តយោ គិលានូបមា បុគ្គលា សន្តោ សំវិជ្ជមានា លោកស្មឹ ។ កតមេ តយោ ។ ឥធេកច្ចោ បុគ្គលោ លភន្តោ វា តថាគតំ ទស្សនាយ អលភន្តោ វា តថាគតំ ទស្សនាយ លភន្តោ វា តថាគតប្បវេទិតំ ធម្មវិនយំ សវនាយ អលភន្តោ វា តថាគតប្បវេទិតំ ធម្មវិនយំ សវនាយ នេវ ឱក្កមតិ និយាមំ កុសលេសុ ធម្មេសុ សម្មត្តំ ។ ឥធ បនេកច្ចោ បុគ្គលោ លភន្តោ វា តថាគតំ ទស្សនាយ អលភន្តោ វា តថាគតំ ទស្សនាយ លភន្តោ វា តថាគតប្បវេទិតំ ធម្មវិនយំ សវនាយ អលភន្តោ វា តថាគតប្បវេទិតំ ធម្មវិនយំ សវនាយ





លុះតែបានខ្លួនភោជនៈជាទីសប្បាយ មិនមែនជាមិនបានទេ បានខ្លួនភេសជ្ជៈជាទីសប្បាយ មិនមែនជាមិនបានទេ បានខ្លួនឧបដ្ឋាកដ៏សមគួរ មិនមែនជាមិនបានទេ ទើបសះស្បើយ ចាកអាពាធនោះបាន ព្រោះអាស្រ័យបុគ្គលឈឺនេះហើយ បានជាព្រះមានព្រះភាគ ទ្រង់អនុញ្ញាតគិលានភត្ត ទ្រង់អនុញ្ញាតគិលានភេសជ្ជៈ ទ្រង់អនុញ្ញាតគិលានុបដ្ឋាក មួយទៀត ព្រោះអាស្រ័យបុគ្គលឈឺនេះឯង សូម្បីបុគ្គលឈឺ[១]ឯទៀត ក៏បុគ្គលគួរបំរើផង ។

(៨៦) បុគ្គល ៣ ពួក ប្រៀបដោយបុគ្គលឈឺ រមែងមានក្នុងលោក គឺយ៉ាងនេះឯង ។ បុគ្គល ៣ ពួក តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ទោះបានឃើញព្រះតថាគតក្តី មិនបានឃើញព្រះតថាគតក្តី ទោះបានស្តាប់ធម្មវិន័យ ដែលព្រះតថាគតសំដែងហើយក្តី មិនបានស្តាប់ធម្មវិន័យ ដែលព្រះតថាគតសំដែងហើយក្តី ក៏នៅតែមិនបានព្រមចុះកាន់សម្មត្តនិយាម ក្នុងកុសលធម៌ទាំងឡាយឡើយ ។ មួយទៀត បុគ្គលខ្លះ ក្នុងលោកនេះ ទោះបានឃើញព្រះតថាគតក្តី មិនបានឃើញព្រះតថាគតក្តី ទោះបានស្តាប់ធម្មវិន័យ ដែលព្រះតថាគតសំដែងហើយក្តី មិនបានស្តាប់ធម្មវិន័យ ដែលព្រះតថាគតសំដែងហើយក្តី

១ សំដៅយកបុគ្គលមានជំងឺ ២ ពួកខាងដើម ។

ឱក្កមតិ និយាមំ កុសលេសុ ធម្មេសុ សម្មត្តំ ។ ឥធ បនេកច្ចោ បុគ្គលោ លភន្តោ តថាគតំ ទស្សនាយ នោ អលភន្តោ លភន្តោ តថាគតប្បវេទិតំ ធម្មវិនយំ សវនាយ នោ អលភន្តោ ឱក្កមតិ និយាមំ កុសលេសុ ធម្មេសុ សម្មត្តំ ។ តត្រ យ្វាយំ បុគ្គលោ លភន្តោ តថាគតំ ទស្សនាយ នោ អលភន្តោ លភន្តោ តថាគតប្បវេទិតំ ធម្មវិនយំ សវនាយ នោ អលភន្តោ ឱក្កមតិ និយាមំ កុសលេសុ ធម្មេសុ សម្មត្តំ ឥមំ បុគ្គលំ បដិច្ច ភគវតា ធម្មទេសនា អនុញ្ញាតា ឥមញ្ច បន បុគ្គលំ បដិច្ច អញ្ញេសម្បិ ធម្មោ ទេសេតព្វោ ។ ឥមេ តយោ គិលានូបមា បុគ្គលា សន្តោ សំវិជ្ជមានា លោកស្មឹ ។

(៨៧) កតមោ ច បុគ្គលោ កាយសក្ខី ។ ឥធេកច្ចោ បុគ្គលោ អដ្ឋ វិមោក្ខេ កាយេន ផុសិត្វា វិហរតិ បញ្ញាយ ចស្ស ទិស្វា ឯកច្ចេ អាសវា បរិក្ខីណា ហោន្តិ អយំ វុច្ចតិ បុគ្គលោ កាយសក្ខី ។



ក៏គង់ត្រាច់ចុះកាន់សម្មត្តនិយាម ក្នុងកុសលធម៌ទាំងឡាយបាន ។ មួយទៀត បុគ្គលខ្លះ ក្នុងលោកនេះ លុះតែបានឃើញព្រះតថាគត មិនមែនជាមិនបានឃើញទេ បានស្ដាប់ធម្មវិន័យ ដែលព្រះតថាគតសំដែងហើយ មិនមែនជាមិនបានស្ដាប់ទេ ទើបត្រាច់ចុះកាន់សម្មត្តនិយាមក្នុងកុសលធម៌ទាំងឡាយបាន ។ បណ្ដាបុគ្គលទាំងបីពួកនោះ បុគ្គលណាដែលលុះតែបានឃើញព្រះតថាគត មិនមែនជាមិនបានឃើញទេ បានស្ដាប់ធម្មវិន័យ ដែលព្រះតថាគតសំដែងហើយ មិនមែនជាមិនបានស្ដាប់ទេ ទើបត្រាច់ចុះកាន់សម្មត្តនិយាម ក្នុងកុសលធម៌ទាំងឡាយបាន ព្រោះតែអាស្រ័យនូវបុគ្គលនេះ បានជាព្រះមានព្រះភាគទ្រង់អនុញ្ញាតធម្មទេសនា(១) មិនតែប៉ុណ្ណោះសោត ព្រោះតែអាស្រ័យបុគ្គលនេះឯង សូម្បីបុគ្គលឯទៀត ក៏ព្រះមានព្រះភាគគួរសំដែងធម៌ដែរ ។ នេះ បុគ្គល ៣ ពួក ប្រៀបដោយបុគ្គលឈឺ រមែងមានក្នុងលោក ។

(៨៧) ចុះបុគ្គលជាកាយសក្ខី (មានកាយជាបន្ទាល់) តើដូចម្ដេច ។ បុគ្គលខ្លះ ក្នុងលោកនេះ បានពាល់វិមោក្ខទាំង ៨ ដោយនាមកាយ ទាំងអាសវៈពួកខ្លះ របស់បុគ្គលនោះ ក៏អស់រលីង ព្រោះឃើញ ដោយប្រាជ្ញា នេះហៅថា បុគ្គលជាកាយសក្ខី ។

១ ន័យដើមបកធម្មទេសនាដែលអនុញ្ញាតឡើងដែលក្នុង ខទី ៨ ខុំ ។

កតមោ ច បុគ្គលោ ទិដ្ឋិប្បត្តោ ។ ឥធេកច្ចោ បុគ្គលោ ឥទំ ទុក្ខន្តិ យថាភូតំ បជានាតិ អយំ ទុក្ខសមុទយោតិ យថាភូតំ បជានាតិ អយំ ទុក្ខនិរោធោតិ យថាភូតំ បជានាតិ អយំ ទុក្ខនិរោធគាមិនី បដិបទាតិ យថាភូតំ បជានាតិ តថាគតប្បវេទិតា ចស្ស ធម្មា បញ្ញាយ វោទិដ្ឋា ហោន្តិ វោចរិតា បញ្ញាយ ចស្ស ទិស្វា ឯកច្ចេ អាសវា បរិក្ខីណា ហោន្តិ អយំ វុច្ចតិ បុគ្គលោ ទិដ្ឋិប្បត្តោ ។ កតមោ ច បុគ្គលោ សទ្ធាវិមុត្តោ ។ ឥធេកច្ចោ បុគ្គលោ ឥទំ ទុក្ខន្តិ យថាភូតំ បជានាតិ ។ បេ ។ តថាគតប្បវេទិតា ចស្ស ធម្មា បញ្ញាយ វោទិដ្ឋា ហោន្តិ វោចរិតា បញ្ញាយ ចស្ស ទិស្វា ឯកច្ចេ អាសវា បរិក្ខីណា ហោន្តិ នោ ច ខោ យថា ទិដ្ឋិប្បត្តស្ស អយំ វុច្ចតិ បុគ្គលោ សទ្ធាវិមុត្តោ ។

(៤៥) កតមោ ច បុគ្គលោ គូថភាណី ។ ឥធេកច្ចោ បុគ្គលោ មុសាវាទី ហោតិ សភគ្គតោ វា



បុគ្គលជាទិដ្ឋិប្បត្តៈ (សម្រេចដោយទិដ្ឋិ) តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ដឹងច្បាស់តាមពិតថា នេះទុក្ខ ដឹងច្បាស់តាមពិតថា នេះហេតុនាំឲ្យកើតទុក្ខ ដឹងច្បាស់តាមពិតថា នេះជាទីរលត់ទុក្ខ ដឹងច្បាស់តាមពិតថា នេះបដិបទាជាដំណើរទៅកាន់ទីរលត់ទុក្ខ ឯក្នុងធម៌ដែលព្រះតថាគតសំដែងហើយ បុគ្គលនោះ បានឃើញច្បាស់ដោយប្រពៃ បានប្រព្រឹត្តដោយប្រពៃ ដោយប្រាជ្ញា ទាំងអាសវៈពួកខ្លះ របស់បុគ្គលនោះក៏អស់ហើយ ព្រោះឃើញដោយប្រាជ្ញា នេះហៅថា បុគ្គលជាទិដ្ឋិប្បត្តៈ ។ បុគ្គលជាសទ្ធាវិមុត្ត តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ដឹងច្បាស់តាមពិតថា នេះទុក្ខ ។ បេ ។ ឯក្នុងធម៌ដែលព្រះតថាគតសំដែងហើយ បុគ្គលនោះ ក៏បានឃើញច្បាស់ដោយប្រពៃ បានប្រព្រឹត្តដោយប្រពៃ ដោយប្រាជ្ញា ទាំងអាសវៈពួកខ្លះ របស់បុគ្គលនោះក៏អស់ហើយ ព្រោះឃើញដោយប្រាជ្ញា ប៉ុន្តែ មិនដូចគ្នានឹងបុគ្គលជាទិដ្ឋិប្បត្តៈទេ នេះហៅថា បុគ្គលជាសទ្ធាវិមុត្ត[១] ។

(៤៥) បុគ្គលមានសំដីដូចលាមក តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ជាអ្នកពោលពាក្យកុហក ទោះទៅក្នុងទីប្រជុំក្តី

---

១ បុគ្គលផុតស្រឡះចាកកិលេសដោយសទ្ធា ។

បរិសគ្គតោ វា ញាតិមជ្ឈគតោ វា បូគមជ្ឈគតោ វា រាជកុលមជ្ឈគតោ វា អភិនីតោ សក្ខិបុដ្ឋោ ឯហំ ភោ បុរិស យំ ជានាសិ តំ វទេហីតិ សោ អជានំ វា អាហ(១) ជានាមីតិ ជានំ វា អាហ ន ជានាមីតិ អបស្សំ វា អាហ បស្សាមីតិ បស្សំ វា ន បស្សាមីតិ ឥតិ អត្តហេតុ វា បរហេតុ វា អាមិសកិញ្ចិក្ខហេតុ វា សម្បជានមុសា ភាសិតា ហោតិ អយំ វុច្ចតិ បុគ្គលោ គូថភាណី ។ តត្ថ កតមោ ច បុគ្គលោ បុប្ផភាណី ។ ឥធេកច្ចោ បុគ្គលោ មុសាវាទំ បហាយ មុសាវាទា បដិវិរតោ ហោតិ សភគ្គតោ វា បរិសគ្គតោ វា ញាតិមជ្ឈគតោ វា បូគមជ្ឈគតោ វា រាជកុលមជ្ឈគតោ វា អភិនីតោ សក្ខិបុដ្ឋោ ឯហំ ភោ បុរិស យំ ជានាសិ តំ វទេហីតិ សោ អជានំ វា អាហ ន ជានាមីតិ ជានំ វា អាហ ជានាមីតិ អបស្សំ វា អាហ ន បស្សាមីតិ បស្សំ វា អាហ បស្សាមីតិ ឥតិ អត្តហេតុ វា បរហេតុ វា អាមិសកិញ្ចិក្ខហេតុ វា

១ ឱ. ម. សព្វត្ថ ឋានេសុ អាហាតិ ទិស្សតិ ។





ទៅកាន់បរិស័ទក្តី ទៅកាន់កណ្តាលនៃញាតិក្តី ទៅកាន់កណ្តាលនៃពួកសេនាក្តី ទៅកាន់កណ្តាលនៃរាជត្រកូលក្តី បើមានគេនាំទៅសួរជាសាក្សីថា នែបុរសដ៏ចម្រើន ចូរមកណាយ អ្នកដឹងនូវហេតុណា ចូរនិយាយនូវហេតុនោះចុះ បុគ្គលនោះ កាលមិនដឹងសោះ និយាយថាដឹង ឬកាលដឹង និយាយថាមិនដឹងវិញ កាលមិនឃើញ និយាយថាឃើញ ឬកាលឃើញ និយាយថាមិនឃើញវិញ បុគ្គលជាអ្នកពោលពាក្យកុហក ដោយដឹងខ្លួន ព្រោះហេតុនៃខ្លួនក្តី ព្រោះហេតុនៃបុគ្គលដទៃក្តី ព្រោះហេតុនៃអាមិសៈបន្តិចបន្តួចក្តី ដោយប្រការដូច្នេះ នេះហៅថា បុគ្គលមានសំដីដូចលាមក ។ បុគ្គលមានសំដីដូចផ្កា តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ លះបង់មុសាវាទ វៀរចាកមុសាវាទ ទោះទៅកាន់ទីប្រជុំក្តី ទៅកាន់បរិស័ទក្តី ទៅកាន់កណ្តាលនៃពួកញាតិក្តី ទៅកាន់កណ្តាលនៃពួកសេនាក្តី ទៅកាន់កណ្តាលនៃរាជត្រកូលក្តី បើមានគេនាំទៅសួរជាសាក្សីថា នែបុរសដ៏ចម្រើន ចូរមកណាយ អ្នកដឹងនូវហេតុណា ចូរនិយាយនូវហេតុនោះចុះ បុគ្គលនោះ កាលមិនដឹង និយាយថាមិនដឹង ឬកាលដឹង និយាយថាដឹង កាលមិនឃើញ និយាយថាមិនឃើញ ឬកាលឃើញ និយាយថាឃើញ បុគ្គលមិនពោលមុសាវាទដោយដឹងខ្លួន ព្រោះហេតុនៃខ្លួនក្តី ព្រោះហេតុនៃបុគ្គលដទៃក្តី ព្រោះហេតុនៃអាមិសៈបន្តិចបន្តួចក្តី

ន សម្បជានមុសា ភាសិតា ហោតិ អយំ វុច្ចតិ បុគ្គលោ បុប្ផភាណី ។ កតមោ ច បុគ្គលោ មធុភាណី ។ ឥធេកច្ចោ បុគ្គលោ យា សា វាចា នេលា កណ្ណសុខា បេមនីយា ហទយង្គមា បោរី ពហុជនកន្តា ពហុជនមនាបា តថារូបឹ វាចំ ភាសិតា ហោតិ អយំ វុច្ចតិ បុគ្គលោ មធុភាណី ។

(៨៩) កតមោ ច បុគ្គលោ អរុកូបមចិត្តោ ។ ឥធេកច្ចោ បុគ្គលោ កោធនោ ហោតិ ឧបាយាសពហុលោ អប្បម្បិ វុត្តោ សមានោ អភិសជ្ជតិ កុប្បតិ ព្យាបជ្ជតិ បតិដ្ឋីយតិ កោបញ្ច ទោសញ្ច អប្បច្ចយញ្ច បាតុករោតិ សេយ្យថាបិ នាម ទុដ្ឋារុកោ កដ្ឋេន វា កឋលាយ វា ឃដ្ដិតោ ភិយ្យោសោមត្តាយ អាសវំ ទេតិ ឯវមេវ ឥធេកច្ចោ បុគ្គលោ កោធនោ ហោតិ ឧបាយាសពហុលោ អប្បម្បិ វុត្តោ សមានោ អភិសជ្ជតិ កុប្បតិ ព្យាបជ្ជតិ បតិដ្ឋីយតិ កោបញ្ច ទោសញ្ច អប្បច្ចយញ្ច បាតុករោតិ អយំ វុច្ចតិ បុគ្គលោ អរុកូបមចិត្តោ ។ កតមោ ច បុគ្គលោ វិជ្ជូបមចិត្តោ ។ ឥធេកច្ចោ បុគ្គលោ



ដោយប្រការដូច្នេះ នេះហៅថា បុគ្គលមានសំដីដូចផ្កា ។ បុគ្គលមានសំដីដូចទឹកឃ្មុំ តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ជាអ្នកពោលពាក្យជាទីមិនមានទោស ដែលនាំមកនូវសេចក្តីសុខ ដល់ត្រចៀក គួរជាទីស្រឡាញ់ ពេញហឫទ័យ ជាពាក្យអ្នកក្រុង ជាទីត្រេកអរនៃជនច្រើន ជាទីពេញចិត្តនៃជនច្រើន នេះហៅថា បុគ្គលមានសំដីដូចទឹកឃ្មុំ ។

(៨៩) បុគ្គលមានចិត្តប្រៀបដោយដំបៅ តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ជាអ្នកមានសេចក្តីក្រោធ ច្រើនដោយការចង្អៀតចង្អល់ សូម្បីគេស្តីថាតែបន្តិចបន្តួច ក៏ខ្ញាល់ចិត្ត ខឹង ព្យាបាទ តតាំង ធ្វើសេចក្តីក្រោធ ការប្រទូស្ត និងសេចក្តីមិនត្រេកអរ ឲ្យប្រាកដ ដំបៅចាស់ ដែលបុគ្គលឲ្យដល់នឹងឈើ ឬអំបែង តែងហូរទឹករងៃ ដោយក្រៃលែងជាងប្រមាណ យ៉ាងណាមិញ បុគ្គលខ្លះ ក្នុងលោកនេះ ជាអ្នកមានសេចក្តីក្រោធ ច្រើនដោយសេចក្តីចង្អៀតចង្អល់ សូម្បីគេស្តីថាតែបន្តិចបន្តួច ក៏ខ្ញាល់ចិត្ត ខឹង ព្យាបាទ តតាំង ធ្វើសេចក្តីក្រោធ សេចក្តីប្រទូស្ត និងសេចក្តីមិនត្រេកអរ ឲ្យប្រាកដ ក៏យ៉ាងនោះឯង នេះហៅថា បុគ្គលមានចិត្តប្រៀបដោយដំបៅ ។ បុគ្គលមានចិត្តប្រៀបដោយផ្លេកបន្ទោរ តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ

ឥទំ ទុក្ខន្តិ យថាភូតំ បជានាតិ អយំ ទុក្ខសមុទយោតិ យថាភូតំ បជានាតិ អយំ ទុក្ខនិរោធោតិ យថាភូតំ បជានាតិ អយំ ទុក្ខនិរោធគាមិនី បដិបទាតិ យថាភូតំ បជានាតិ សេយ្យថាបិ នាម ចក្ខុមា បុរិសោ រត្តន្ធការតិមិសាយ វិជ្ជន្តរិកាយ រូបានិ បស្សេយ្យ ឯវមេវ ឥធេកច្ចោ បុគ្គលោ ឥទំ ទុក្ខន្តិ យថាភូតំ បជានាតិ អយំ ទុក្ខសមុទយោតិ យថាភូតំ បជានាតិ អយំ ទុក្ខនិរោធោតិ យថាភូតំ បជានាតិ អយំ ទុក្ខនិរោធគាមិនី បដិបទាតិ យថាភូតំ បជានាតិ អយំ វុច្ចតិ បុគ្គលោ វិជ្ជូបមចិត្តោ ។ កតមោ ច បុគ្គលោ វជិរូបមចិត្តោ ។ ឥធេកច្ចោ បុគ្គលោ អាសវានំ ខយា អនាសវំ ចេតោវិមុត្តឹ បញ្ញាវិមុត្តឹ ទិដ្ឋេវ ធម្មេ សយំ អភិញ្ញា សច្ឆិកត្វា ឧបសម្បជ្ជ វិហរតិ សេយ្យថាបិ នាម វជិរស្ស នត្ថិ កិញ្ចិ អភេជ្ជំ នាម មណិ វា បាសាណោ វា ឯវមេវ ឥធេកច្ចោ បុគ្គលោ អាសវានំ ខយា អនាសវំ ចេតោវិមុត្តឹ បញ្ញាវិមុត្តឹ ទិដ្ឋេវ ធម្មេ សយំ អភិញ្ញា សច្ឆិកត្វា ឧបសម្បជ្ជ វិហរតិ អយំ វុច្ចតិ បុគ្គលោ វជិរូបមចិត្តោ ។



ដឹងច្បាស់តាមពិតថា នេះទុក្ខ ដឹងច្បាស់តាមពិតថា នេះហេតុនាំឲ្យកើតទុក្ខ ដឹងច្បាស់តាមពិតថា នេះធម៌រលត់ទុក្ខ ដឹងច្បាស់តាមពិតថា នេះបដិបទាជាដំណើរទៅកាន់ធម៌រលត់ទុក្ខ បុរសមានចក្ខុ គប្បីឃើញនូវរូបទាំងឡាយ នាចន្លោះនៃផ្លេកបន្ទោរ ក្នុងរាត្រីងងឹត យ៉ាងណាមិញ បុគ្គលខ្លះ ក្នុងលោកនេះ ដឹងច្បាស់តាមពិតថា នេះទុក្ខ ដឹងច្បាស់តាមពិតថា នេះហេតុនាំឲ្យកើតទុក្ខ ដឹងច្បាស់តាមពិតថា នេះធម៌រលត់ទុក្ខ ដឹងច្បាស់តាមពិតថា នេះបដិបទាជាដំណើរទៅកាន់ធម៌រលត់ទុក្ខ ក៏យ៉ាងនោះឯង នេះហៅថា បុគ្គលមានចិត្តប្រៀបដោយផ្លេកបន្ទោរ ។ បុគ្គលមានចិត្តប្រៀបដោយពេជ្រ តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ បានធ្វើឲ្យជាក់ច្បាស់សម្រេច ដោយប្រាជ្ញាដ៏ឧត្តម ដោយខ្លួនឯង ក្នុងបច្ចុប្បន្ន នូវចេតោវិមុត្តិ បញ្ញាវិមុត្តិ ដែលមិនមានអាសវៈ ព្រោះអស់ទៅនៃអាសវៈទាំងឡាយ ហើយសម្រេចសម្រាន្តនៅ ដូចជាកែវមណីក្តី ថ្មក្តី ឈ្មោះថា មិនដាច់បន្តិចបន្តួច ដោយពេជ្រ មិនមានឡើយ យ៉ាងណាមិញ បុគ្គលខ្លះ ក្នុងលោកនេះ បានធ្វើឲ្យជាក់ច្បាស់សម្រេច ដោយប្រាជ្ញាដ៏ឧត្តម ដោយខ្លួនឯង ក្នុងបច្ចុប្បន្ន នូវចេតោវិមុត្តិ បញ្ញាវិមុត្តិ ដែលមិនមានអាសវៈ ព្រោះអស់ទៅនៃអាសវៈទាំងឡាយ ហើយសម្រេចសម្រាន្តនៅ ក៏យ៉ាងនោះដែរ នេះហៅថា បុគ្គលមានចិត្តប្រៀបដោយពេជ្រ ។

[៩០] កតមោ ច បុគ្គលោ អន្ធោ ។ ឥធេកច្ចស្ស បុគ្គលស្ស តថារូបំ ចក្ខុ ន ហោតិ យថារូបេន ចក្ខុនា អនធិគតំ វា ភោគំ អធិគច្ឆេយ្យ អធិគតំ វា ភោគំ ផាតឹ ករេយ្យ តថារូបម្បិស្ស ចក្ខុ ន ហោតិ យថារូបេន ចក្ខុនា កុសលាកុសលេ ធម្មេ ជានេយ្យ សាវជ្ជានវជ្ជេ ធម្មេ ជានេយ្យ ហីនប្បណីតេ ធម្មេ ជានេយ្យ កណ្ហសុក្កសប្បដិភាគេ ធម្មេ ជានេយ្យ អយំ វុច្ចតិ បុគ្គលោ អន្ធោ ។ កតមោ ច បុគ្គលោ ឯកចក្ខុ ។ ឥធេកច្ចស្ស បុគ្គលស្ស តថារូបំ ចក្ខុ ហោតិ យថារូបេន ចក្ខុនា អនធិគតំ វា ភោគំ អធិគច្ឆេយ្យ អធិគតំ វា ភោគំ ផាតឹ ករេយ្យ តថារូបម្បិស្ស ចក្ខុ ន ហោតិ យថារូបេន ចក្ខុនា កុសលាកុសលេ ធម្មេ ជានេយ្យ សាវជ្ជានវជ្ជេ ធម្មេ ជានេយ្យ ហីនប្បណីតេ ធម្មេ ជានេយ្យ កណ្ហសុក្កសប្បដិភាគេ ធម្មេ ជានេយ្យ អយំ វុច្ចតិ បុគ្គលោ ឯកចក្ខុ ។





(៩០) បុគ្គលខ្វាក់ តើដូចម្តេច ។ បុគ្គលគប្បីបាននូវភោគៈដែលខ្លួនមិនទាន់បាន ឬគប្បីធ្វើនូវភោគៈដែលបានហើយ ឲ្យកាន់តែចំរើនឡើង ដោយចក្ខុគឺបញ្ញា មានសភាពបែបណា បុគ្គលខ្លះ ក្នុងលោកនេះ មិនមានចក្ខុ មានសភាពបែបនោះផង បុគ្គលគប្បីដឹងនូវធម៌ជាកុសលនិងអកុសល គប្បីដឹងនូវធម៌ដែលប្រកបដោយទោសនិងមិនមានទោស គប្បីដឹងនូវធម៌ថោកទាបនិងខ្ពង់ខ្ពស់ គប្បីដឹងនូវធម៌មានចំណែកប្រៀបដោយធម៌ខ្មៅនិងធម៌ស ដោយចក្ខុ មានសភាពបែបណា បុគ្គលនោះ មិនមានចក្ខុ មានសភាពបែបនោះផងឡើយ នេះហៅថា បុគ្គលខ្វាក់ ។ បុគ្គលមានភ្នែកម្ខាង តើដូចម្តេច ។ បុគ្គលគប្បីបាននូវភោគៈដែលខ្លួនមិនទាន់បាន ឬគប្បីធ្វើនូវភោគៈដែលបានហើយ ឲ្យកាន់តែចំរើនឡើង ដោយចក្ខុ មានសភាពបែបណា បុគ្គលខ្លះ ក្នុងលោកនេះ មានតែចក្ខុមានសភាពបែបនោះ បុគ្គលគប្បីដឹងនូវធម៌ជាកុសលនិងអកុសល គប្បីដឹងនូវធម៌ប្រកបដោយទោសនិងមិនមានទោស គប្បីដឹងនូវធម៌ថោកទាបនិងខ្ពង់ខ្ពស់ គប្បីដឹងនូវធម៌មានចំណែកប្រៀបដោយធម៌ខ្មៅនិងធម៌ស ដោយចក្ខុមានសភាពបែបណា បុគ្គលនោះ មិនមានចក្ខុមានសភាពបែបនោះឡើយ នេះហៅថា បុគ្គលមានភ្នែកម្ខាង ។

កតមោ ច បុគ្គលោ ទ្វិចក្ខុ ។ ឥធេកច្ចស្ស បុគ្គលស្ស តថារូបំ ចក្ខុ ហោតិ យថារូបេន ចក្ខុនា អនធិគតំ វា ភោគំ អធិគច្ឆេយ្យ អធិគតំ វា ភោគំ ផាតិំ ករេយ្យ តថារូបម្បិស្ស ចក្ខុ ហោតិ យថារូបេន ចក្ខុនា កុសលាកុសលេ ធម្មេ ជានេយ្យ សាវជ្ជានវជ្ជេ ធម្មេ ជានេយ្យ ហីនប្បណីតេ ធម្មេ ជានេយ្យ កណ្ហសុក្កសប្បដិភាគេ ធម្មេ ជានេយ្យ អយំ វុច្ចតិ បុគ្គលោ ទ្វិចក្ខុ ។

(៩១) កតមោ ច បុគ្គលោ អវកុជ្ជប្បញ្ញោ ។ ឥធេកច្ចោ បុគ្គលោ អារាមំ គន្តា ហោតិ ភិក្ខូនំ សន្តិកេ ធម្មស្សវនាយ តស្ស ភិក្ខូ ធម្មំ ទេសេន្តិ អាទិកល្យាណំ មជ្ឈេកល្យាណំ បរិយោសានកល្យាណំ សាត្ថំ សព្យញ្ជនំ កេវលបរិបុណ្ណំ បរិសុទ្ធំ ព្រហ្មចរិយំ បកាសេន្តិ សោ តស្មិំ អាសនេ និសិន្នោ តស្សា កថាយ នេវ អាទឹ មនសិករោតិ ន មជ្ឈំ មនសិករោតិ ន បរិយោសានំ មនសិករោតិ វុដ្ឋិតោបិ តម្ហា អាសនា តស្សា កថាយ នេវ អាទឹ មនសិករោតិ



បុគ្គលមានភ្នែកពីរ តើដូចម្តេច ។ បុគ្គលគប្បីញុំាងភោគៈដែលខ្លួនមិនទាន់បាន ឬបានគប្បីធ្វើនូវភោគៈ ដែលបានហើយ ឲ្យកាន់តែចំរើនឡើង ដោយចក្ខុមានសភាពបែបណា បុគ្គលខ្លះ ក្នុងលោកនេះ មានចក្ខុមានសភាពបែបនោះផង បុគ្គលគប្បីដឹងនូវធម៌ជាកុសល និងអកុសល គប្បីដឹងនូវធម៌ប្រកបដោយទោសនិងមិនមានទោស គប្បីដឹងនូវធម៌ថោកទាបនិងឧត្តមខ្ពង់ខ្ពស់ គប្បីដឹងនូវធម៌មានចំណែកប្រៀបដោយធម៌ខ្មៅនិងធម៌ស ដោយចក្ខុមានសភាពបែបណា បុគ្គលនោះ មានចក្ខុមានសភាពបែបនោះផង នេះហៅថា បុគ្គលមានភ្នែកពីរ ។

(៩១) បុគ្គលមានបញ្ញាដូចកាដខ្ទាប់ តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ទៅកាន់អារាម ដើម្បីស្តាប់ធម៌ ក្នុងសំណាក់នៃភិក្ខុទាំងឡាយ ។ ពួកភិក្ខុសំដែងធម៌ មានពីរោះក្នុងបទខាងដើម មានពីរោះក្នុងបទកណ្តាល មានពីរោះក្នុងបទខាងចុង ប្រកបដោយអត្ថ ប្រកបដោយព្យញ្ជនៈ ប្រកាសនូវព្រហ្មចរិយៈ ដ៏បរិបូណ៌បរិសុទ្ធសព្វគ្រប់ ចំពោះបុគ្គលនោះ បុគ្គលនោះ អង្គុយលើអាសនៈនោះ មិនធ្វើទុកក្នុងចិត្ត នូវចំណែកជាខាងដើម មិនធ្វើទុកក្នុងចិត្ត នូវចំណែកជាកណ្តាល មិនធ្វើទុកក្នុងចិត្ត នូវចំណែកជាខាងចុង នៃកថានោះទេ បើទុកជាក្រោកចាកអាសនៈនោះហើយ ក៏មិនធ្វើទុកក្នុងចិត្ត នូវចំណែកជាខាងដើម

ន មជ្ឈំ មនសិការោតិ ន បរិយោសានំ មនសិ-
ការោតិ សេយ្យថាបិ នាម កុម្ភោ និក្កុជ្ជោ តត្រ
ឧទកំ អាសិត្តំ វិវដ្ដតិ នោ សណ្ឋាតិ ឯវមេវ ឥធេ-
កច្ចោ បុគ្គលោ អារាមំ គន្តា ហោតិ អភិក្ខណំ
ភិក្ខូនំ សន្តិកេ ធម្មស្សវនាយ តស្ស ភិក្ខូ ធម្មំ
ទេសេន្តិ អាទិកល្យាណំ មជ្ឈេកល្យាណំ បរិយោ-
សានកល្យាណំ សាត្ថំ សព្យញ្ជនំ កេវលបរិបុណ្ណំ
បរិសុទ្ធំ ព្រហ្មចរិយំ បកាសេន្តិ សោ តស្មឹ អាស-
នេ និសិន្នោ តស្សា កថាយ នេវ អាទឹ មនសិ-
ការោតិ ន មជ្ឈំ មនសិការោតិ ន បរិយោសានំ
មនសិការោតិ វុដ្ឋិតោបិ តម្ហា អាសនា តស្សា ក-
ថាយ នេវ អាទឹ មនសិការោតិ ន មជ្ឈំ មនសិការោតិ
ន បរិយោសានំ មនសិការោតិ អយំ វុច្ចតិ បុគ្គលោ
អវកុជ្ជបញ្ញោ ។ កតមោ ច បុគ្គលោ ឧច្ឆង្គ-
បញ្ញោ ។ ឥធេកច្ចោ បុគ្គលោ អារាមំ គន្តា
ហោតិ អភិក្ខណំ ភិក្ខូនំ សន្តិកេ ធម្មស្សវនាយ
តស្ស ភិក្ខូ ធម្មំ ទេសេន្តិ អាទិកល្យាណំ
មជ្ឈេកល្យាណំ បរិយោសានកល្យាណំ សាត្ថំ



មិនធ្វើទុកក្នុងចិត្ត នូវចំណែកជាកណ្ដាល មិនធ្វើទុកក្នុងចិត្ត នូវចំណែក
ជាខាងចុង នៃកថានោះ ដូចជាក្អមផ្កាប់ បុគ្គលយកទឹកទៅចាក់
ដាក់ក្នុងក្អមនោះ តែទឹកហូរច្រោះចេញ ដក់នៅមិនបាន យ៉ាង
ណាមិញ បុគ្គលខ្លះ ក្នុងលោកនេះ ទៅកាន់អារាមដើម្បីស្ដាប់ធម៌
ក្នុងសំណាក់នៃពួកភិក្ខុរឿយៗ ពួកភិក្ខុសំដែងធម៌ មានពីរោះក្នុងខាង
ដើម មានពីរោះក្នុងកណ្ដាល មានពីរោះក្នុងខាងចុង ប្រកបដោយ
អត្ថ ប្រកបដោយព្យញ្ជនៈ ប្រកាសនូវព្រហ្មចរិយៈ ដ៏បរិបូណ៌បរិសុទ្ធ
សព្វគ្រប់ ចំពោះបុគ្គលនោះ បុគ្គលនោះ អង្គុយលើអាសនៈនោះ
មិនធ្វើទុកក្នុងចិត្ត នូវចំណែកជាខាងដើម មិនធ្វើទុកក្នុងចិត្ត នូវចំណែក
ជាកណ្ដាល មិនធ្វើទុកក្នុងចិត្ត នូវចំណែកជាខាងចុង នៃកថានោះ ទោះ
បើទុកជាក្រោកចាកអាសនៈនោះហើយ ក៏មិនធ្វើទុកក្នុងចិត្ត នូវចំណែក
ជាខាងដើម មិនធ្វើទុកក្នុងចិត្ត នូវចំណែកជាកណ្ដាល មិនធ្វើទុកក្នុងចិត្ត
នូវចំណែកជាខាងចុង នៃកថានោះ ក៏យ៉ាងនោះដែរ នេះហៅថា
បុគ្គលមានបញ្ញាដូចក្អមផ្កាប់ ។ បុគ្គលមានបញ្ញាដូចជាថ្នក់ភ្លៅ តើ
ដូចម្ដេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ទៅកាន់អារាមដើម្បីស្ដាប់ធម៌
ក្នុងសំណាក់នៃពួកភិក្ខុរឿយៗ ពួកភិក្ខុសំដែងធម៌ មានពីរោះក្នុង
ខាងដើម មានពីរោះក្នុងកណ្ដាល មានពីរោះក្នុងខាងចុង ប្រកប

សព្យញ្ជនំ កេវលបរិបុណ្ណំ បរិសុទ្ធំ ព្រហ្មចរិយំ បកា-
សេន្តិ សោ តស្មឹ អាសនេ និសិន្នោ តស្សា កថា-
យ អាទិម្បិ មនសិការោតិ មជ្ឈម្បិ មនសិការោតិ
បរិយោសានម្បិ មនសិការោតិ វុដ្ឋិតោ ច ខោ តម្ហា
អាសនា តស្សា កថាយ នេវ អាទឹ មនសិការោតិ
ន មជ្ឈំ មនសិការោតិ ន បរិយោសានំ មនសិ-
ការោតិ សេយ្យថាបិ នាម បុរិសស្ស ឧច្ឆង្គេ
នានាខជ្ជកានិ អាកិណ្ណានិ តិលា តណ្ឌុលា មោ-
ទកា ពទរា សោ តម្ហា អាសនា វុដ្ឋហន្តោ សតិ-
សម្មោសា បកិរេយ្យ ឯវមេវ ឥធេកច្ចោ បុគ្គលោ អា-
រាមំ គន្តា ហោតិ អភិក្ខណំ ភិក្ខូនំ សន្តិកេ ធម្មស្ស-
វនាយ តស្ស ភិក្ខូ ធម្មំ ទេសេន្តិ អាទិកល្យាណំ
មជ្ឈេកល្យាណំ បរិយោសានកល្យាណំ សាត្ថំ
សព្យញ្ជនំ កេវលបរិបុណ្ណំ បរិសុទ្ធំ ព្រហ្មចរិយំ
បកាសេន្តិ សោ តស្មឹ អាសនេ និសិន្នោ តស្សា កថា-
យ អាទិម្បិ មនសិការោតិ មជ្ឈម្បិ មនសិការោតិ



ដោយអត្ថ ប្រកបដោយព្យញ្ជនៈ ប្រកាសនូវព្រហ្មចរិយៈ ដ៏បរិបូណ៌
បរិសុទ្ធសព្វគ្រប់ ចំពោះបុគ្គលនោះ បុគ្គលនោះ អង្គុយលើអាសនៈនោះ
បានធ្វើទុកក្នុងចិត្ត នូវចំណែកជាខាងដើម ធ្វើទុកក្នុងចិត្ត នូវចំណែកជា
កណ្តាល ធ្វើទុកក្នុងចិត្ត នូវចំណែកជាខាងចុង នៃកថានោះ តែលុះ
ក្រោកចាកអាសនៈនោះហើយ មិនធ្វើទុកក្នុងចិត្ត នូវចំណែកជាខាងដើម
មិនធ្វើទុកក្នុងចិត្ត នូវចំណែកជាកណ្តាល មិនធ្វើទុកក្នុងចិត្ត នូវចំណែក
ជាខាងចុង នៃកថានោះឡើយ បុរសយកភក្សដែលគួរទំពាស៊ីផ្សេងៗ គឺ ល្ង
អង្ករ នំអន្សម ផ្លែពុទ្រា ទៅដាក់ក្នុងភ្លៅ កាលបុរសនោះក្រោកចាក
ទីអង្គុយនោះ រមែងជ្រុះធ្លាក់ខ្ចាយ ព្រោះតែភ្លេចស្មារតី យ៉ាងណាមិញ
បុគ្គលខ្លះ ក្នុងលោកនេះ តែងទៅកាន់អារាមដើម្បីស្តាប់ធម៌ ក្នុងសំណាក់
នៃពួកភិក្ខុរឿយៗ ដែរ ពួកភិក្ខុសំដែងធម៌ មានពីរោះក្នុងខាងដើម
មានពីរោះក្នុងកណ្តាល មានពីរោះក្នុងខាងចុង ប្រកបដោយអត្ថ
ប្រកបដោយព្យញ្ជនៈ ប្រកាសនូវព្រហ្មចរិយៈ ដ៏បរិបូណ៌បរិសុទ្ធសព្វ
គ្រប់ ចំពោះបុគ្គលនោះ បុគ្គលនោះ អង្គុយលើអាសនៈនោះ បានធ្វើ
ទុកក្នុងចិត្ត នូវចំណែកជាខាងដើម ធ្វើទុកក្នុងចិត្ត នូវចំណែកជាកណ្តាល

បរិយោសានម្បិ មនសិការោតិ វុដ្ឋិតោ ច ខោ តម្ហា អាសនា តស្សា កថាយ នេវ អាទឹ មនសិការោតិ ន មជ្ឈំ មនសិការោតិ ន បរិយោសានំ មនសិការោតិ អយំ វុច្ចតិ បុគ្គលោ ឧច្ឆង្គបញ្ញោ ។ កតមោ ច បុគ្គលោ បុថុបញ្ញោ ។ ឥធេកច្ចោ បុគ្គលោ អារាមំ គន្តា ហោតិ អភិក្ខណំ ភិក្ខូនំ សន្តិកេ ធម្មស្សវនាយ តស្ស ភិក្ខូ ធម្មំ ទេសេន្តិ អាទិកល្យាណំ មជ្ឈេកល្យាណំ បរិយោសានកល្យាណំ សាត្ថំ សព្យញ្ជនំ កេវលបរិបុណ្ណំ បរិសុទ្ធំ ព្រហ្មចរិយំ បកាសេន្តិ សោ តស្មឹ អាសនេ និសិន្នោ តស្សា កថាយ អាទិម្បិ មនសិការោតិ មជ្ឈម្បិ មនសិការោតិ បរិយោសានម្បិ មនសិការោតិ វុដ្ឋិតោបិ តម្ហា អាសនា តស្សា កថាយ អាទិម្បិ មនសិការោតិ មជ្ឈម្បិ មនសិការោតិ បរិយោសានម្បិ មនសិការោតិ សេយ្យថាបិ នាម កុម្ភោ ឧក្កុជ្ជោ តត្រ ឧទកំ អាសិត្តំ សណ្ឋាតិ នោ វិវដ្ដតិ ឯវមេវ ឥធេកច្ចោ បុគ្គលោ



ធ្វើទុកក្នុងចិត្ត នូវចំណែកខាងចុង តែកាលនោះ តែលុះក្រោកចាកអាសនៈហើយ មិនធ្វើទុកក្នុងចិត្ត នូវចំណែកខាងដើម មិនធ្វើទុកក្នុងចិត្ត នូវចំណែកកណ្ដាល មិនធ្វើទុកក្នុងចិត្ត នូវចំណែកខាងចុង តែកាលនោះឡើយ គឺយ៉ាងនោះដែរ នេះហៅថា បុគ្គលមានបញ្ញាដូចជាថ្នក់ភ្លៅ ។ បុគ្គលមានបញ្ញាក្រាស់ តើដូចម្ដេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ទៅកាន់អារាម ដើម្បីស្ដាប់ធម៌ ក្នុងសំណាក់នៃពួកភិក្ខុរឿយៗ ។ ពួកភិក្ខុសំដែងធម៌ មានពីរោះក្នុងបទខាងដើម មានពីរោះក្នុងបទកណ្ដាល មានពីរោះក្នុងបទខាងចុង ប្រកបដោយអត្ថ ប្រកបដោយព្យញ្ជនៈ ប្រកាសនូវព្រហ្មចរិយៈ ដ៏បរិបូណ៌ បរិសុទ្ធសព្វគ្រប់ ដល់បុគ្គលនោះ បុគ្គលនោះអង្គុយលើអាសនៈនោះ ក៏តែងធ្វើទុកក្នុងចិត្ត នូវចំណែកជាខាងដើម ធ្វើទុកក្នុងចិត្ត នូវចំណែកជាកណ្ដាល ធ្វើទុកក្នុងចិត្ត នូវចំណែកជាខាងចុង តែកាលនោះផង លុះក្រោកចាកអាសនៈនោះហើយ ក៏តែងធ្វើទុកក្នុងចិត្ត នូវចំណែកជាខាងដើម ធ្វើទុកក្នុងចិត្ត នូវចំណែកជាកណ្ដាល ធ្វើទុកក្នុងចិត្ត នូវចំណែកជាខាងចុង តែកាលនោះផង ក្អមផ្ងារ បុគ្គលយកទឹកទៅចាក់ដាក់ក្នុងក្អមនោះ (ទឹក) ក៏ដក់នៅ មិនកំពប់ខ្ចាយចេញឡើយ យ៉ាងណាមិញ បុគ្គលខ្លះ ក្នុងលោកនេះ ទៅកាន់

អារាមំ គន្តា ហោតិ អភិក្ខណំ ភិក្ខូនំ សន្តិកេ ធម្មស្សវនាយ តស្ស ភិក្ខូ ធម្មំ ទេសេន្តិ អាទិកល្យាណំ មជ្ឈេកល្យាណំ បរិយោសានកល្យាណំ សាត្ថំ សព្យញ្ជនំ កេវលបរិបុណ្ណំ បរិសុទ្ធំ ព្រហ្មចរិយំ បកាសេន្តិ សោ តស្មឹ អាសនេ និសិន្នោ តស្សា កថាយ អាទិម្បិ មនសិករោតិ មជ្ឈម្បិ មនសិករោតិ បរិយោសានម្បិ មនសិករោតិ វុដ្ឋិតោបិ តម្ហា អាសនា តស្សា កថាយ អាទិម្បិ មនសិករោតិ មជ្ឈម្បិ មនសិករោតិ បរិយោសានម្បិ មនសិករោតិ អយំ វុច្ចតិ បុគ្គលោ បុថុបញ្ញោ ។

(៩២) តត្ថ កតមោ ច បុគ្គលោ កាមេសុ ច ភវេសុ ច អវីតរាគោ ។ សោតាបន្នសកទាគាមិនោ ឥមេ វុច្ចន្តិ បុគ្គលា កាមេសុ ច ភវេសុ ច អវីតរាគា ។ តត្ថ កតមោ ច បុគ្គលោ កាមេសុ វីតរាគោ ភវេសុ អវីតរាគោ ។ អនាគាមី អយំ វុច្ចតិ បុគ្គលោ កាមេសុ វីតរាគោ ភវេសុ អវីតរាគោ ។ តត្ថ កតមោ ច បុគ្គលោ កាមេសុ ច ភវេសុ ច វីតរាគោ ។ អរហា អយំ វុច្ចតិ បុគ្គលោ



អារាមដើម្បីស្តាប់ធម៌ក្នុងសំណាក់នៃពួកភិក្ខុរឿយ ៗ ពួកភិក្ខុក៏សំដែងធម៌ មានលំអក្នុងខាងដើម មានលំអក្នុងកណ្តាល មានលំអក្នុងខាងចុង ប្រកបដោយអត្ថ ប្រកបដោយព្យញ្ជនៈ ប្រកាសនូវព្រហ្មចរិយៈ ដ៏បរិបូណ៌បរិសុទ្ធសព្វគ្រប់ ចំពោះបុគ្គលនោះ បុគ្គលនោះអង្គុយលើអាសនៈនោះ តែងធ្វើទុកក្នុងចិត្ត នូវចំណែកជាខាងដើម ធ្វើទុកក្នុងចិត្ត នូវចំណែកជាកណ្តាល ធ្វើទុកក្នុងចិត្ត នូវចំណែកជាខាងចុង នៃកថានោះផង លុះក្រោកចាកអាសនៈហើយ តែងធ្វើទុកក្នុងចិត្ត នូវចំណែកជាខាងដើម ធ្វើទុកក្នុងចិត្ត នូវចំណែកជាកណ្តាល ធ្វើទុកក្នុងចិត្ត នូវចំណែកជាខាងចុង នៃកថានោះផង ក៏យ៉ាងនោះដែរ នេះហៅថា បុគ្គលមានបញ្ញាក្រាស់ ។

(៩២) បុគ្គលមិនទាន់ប្រាសចាកតម្រេកក្នុងកាមនិងភព តើដូចម្តេច ។ បុគ្គលជាសោតាបន្នៈនិងសកទាគាមី នេះហៅថា បុគ្គលមិនទាន់ប្រាសចាកតម្រេកក្នុងកាមនិងភព ។ បុគ្គលដែលប្រាសចាកតម្រេកក្នុងកាម តែមិនទាន់ប្រាសចាកតម្រេកក្នុងភព តើដូចម្តេច ។ បុគ្គលជាអនាគាមី នេះហៅថា បុគ្គលប្រាសចាកតម្រេកក្នុងកាម តែមិនទាន់ប្រាសចាកតម្រេកក្នុងភព ។ បុគ្គលប្រាសចាកតម្រេកក្នុងកាមផង ក្នុងភពផង តើដូចម្តេច ។ បុគ្គលជាព្រះអរហន្ត នេះហៅថា បុគ្គល

កាមេសុ ច ភវេសុ ច វីតរាគោ ។

[៤៣] កតមោ ច បុគ្គលោ បាសាណលេខូបមោ ។ ឥធេកច្ចោ បុគ្គលោ អភិណ្ហំ កុជ្ឈតិ សោ ច ខ្វស្ស កោធោ ចិរំ ទីឃរត្តំ អនុសេតិ សេយ្យថាបិ នាម បាសាណេ លេខា ន ខិប្បំ លុជ្ជតិ វាតេន វា ឧទកេន វា ចិរដ្ឋិតិកា ហោតិ ឯវមេវ ឥធេកច្ចោ បុគ្គលោ អភិណ្ហំ កុជ្ឈតិ សោ ច ខ្វស្ស កោធោ ចិរំ ទីឃរត្តំ អនុសេតិ អយំ វុច្ចតិ បុគ្គលោ បាសាណលេខូបមោ ។ កតមោ ច បុគ្គលោ បឋវីលេខូបមោ ។ ឥធេកច្ចោ បុគ្គលោ អភិណ្ហំ កុជ្ឈតិ សោ ច ខ្វស្ស កោធោ ន ចិរំ ទីឃរត្តំ អនុសេតិ សេយ្យថាបិ នាម បឋវិយា លេខា ខិប្បំ លុជ្ជតិ វាតេន វា ឧទកេន វា ន ចិរដ្ឋិតិកា ហោតិ ឯវមេវ ឥធេកច្ចោ បុគ្គលោ អភិណ្ហំ កុជ្ឈតិ សោ ច ខ្វស្ស កោធោ ន ចិរំ ទីឃរត្តំ អនុសេតិ អយំ វុច្ចតិ បុគ្គលោ បឋវីលេខូបមោ ។ កតមោ ច បុគ្គលោ ឧទកលេខូបមោ ។



ប្រាសចាកតម្រេកក្នុងកាមផង ក្នុងភពផង ។

[៤៣] បុគ្គលប្រៀបដោយគំនូសថ្ម តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ក្រោធរឿយៗ ឯសេចក្តីក្រោធនោះ របស់បុគ្គលនោះសោត តែងដេកត្រាំនៅ អស់កាលយូរអង្វែង គំនូសថ្ម មិនងាយរលុបបាត់ ដោយខ្យល់ឬទឹកឡើយ ជាគំនូសតែងឋិតនៅអស់កាលជាយូរអង្វែង យ៉ាងណាមិញ បុគ្គលខ្លះ ក្នុងលោកនេះ ក្រោធរឿយៗ ឯសេចក្តីក្រោធនោះ របស់បុគ្គលនោះសោត តែងដេកត្រាំនៅ អស់កាលយូរអង្វែង ក៏យ៉ាងនោះដែរ នេះហៅថា បុគ្គលប្រៀបដោយគំនូសថ្ម ។ បុគ្គលប្រៀបដោយគំនូសដី តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ក្រោធរឿយៗ តែសេចក្តីក្រោធនោះ របស់បុគ្គលនោះ មិនបានដេកត្រាំនៅ អស់កាលយូរអង្វែងឡើយ គំនូសដី តែងឆាប់រលុបទៅ ដោយខ្យល់ឬទឹក ជាគំនូសមិនឋិតនៅ អស់កាលជាយូរអង្វែង យ៉ាងណាមិញ បុគ្គលខ្លះ ក្នុងលោកនេះ ក្រោធរឿយៗ តែសេចក្តីក្រោធនោះ របស់បុគ្គលនោះ មិនដេកត្រាំនៅ អស់កាលយូរអង្វែងឡើយ ក៏យ៉ាងនោះដែរ នេះហៅថា បុគ្គលប្រៀបដោយគំនូសដី ។ បុគ្គលប្រៀបដោយគំនូសទឹក តើដូចម្តេច ។

ឥធេកច្ចោ បុគ្គលោ អាគាឡ្ហេនបិ វុច្ចមានោ ផរុសេនបិ វុច្ចមានោ អមនាបេនបិ វុច្ចមានោ សំសន្ទតិ ចេវ សន្ធិយតិ ចេវ សម្មោទតិ ចេវ សេយ្យថាបិ នាម ឧទកេ លេខា ខិប្បំ លុជ្ជតិ ន ចិរដ្ឋិតិកា ហោតិ ឯវមេវ ឥធេកច្ចោ បុគ្គលោ អាគាឡ្ហេនបិ វុច្ចមានោ ផរុសេនបិ វុច្ចមានោ អមនាបេនបិ វុច្ចមានោ សំសន្ទតិ ចេវ សន្ធិយតិ ចេវ សម្មោទតិ ចេវ អយំ វុច្ចតិ បុគ្គលោ ឧទកេលេខូបមោ ។

(៩៦) តត្ថ កតមេ តយោ ពោត្ថកូបមា បុគ្គលា ។ តយោ ពោត្ថកា នវោបិ ពោត្ថកោ ទុព្វណ្ណោ ចេវ ហោតិ ទុក្ខសម្ផស្សោ ច អប្បគ្ឃោ ច មជ្ឈិមោបិ ពោត្ថកោ ទុព្វណ្ណោ ចេវ ហោតិ ទុក្ខសម្ផស្សោ ច អប្បគ្ឃោ ច ជិណ្ណោបិ ពោត្ថកោ ទុព្វណ្ណោ ចេវ ហោតិ ទុក្ខសម្ផស្សោ ច អប្បគ្ឃោ ច ។ ជិណ្ណម្បិ ពោត្ថកំ ឧក្ខលិបរិមជ្ជនំ វា ករោន្តិ សង្ការកូដេ វា នំ ឆឌ្ឌេន្តិ ។





បុគ្គលខ្លះ ក្នុងលោកនេះ ទុកជាគេនិយាយដោយពាក្យដ៏រឹងរូសក្តី ទុកជាគេនិយាយពាក្យអាក្រក់ក្តី ទុកជាគេនិយាយដោយពាក្យមិនជាទីគាប់ចិត្តក្តី គង់នៅតែស្រស់ស្រាយផង រីករាយផង សប្បាយផង គំនូសទឹក តែងដាច់លឿនទៅ ជាគំនូសមិនឋិតនៅ អស់កាលជាយូរអង្វែង យ៉ាងណាមិញ បុគ្គលពួកខ្លះ ក្នុងលោកនេះ ទុកជាគេនិយាយដោយពាក្យដ៏រឹងរូសក្តី ទុកជាគេនិយាយដោយពាក្យអាក្រក់ក្តី ទុកជាគេនិយាយដោយពាក្យមិនជាទីពេញចិត្តក្តី គង់នៅតែស្រស់ស្រាយផង រីករាយផង សប្បាយផង ក៏យ៉ាងនោះដែរ នេះហៅថា បុគ្គលប្រៀបដោយគំនូសទឹក ។

(៩៦) បណ្ដាបុគ្គលទាំងនោះ បុគ្គល ៣ ពួក ប្រៀបដោយសំពត់សម្បកឈើ តើដូចម្ដេច ។ សំពត់សម្បកឈើមាន ៣ យ៉ាង គឺសំពត់សម្បកឈើនៅថ្មី ជាសំពត់មានពណ៌អាក្រក់ផង មានសម្ផស្សរឹងផង មានតម្លៃតិចផង ១ សំពត់សម្បកឈើជាកណ្ដាល ជាសំពត់មានពណ៌អាក្រក់ផង មានសម្ផស្សរឹងផង មានតម្លៃតិចផង ១ សំពត់សម្បកឈើចាស់ ជាសំពត់មានពណ៌អាក្រក់ផង មានសម្ផស្សរឹងផង មានតម្លៃតិចផង ១ ។ ពួកជន តែងយកសំពត់សម្បកឈើ ដែលចាស់ ទៅជូតឆ្នាំង ឬយកសំពត់សម្បកឈើចាស់នោះ ទៅចោលលើគំនរសម្រាម ។

អនត្តមនោ តថារូបំ ភណំ និច្ឆារេតិ យថារូបាយ ភាណាយ សង្ឃោ[១]ឧក្ខិបតិ សង្ការកូដេវ នំ វាកចី-រំ ។ ឥមេ តយោ វាកចីរូបមា បុគ្គលា សន្តោ សំវិជ្ជមានា ភិក្ខូសុ ។

(៩៦) តត្ថ កតមេ តយោ កាសិកវត្ថូបមា បុគ្គលា ។ តីណិ កាសិកវត្ថានិ នវម្បិ កាសិ-កវត្ថំ វណ្ណវន្តំ ចេវ ហោតិ សុខសម្ផស្សញ្ច ម-ហគ្ឃញ្ច មជ្ឈិមម្បិ កាសិកវត្ថំ វណ្ណវន្តំ ចេវ ហោតិ សុខសម្ផស្សញ្ច មហគ្ឃញ្ច ជិណ្ណម្បិ កាសិកវត្ថំ វណ្ណវន្តំ ចេវ ហោតិ សុខសម្ផស្សញ្ច មហគ្ឃញ្ច ។ ជិណ្ណម្បិ កាសិកវត្ថំ រតនបលិវេឋនំ វា ករោន្តិ គន្ធករណ្ឌកេ វា នំ និក្ខិបន្តិ ។

(៩៧) ឯវមេវ តយោមេ កាសិកវត្ថូបមា បុគ្គលា សន្តោ សំវិជ្ជមានា ភិក្ខូសុ ។ កតមេ តយោ ។ នវោ ចេបិ ភិក្ខុ ហោតិ សីលវា កល្យាណធម្មោ ឥទមស្ស សុវណ្ណតាយ សេយ្យ-ថាបិ តំ កាសិកវត្ថំ វណ្ណវន្តំ តថូបមោ

១ ឱ. ម. ឯត្ថន្តរេ នត្ថិ សង្ឃោ ទិស្សតិ ។



តូចចិត្ត (បើ) សង្ឃលើកទោស ដោយវាចាមានសភាពយ៉ាងណា គឺបញ្ចេញវាចាមានសភាពយ៉ាងនោះ ដូចជាសំពត់សំបកឈើ ដែលគេចោលលើគំនរសម្រាម ។ នេះបុគ្គល ៣ ពួក ប្រៀបដោយសំពត់សំបកឈើ រមែងមានក្នុងពួកភិក្ខុ ។

(៩៦) បណ្ដាបុគ្គលទាំងនោះ បុគ្គល ៣ ពួក ប្រៀបដោយសំពត់កាសិកៈ តើដូចម្ដេច ។ សំពត់កាសិកៈមាន ៣ យ៉ាង គឺសំពត់កាសិកៈថ្មី ជាសំពត់មានពណ៌ល្អផង មានសម្ផស្សទន់ផង មានតម្លៃច្រើនផង ១ សំពត់កាសិកៈ ជាកណ្ដាល ជាសំពត់មានពណ៌ល្អផង មានសម្ផស្សទន់ផង មានតម្លៃច្រើនផង ១ សំពត់កាសិកៈចាស់ ជាសំពត់មានពណ៌ល្អផង មានសម្ផស្សទន់ផង មានតម្លៃច្រើនផង ១ ពួកជន តែងយកសំពត់កាសិកៈដែលចាស់ហើយ ធ្វើជាសំពត់សម្រាប់វេចកែវបាន ឬ តម្កល់ទុកនូវសំពត់នោះ ក្នុងធុងសម្រាប់ដាក់គ្រឿងក្រអូប ។

(៩៧) បុគ្គល ៣ ពួក ប្រៀបដោយសំពត់កាសិកៈនេះ រមែងមានក្នុងពួកភិក្ខុ គឺយ៉ាងនេះដែរ ។ បុគ្គល ៣ ពួក តើដូចម្ដេច ។ ប្រសិនបើភិក្ខុបួសថ្មី ជាអ្នកមានសីល មានកល្យាណធម៌ អំពើនេះព្រោះភិក្ខុនោះ មានពណ៌គឺសីលល្អ សំពត់កាសិកៈនោះ មានពណ៌ល្អ

អយំ បុគ្គលោ យេ ខោ បនស្ស សេវន្តិ ភជន្តិ បយិរុបាសន្តិ ទិដ្ឋានុគតិំ អាបជ្ជន្តិ តេសន្តំ ហោតិ ទីឃរត្តំ ហិតាយ សុខាយ ឥទមស្ស សុខសម្ផស្សតាយ សេយ្យថាបិ តំ កាសិកវត្ថំ សុខសម្ផស្សំ តថូបមោ អយំ បុគ្គលោ យេសំ ខោ បន បដិគ្គណ្ហាតិ ចីវរបិណ្ឌបាតសេនាសនគិលានប្បច្ចយភេសជ្ជបរិក្ខារំ តេសន្តំ មហប្ផលំ ហោតិ មហានិសំសំ ឥទមស្ស មហគ្ឃតាយ សេយ្យថាបិ តំ កាសិកវត្ថំ មហគ្ឃំ តថូបមោ អយំ បុគ្គលោ មជ្ឈិមោ ចេបិ ភិក្ខុ ។បេ។ ថេរោ ចេបិ ភិក្ខុ ហោតិ សីលវា កល្យាណធម្មោ ឥទមស្ស សុវណ្ណតាយ សេយ្យថាបិ តំ កាសិកវត្ថំ វណ្ណវន្តំ តថូបមោ អយំ បុគ្គលោ យេ ខោ បនស្ស សេវន្តិ ភជន្តិ បយិរុបាសន្តិ ទិដ្ឋានុគតិំ អាបជ្ជន្តិ តេសន្តំ ហោតិ



មានឧបមាយ៉ាងណា បុគ្គលនេះ ក៏មានឧបមេយ្យយ៉ាងនោះដែរ បើពួកជនណាមួយ សេព គប់ ចូលទៅអង្គុយជិត តែងដល់នូវការប្រព្រឹត្តតាមនូវទិដ្ឋិរបស់បុគ្គលនោះ ការសេពគប់ជាដើមនោះ តែងប្រព្រឹត្តទៅដើម្បីជាប្រយោជន៍ ដើម្បីសេចក្ដីសុខ ដល់ជនពួកនោះ អស់កាលជាយូរអង្វែង សំពត់នេះ ព្រោះបុគ្គលនោះមានសម្ផស្សជាសុខ សំពត់កាសិកនោះ មានសម្ផស្សទន់ មានឧបមាយ៉ាងណាមិញ បុគ្គលនេះ ក៏មានឧបមេយ្យយ៉ាងនោះដែរ បុគ្គលនេះទទួលចីវរ បិណ្ឌបាត សេនាសនៈ គិលានប្បច្ច័យភេសជ្ជបរិក្ខារ របស់ជនពួកណា ការទទួលនោះ រមែងមានផលច្រើន មានអានិសង្សច្រើន ដល់ជនពួកនោះ សំពត់នេះ ព្រោះបុគ្គលនោះ មានតម្លៃច្រើន សំពត់កាសិកនោះ មានតម្លៃច្រើន មានឧបមាយ៉ាងណាមិញ បុគ្គលនេះ ក៏មានឧបមេយ្យយ៉ាងនោះដែរ បើភិក្ខុជាកណ្ដាល ។បេ។ បើភិក្ខុជាថេរៈ មានសីល មានកល្យាណធម៌ សំពត់នេះ ព្រោះភិក្ខុនោះមានពណ៌គឺសីលល្អ សំពត់កាសិកនោះ មានពណ៌ល្អ មានឧបមាយ៉ាងណាមិញ បុគ្គលនេះ ក៏មានឧបមេយ្យយ៉ាងនោះដែរ បើពួកជនណាមួយ សេព គប់ ចូលទៅអង្គុយជិត តែងដល់នូវការប្រព្រឹត្តតាម នូវទិដ្ឋិរបស់បុគ្គលនោះ ការសេពគប់ជាដើមនោះ

ពីឃរត្តំ ហិតាយ សុខាយ ឥទមស្ស សុខសម្ផស្សតាយ

សេយ្យថាបិ តំ កាសិកវត្ថំ សុខសម្ផស្សំ តថូបមោ

អយំ បុគ្គលោ យេសំ ខោ បន បដិគ្គណ្ហាតិ

ចីវរបិណ្ឌបាតសេនាសនគិលានប្បច្ចយភេសជ្ជបរិក្ខារំ

តេសន្តំ មហប្ផលំ ហោតិ មហានិសំសំ ឥទមស្ស

មហគ្ឃតាយ សេយ្យថាបិ តំ កាសិកវត្ថំ មហគ្ឃំ

តថូបមោ អយំ បុគ្គលោ ឯវរូបោ ចេ ថេរោ ភិក្ខុ

សង្ឃមជ្ឈេ ភណតិ តមេនំ ភិក្ខូ ឯវមាហំសុ

អប្បសទ្ទា អាយស្មន្តោ ហោថ ថេរោ ភិក្ខុ

ធម្មញ្ច វិនយញ្ច ភណតីតិ តស្ស តំ វចនំ អាធេយ្យំ

គច្ឆតិ គន្ធករណ្ឌកេវ តំ កាសិកវត្ថំ ។ ឥមេ

តយោ កាសិកវត្ថូបមា បុគ្គលា សន្តោ សំវិជ្ជ-

មានា ភិក្ខូសុ ។

(៩៨) កតមោ ច បុគ្គលោ សុប្បមេយ្យោ ។



តែងប្រព្រឹត្តទៅ ដើម្បីជាប្រយោជន៍ ដើម្បីសេចក្តីសុខ ដល់ជនពួក

នោះអស់កាលជាអង្វែង អំពើនេះ ព្រោះបុគ្គលនោះ មានសម្ផស្សជាសុខ

សំពត់កាសិកៈនោះ មានសម្ផស្សទន់ មានឧបមាយ៉ាងណាមិញ បុគ្គល

នេះ ក៏មានឧបមេយ្យយ៉ាងនោះដែរ បុគ្គលនេះ បើទទួលចីវរបិណ្ឌបាត

សេនាសនៈ គិលានប្បច្ចយភេសជ្ជបរិក្ខារ របស់ជនពួកណា ការទទួល

នោះ រមែងមានផលច្រើន មានអានិសង្សច្រើនដល់ជនពួកនោះ អំពើ

នេះ ព្រោះបុគ្គលនោះ មានតម្លៃច្រើន សំពត់កាសិកៈនោះ មានតម្លៃ

ច្រើន មានឧបមាយ៉ាងណាមិញ បុគ្គលនេះ ក៏មានឧបមេយ្យយ៉ាង

នោះដែរ បើភិក្ខុជាថេរៈ មានសភាពបែបនេះ និយាយក្នុងកណ្តាលជំ-

នុំសង្ឃ ពួកភិក្ខុនាំគ្នានិយាយយ៉ាងនេះ នឹងភិក្ខុជាថេរៈនោះថា បពិត្រ

លោកមានអាយុ លោកជាអ្នកមានសទ្ទតិច ភិក្ខុជាថេរៈពោលនូវធម៌

ផង នូវវិន័យផង ពាក្យនោះ របស់ភិក្ខុជាថេរៈនោះ គួរយកទុកដាក់

ក្នុងចិត្តបាន ដូចជាសំពត់កាសិកៈ គួរយកទុកដាក់ក្នុងប្រអប់ដាក់គន្ធ-

វត្ថុមានក្លិនក្រអូប ។ នេះ បុគ្គល ៣ ពួក ប្រៀបដោយសំពត់កាសិកៈ

រមែងមានក្នុងពួកភិក្ខុ ។

(៩៨) បុគ្គលដែលគេប្រមាណបានដោយងាយ តើដូចម្តេច ។

ឥធេកច្ចោ បុគ្គលោ ឧទ្ធតោ ហោតិ ឧន្នឡោ ចបលោ មុខរោ វិកិណ្ណវាចោ មុដ្ឋស្សតិ អសម្បជានោ អសមាហិតោ វិព្ភន្តចិត្តោ បាកតិន្ទ្រិយោ អយំ វុច្ចតិ បុគ្គលោ សុប្បមេយ្យោ ។ កតមោ ច បុគ្គលោ ទុប្បមេយ្យោ ។ ឥធេកច្ចោ បុគ្គលោ អនុទ្ធតោ ហោតិ អនុន្នឡោ អចបលោ អមុខរោ អវិកិណ្ណវាចោ ឧបដ្ឋិតស្សតិ សម្បជានោ សមាហិតោ ឯកគ្គចិត្តោ សំវុតិន្ទ្រិយោ អយំ វុច្ចតិ បុគ្គលោ ទុប្បមេយ្យោ ។ កតមោ ច បុគ្គលោ អប្បមេយ្យោ ។ ឥធេកច្ចោ បុគ្គលោ អាសវានំ ខយា អនាសវំ ចេតោវិមុត្តឹ បញ្ញាវិមុត្តឹ ទិដ្ឋេវ ធម្មេ សយំ អភិញ្ញា សច្ឆិកត្វា ឧបសម្បជ្ជ វិហរតិ អយំ វុច្ចតិ បុគ្គលោ អប្បមេយ្យោ ។

(៩៩) កតមោ ច បុគ្គលោ ន សេវិតព្វោ ន ភជិតព្វោ ន បយិរុបាសិតព្វោ ។ ឥធេកច្ចោ បុគ្គលោ

តិកនិទ្ទេស

បុគ្គលខ្លះ ក្នុងលោកនេះ ជាអ្នករាយមាយ លើកខ្លួន មានចិត្តឃ្លេងឃ្លោង មានមាត់រឹង មានវាចារាក់រាយ ភ្លេចស្មារតី មិនដឹងខ្លួន មានចិត្តមិនតម្កល់មាំ មានចិត្តភ័ន្តច្រឡំ មានឥន្ទ្រិយប្រាកដ នេះហៅថា បុគ្គលដែលគេប្រមាណបានដោយងាយ ។ បុគ្គលដែលគេប្រមាណបានដោយក្រ តើដូចម្ដេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ជាអ្នកមិនរាយមាយ មិនលើកខ្លួន មានចិត្តមិនឃ្លេងឃ្លោង មានមាត់មិនរឹង មានវាចាមិនរាក់រាយ មានស្មារតីតម្កល់ស៊ប់ មានសេចក្ដីដឹងខ្លួន មានចិត្តតម្កល់មាំ មានចិត្តស្ងប់ក្នុងអារម្មណ៍តែមួយ មានឥន្ទ្រិយសង្រួមហើយ នេះហៅថា បុគ្គលដែលគេប្រមាណបានដោយក្រ ។ បុគ្គលដែលគេប្រមាណមិនបាន តើដូចម្ដេច ។ បុគ្គលខ្លះ ក្នុងលោកនេះ បានធ្វើឲ្យជាក់ច្បាស់ សម្រេច ដោយបញ្ញាដ៏ឧត្តមដោយខ្លួនឯង ក្នុងបច្ចុប្បន្ន នូវចេតោវិមុត្តិ បញ្ញាវិមុត្តិ ដែលមិនមានអាសវៈ ព្រោះអស់ទៅនៃអាសវៈទាំងឡាយ ហើយសម្រេចសម្រាន្តនៅ នេះហៅថា បុគ្គលដែលគេប្រមាណមិនបាន ។

(៩៩) បុគ្គលដែលគេមិនគួរសេព មិនគួរគប់ មិនគួរចូលទៅអង្គុយជិត តើដូចម្ដេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ជាអ្នក

ហីនោ ហោតិ សីលេន សមាធិនា បញ្ញាយ ឯវរូបោ បុគ្គលោ ន សេវិតព្វោ ន ភជិតព្វោ ន បយិរុបាសិតព្វោ អញ្ញត្រ អនុទ្ទយា អញ្ញត្រ អនុកម្បា ។ កតមោ ច បុគ្គលោ សេវិតព្វោ ភជិតព្វោ បយិរុបាសិតព្វោ ។ ឥធេកច្ចោ បុគ្គលោ សទិសោ ហោតិ សីលេន សមាធិនា បញ្ញាយ ឯវរូបោ បុគ្គលោ សេវិតព្វោ ភជិតព្វោ បយិរុបាសិតព្វោ ។ តំ កិស្ស ហេតុ ។ សីលសាមញ្ញគតានំ សតំ សីលកថា ច នោ ភវិស្សតិ សា ច នោ ផាសុ ភវិស្សតិ សា ច នោ បវត្តិនី ភវិស្សតិ សមាធិសាមញ្ញគតានំ សតំ សមាធិកថា ច នោ ភវិស្សតិ សា ច នោ ផាសុ ភវិស្សតិ សា ច នោ បវត្តិនី ភវិស្សតិ បញ្ញាសាមញ្ញគតានំ សតំ បញ្ញាកថា ច នោ ភវិស្សតិ សា ច នោ ផាសុ ភវិស្សតិ សា ច នោ បវត្តិនី ភវិស្សតីតិ តស្មា ឯវរូបោ បុគ្គលោ សេវិតព្វោ ភជិតព្វោ បយិរុបាសិតព្វោ ។ កតមោ ច បុគ្គលោ សក្កត្វា គរុំ កត្វា សេវិតព្វោ ភជិតព្វោ បយិរុបាសិតព្វោ ។



ថោកទាបជាង ដោយសីលសមាធិនិងបញ្ញា បុគ្គលបែបនេះ គេមិនគួរសេព មិនគួរគប់ មិនគួរចូលទៅអង្គុយជិត វៀរលែងតែមានសេចក្តីករុណា វៀរលែងតែមានសេចក្តីអនុគ្រោះ ។ បុគ្គលដែលគេគួរសេព គួរគប់រក គួរចូលទៅអង្គុយជិត តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ជាអ្នកស្មើគ្នា ដោយសីលសមាធិនិងបញ្ញា បុគ្គលមានសភាពយ៉ាងនេះ គេគួរសេព គួរគប់រក គួរចូលទៅអង្គុយជិត ។ ដំណើរនោះ តើព្រោះហេតុអ្វី ។ ព្រោះថា សីលកថា របស់ពួកសប្បុរសដែលដល់នូវភាពស្មើគ្នា ដោយសីល នឹងជាកថាកើតមាន ដល់ពួកយើងផង សីលកថានោះ នឹងជាទីសប្បាយនៃពួកយើងផង សីលកថានោះ នឹងប្រព្រឹត្តទៅដល់ពួកយើងផង សមាធិកថា របស់ពួកសប្បុរសដែលដល់នូវភាពស្មើគ្នា ដោយសមាធិ នឹងជាកថាកើតមាន ដល់ពួកយើងផង សមាធិកថានោះ នឹងជាទីសប្បាយនៃពួកយើងផង សមាធិកថានោះ នឹងប្រព្រឹត្តទៅដល់ពួកយើងផង បញ្ញាកថា របស់ពួកសប្បុរសដែលដល់នូវភាពស្មើគ្នា ដោយបញ្ញា នឹងជាកថាកើតមានដល់ពួកយើងផង បញ្ញាកថានោះ នឹងជាទីសប្បាយនៃពួកយើងផង បញ្ញាកថានោះ នឹងប្រព្រឹត្តទៅដល់ពួកយើងផង ព្រោះហេតុនោះ បុគ្គលបែបនេះ គេគួរសេព គួរគប់រក គួរចូលទៅអង្គុយជិត ។ បុគ្គលដែលគួរធ្វើសក្ការៈគោរព ហើយសេព គប់រក ចូលទៅអង្គុយជិត តើដូចម្តេច ។

ន បយិរុបាសិតព្វោ ។ តំ កិស្ស ហេតុ ។ កិញ្ចាបិ ឯវរូបស្ស បុគ្គលស្ស ន ទិដ្ឋានុគតិំ អាបជ្ជតិ អថ ខោ នំ បាបកោ កិត្តិសទ្ទោ អព្ភុគ្គច្ឆតិ បាបមិត្តោ បុរិសបុគ្គលោ បាបសហាយោ បាបសម្បវង្កោតិ សេយ្យថាបិ នាម អហិ គូថគតោ កិញ្ចាបិ ន ទំសតិ អថ ខោ នំ មក្ខេតិ ឯវមេវ កិញ្ចាបិ ឯវរូបស្ស បុគ្គលស្ស ន ទិដ្ឋានុគតិំ អាបជ្ជតិ អថ ខោ នំ បាបកោ កិត្តិសទ្ទោ អព្ភុគ្គច្ឆតិ បាបមិត្តោ បុរិសបុគ្គលោ បាបសហាយោ បាបសម្បវង្កោតិ តស្មា ឯវរូបោ បុគ្គលោ ជិគុច្ឆិតព្វោ ន សេវិតព្វោ ន ភជិតព្វោ ន បយិរុបាសិតព្វោ ។ កតមោ ច បុគ្គលោ អជ្ឈុបេក្ខិតព្វោ ន សេវិតព្វោ ន ភជិតព្វោ ន បយិរុបាសិតព្វោ ។ ឥធេកច្ចោ បុគ្គលោ កោធនោ ហោតិ ឧបាយាសពហុលោ អប្បម្បិ វុត្តោ សមានោ អភិសជ្ជតិ កុប្បតិ ព្យាបជ្ជតិ បតិដ្ឋីយតិ កោបញ្ច ទោសញ្ច អប្បច្ចយញ្ច បាតុករោតិ សេយ្យថាបិ នាម ទុដ្ឋារុកោ កដ្ឋេន វា កឋលាយ វា ឃដ្ដិតោ



មិនគួរចូលទៅអង្គុយជិត ។ ដំណើរនោះ តើព្រោះហេតុអ្វី ។ ព្រោះថា បុគ្គលមិនដល់នូវការប្រព្រឹត្តតាម នូវទិដ្ឋិរបស់បុគ្គលបែបនេះ ក៏ពិតមែនហើយ តែកិត្តិស័ព្ទដ៏អាក្រក់ នៃបុគ្គលនោះ រមែងខ្ចរខ្ចាយថា បុរសបុគ្គលនេះ មានមិត្តអាក្រក់ មានសំឡាញ់អាក្រក់ ឆាកទៅរកបុគ្គលអាក្រក់ ពស់ទៅកន្លែងលាមក មិនចឹកស៊ី ក៏ពិតមែនហើយ តែលាមក គង់ប្រឡាក់នូវពស់នោះ យ៉ាងណាមិញ បុគ្គលមិនដល់នូវការប្រព្រឹត្តតាម នូវទិដ្ឋិរបស់បុគ្គលបែបនេះ ក៏ពិតមែនហើយ តែកិត្តិសព្ទដ៏អាក្រក់នៃបុគ្គលនោះ រមែងខ្ចរខ្ចាយថា បុរសបុគ្គលនេះ មានមិត្តអាក្រក់ មានសំឡាញ់អាក្រក់ ឆាកទៅរកបុគ្គលអាក្រក់ ក៏យ៉ាងនោះដែរ ព្រោះហេតុនោះ បុគ្គលបែបនេះ គេគួរខ្ពើម មិនគួរសេព មិនគួរគប់រក មិនគួរចូលទៅអង្គុយជិត ។ បុគ្គលគេគួរសំឡឹងមើល តែមិនគួរសេព មិនគួរគប់រក មិនគួរចូលទៅអង្គុយជិត តើដូចម្ដេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ជាអ្នកក្រោធ ច្រើនដោយការចង្អៀតចង្អល់ សូម្បីតែគេស្ដីថាបន្តិចបន្តួច ក៏ខ្ញាល់ចិត្ត ខឹង ព្យាបាទ តតប ធ្វើសេចក្ដីក្រោធ ប្រទូស្ដ និងសេចក្ដីមិនត្រេកអរ ឲ្យប្រាកដ ដំបៅកែ ដែលបុគ្គលឲ្យដល់ ដោយឈើ ឬអំបែង តែងហូរទឹករងៃ

អជ្ឈុបេក្ខិតព្វោ ន សេវិតព្វោ ន ភជិតព្វោ ន
បយិរុបាសិតព្វោ ។ តំ កិស្ស ហេតុ ។ អក្កោ-
សេយ្យបិ មំ បរិភាសេយ្យបិ មំ អនត្ថម្បិ មេ ក-
រេយ្យាតិ ។ តស្មា ឯវរូបោ បុគ្គលោ អជ្ឈុបេក្ខិតព្វោ
ន សេវិតព្វោ ន ភជិតព្វោ ន បយិរុបាសិតព្វោ ។
កតមោ ច បុគ្គលោ សេវិតព្វោ ភជិតព្វោ បយិរុ-
បាសិតព្វោ ។ ឥធេកច្ចោ បុគ្គលោ សីលេន ហោតិ
កល្យាណធម្មោ ។ ឯវរូបោ បុគ្គលោ សេវិតព្វោ ភជិ-
តព្វោ បយិរុបាសិតព្វោ ។ តំ កិស្ស ហេតុ ។
កិញ្ចាបិ ឯវរូបស្ស បុគ្គលស្ស ន ទិដ្ឋានុគតិំ អាបជ្ជតិ
អថ ខោ នំ កល្យាណោ កិត្តិសទ្ទោ អព្ភុគ្គច្ឆតិ
កល្យាណមិត្តោ បុរិសបុគ្គលោ កល្យាណសហាយោ
កល្យាណសម្បវង្កោតិ ។ តស្មា ឯវរូបោ បុគ្គលោ
សេវិតព្វោ ភជិតព្វោ បយិរុបាសិតព្វោ ។

[១០១] កតមោ ច បុគ្គលោ សីលេសុ បរិបូរការី
សមាធិស្មិំ មត្តសោការី បញ្ញាយ មត្តសោការី ។



គេគួរសំឡឹងមើល តែមិនគួរសេព មិនគួរគប់រក មិនគួរចូលទៅអង្គុយ
ជិត ។ ដំណើរនោះ តើព្រោះហេតុអ្វី ។ ព្រោះថា អ្នកដទៃតែងគិត
ថា អ្នកនេះ មុខជានឹងជេរអញ នឹងផ្ដាសាអញ ឬនឹងធ្វើនូវអំពើមិនជា
ប្រយោជន៍ដល់អញពុំខាន ព្រោះហេតុនោះ បុគ្គលបែបនេះ គេគួរសំ-
ឡឹងមើល តែមិនគួរសេព មិនគួរគប់រក មិនគួរចូលទៅអង្គុយជិត ។
បុគ្គលគួរតែសេព គួរគប់រក គួរចូលទៅអង្គុយជិត តើដូចម្ដេច ។
បុគ្គលខ្លះ ក្នុងលោកនេះ ជាអ្នកមានសីល មានធម៌ល្អ បុគ្គលបែប
នេះ ដែលគួរសេព គួរគប់រក គួរចូលទៅអង្គុយជិត ។ ដំណើរ
នោះ តើព្រោះហេតុអ្វី ។ បុគ្គលមិនដល់នូវការប្រព្រឹត្តតាម នូវទិដ្ឋិ
របស់បុគ្គលបែបនេះ ក៏ពិតមែនហើយ តែកិត្តិស័ព្ទដ៏ល្អនៃបុគ្គលនោះ
តែងខ្ចរខ្ចាយល្បីទៅថា បុរសបុគ្គលនេះ មានមិត្រល្អ មានសំឡាញ់
ល្អ ផឹកទៅរកបុគ្គលល្អ ព្រោះហេតុនោះ បុគ្គលបែបនេះ គួរគេ
សេព គួរគប់រក គួរចូលទៅអង្គុយជិត ។

[១០១] បុគ្គលធ្វើឲ្យពេញលេញក្នុងសីល តែធ្វើបន្តិចបន្តួច
ក្នុងសមាធិ ធ្វើបន្តិចបន្តួចក្នុងបញ្ញា តើដូចម្ដេច ។ បុគ្គលជា

សោតាបន្នសកទាគាមិនោ ឥមេ វុច្ចន្តិ បុគ្គលា សីលេសុ បរិបូរការិនោ សមាធិស្មឹ មត្តសោការិនោ បញ្ញាយ មត្តសោការិនោ ។ កតមោ ច បុគ្គលោ សីលេសុ ច បរិបូរការី សមាធិស្មិញ្ច បរិបូរការី បញ្ញាយ មត្តសោការី ។ អនាគាមី អយំ វុច្ចតិ បុគ្គលោ សីលេសុ ច បរិបូរការី សមាធិស្មិញ្ច បរិបូរការី បញ្ញាយ មត្តសោការី ។ កតមោ ច បុគ្គលោ សីលេសុ ច បរិបូរការី សមាធិស្មិញ្ច បរិបូរការី បញ្ញាយ ច បរិបូរការី ។ អរហា អយំ វុច្ចតិ បុគ្គលោ សីលេសុ ច បរិបូរការី សមាធិស្មិញ្ច បរិបូរការី បញ្ញាយ ច បរិបូរការី ។

[១០៦] តត្ថ កតមេ តយោ សត្ថារោ ។ សន្តេកច្ចោ សត្ថា កាមានំ បរិញ្ញំ បញ្ញាបេតិ(១) ន រូបានំ បរិញ្ញំ បញ្ញាបេតិ ន វេទនានំ បរិញ្ញំ បញ្ញាបេតិ ។ សន្តេកច្ចោ សត្ថា កាមានញ្ច បរិញ្ញំ បញ្ញាបេតិ រូបានញ្ច បរិញ្ញំ បញ្ញាបេតិ

១ ម. សព្វត្ថ បាឡីសុ បញ្ញាបេតីតិ ទិស្សតិ ។



សោតាបន្នៈនិងសកទាគាមី នេះហៅថា បុគ្គលធ្វើឲ្យពេញលេញក្នុងសីល តែធ្វើបន្តិចបន្តួចក្នុងសមាធិ ធ្វើបន្តិចបន្តួចក្នុងបញ្ញា ។ បុគ្គលធ្វើពេញលេញក្នុងសីលផង ធ្វើពេញលេញក្នុងសមាធិផង តែធ្វើបន្តិចបន្តួចក្នុងបញ្ញា តើដូចម្តេច ។ បុគ្គលជាអនាគាមី នេះហៅថា បុគ្គលធ្វើពេញលេញក្នុងសីលផង ធ្វើពេញលេញក្នុងសមាធិផង តែធ្វើបន្តិចបន្តួចក្នុងបញ្ញា ។ បុគ្គលធ្វើពេញលេញក្នុងសីលផង ធ្វើពេញលេញក្នុងសមាធិផង ធ្វើពេញលេញក្នុងបញ្ញាផង តើដូចម្តេច ។ បុគ្គលជាព្រះអរហន្ត នេះហៅថា បុគ្គលធ្វើពេញលេញក្នុងសីលផង ធ្វើពេញលេញក្នុងសមាធិផង ធ្វើពេញលេញក្នុងបញ្ញាផង ។

[១០៦] បណ្តាបុគ្គលទាំងនោះ បុគ្គលជាគ្រូ ៣ ពួក តើដូចម្តេច ។ គ្រូខ្លះ ក្នុងលោកនេះ បញ្ញត្តនូវការកំណត់កាម មិនបញ្ញត្តនូវការកំណត់រូប មិនបញ្ញត្តនូវការកំណត់វេទនា ។ គ្រូខ្លះ ក្នុងលោកនេះ បញ្ញត្តនូវការកំណត់កាមផង បញ្ញត្តនូវការកំណត់រូបផង

ន វេទនានំ បរិញ្ញំ បញ្ញាបេតិ ឥធ បនេកច្ចោ សត្ថា កាមានញ្ច បរិញ្ញំ បញ្ញាបេតិ រូបានញ្ច បរិញ្ញំ បញ្ញាបេតិ វេទនានញ្ច បរិញ្ញំ បញ្ញាបេតិ ។ តត្ថ យ្វាយំ សត្ថា កាមានំ បរិញ្ញំ បញ្ញាបេតិ ន រូបានំ បរិញ្ញំ បញ្ញាបេតិ ន វេទនានំ បរិញ្ញំ បញ្ញាបេតិ រូបាវចរសមាបត្តិយា លាភី សត្ថា តេន ទដ្ឋព្វោ ។ តត្ថ យ្វាយំ សត្ថា កាមានញ្ច បរិញ្ញំ បញ្ញាបេតិ រូបានញ្ច បរិញ្ញំ បញ្ញាបេតិ ន វេទនានំ បរិញ្ញំ បញ្ញាបេតិ អរូបាវចរសមាបត្តិយា លាភី សត្ថា តេន ទដ្ឋព្វោ ។ តត្ថ យ្វាយំ សត្ថា កាមានញ្ច បរិញ្ញំ បញ្ញាបេតិ រូបានញ្ច បរិញ្ញំ បញ្ញាបេតិ វេទនានញ្ច បរិញ្ញំ បញ្ញាបេតិ សម្មាសម្ពុទ្ធោ សត្ថា តេន ទដ្ឋព្វោ ។ ឥមេ តយោ សត្ថារោ ។

(១០៣) តត្ថ កតមេ អបរេបិ តយោ សត្ថារោ ។ ឥធេកច្ចោ សត្ថា ទិដ្ឋេវ ធម្មេ អត្តានំ សច្ចតោ ថេតតោ បញ្ញាបេតិ អភិសម្បរាយញ្ច អត្តានំ សច្ចតោ ថេតតោ បញ្ញាបេតិ ឥធ បនេកច្ចោ សត្ថា ទិដ្ឋេវ ធម្មេ អត្តានំ សច្ចតោ ថេតតោ បញ្ញាបេតិ



តែមិនបញ្ញត្តនូវការកំណត់វេទនា ។ គ្រូខ្លះ ក្នុងលោកនេះ បញ្ញត្តនូវការកំណត់កាមផង បញ្ញត្តនូវការកំណត់រូបផង បញ្ញត្តនូវការកំណត់វេទនាផង ។ បណ្តាគ្រូទាំងនោះ គ្រូណា បញ្ញត្តនូវការកំណត់កាម តែមិនបញ្ញត្តនូវការកំណត់រូប មិនបញ្ញត្តនូវការកំណត់វេទនា បណ្ឌិតគប្បីយល់ថា គ្រូ (នោះ) បាននូវរូបាវចរសមាបត្តិ ដោយការបញ្ញត្តិនោះ ។ បណ្តាគ្រូទាំងនោះ គ្រូណា ដែលបញ្ញត្តនូវការកំណត់កាមផង បញ្ញត្តនូវការកំណត់រូបផង តែមិនបញ្ញត្តនូវការកំណត់វេទនា បណ្ឌិតគប្បីយល់ថា គ្រូ (នោះ) បាននូវអរូបាវចរសមាបត្តិ ដោយការបញ្ញត្តិនោះ ។ បណ្តាគ្រូទាំងនោះ គ្រូណា បញ្ញត្តនូវការកំណត់កាមផង បញ្ញត្តនូវការកំណត់រូបផង បញ្ញត្តនូវការកំណត់វេទនាផង បណ្ឌិតគប្បីយល់ថា គ្រូ (នោះ) ជាព្រះសម្មាសម្ពុទ្ធ ដោយការបញ្ញត្តិនោះ ។ នេះ បុគ្គលជាគ្រូមានបីពួក ។

(១០៣) បណ្តាបុគ្គលទាំងនោះ បុគ្គលជាគ្រូ ៣ ពួក ដោយឡែកទៀត តើដូចម្តេច ។ គ្រូខ្លះ ក្នុងលោកនេះ បញ្ញត្តនូវខ្លួនក្នុងបច្ចុប្បន្ន ថាទៀង ថាមាំមួនផង បញ្ញត្តនូវខ្លួនក្នុងបរលោក ថាទៀង ថាមាំមួនផង ។ គ្រូខ្លះ ក្នុងលោកនេះ បញ្ញត្តនូវខ្លួនក្នុងបច្ចុប្បន្ន ថាទៀង

នោ ច ខោ អភិសម្បរាយំ អត្តានំ សច្ចតោ ថេតតោ បញ្ញាបេតិ ឥធ បនេកច្ចោ សត្ថា ទិដ្ឋេ ចេវ ធម្មេ អត្តានំ សច្ចតោ ថេតតោ ន បញ្ញាបេតិ អភិសម្បរាយញ្ច អត្តានំ សច្ចតោ ថេតតោ ន បញ្ញាបេតិ ។ តត្រ យ្វាយំ សត្ថា ទិដ្ឋេ ចេវ ធម្មេ អត្តានំ សច្ចតោ ថេតតោ បញ្ញាបេតិ អភិសម្បរាយញ្ច អត្តានំ សច្ចតោ ថេតតោ បញ្ញាបេតិ សស្សតវាទោ សត្ថា តេន វុច្ចតិ ។ តត្រ យ្វាយំ សត្ថា ទិដ្ឋេ ចេវ ធម្មេ អត្តានំ សច្ចតោ ថេតតោ បញ្ញាបេតិ នោ ច ខោ អភិសម្បរាយំ អត្តានំ សច្ចតោ ថេតតោ បញ្ញាបេតិ ឧច្ឆេទវាទោ សត្ថា តេន វុច្ចតិ ។ តត្រ យ្វាយំ សត្ថា ទិដ្ឋេ ចេវ ធម្មេ អត្តានំ សច្ចតោ ថេតតោ ន បញ្ញាបេតិ អភិសម្បរាយញ្ច អត្តានំ សច្ចតោ ថេតតោ ន បញ្ញាបេតិ សម្មាសម្ពុទ្ធោ សត្ថា តេន វុច្ចតិ ។ ឥមេ អបរេបិ តយោ សត្ថារោ ។

តិកនិទ្ទេសោ ។



ថាទាំមួន តែមិនបញ្ញត្តនូវខ្លួនក្នុងបរលោក ថាទៀង ថាទាំមួនឡើយ គ្រូ១ ក្នុងលោកនេះ មិនបញ្ញត្តនូវខ្លួនក្នុងបច្ចុប្បន្ន ថាទៀង ថាទាំមួនផង មិនបញ្ញត្តនូវខ្លួនក្នុងបរលោក ថាទៀង ថាទាំមួនផង ។ បណ្ដាគ្រូទាំងនោះ គ្រូណា បញ្ញត្តនូវខ្លួនក្នុងបច្ចុប្បន្ន ថាទៀង ថាទាំមួនផង បញ្ញត្តនូវខ្លួនក្នុងបរលោក ថាទៀង ថាទាំមួនផង បណ្ឌិតគប្បីយល់ថា គ្រូ (នោះ) ជាសស្សតវាទ (អ្នកពោលថាទៀង) ដោយការបញ្ញត្តិនោះ ។ បណ្ដាគ្រូទាំងនោះ គ្រូណា បញ្ញត្តនូវខ្លួនក្នុងបច្ចុប្បន្ន ថាទៀង ថាទាំមួន តែមិនបញ្ញត្តនូវខ្លួនក្នុងបរលោក ថាទៀង ថាទាំមួនឡើយ បណ្ឌិតគប្បីយល់ថា គ្រូ (នោះ) ជាឧច្ឆេទវាទ (អ្នកពោលថាសូន្យ) ដោយការបញ្ញត្តិនោះ ។ បណ្ដាគ្រូទាំងនោះ គ្រូណា មិនបញ្ញត្តនូវខ្លួនក្នុងបច្ចុប្បន្ន ថាទៀង ថាទាំមួនផង មិនបញ្ញត្តនូវខ្លួនក្នុងបរលោក ថាទៀង ថាទាំមួនផង បណ្ឌិតគប្បីយល់ថា គ្រូ (នោះ) ជាព្រះសម្មាសម្ពុទ្ធ ដោយការបញ្ញត្តិនោះ ។ នេះគ្រូ ៣ ពួក ដោយឡែកទៀត ។

ចប់ តិកនិទ្ទេស ។

បាណាតិបាតា បដិវិរតោ ហោតិ អទិន្នាទានា បដិវិរតោ ហោតិ កាមេសុ មិច្ឆាចារា បដិវិរតោ ហោតិ មុសាវាទា បដិវិរតោ ហោតិ សុរាមេរយមជ្ជប្បមាទដ្ឋានា បដិវិរតោ ហោតិ អយំ វុច្ចតិ បុគ្គលោ សប្បុរិសោ ។ កតមោ ច បុគ្គលោ សប្បុរិសេន សប្បុរិសតរោ ។ ឥធេកច្ចោ បុគ្គលោ អត្តនា ច បាណាតិបាតា បដិវិរតោ ហោតិ បរញ្ច បាណាតិបាតា វេរមណិយា សមាទបេតិ អត្តនា ច អទិន្នាទានា បដិវិរតោ ហោតិ បរញ្ច អទិន្នាទានា វេរមណិយា សមាទបេតិ អត្តនា ច កាមេសុ មិច្ឆាចារា បដិវិរតោ ហោតិ បរញ្ច កាមេសុ មិច្ឆាចារា វេរមណិយា សមាទបេតិ អត្តនា ច មុសាវាទា បដិវិរតោ ហោតិ បរញ្ច មុសាវាទា វេរមណិយា សមាទបេតិ អត្តនា ច សុរាមេរយមជ្ជប្បមាទដ្ឋានា បដិវិរតោ ហោតិ បរញ្ច សុរាមេរយមជ្ជប្បមាទដ្ឋានា វេរមណិយា សមាទបេតិ អយំ វុច្ចតិ បុគ្គលោ សប្បុរិសេន សប្បុរិសតរោ ។



ជាអ្នកវៀរចាកបាណាតិបាត វៀរចាកអទិន្នាទាន វៀរចាកកាមេសុមិច្ឆាចារ វៀរចាកមុសាវាទ វៀរចាកសុរាមេរយមជ្ជប្បមាទដ្ឋាន នេះហៅថា បុគ្គលជាសប្បុរស ។ បុគ្គលជាសប្បុរសក្រៃលែងជាងសប្បុរស តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ជាអ្នកវៀរចាកបាណាតិបាតដោយខ្លួនឯងផង បបួលអ្នកដទៃឲ្យវៀរចាកបាណាតិបាតផង វៀរចាកអទិន្នាទានដោយខ្លួនឯងផង បបួលអ្នកដទៃឲ្យវៀរចាកអទិន្នាទានផង វៀរចាកកាមេសុមិច្ឆាចារដោយខ្លួនឯងផង បបួលអ្នកដទៃឲ្យវៀរចាកកាមេសុមិច្ឆាចារផង វៀរចាកមុសាវាទដោយខ្លួនឯងផង បបួលអ្នកដទៃឲ្យវៀរចាកមុសាវាទផង វៀរចាកសុរាមេរយមជ្ជប្បមាទដ្ឋានដោយខ្លួនឯងផង បបួលអ្នកដទៃឲ្យវៀរចាកសុរាមេរយមជ្ជប្បមាទដ្ឋានផង នេះហៅថា បុគ្គលជាសប្បុរសក្រៃលែងជាងសប្បុរស ។

[១០៩] កតមោ ច បុគ្គលោ បាបោ ។ ឥធេកច្ចោ បុគ្គលោ បាណាតិបាតី ហោតិ អទិន្នាទាយី ហោតិ កាមេសុ មិច្ឆាចារី ហោតិ មុសាវាទី ហោតិ បិសុណាវាចោ ហោតិ ផរុសវាចោ ហោតិ សម្ផប្បលាបី ហោតិ អភិជ្ឈាលុ ហោតិ ព្យាបន្នចិត្តោ ហោតិ មិច្ឆាទិដ្ឋិ[១] ហោតិ អយំ វុច្ចតិ បុគ្គលោ បាបោ ។ កតមោ ច បុគ្គលោ បាបេន បាបតរោ ។ ឥធេកច្ចោ បុគ្គលោ អត្តនា ច បាណាតិបាតី ហោតិ បរញ្ច បាណាតិបាតេ សមាទបេតិ អត្តនា ច អទិន្នាទាយី ហោតិ បរញ្ច អទិន្នាទានេ សមាទបេតិ អត្តនា ច កាមេសុ មិច្ឆាចារី ហោតិ បរញ្ច កាមេសុ មិច្ឆាចារេ សមាទបេតិ អត្តនា ច មុសាវាទី ហោតិ បរញ្ច មុសាវាទេ សមាទបេតិ អត្តនា ច បិសុណាវាចោ ហោតិ បរញ្ច បិសុណាយ វាចាយ សមាទបេតិ អត្តនា ច ផរុសវាចោ ហោតិ

១ មិច្ឆាទិដ្ឋិកោតិ បាឋោ យុត្តតរោ ។



[១០៩] បុគ្គលអាក្រក់ តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ជាអ្នកសម្លាប់សត្វ លួចទ្រព្យគេ ប្រព្រឹត្តខុសក្នុងកាម និយាយកុហក ពោលពាក្យញុះញង់ ពោលពាក្យអាក្រក់ ពោលពាក្យរោយរាយ មានចិត្តសំឡឹងរំពៃចំពោះទ្រព្យអ្នកដទៃ មានចិត្តព្យាបាទ មានទិដ្ឋិខុស នេះហៅថា បុគ្គលអាក្រក់ ។ បុគ្គលអាក្រក់ក្រៃលែងជាងបុគ្គលអាក្រក់ តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ជាអ្នកសម្លាប់សត្វដោយខ្លួនឯងផង បបួលអ្នកដទៃឲ្យសម្លាប់សត្វផង លួចទ្រព្យគេដោយខ្លួនឯងផង បបួលអ្នកដទៃឲ្យលួចទ្រព្យគេផង ប្រព្រឹត្តខុសក្នុងកាមដោយខ្លួនឯងផង បបួលអ្នកដទៃឲ្យប្រព្រឹត្តខុសក្នុងកាមផង ពោលពាក្យកុហកដោយខ្លួនឯងផង បបួលអ្នកដទៃឲ្យពោលពាក្យកុហកផង ពោលពាក្យញុះញង់ដោយខ្លួនឯងផង បបួលអ្នកដទៃឲ្យពោលពាក្យញុះញង់ផង ពោលពាក្យអាក្រក់ដោយខ្លួនឯងផង បបួលអ្នក

បរញ្ច ផរុសាយ វាចាយ សមាទបេតិ អត្តនា ច សម្ផប្បលាបី ហោតិ បរញ្ច សម្ផប្បលាបេ សមាទបេតិ អត្តនា ច អភិជ្ឈាលុ ហោតិ បរញ្ច អភិជ្ឈាយ សមាទបេតិ អត្តនា ច ព្យាបន្នចិត្តោ ហោតិ បរញ្ច ព្យាបាទេ សមាទបេតិ អត្តនា ច មិច្ឆាទិដ្ឋិ(១) ហោតិ បរញ្ច មិច្ឆាទិដ្ឋិយា សមាទបេតិ អយំ វុច្ចតិ បុគ្គលោ បាបេន បាបតរោ ។ កតមោ ច បុគ្គលោ កល្យាណោ ។ ឥធេកច្ចោ បុគ្គលោ បាណាតិ-បាតា បដិវិរតោ ហោតិ អទិន្នាទានា បដិវិរតោ ហោតិ កាមេសុ មិច្ឆាចារា បដិវិរតោ ហោតិ មុសាវាទា បដិវិរតោ ហោតិ បិសុណាយ វាចាយ បដិវិរតោ ហោតិ ផរុសាយ វាចាយ បដិវិរតោ ហោតិ សម្ផប្បលាបា បដិវិរតោ ហោតិ អនភិជ្ឈាលុ ហោតិ អព្យាបន្នចិត្តោ ហោតិ សម្មាទិដ្ឋិ(២) ហោតិ អយំ វុច្ចតិ បុគ្គលោ កល្យាណោ ។ កតមោ ច បុគ្គ-លោ កល្យាណេន កល្យាណតរោ ។ ឥធេកច្ចោ បុគ្គលោ អត្តនា ច បាណាតិបាតា បដិវិរតោ ហោតិ

១ មិច្ឆាទិដ្ឋិកោតិ ឧភោ បោត្ថកា ។ ២ សម្មាទិដ្ឋិកោតិ ឧភោ បោត្ថកា ។



ដទៃឲ្យពោលពាក្យអាក្រក់ផង ពោលពាក្យរោយរាយដោយខ្លួនឯងផង បបួលអ្នកដទៃឲ្យពោលពាក្យរោយរាយផង មានចិត្តសំឡឹងរំពៃចំពោះទ្រព្យអ្នកដទៃដោយខ្លួនឯងផង បបួលអ្នកដទៃឲ្យមានចិត្តសំឡឹងរំពៃចំ-ពោះទ្រព្យអ្នកដទៃផង មានចិត្តព្យាបាទដោយខ្លួនឯងផង បបួលអ្នកដទៃឲ្យព្យាបាទផង មានទិដ្ឋិខុសដោយខ្លួនឯងផង បបួលអ្នកដទៃឲ្យមានទិដ្ឋិខុសផង នេះហៅថា បុគ្គលអាក្រក់ក្រៃលែងជាងបុគ្គលអាក្រក់ ។ បុគ្គលល្អ តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ជាអ្នកវៀរចាកបាណាតិបាត វៀរចាកអទិន្នាទាន វៀរចាកកាមេសុមិច្ឆាចារ វៀរចាកមុសាវាទ វៀរចាកបិសុណវាចា វៀរចាកផរុសវាចា វៀរចាកសម្ផប្បលាបៈ ជាអ្នកមិនមានអភិជ្ឈា មិនមានចិត្តព្យាបាទ ជាសម្មាទិដ្ឋិ នេះហៅថា បុគ្គលល្អ ។ បុគ្គលល្អក្រៃលែងជាងបុគ្គលល្អ តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ជាអ្នកវៀរចាកបាណាតិបាត

បរញ្ច បាណាតិបាតា វេរមណិយា សមាទបេតិ អត្តនា ច អទិន្នាទានា បដិវិរតោ ហោតិ បរញ្ច អទិន្នាទានា វេរមណិយា សមាទបេតិ អត្តនា ច កាមេសុ មិច្ឆាចារា បដិវិរតោ ហោតិ បរញ្ច កាមេសុ មិច្ឆាចារា វេរមណិយា សមាទបេតិ អត្តនា ច មុសាវាទា បដិវិរតោ ហោតិ បរញ្ច មុសាវាទា វេរមណិយា សមាទបេតិ អត្តនា ច បិសុណាយ វាចាយ បដិវិរតោ ហោតិ បរញ្ច បិសុណាយ វាចាយ វេរមណិយា សមាទបេតិ អត្តនា ច ផរុសាយ វាចាយ បដិវិរតោ ហោតិ បរញ្ច ផរុសាយ វាចាយ វេរមណិយា សមាទបេតិ អត្តនា ច សម្ផប្បលាបា បដិវិរតោ ហោតិ បរញ្ច សម្ផប្បលាបា វេរមណិយា សមាទបេតិ អត្តនា ច អនភិជ្ឈាលុ ហោតិ បរញ្ច អនភិជ្ឈាយ សមាទបេតិ អត្តនា ច អព្យាបន្នចិត្តោ ហោតិ បរញ្ច អព្យាបាទេ សមាទបេតិ អត្តនា ច សម្មាទិដ្ឋិ(១) ហោតិ បរញ្ច សម្មាទិដ្ឋិយា សមាទបេតិ អយំ វុច្ចតិ បុគ្គលោ កល្យាណោ ច កល្យាណតរោ ច ។

១ សម្មាទិដ្ឋិកោតិ បាឋោ យុត្តតរោ ។



ដោយខ្លួនឯងផង បបួលអ្នកដទៃឲ្យវៀរចាកបាណាតិបាតផង វៀរចាកអទិន្នាទានដោយខ្លួនឯងផង បបួលអ្នកដទៃឲ្យវៀរចាកអទិន្នាទានផង វៀរចាកកាមេសុមិច្ឆាចារដោយខ្លួនឯងផង បបួលអ្នកដទៃឲ្យវៀរចាកកាមេសុមិច្ឆាចារផង វៀរចាកមុសាវាទដោយខ្លួនឯងផង បបួលអ្នកដទៃឲ្យវៀរចាកមុសាវាទផង វៀរចាកបិសុណាវាចាដោយខ្លួនឯងផង បបួលអ្នកដទៃឲ្យវៀរចាកបិសុណាវាចាផង វៀរចាកផរុសវាចាដោយខ្លួនឯងផង បបួលអ្នកដទៃឲ្យវៀរចាកផរុសវាចាផង វៀរចាកសម្ផប្បលាបៈដោយខ្លួនឯងផង បបួលអ្នកដទៃឲ្យវៀរចាកសម្ផប្បលាបៈផង មិនមានអភិជ្ឈាដោយខ្លួនឯងផង បបួលអ្នកដទៃមិនឲ្យមានអភិជ្ឈាផង មិនមានចិត្តព្យាបាទដោយខ្លួនឯងផង បបួលអ្នកដទៃមិនឲ្យមានព្យាបាទផង ជាសម្មាទិដ្ឋិដោយខ្លួនឯងផង បបួលអ្នកដទៃឲ្យជាសម្មាទិដ្ឋិផង នេះហៅថា បុគ្គលល្អ ក្រៃលែងជាងបុគ្គលល្អ ។

[១០៦] កតមោ ច បុគ្គលោ បាបោ ។ ឥធេកច្ចោ បុគ្គលោ បាណាតិបាតី ហោតិ អទិន្នាទាយី ហោតិ ។ បេ ។ មិច្ឆាទិដ្ឋិ ហោតិ អយំ វុច្ចតិ បុគ្គលោ បាបោ ។ កតមោ ច បុគ្គលោ បាបេន បាបតរោ ។ ឥធេកច្ចោ បុគ្គលោ អត្តនា ច បាណាតិបាតី ហោតិ បរញ្ច បាណាតិបាតេ សមាទបេតិ អត្តនា ច អទិន្នាទាយី ហោតិ បរញ្ច អទិន្នាទានេ សមាទបេតិ ។ បេ ។ អត្តនា ច មិច្ឆាទិដ្ឋិ ហោតិ បរញ្ច មិច្ឆាទិដ្ឋិយា សមាទបេតិ អយំ វុច្ចតិ បុគ្គលោ បាបេន បាបតរោ ។ កតមោ ច បុគ្គលោ កល្យាណោ ។ ឥធេកច្ចោ បុគ្គលោ បាណាតិបាតា បដិវិរតោ ហោតិ អទិន្នាទានា បដិវិរតោ ហោតិ ។ បេ ។ សម្មាទិដ្ឋិ ហោតិ អយំ វុច្ចតិ បុគ្គលោ កល្យាណោ ។ កតមោ ច បុគ្គលោ កល្យាណេន កល្យាណតរោ ។ ឥធេកច្ចោ បុគ្គលោ អត្តនា ច បាណាតិបាតា បដិវិរតោ ហោតិ បរញ្ច បាណាតិបាតា វេរមណិយា សមាទបេតិ ។ បេ ។ អត្តនា ច សម្មាទិដ្ឋិ ហោតិ



[១០៦] បុគ្គលមានធម៌អាក្រក់ តើដូចម្តេច ។ បុគ្គលខ្លះក្នុងលោកនេះ ជាអ្នកសម្លាប់សត្វ លួចទ្រព្យគេ ។ បេ ។ មានមិច្ឆាទិដ្ឋិ នេះហៅថា បុគ្គលមានធម៌អាក្រក់ ។ បុគ្គលមានធម៌អាក្រក់ក្រៃលែងជាងបុគ្គលមានធម៌អាក្រក់ តើដូចម្តេច ។ បុគ្គលខ្លះក្នុងលោកនេះ ជាអ្នកសម្លាប់សត្វដោយខ្លួនឯងផង បបួលអ្នកដទៃឲ្យសម្លាប់សត្វផង លួចទ្រព្យគេដោយខ្លួនឯងផង បបួលអ្នកដទៃឲ្យលួចទ្រព្យគេផង ។ បេ ។ មានមិច្ឆាទិដ្ឋិដោយខ្លួនឯងផង បបួលអ្នកដទៃឲ្យមានមិច្ឆាទិដ្ឋិផង នេះហៅថា បុគ្គលមានធម៌អាក្រក់ក្រៃលែងជាងបុគ្គលមានធម៌អាក្រក់ ។ បុគ្គលមានធម៌ល្អ តើដូចម្តេច ។ បុគ្គលខ្លះក្នុងលោកនេះ ជាអ្នកវៀរចាកបាណាតិបាត វៀរចាកអទិន្នាទាន ។ បេ ។ ជាសម្មាទិដ្ឋិ នេះហៅថា បុគ្គលមានធម៌ល្អ ។ បុគ្គលមានធម៌ល្អក្រៃលែងជាងបុគ្គលមានធម៌ល្អ តើដូចម្តេច ។ បុគ្គលខ្លះក្នុងលោកនេះ ជាអ្នកវៀរចាកបាណាតិបាតដោយខ្លួនឯងផង បបួលអ្នកដទៃឲ្យវៀរចាកបាណាតិបាតផង ។ បេ ។ ជាសម្មាទិដ្ឋិដោយខ្លួនឯងផង

បញ្ញា សម្មាទិដ្ឋិយា សមាទបេតិ អយំ វុច្ចតិ បុគ្គ-
លោ កល្យាណធម្មោ កល្យាណធម្មតរោ ។

(១០៧) កតមោ ច បុគ្គលោ សាវជ្ជោ ។
ឥធេកច្ចោ បុគ្គលោ សាវជ្ជេន កាយកម្មេន សម-
ន្នាគតោ ហោតិ សាវជ្ជេន វចីកម្មេន សមន្នាគតោ
ហោតិ សាវជ្ជេន មនោកម្មេន សមន្នាគតោ ហោតិ
អយំ វុច្ចតិ បុគ្គលោ សាវជ្ជោ ។ កតមោ ច បុគ្គលោ
វជ្ជពហុលោ ។ ឥធេកច្ចោ បុគ្គលោ សាវជ្ជេន
ពហុលំ កាយកម្មេន សមន្នាគតោ ហោតិ អប្បំ
អនវជ្ជេន សាវជ្ជេន ពហុលំ វចីកម្មេន សមន្នា-
គតោ ហោតិ អប្បំ អនវជ្ជេន សាវជ្ជេន ពហុលំ
មនោកម្មេន សមន្នាគតោ ហោតិ អប្បំ អនវជ្ជេន
អយំ វុច្ចតិ បុគ្គលោ វជ្ជពហុលោ ។ កតមោ ច
បុគ្គលោ អប្បសាវជ្ជោ ។ ឥធេកច្ចោ បុគ្គលោ
អនវជ្ជេន ពហុលំ កាយកម្មេន សមន្នាគតោ
ហោតិ អប្បំ សាវជ្ជេន អនវជ្ជេន ពហុលំ វចី-
កម្មេន សមន្នាគតោ ហោតិ អប្បំ សាវជ្ជេន



បបួលអ្នកដទៃឲ្យជាសម្មាទិដ្ឋិផង នេះហៅថា បុគ្គលមានធម៌ល្អក្រៃលែង
ជាងបុគ្គលមានធម៌ល្អ ។

(១០៧) បុគ្គលប្រកបដោយទោស តើដូចម្តេច ។ បុគ្គល
ខ្លះ ក្នុងលោកនេះ ជាអ្នកប្រកបដោយកាយកម្មមានទោស ប្រកប
ដោយវចីកម្មមានទោស ប្រកបដោយមនោកម្មមានទោស នេះហៅថា
បុគ្គលប្រកបដោយទោស ។ បុគ្គលច្រើនដោយទោស តើដូចម្តេច ។
បុគ្គលខ្លះ ក្នុងលោកនេះ ជាអ្នកប្រកបច្រើនដោយកាយកម្មមានទោស
ប្រកបតិចដោយកាយកម្មមិនមានទោស ជាអ្នកប្រកបច្រើនដោយវចីកម្ម
មានទោស ប្រកបតិចដោយវចីកម្មមិនមានទោស ជាអ្នកប្រកបច្រើន
ដោយមនោកម្មមានទោស ប្រកបតិចដោយមនោកម្មមិនមានទោស នេះ
ហៅថា បុគ្គលច្រើនដោយទោស ។ បុគ្គលប្រកបដោយទោសតិច
តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ជាអ្នកប្រកបច្រើនដោយ
កាយកម្មមិនមានទោស ប្រកបតិចដោយកាយកម្មមានទោស ជាអ្នក
ប្រកបច្រើនដោយវចីកម្មមិនមានទោស ប្រកបតិចដោយវចីកម្មមានទោស

ឯកកនិទ្ទេសោ

អនវជ្ជេន ពហុលំ មនោកម្មេន សមន្នាគតោ ហោតិ អប្បំ សាវជ្ជេន អយំ វុច្ចតិ បុគ្គលោ អប្បសាវជ្ជោ ។ កតមោ ច បុគ្គលោ អនវជ្ជោ ។ ឥធេកច្ចោ បុគ្គលោ អនវជ្ជេន កាយកម្មេន សមន្នាគតោ ហោតិ អនវជ្ជេន វចីកម្មេន សមន្នាគតោ ហោតិ អនវជ្ជេន មនោកម្មេន សមន្នាគតោ ហោតិ អយំ វុច្ចតិ បុគ្គលោ អនវជ្ជោ ។

[១០៨] កតមោ ច បុគ្គលោ ឧគ្ឃដិតញ្ញូ ។ យស្ស បុគ្គលស្ស សហ ឧទាហដវេលាយ ធម្មាភិសមយោ ហោតិ អយំ វុច្ចតិ បុគ្គលោ ឧគ្ឃដិតញ្ញូ ។ កតមោ ច បុគ្គលោ វិបញ្ចិតញ្ញូ(១) ។ យស្ស បុគ្គលស្ស សង្ខិត្តេន ភាសិតស្ស វិត្ថារេន អត្ថេ វិភជិយមានេ ធម្មាភិសមយោ ហោតិ អយំ វុច្ចតិ បុគ្គលោ វិបញ្ចិតញ្ញូ ។ កតមោ ច បុគ្គលោ នេយ្យោ ។ យស្ស បុគ្គលស្ស ឧទ្ទេសតោ បរិបុច្ឆតោ យោនិសោ មនសិការោតោ កល្យាណមិត្តេ សេវតោ ភជតោ បយិរុបាសតោ ឯវំ អនុបុព្វេន ធម្មាភិសមយោ ហោតិ

១ វិបចិតញ្ញូតិ អដ្ឋកថាយំ ទិស្សតិ ។ អយំបន វេវចនមេវ ហោតិ ។



ឯកកនិទ្ទេស

ជាអ្នកប្រកបច្រើនដោយមនោកម្មមិនមានទោស ប្រកបតិចដោយមនោកម្មមានទោស នេះហៅថា បុគ្គលប្រកបដោយទោសតិច ។ បុគ្គលមិនមានទោស តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ជាអ្នកប្រកបដោយកាយកម្មមិនមានទោស ប្រកបដោយវចីកម្មមិនមានទោស ប្រកបដោយមនោកម្មមិនមានទោស នេះហៅថា បុគ្គលមិនមានទោស ។

[១០៨] បុគ្គលជាឧគ្ឃដិតញ្ញូ តើដូចម្តេច ។ បុគ្គលណា មានការត្រាស់ដឹងនូវមគ្គនិងផល តំណាលគ្នានឹងវេលានៃធម៌ដែលធម្មកថិកបង្ហើបសំដែងហើយ នេះហៅថា បុគ្គលជាឧគ្ឃដិតញ្ញូ ។ បុគ្គលជាវិបញ្ចិតញ្ញូ តើដូចម្តេច ។ បុគ្គលណា កាលធម្មកថិកសំដែងចែកអត្ថនៃភាសិតដែលសង្ខេបឲ្យពិស្តារ ទើបបានការត្រាស់ដឹង នូវមគ្គនិងផល នេះហៅថា បុគ្គលជាវិបញ្ចិតញ្ញូ ។ បុគ្គលជានេយ្យៈ តើដូចម្តេច ។ បុគ្គលណា ល្មមតែរៀនផង សួរផង ធ្វើទុកក្នុងចិត្ត ដោយឧបាយនៃប្រាជ្ញា សេព គប់រក ចូលទៅអង្គុយជិត នឹងកល្យាណមិត្ត តាមលំដាប់យ៉ាងនេះ ទើបបានការត្រាស់ដឹងនូវមគ្គនិងផលបាន

អយំ វុច្ចតិ បុគ្គលោ នេយ្យោ ។ កតមោ ច បុគ្គលោ បទបរមោ ។ យស្ស បុគ្គលស្ស ពហុម្បិ សុណតោ ពហុម្បិ ភណតោ ពហុម្បិ ធារយតោ ពហុម្បិ វាចយតោ ន តាយ ជាតិយា ធម្មាភិសមយោ ហោតិ អយំ វុច្ចតិ បុគ្គលោ បទបរមោ ។

(១០៩) កតមោ ច បុគ្គលោ យុត្តប្បដិភាណោ នោ មុត្តប្បដិភាណោ ។ ឥធេកច្ចោ បុគ្គលោ បញ្ហំ បុដ្ឋោ សមានោ យុត្តំ វទតិ នោ សីឃំ អយំ វុច្ចតិ បុគ្គលោ យុត្តប្បដិភាណោ នោ មុត្តប្បដិភាណោ ។ កតមោ ច បុគ្គលោ មុត្តប្បដិភាណោ នោ យុត្តប្បដិភាណោ ។ ឥធេកច្ចោ បុគ្គលោ បញ្ហំ បុដ្ឋោ សមានោ សីឃំ វទតិ នោ យុត្តំ អយំ វុច្ចតិ បុគ្គលោ មុត្តប្បដិភាណោ នោ យុត្តប្បដិភាណោ ។ កតមោ ច បុគ្គលោ យុត្តប្បដិភាណោ ច មុត្តប្បដិភាណោ ច ។ ឥធេកច្ចោ បុគ្គលោ បញ្ហំ បុដ្ឋោ សមានោ យុត្តញ្ច វទតិ សីឃញ្ច អយំ វុច្ចតិ បុគ្គលោ យុត្តប្បដិភាណោ ច មុត្តប្បដិភាណោ ច ។ កតមោ ច បុគ្គលោ នេវ យុត្តប្បដិភាណោ



នេះហៅថា បុគ្គលជានេយ្យៈ ។ បុគ្គលជាបទបរមៈ តើដូចម្តេច ។ បុគ្គលណា ទុកជាស្តាប់ច្រើនក៏ដោយ និយាយច្រើនក៏ដោយ ចងចាំច្រើនក៏ដោយ បង្រៀនច្រើនក៏ដោយ ក៏មិនមានការត្រាស់ដឹងនូវមគ្គនិងផលក្នុងជាតិនោះ នេះហៅថា បុគ្គលជាបទបរមៈ ។

(១០៩) បុគ្គលមានប្រាជ្ញាគួរ តែមានប្រាជ្ញាមិនរួសរាន់ តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ កាលបើគេសួរប្រស្នា ក៏ពោលពាក្យដោះស្រាយដ៏គួរ គឺសមហេតុផល តែមិនរួសរាន់ នេះហៅថា បុគ្គលមានប្រាជ្ញាគួរ តែមានប្រាជ្ញាមិនរួសរាន់ ។ បុគ្គលមានប្រាជ្ញារួសរាន់ តែមានប្រាជ្ញាមិនគួរ តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ កាលបើគេសួរប្រស្នា ក៏ពោលពាក្យដោះស្រាយ ដោយរួសរាន់ តែមិនគួរ គឺមិនសមហេតុផល នេះហៅថា បុគ្គលមានប្រាជ្ញារួសរាន់ តែមានប្រាជ្ញាមិនគួរ ។ បុគ្គលមានប្រាជ្ញាគួរ ទាំងមានប្រាជ្ញារួសរាន់ តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ កាលបើគេសួរប្រស្នា ក៏ពោលដោះស្រាយគួរផង រួសរាន់ផង នេះហៅថា បុគ្គលមានប្រាជ្ញាគួរផង មានប្រាជ្ញារួសរាន់ផង ។ បុគ្គលមានប្រាជ្ញាមិនគួរ

នោ មុត្តបដិភានោ ។ ឥធេកច្ចោ បុគ្គលោ បញ្ហំ បុដ្ឋោ សមានោ នេវ យុត្តំ វទតិ នោ សីឃំ អយំ វុច្ចតិ បុគ្គលោ នេវ យុត្តបដិភានោ នោ មុត្តបដិភានោ ។

[១១០] តត្ថ កតមេ ចត្តារោ ធម្មកថិកា បុគ្គលា ។ ឥធេកច្ចោ ធម្មកថិកោ អប្បញ្ច ភាសតិ សហិតញ្ច បរិសា ចស្ស អកុសលា ហោតិ សហិ-តាសហិតស្ស ឯវរូបោ ធម្មកថិកោ ឯវរូបាយ បរិសាយ ធម្មកថិកោត្វេវ សង្ខំ គច្ឆតិ ។ ឥធ បនេកច្ចោ ធម្មកថិកោ អប្បញ្ច ភាសតិ សហិតញ្ច បរិសា ចស្ស កុសលា ហោតិ សហិតាសហិតស្ស ឯវរូបោ ធម្មកថិកោ ឯវរូបាយ បរិសាយ ធម្ម-កថិកោត្វេវ សង្ខំ គច្ឆតិ ។ ឥធ បនេកច្ចោ ធម្មកថិកោ ពហុញ្ច ភាសតិ អសហិតញ្ច បរិសា ចស្ស អកុសលា ហោតិ សហិតាសហិតស្ស ឯវរូបោ ធម្មកថិកោ ឯវរូបាយ បរិសាយ ធម្មកថិកោត្វេវ សង្ខំ គច្ឆតិ ។ ឥធ បនេកច្ចោ ធម្មកថិកោ



តាំងមានប្រាជ្ញាមិនស្រួលក់ តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ កាលបើគេសួរប្រស្នា ក៏រកពាក្យដោះស្រាយមិនគួរផង មិនស្រួលក់ផង នេះហៅថា បុគ្គលមានប្រាជ្ញាមិនគួរ តាំងមានប្រាជ្ញាមិនស្រួលក់ ។

[១១០] បណ្តាបុគ្គលទាំងនោះ បុគ្គលជាធម្មកថិក ៤ ពួក តើដូចម្តេច ។ ធម្មកថិកខ្លះ ក្នុងលោកនេះ សំដែងធម៌តិចផង តែប្រកបដោយប្រយោជន៍ ឯបរិស័ទរបស់ធម្មកថិកនោះ ជាអ្នកមិនឈ្លាសចំពោះធម៌ប្រកបដោយប្រយោជន៍ទាំងមិនប្រកបដោយប្រយោជន៍ ធម្ម-កថិកបែបនេះ របស់បរិស័ទបែបនេះ ក៏ដល់នូវការរាប់ថាជាធម្មកថិកដែរ ។ ធម្មកថិកខ្លះ ក្នុងលោកនេះ សំដែងធម៌តិចផង តែប្រកបដោយប្រយោជន៍ ឯបរិស័ទរបស់ធម្មកថិកនោះ ជាអ្នកឈ្លាសចំពោះធម៌ប្រកបដោយប្រយោជន៍ទាំងមិនប្រកបដោយប្រយោជន៍ ធម្មកថិកបែបនេះ របស់បរិស័ទបែបនេះ ក៏ដល់នូវការរាប់ថាជាធម្មកថិកដែរ ។ ធម្មកថិកខ្លះ ក្នុងលោកនេះ សំដែងធម៌ច្រើន តែមិនប្រកបដោយប្រយោជន៍ ឯបរិស័ទរបស់ធម្មកថិកនោះ ជាអ្នកមិនឈ្លាសចំពោះធម៌ប្រកបដោយប្រ-យោជន៍ទាំងមិនប្រកបដោយប្រយោជន៍ ធម្មកថិកបែបនេះ របស់បរិ-ស័ទបែបនេះ ក៏ដល់នូវការរាប់ថាជាធម្មកថិកដែរ ។ ធម្មកថិកខ្លះ ក្នុង

ពហុញ្ច ភាសតិ សហិតញ្ច បរិសា ច ស្ស កុសលា ហោតិ សហិតាសហិតស្ស ឯវរូបោ ធម្មកថិកោ ឯវរូបាយ បរិសាយ ធម្មកថិកោត្វេវ សង្ខំ គច្ឆតិ ។ ឥមេ ចត្តារោ ធម្មកថិកា បុគ្គលា ។

(១១១) តត្ថ កតមេ ចត្តារោ វលាហកូបមា បុគ្គលា ។ ចត្តារោ វលាហកា គជ្ជិតា នោ វស្សិតា វស្សិតា នោ គជ្ជិតា គជ្ជិតា ច វស្សិតា ច នេវ គជ្ជិតា នោ វស្សិតា ។

(១១២) ឯវមេវំ ចត្តារោមេ វលាហកូបមា បុគ្គលា សន្តោ សំវិជ្ជមានា លោកស្មឹ ។ កតមេ ចត្តារោ ។ គជ្ជិតា នោ វស្សិតា វស្សិតា នោ គជ្ជិតា គជ្ជិតា ច វស្សិតា ច នេវ គជ្ជិតា នោ វស្សិតា ។ កថញ្ច បុគ្គលោ គជ្ជិតា ហោតិ នោ វស្សិតា ។ ឥធេកច្ចោ បុគ្គលោ ភាសិតា ហោតិ នោ កត្តា ឯវំ បុគ្គលោ គជ្ជិតា ហោតិ នោ វស្សិតា សេយ្យថាបិ សោ វលាហកោ គជ្ជិតា នោ វស្សិតា តថូបមោ អយំ បុគ្គលោ ។ កថញ្ច បុគ្គលោ វស្សិតា ហោតិ នោ គជ្ជិតា ។



លោកនេះ សំដែងធម៌ច្រើន ទាំងជាធម៌ប្រកបដោយប្រយោជន៍ និងបរិស័ទ របស់ធម្មកថិកនោះ ជាអ្នកឈ្លាស ចំពោះធម៌ ប្រកបដោយប្រយោជន៍ ទាំងមិនប្រកបដោយប្រយោជន៍ ធម្មកថិកបែបនេះ របស់បរិស័ទបែបនេះ គឺរាប់ថាជាធម្មកថិកដែរ ។ នេះ បុគ្គលជាធម្មកថិក ៤ ពួក ។

(១១១) បណ្តាបុគ្គលទាំងនោះ បុគ្គល ៤ ពួក ប្រៀបដោយមេឃ តើដូចម្តេច ។ មេឃមាន ៤ យ៉ាង គឺ (មេឃ) គ្រាន់តែផ្គរតែឥតភ្លៀង ១ មានភ្លៀងតែឥតផ្គរ ១ មានទាំងផ្គរមានទាំងភ្លៀង ១ មិនមានទាំងផ្គរមិនមានទាំងភ្លៀង ១ ។

(១១២) បុគ្គលទាំង ៤ ពួក ប្រៀបដោយមេឃនេះ តែងមានក្នុងលោក យ៉ាងនេះឯង ។ បុគ្គល ៤ ពួក តើដូចម្តេច ។ បុគ្គលដូចមេឃគ្រាន់តែផ្គរតែឥតភ្លៀង ១ បុគ្គលដូចមេឃមានភ្លៀងតែឥតផ្គរ ១ បុគ្គលដូចមេឃមានទាំងផ្គរមានទាំងភ្លៀង ១ បុគ្គលដូចមេឃមិនមានទាំងផ្គរមិនមានទាំងភ្លៀង ១ ។ បុគ្គល ដូចមេឃគ្រាន់តែផ្គរតែឥតភ្លៀង តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ជាអ្នកពូកែតែនិយាយ តែមិនធ្វើ បុគ្គលដូចមេឃគ្រាន់តែផ្គរតែឥតភ្លៀង យ៉ាងនេះឯង មេឃនោះគ្រាន់តែផ្គរតែឥតភ្លៀង មានឧបមាយ៉ាងណាមិញ បុគ្គលនេះ ក៏មានឧបមេយ្យយ៉ាងនោះដែរ ។ បុគ្គលដូចមេឃ មានភ្លៀងតែឥតផ្គរ តើដូចម្តេច ។

ឥធេកច្ចោ បុគ្គលោ កត្តា ហោតិ នោ ភាសិតា ឯវំ បុគ្គលោ វស្សិតា ហោតិ នោ គជ្ជិតា សេយ្យថាបិ សោ វលាហកោ វស្សិតា នោ គជ្ជិតា តថូបមោ អយំ បុគ្គលោ ។ កថញ្ច បុគ្គលោ គជ្ជិតា ច ហោតិ វស្សិតា ច ។ ឥធេកច្ចោ បុគ្គលោ ភាសិតា ច ហោតិ កត្តា ច ឯវំ បុគ្គលោ គជ្ជិតា ច ហោតិ វស្សិតា ច សេយ្យថាបិ សោ វលាហកោ គជ្ជិតា ច វស្សិតា ច តថូបមោ អយំ បុគ្គលោ ។ កថញ្ច បុគ្គលោ នេវ គជ្ជិតា ហោតិ នោ វស្សិតា ។ ឥធេកច្ចោ បុគ្គលោ នេវ ភាសិតា ហោតិ នោ កត្តា ឯវំ បុគ្គលោ នេវ គជ្ជិតា ហោតិ នោ វស្សិតា សេយ្យថាបិ សោ វលាហកោ នេវ គជ្ជិតា នោ វស្សិតា តថូបមោ អយំ បុគ្គលោ ។ ឥមេ ចត្តារោ វលាហកូបមា បុគ្គលា សន្តោ សំវិជ្ជមានា លោកស្មឹ ។

(១១៣) តត្ថ កតមេ ចត្តារោ មូសិកូបមា បុគ្គលា ។ ចតស្សោ មូសិកា គាធំ កត្តា នោ វសិតា វសិតា នោ គាធំ កត្តា គាធំ កត្តា ច វសិតា ច នេវ គាធំ កត្តា នោ វសិតា ។





បុគ្គលខ្លះ ក្នុងលោកនេះ ជាអ្នកធ្វើ តែជាអ្នកមិនពោលទេឡើយ បុគ្គលដូចមេឃមានភ្លៀងតែឥតគ្រហឹម យ៉ាងនេះឯង មេឃនោះ មានភ្លៀងតែឥតគ្រហឹម មានឧបមាយ៉ាងណាមិញ បុគ្គលនេះ ក៏មានឧបមេយ្យយ៉ាងនោះដែរ ។ បុគ្គលដូចមេឃមានទាំងគ្រហឹមមានទាំងភ្លៀង តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ជាអ្នកពោលផង ធ្វើផង បុគ្គលដូចមេឃមានទាំងគ្រហឹមមានទាំងភ្លៀង យ៉ាងនេះឯង មេឃនោះ មានទាំងគ្រហឹមមានទាំងភ្លៀង មានឧបមាយ៉ាងណាមិញ បុគ្គលនេះ ក៏មានឧបមេយ្យយ៉ាងនោះដែរ ។ បុគ្គលដូចមេឃមិនមានទាំងគ្រហឹមមិនមានទាំងភ្លៀង តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ជាអ្នកមិនពោលផង មិនធ្វើផង បុគ្គលដូចមេឃមិនមានទាំងគ្រហឹមមិនមានទាំងភ្លៀង យ៉ាងនេះឯង មេឃនោះ ដែលមិនមានទាំងគ្រហឹមមិនមានទាំងភ្លៀង មានឧបមាយ៉ាងណាមិញ បុគ្គលនេះ ក៏មានឧបមេយ្យយ៉ាងនោះដែរ ។ នេះ បុគ្គល ៤ ពួក ប្រៀបដោយមេឃ តែងមានក្នុងលោក ។

(១១៣) បណ្តាបុគ្គលទាំងនោះ បុគ្គល ៤ ពួក ប្រៀបដោយសត្វកណ្តុរ តើដូចម្តេច ។ កណ្តុរមាន ៤ ពួក គឺកណ្តុរត្រាច់តែធ្វើរន្ធតែមិននៅ ១ ត្រាច់តែនៅតែមិនធ្វើរន្ធ ១ ធ្វើរន្ធផងនៅផង ១ រន្ធក៏មិនធ្វើនៅក៏មិននៅ ១ ។

## បុគ្គលបញ្ញត្តិ

សោ ឥទំ ទុក្ខន្តិ យថាភូតំ បជានាតិ អយំ ទុក្ខស-
មុទយោតិ យថាភូតំ បជានាតិ អយំ ទុក្ខនិរោធោតិ
យថាភូតំ បជានាតិ អយំ ទុក្ខនិរោធគាមិនី បដិ-
បទាតិ យថាភូតំ បជានាតិ ឯវំ បុគ្គលោ វសិតា
ហោតិ នោ គាធំ កត្តា សេយ្យថាបិ សា មូសិកា
វសិតា នោ គាធំ កត្តា តថូបមោ អយំ បុគ្គលោ ។
តត្ថ កតមោ បុគ្គលោ គាធំ កត្តា ច ហោតិ វសិតា
ច ។ ឥធេកច្ចោ បុគ្គលោ ធម្មំ បរិយាបុណាតិ
សុត្តំ គេយ្យំ វេយ្យាករណំ គាថំ ឧទានំ ឥតិវុត្ត-
កំ ជាតកំ អព្ភុតធម្មំ វេទល្លំ សោ ឥទំ ទុក្ខន្តិ
យថាភូតំ បជានាតិ អយំ ទុក្ខសមុទយោតិ យថាភូតំ
បជានាតិ អយំ ទុក្ខនិរោធោតិ យថាភូតំ បជានាតិ
អយំ ទុក្ខនិរោធគាមិនី បដិបទាតិ យថាភូតំ បជា-
នាតិ ឯវំ បុគ្គលោ គាធំ កត្តា ច ហោតិ វសិតា
ច សេយ្យថាបិ សា មូសិកា គាធំ កត្តា ច
វសិតា ច តថូបមោ អយំ បុគ្គលោ ។ តត្ថ
កតមោ បុគ្គលោ នេវ គាធំ កត្តា ហោតិ នោ វសិតា ។
ឥធេកច្ចោ បុគ្គលោ ធម្មំ ន បរិយាបុណាតិ



## បុគ្គលបញ្ញត្តិ

តែបុគ្គលនោះដឹងច្បាស់តាមពិតថា នេះទុក្ខ ដឹងច្បាស់តាមពិតថា នេះ
ហេតុនាំឲ្យកើតទុក្ខ ដឹងច្បាស់តាមពិតថា នេះធម៌រលត់ទុក្ខ ដឹងច្បាស់
តាមពិតថា នេះបដិបទាជាដំណើរទៅកាន់ធម៌រលត់ទុក្ខ បុគ្គលដូចកណ្ដុរ
គ្រាន់តែនៅតែមិនធ្វើរន្ធ យ៉ាងនេះឯង កណ្ដុរនោះ គ្រាន់តែនៅតែ
មិនធ្វើរន្ធ មានឧបមាយ៉ាងណាមិញ បុគ្គលនេះ ក៏មានឧបមេយ្យយ៉ាង
នោះដែរ ។ បុគ្គលដូចកណ្ដុរធ្វើរន្ធផងនៅផង តើដូចម្ដេច ។ បុគ្គល
ខ្លះ ក្នុងលោកនេះ រៀនធម៌ គឺ សុត្តៈ គេយ្យៈ វេយ្យាករណៈ គាថា
ឧទានៈ ឥតិវុត្តកៈ ជាតកៈ អព្ភូតធម្មៈ វេទល្លៈ ថែមទាំងបុគ្គលនោះ
ដឹងច្បាស់តាមពិតថា នេះទុក្ខ ដឹងច្បាស់តាមពិតថា នេះហេតុនាំឲ្យកើត
ទុក្ខ ដឹងច្បាស់តាមពិតថា នេះធម៌រលត់ទុក្ខ ដឹងច្បាស់តាមពិតថា នេះ
បដិបទាជាដំណើរទៅកាន់ធម៌រលត់ទុក្ខ បុគ្គលដូចកណ្ដុរធ្វើរន្ធផងនៅផង
យ៉ាងនេះឯង កណ្ដុរនោះ ធ្វើរន្ធផងនៅផង មានឧបមាយ៉ាងណាមិញ
បុគ្គលនេះ ក៏មានឧបមេយ្យយ៉ាងនោះដែរ ។ បុគ្គលដូចកណ្ដុររន្ធក៏មិន
ធ្វើ នៅក៏មិននៅ តើដូចម្ដេច ។ បុគ្គលខ្លះ ក្នុងលោកនេះ មិនរៀនធម៌

សុត្តំ គេយ្យំ វេយ្យាករណំ គាថំ ឧទានំ ឥតិវុត្តកំ ជាតកំ អព្ភុតធម្មំ វេទល្លំ សោ ឥទំ ទុក្ខន្តិ យថាភូតំ នប្បជានាតិ អយំ ទុក្ខសមុទយោតិ យថាភូតំ នប្បជានាតិ អយំ ទុក្ខនិរោធោតិ យថាភូតំ នប្បជានាតិ អយំ ទុក្ខនិរោធគាមិនី បដិបទាតិ យថាភូតំ នប្បជានាតិ ឯវំ បុគ្គលោ នេវ គាធំ កត្តា ហោតិ នោ វសិតា សេយ្យថាបិ សោ មូសិកា នេវ គាធំ កត្តា នោ វសិតា តថូបមោ អយំ បុគ្គលោ ។ ឥមេ ចត្តារោ មូសិកូបមា បុគ្គលា សន្តោ សំវិជ្ជមានា លោកស្មឹ ។

(១១៨) តត្ថ កតមេ ចត្តារោ អម្ពូបមា បុគ្គលា ។ ចត្តារិ អម្ពានិ អាមំ បក្កវណ្ណី បក្កំ អាមវណ្ណី អាមំ អាមវណ្ណី បក្កំ បក្កវណ្ណី ។

(១១៩) ឯវមេវំ ចត្តារោមេ អម្ពូបមា បុគ្គលា សន្តោ សំវិជ្ជមានា លោកស្មឹ ។ កតមេ ចត្តារោ ។ អាមោ បក្កវណ្ណី បក្កោ អាមវណ្ណី



គឺ សុត្តៈ គេយ្យៈ វេយ្យាករណៈ គាថា ឧទានៈ ឥតិវុត្តកៈ ជាតកៈ អព្ភុតធម្មៈ វេទល្លៈ បុគ្គលនោះតាំងមិនដឹងច្បាស់តាមពិតថា នេះទុក្ខ មិនដឹងច្បាស់តាមពិតថា នេះហេតុនាំឲ្យកើតទុក្ខ មិនដឹងច្បាស់តាមពិតថា នេះធម៌រលត់ទុក្ខ មិនដឹងច្បាស់តាមពិតថា នេះបដិបទាជាដំណើរទៅកាន់ធម៌រលត់ទុក្ខ បុគ្គលដូចកណ្ដុររន្ធក៏មិនធ្វើនៅក៏មិននៅ យ៉ាងនេះឯង កណ្ដុរនោះ រន្ធក៏មិនធ្វើនៅក៏មិននៅ មានឧបមាយ៉ាងណាមិញ បុគ្គលនេះ ក៏មានឧបមេយ្យយ៉ាងនោះដែរ ។ នេះ បុគ្គល ៤ ពួក ប្រៀបដោយសត្វកណ្ដុរ ដែលមានក្នុងលោក ។

(១១៨) បណ្ដាបុគ្គលទាំងនោះ បុគ្គល ៤ ពួក ប្រៀបដោយផ្លែស្វាយ តើដូចម្ដេច ។ ផ្លែស្វាយមាន ៤ យ៉ាង គឺ ស្វាយខ្ចីតែមានសម្បុរទុំ ១ ស្វាយទុំតែមានសម្បុរខ្ចី ១ ស្វាយខ្ចីមានសម្បុរខ្ចី ១ ស្វាយទុំមានសម្បុរទុំ ១ ។

(១១៩) បុគ្គល ៤ ពួក ប្រៀបដោយផ្លែស្វាយនេះ ដែលមានក្នុងលោក ក៏យ៉ាងនោះឯង ។ បុគ្គល ៤ ពួក តើដូចម្ដេច ។ បុគ្គលដូចស្វាយខ្ចីតែមានសម្បុរទុំ ១ បុគ្គលដូចស្វាយទុំតែមានសម្បុរខ្ចី ១

អាមវណ្ណី សេយ្យថាបិ តំ អម្ពំ បក្កំ អាមវណ្ណំ តថូបមោ អយំ បុគ្គលោ ។ កថញ្ច បុគ្គលោ អាមោ ហោតិ អាមវណ្ណី ។ ឥធេកច្ចស្ស បុគ្គលស្ស ន បាសាទិកំ ហោតិ អភិក្កន្តំ បដិក្កន្តំ អាលោកិតំ វិលោកិតំ សម្មិញ្ជិតំ បសារិតំ សង្ឃាដិបត្តចីវរធារណំ សោ ឥទំ ទុក្ខន្តិ យថាភូតំ នប្បជានាតិ ។ បេ ។ អយំ ទុក្ខនិរោធគាមិនី បដិបទាតិ យថាភូតំ នប្បជានាតិ ឯវំ បុគ្គលោ អាមោ ហោតិ អាមវណ្ណី សេយ្យថាបិ តំ អម្ពំ អាមំ អាមវណ្ណំ តថូបមោ អយំ បុគ្គលោ ។ កថញ្ច បុគ្គលោ បក្កោ ហោតិ បក្កវណ្ណី ។ ឥធេកច្ចស្ស បុគ្គលស្ស បាសាទិកំ ហោតិ អភិក្កន្តំ បដិក្កន្តំ អាលោកិតំ វិលោកិតំ សម្មិញ្ជិតំ បសារិតំ សង្ឃាដិបត្តចីវរធារណំ សោ ឥទំ ទុក្ខន្តិ យថាភូតំ បជានាតិ ។ បេ ។ អយំ ទុក្ខនិរោធគាមិនី បដិបទាតិ យថាភូតំ បជានាតិ ឯវំ បុគ្គលោ បក្កោ ហោតិ បក្កវណ្ណី សេយ្យថាបិ តំ អម្ពំ បក្កំ បក្កវណ្ណំ តថូបមោ អយំ បុគ្គលោ ។ ឥមេ ចត្តារោ អម្ពូបមា បុគ្គលា សំវិជ្ជមានា លោកស្មឹ ។



ផ្លែស្វាយនោះទុំ តែមានសម្បុរដូចខ្ចី មានឧបមាយ៉ាងណាមិញ បុគ្គលនេះ ក៏មានឧបមេយ្យយ៉ាងនោះដែរ ។ បុគ្គលដូចស្វាយខ្ចីមានសម្បុរខ្ចី តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ មានការឈានទៅមុខ ការឈានថយក្រោយ ក្រឡេកមើលចំ ក្រឡេកមើលចំហៀង បត់អវយវៈចូល លាអវយវៈចេញ ទ្រទ្រង់ទូលសង្ឃាដី បាត្រ និងចីវរ មិនជាទីជ្រះថ្លា ថែមទាំងបុគ្គលនោះ មិនដឹងច្បាស់តាមពិតថា នេះទុក្ខ ។ បេ ។ មិនដឹងច្បាស់តាមពិតថា នេះបដិបទាជាដំណើរទៅកាន់ទីរលត់ទុក្ខ បុគ្គលដូចស្វាយខ្ចីមានសម្បុរខ្ចី យ៉ាងនេះឯង ផ្លែស្វាយនោះខ្ចី មានសម្បុរខ្ចី មានឧបមាយ៉ាងណាមិញ បុគ្គលនេះ ក៏មានឧបមេយ្យយ៉ាងនោះដែរ ។ បុគ្គលដូចស្វាយទុំមានសម្បុរទុំ តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ មានការឈានទៅមុខ ការឈានថយក្រោយ ក្រឡេកមើលចំ ក្រឡេកមើលចំហៀង បត់អវយវៈចូល លាអវយវៈចេញ ទ្រទ្រង់ទូលសង្ឃាដី បាត្រ និងចីវរ ប្រកបដោយសេចក្តីជ្រះថ្លា ថែមទាំងបុគ្គលនោះ ដឹងច្បាស់តាមពិតថា នេះទុក្ខ ។ បេ ។ ដឹងច្បាស់តាមពិតថា នេះបដិបទាជាដំណើរទៅកាន់ទីរលត់ទុក្ខ បុគ្គលដូចស្វាយទុំមានសម្បុរទុំ យ៉ាងនេះឯង ផ្លែស្វាយនោះទុំ មានសម្បុរទុំ មានឧបមាយ៉ាងណាមិញ បុគ្គលនេះ ក៏មានឧបមេយ្យយ៉ាងនោះដែរ ។ នេះ បុគ្គល ៤ ពួក ប្រៀបដោយផ្លែស្វាយ តែងមានក្នុងលោក ។

[១១៧] តត្ថ កតមេ ចត្តារោ កុម្ភូបមា បុគ្គលា ។ ចត្តារោ កុម្ភា តុច្ឆោ បិហិតោ បូរោ វិវដោ តុច្ឆោ វិវដោ បូរោ បិហិតោ ។

[១១៨] ឯវមេវ ចត្តារោមេ កុម្ភូបមា បុគ្គលា សន្តោ សំវិជ្ជមានា លោកស្មឹ ។ កតមេ ចត្តារោ ។ តុច្ឆោ បិហិតោ បូរោ វិវដោ តុច្ឆោ វិវដោ បូរោ បិហិតោ ។ កថញ្ច បុគ្គលោ តុច្ឆោ ហោតិ បិហិតោ ។ ឥធេកច្ចស្ស បុគ្គលស្ស បាសាទិកំ ហោតិ អភិក្កន្តំ បដិក្កន្តំ អាលោកិតំ វិលោកិតំ សម្មិញ្ជិតំ បសារិតំ សង្ឃាដិបត្តចីវរធារណំ ។ សោ ឥទំ ទុក្ខន្តិ យថាភូតំ នប្បជានាតិ ។ បេ ។ អយំ ទុក្ខនិរោធគាមិនី បដិបទាតិ យថាភូតំ នប្បជានាតិ ។ ឯវំ បុគ្គលោ តុច្ឆោ ហោតិ បិហិតោ ។ សេយ្យថាបិ សោ កុម្ភោ តុច្ឆោ បិហិតោ តថូបមោ អយំ បុគ្គលោ ។ កថញ្ច បុគ្គលោ បូរោ ហោតិ វិវដោ ។ ឥធេកច្ចស្ស បុគ្គលស្ស



[១១៧] បណ្ដាបុគ្គលទាំងនោះ បុគ្គល ៤ ពួក ប្រៀបដោយក្អម តើដូចម្ដេច ។ ក្អមមាន ៤ យ៉ាង គឺ ក្អមទទេតែគ្របជិត ១ ក្អមមានទឹកពេញតែបើកចំហ ១ ក្អមទទេហើយបើកចំហ ១ ក្អមមានទឹកពេញហើយគ្របជិត ១ ។

[១១៨] បុគ្គល ៤ ពួក ប្រៀបដោយក្អមនេះ តែងមានក្នុងលោក ក៏យ៉ាងនោះឯង ។ បុគ្គល ៤ ពួក តើដូចម្ដេច ។ បុគ្គលដូចក្អមទទេតែគ្របជិត ១ បុគ្គលដូចក្អមមានទឹកពេញតែបើកចំហ ១ បុគ្គលដូចក្អមទទេហើយបើកចំហ ១ បុគ្គលដូចក្អមមានទឹកពេញហើយគ្របជិត ១ ។ បុគ្គលដូចក្អមទទេតែគ្របជិត តើដូចម្ដេច ។ បុគ្គលខ្លះ ក្នុងលោកនេះ មានការឈានដើរទៅមុខ ការឈានថយក្រោយ ក្រឡេកមើលចំពោះ ក្រឡេកមើលចំហៀង បត់អវយវៈចូល លាអវយវៈចេញ ទ្រទ្រង់នូវសង្ឃាដី បាត្រ និងចីវរ ប្រកបដោយសេចក្ដីជ្រះថ្លា តែបុគ្គលនោះ មិនដឹងច្បាស់តាមពិតថា នេះទុក្ខ ។ បេ ។ មិនដឹងច្បាស់តាមពិតថា នេះបដិបទាជាដំណើរទៅកាន់ធម៌រលត់ទុក្ខ បុគ្គលដូចក្អមទទេតែគ្របជិត យ៉ាងនេះឯង ក្អមនោះ ទទេតែគ្របជិត មានឧបមាយ៉ាងណាមិញ បុគ្គលនេះ ក៏មានឧបមេយ្យយ៉ាងនោះដែរ ។ បុគ្គលដូចក្អមមានទឹកពេញ តែបើកចំហ តើដូចម្ដេច ។ បុគ្គលខ្លះ ក្នុងលោកនេះ

ន បាសាទិកំ ហោតិ អភិក្កន្តំ បដិក្កន្តំ អាលោកិតំ វិលោកិតំ សម្មិញ្ជិតំ បសារិតំ សង្ឃាដិបត្តចីវរធារណំ សោ ឥទំ ទុក្ខន្តិ យថាភូតំ បជានាតិ ។ បេ ។ អយំ ទុក្ខនិរោធគាមិនី បដិបទាតិ យថាភូតំ បជានាតិ ឯវំ បុគ្គលោ បូរោ ហោតិ វិវដោ សេយ្យថាបិ សោ កុម្ភោ បូរោ វិវដោ តថូបមោ អយំ បុគ្គលោ ។ កថញ្ច បុគ្គលោ តុច្ឆោ ហោតិ វិវដោ ។ ឥធេកច្ចស្ស បុគ្គលស្ស ន បាសាទិកំ ហោតិ អភិក្កន្តំ បដិក្កន្តំ អាលោកិតំ វិលោកិតំ សម្មិញ្ជិតំ បសារិតំ សង្ឃាដិបត្តចីវរធារណំ សោ ឥទំ ទុក្ខន្តិ យថាភូតំ នប្បជានាតិ ។ បេ ។ អយំ ទុក្ខនិរោធគាមិនី បដិបទាតិ យថាភូតំ នប្បជានាតិ ឯវំ បុគ្គលោ តុច្ឆោ ហោតិ វិវដោ សេយ្យថាបិ សោ កុម្ភោ តុច្ឆោ វិវដោ តថូបមោ អយំ បុគ្គលោ ។ កថញ្ច បុគ្គលោ បូរោ ហោតិ បិហិតោ ។ ឥធេកច្ចស្ស បុគ្គលស្ស



មានការឈានដើរទៅមុខ ការឈានថយក្រោយ ក្រឡេកមើលចំ ក្រឡេកមើលចំហៀង បត់អវយវៈចូល លាអវយវៈចេញ ទ្រទ្រង់នូវសង្ឃាដី បាត្រ និងចីវរ មិនប្រកបដោយសេចក្តីជ្រះថ្លាឡើយ តែបុគ្គលនោះ ដឹងច្បាស់តាមពិតថា នេះទុក្ខ ។ បេ ។ ដឹងច្បាស់តាមពិតថា នេះបដិបទាជាដំណើរទៅកាន់ធម៌រលត់ទុក្ខ ។ បុគ្គលដូចក្អមមានទឹកពេញតែបើកចំហ យ៉ាងនេះឯង ក្អមនោះ មានទឹកពេញតែបើកចំហ មានឧបមាយ៉ាងណាមិញ បុគ្គលនេះ ក៏មានឧបមេយ្យយ៉ាងនោះដែរ ។

បុគ្គលដូចក្អមទទេហើយបើកចំហ តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ មានការឈានដើរទៅមុខ ការឈានថយក្រោយ ក្រឡេកមើលចំ ក្រឡេកមើលចំហៀង បត់អវយវៈចូល លាអវយវៈចេញ ទ្រទ្រង់នូវសង្ឃាដី បាត្រ និងចីវរ មិនប្រកបដោយសេចក្តីជ្រះថ្លាទេ ថែមទាំងបុគ្គលនោះ មិនដឹងច្បាស់តាមពិតថា នេះទុក្ខ ។ បេ ។ មិនដឹងច្បាស់តាមពិតថា នេះបដិបទាជាដំណើរទៅកាន់ធម៌រលត់ទុក្ខ ។ បុគ្គលដូចក្អមទទេហើយបើកចំហ យ៉ាងនេះឯង ក្អមនោះ ទទេហើយបើកចំហ មានឧបមាយ៉ាងណាមិញ បុគ្គលនេះ ក៏មានឧបមេយ្យយ៉ាងនោះដែរ ។

បុគ្គលដូចក្អមមានទឹកពេញហើយគ្របជិត តើដូចម្តេច ។ បុគ្គលខ្លះ

បាសាទិកំ ហោតិ អភិក្កន្តំ បដិក្កន្តំ អាលោកិតំ វិលោកិតំ សម្មិញ្ជិតំ បសារិតំ សង្ឃាដិបត្តចីវរធារណំ ។ សោ ឥទំ ទុក្ខន្តិ យថាភូតំ បជានាតិ ។បេ។ អយំ ទុក្ខនិរោធគាមិនី បដិបទាតិ យថាភូតំ បជានាតិ ។ ឯវំ បុគ្គលោ បូរោ ហោតិ បិហិតោ ។ សេយ្យថាបិ សោ កុម្ភោ បូរោ បិហិតោ តថូបមោ អយំ បុគ្គលោ ។ ឥមេ ចត្តារោ កុម្ភូបមា បុគ្គលា សន្តោ សំវិជ្ជមានា លោកស្មឹ ។

[១១៩] តត្ថ កតមេ ចត្តារោ ឧទករហទូបមា បុគ្គលា ។ ចត្តារោ ឧទករហទា ឧត្តានោ គម្ភីរោភាសោ គម្ភីរោ ឧត្តានោភាសោ ឧត្តានោ ឧត្តានោភាសោ គម្ភីរោ គម្ភីរោភាសោ ។

[១២០] ឯវមេវ ចត្តារោមេ ឧទករហទូបមា បុគ្គលា សន្តោ សំវិជ្ជមានា លោកស្មឹ ។ កតមេ ចត្តារោ ។ ឧត្តានោ គម្ភីរោភាសោ គម្ភីរោ ឧត្តានោភាសោ ឧត្តានោ ឧត្តានោភាសោ គម្ភីរោ គម្ភីរោភាសោ ។ កថញ្ច បុគ្គលោ ឧត្តានោ ហោតិ គម្ភីរោភាសោ ។ ឥធេកច្ចស្ស បុគ្គលស្ស



ក្នុងលោកនេះ មានការឈានទៅមុខ ការថយក្រោយ ក្រឡេកមើលចំ ក្រឡេកមើលចំហៀង បត់ដៃជើងចូល លាដៃជើងចេញ ទ្រទ្រង់នូវសង្ឃាដិ បាត្រ និងចីវរ ប្រកបដោយសេចក្តីជ្រះថ្លា ថែមទាំងបុគ្គលនោះ ដឹងច្បាស់តាមពិតថា នេះទុក្ខ ។បេ។ ដឹងច្បាស់តាមពិតថា នេះបដិបទាជាដំណើរទៅកាន់ទីរលត់ទុក្ខ បុគ្គលដូចក្អមមានទឹកពេញហើយគ្របបិទ យ៉ាងនេះឯង ក្អមនោះ មានទឹកពេញហើយគ្របបិទ មានឧបមាយ៉ាងណាមិញ បុគ្គលនេះ ក៏មានឧបមេយ្យយ៉ាងនោះដែរ ។ នេះបុគ្គល ៤ ពួក ប្រៀបដោយក្អម ដែលមានក្នុងលោក ។

[១១៩] បណ្តាបុគ្គលទាំងនោះ បុគ្គល ៤ ពួក ប្រៀបដោយអន្លង់ទឹក តើដូចម្តេច ។ អន្លង់ទឹកមាន ៤ យ៉ាង គឺ អន្លង់ទឹករាក់តែមានស្រមោលជ្រៅ ១ អន្លង់ទឹកជ្រៅតែមានស្រមោលរាក់ ១ អន្លង់ទឹករាក់មានស្រមោលរាក់ ១ អន្លង់ទឹកជ្រៅមានស្រមោលជ្រៅ ១ ។

[១២០] បុគ្គល ៤ ពួក ប្រៀបដោយអន្លង់ទឹកនេះ ដែលមានក្នុងលោក គឺយ៉ាងនោះឯង ។ បុគ្គល ៤ ពួក តើដូចម្តេច ។ បុគ្គលដូចអន្លង់ទឹករាក់តែមានស្រមោលជ្រៅ ១ បុគ្គលដូចអន្លង់ទឹកជ្រៅតែមានស្រមោលរាក់ ១ បុគ្គលដូចអន្លង់ទឹករាក់មានស្រមោលរាក់ ១ បុគ្គលដូចអន្លង់ទឹកជ្រៅមានស្រមោលជ្រៅ ១ ។ បុគ្គលដូចអន្លង់ទឹករាក់តែមានស្រមោលជ្រៅ តើដូចម្តេច ។ បុគ្គលខ្លះ

បាសាទិកំ ហោតិ អភិក្កន្តំ បដិក្កន្តំ អាលោកិតំ
វិលោកិតំ សមិញ្ជិតំ បសារិតំ សង្ឃាដិបត្តចីវរធារណំ
សោ ឥទំ ទុក្ខន្តិ យថាភូតំ នប្បជានាតិ ។ បេ ។
អយំ ទុក្ខនិរោធគាមិនី បដិបទាតិ យថាភូតំ នប្ប-
ជានាតិ ឯវំ បុគ្គលោ ឧត្តានោ ហោតិ គម្ភីរោភាសោ
សេយ្យថាបិ សោ ឧទករហទោ ឧត្តានោ គម្ភីរោ-
ភាសោ តថូបមោ អយំ បុគ្គលោ ។ តត្ថ កតមោ បុគ្គ-
លោ គម្ភីរោ ហោតិ ឧត្តានោភាសោ ។ ឥធេ-
កច្ចស្ស បុគ្គលស្ស ន បាសាទិកំ ហោតិ អភិក្កន្តំ
បដិក្កន្តំ អាលោកិតំ វិលោកិតំ សមិញ្ជិតំ បសា-
រិតំ សង្ឃាដិបត្តចីវរធារណំ សោ ឥទំ ទុក្ខន្តិ
យថាភូតំ បជានាតិ ។ បេ ។ អយំ ទុក្ខនិរោធគា-
មិនី បដិបទាតិ យថាភូតំ បជានាតិ ឯវំ បុគ្គលោ
គម្ភីរោ ហោតិ ឧត្តានោភាសោ សេយ្យថាបិ សោ
ឧទករហទោ គម្ភីរោ ឧត្តានោភាសោ តថូបមោ
អយំ បុគ្គលោ ។ តត្ថ កតមោ បុគ្គលោ ឧត្តានោ
ហោតិ ឧត្តានោភាសោ ។ ឥធេកច្ចស្ស បុគ្គលស្ស





ក្នុងលោកនេះ មានការឈានជើងទៅមុខ ការឈានថយក្រោយ ក្រឡេក
មើលចំ ក្រឡេកមើលចំហៀង បត់អវយវៈចូល លាអវយវៈចេញ
ទ្រទ្រង់នូវសង្ឃាដី បាត្រ និងចីវរ ប្រកបដោយសេចក្ដីជ្រះថ្លា តែ
បុគ្គលនោះ មិនដឹងច្បាស់តាមពិតថា នេះទុក្ខ ។ បេ ។ មិនដឹងច្បាស់
តាមពិតថា នេះបដិបទាជាដំណើរទៅកាន់ទីរលត់ទុក្ខ បុគ្គលដូចអន្លង់
ទឹករាក់តែមានស្រមោលជ្រៅ យ៉ាងនេះឯង អន្លង់ទឹកនោះ រាក់តែមានស្រមោល
ជ្រៅ មានឧបមាយ៉ាងណាមិញ បុគ្គលនេះ ក៏មានឧបមេយ្យយ៉ាងនោះ
ដែរ ។ បុគ្គលដូចអន្លង់ទឹកជ្រៅតែមានស្រមោលរាក់ តើដូចម្ដេច ។ បុគ្គល
ខ្លះ ក្នុងលោកនេះ មានការឈានដើរទៅមុខ ការឈានថយក្រោយ
ក្រឡេកមើលចំ ក្រឡេកមើលចំហៀង បត់អវយវៈចូល លាអវយវៈ
ចេញ ទ្រទ្រង់នូវសង្ឃាដី បាត្រ និងចីវរ មិនប្រកបដោយសេចក្ដីជ្រះថ្លា
ឡើយ តែបុគ្គលនោះ ដឹងច្បាស់តាមពិតថា នេះទុក្ខ ។ បេ ។ នេះ
បដិបទាជាដំណើរទៅកាន់ទីរលត់ទុក្ខ បុគ្គលដូចអន្លង់ទឹកជ្រៅតែមាន
ស្រមោលរាក់ យ៉ាងនេះឯង អន្លង់ទឹកនោះ ជ្រៅតែមានស្រមោលរាក់ មានឧបមា
យ៉ាងណាមិញ បុគ្គលនេះ ក៏មានឧបមេយ្យយ៉ាងនោះដែរ ។ បុគ្គល
ដូចអន្លង់ទឹករាក់មានស្រមោលរាក់ តើដូចម្ដេច ។ បុគ្គលខ្លះ ក្នុងលោកនេះ

ន បាសាទិកំ ហោតិ អភិក្កន្តំ បដិក្កន្តំ អាលោកិតំ វិលោកិតំ សម្មិញ្ជិតំ បសារិតំ សង្ឃាដិបត្តចីវរធារណំ សោ ឥទំ ទុក្ខន្តិ យថាភូតំ នប្បជានាតិ ។ បេ ។ អយំ ទុក្ខនិរោធគាមិនី បដិបទាតិ យថាភូតំ នប្បជានាតិ ឯវំ បុគ្គលោ ឧត្តានោ ហោតិ ឧត្តានោភាសោ សេយ្យថាបិ សោ ឧទករហទោ ឧត្តានោ ឧត្តានោភាសោ តថូបមោ អយំ បុគ្គលោ ។

កថញ្ច បុគ្គលោ គម្ភីរោ ហោតិ គម្ភីរោភាសោ ។ ឥធេកច្ចស្ស បុគ្គលស្ស បាសាទិកំ ហោតិ អភិក្កន្តំ បដិក្កន្តំ អាលោកិតំ វិលោកិតំ សម្មិញ្ជិតំ បសារិតំ សង្ឃាដិបត្តចីវរធារណំ សោ ឥទំ ទុក្ខន្តិ យថាភូតំ បជានាតិ ។ បេ ។ អយំ ទុក្ខនិរោធគាមិនី បដិបទាតិ យថាភូតំ បជានាតិ ឯវំ បុគ្គលោ គម្ភីរោ ហោតិ គម្ភីរោភាសោ សេយ្យថាបិ សោ ឧទករហទោ គម្ភីរោ គម្ភីរោភាសោ តថូបមោ អយំ បុគ្គលោ ។ ឥមេ ចត្តារោ ឧទករហទូបមា បុគ្គលា សន្តោ សំវិជ្ជមានា លោកស្មឹ ។



មានការឈានដើរទៅមុខ ការឈានថយក្រោយ ក្រឡេកមើលចំ ក្រឡេកមើលចំហៀង បត់ដៃចូល លាដៃចេញ ទ្រទ្រង់នូវសង្ឃាដី បាត្រ និងចីវរ មិនប្រកបដោយសេចក្តីជ្រះថ្លា ថែមទាំងបុគ្គលនោះ មិនដឹងច្បាស់តាមពិតថា នេះទុក្ខ ។ បេ ។ មិនដឹងច្បាស់តាមពិតថា នេះបដិបទាជាដំណើរទៅកាន់ធម៌រលត់ទុក្ខ បុគ្គលដូចអន្លង់ទឹករាក់មានស្រមោលរាក់ យ៉ាងនេះឯង អន្លង់ទឹកនោះ រាក់មានស្រមោលរាក់ មានឧបមាយ៉ាងណាមិញ បុគ្គលនេះ ក៏មានឧបមេយ្យយ៉ាងនោះដែរ ។

បុគ្គលដូចអន្លង់ទឹកជ្រៅមានស្រមោលជ្រៅ តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ មានការឈានដើរទៅមុខ ការឈានថយក្រោយ ក្រឡេកមើលចំ ក្រឡេកមើលចំហៀង បត់ដៃចូល លាដៃចេញ ទ្រទ្រង់នូវសង្ឃាដី បាត្រ និងចីវរ ប្រកបដោយសេចក្តីជ្រះថ្លា ថែមទាំងបុគ្គលនោះ បានដឹងច្បាស់តាមពិតថា នេះទុក្ខ ។ បេ ។ បានដឹងច្បាស់តាមពិតថា នេះបដិបទាជាដំណើរទៅកាន់ធម៌រលត់ទុក្ខ បុគ្គលដូចអន្លង់ទឹកជ្រៅមានស្រមោលជ្រៅ យ៉ាងនេះឯង អន្លង់ទឹកនោះ ជ្រៅមានស្រមោលជ្រៅ មានឧបមាយ៉ាងណាមិញ បុគ្គលនេះ ក៏មានឧបមេយ្យយ៉ាងនោះដែរ ។ នេះ បុគ្គល ៤ ពួក ប្រៀបដោយអន្លង់ទឹក ដែលមានក្នុងលោក ។

(១៦១) តត្ថ កតមេ ចត្តារោ ពលិវទ្ទូបមា បុគ្គលា ។ ចត្តារោ ពលិវទ្ទា សកគវចណ្ឌោ នោ បរគវចណ្ឌោ បរគវចណ្ឌោ នោ សកគវចណ្ឌោ សកគវចណ្ឌោ ច បរគវចណ្ឌោ ច នេវ សកគវចណ្ឌោ នោ បរគវចណ្ឌោ ។

(១៦២) ឯវមេវ ចត្តារោមេ ពលិវទ្ទូបមា បុគ្គលា សន្តោ សំវិជ្ជមានា លោកស្មឹ ។ កតមេ ចត្តារោ ។ សកគវចណ្ឌោ នោ បរគវចណ្ឌោ បរគវចណ្ឌោ នោ សកគវចណ្ឌោ សកគវចណ្ឌោ ច បរគវចណ្ឌោ ច នេវ សកគវចណ្ឌោ នោ បរគវចណ្ឌោ ។ កថញ្ច បុគ្គលោ សកគវចណ្ឌោ ហោតិ នោ បរគវចណ្ឌោ ។ ឥធេកច្ចោ បុគ្គលោ សកបរិសំ ឧព្ពេជិតា ហោតិ នោ បរបរិសំ ឯវំ បុគ្គលោ សកគវចណ្ឌោ ហោតិ នោ បរគវចណ្ឌោ សេយ្យថាបិ សោ ពលិវទ្ទោ សកគវចណ្ឌោ នោ បរគវចណ្ឌោ



(១៦១) បណ្ដាបុគ្គលទាំងនោះ បុគ្គល ៤ ពួក ប្រៀបដោយគោបម្រើ តើដូចម្ដេច ។ គោបម្រើមាន ៤ ពួក គឺ គោបម្រើកាចក្នុងហ្វូងគោរបស់ខ្លួន មិនកាចក្នុងហ្វូងគោដទៃ ១ កាចក្នុងហ្វូងគោដទៃ មិនកាចក្នុងហ្វូងគោរបស់ខ្លួន ១ កាចក្នុងហ្វូងគោរបស់ខ្លួន ទាំងកាចក្នុងហ្វូងគោដទៃ ១ មិនកាចក្នុងហ្វូងគោរបស់ខ្លួន ទាំងមិនកាចក្នុងហ្វូងគោដទៃ ១ ។

(១៦២) បុគ្គល ៤ ពួក ប្រៀបដោយគោបម្រើនេះ រមែងមានក្នុងលោក ក៏យ៉ាងនោះដែរ ។ បុគ្គល ៤ ពួក តើដូចម្ដេច ។ បុគ្គលដូចគោកាចក្នុងហ្វូងគោរបស់ខ្លួន មិនកាចក្នុងហ្វូងគោដទៃ ១ បុគ្គលដូចគោកាចក្នុងហ្វូងគោដទៃ មិនកាចក្នុងហ្វូងគោរបស់ខ្លួន ១ បុគ្គលដូចគោកាចក្នុងហ្វូងគោរបស់ខ្លួន ទាំងកាចក្នុងហ្វូងគោដទៃ ១ បុគ្គលដូចគោមិនកាចក្នុងហ្វូងគោរបស់ខ្លួន ទាំងមិនកាចក្នុងហ្វូងគោដទៃ ១ ។ បុគ្គលដូចគោកាចក្នុងហ្វូងគោរបស់ខ្លួន មិនកាចក្នុងហ្វូងគោដទៃ តើដូចម្ដេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ជាអ្នកញុំាងបរិស័ទរបស់ខ្លួនឲ្យតក់ស្លុត មិនញុំាងបរិស័ទអ្នកដទៃ ឲ្យតក់ស្លុត បុគ្គលដូចគោកាចក្នុងហ្វូងគោរបស់ខ្លួន មិនកាចក្នុងហ្វូងគោដទៃ យ៉ាងនេះឯង គោបម្រើនោះ កាចក្នុងហ្វូងគោរបស់ខ្លួន មិនកាចក្នុងហ្វូងគោដទៃ មានឧបមាយ៉ាងណាមិញ

តថូបមោ អយំ បុគ្គលោ ។ កថញ្ច បុគ្គលោ បរគវចណ្ឌោ ហោតិ នោ សកគវចណ្ឌោ ។ ឥធេកច្ចោ បុគ្គលោ បរបរិសំ ឧព្ពេជិតា ហោតិ នោ សកបរិសំ ឯវំ បុគ្គលោ បរគវចណ្ឌោ ហោតិ នោ សកគវចណ្ឌោ សេយ្យថាបិ សោ ពលិពទ្ទោ បរគវចណ្ឌោ នោ សកគវចណ្ឌោ តថូបមោ អយំ បុគ្គលោ ។ កថញ្ច បុគ្គលោ សកគវចណ្ឌោ ច ហោតិ បរគវចណ្ឌោ ច ។ ឥធេកច្ចោ បុគ្គលោ សកបរិសញ្ច ឧព្ពេជិតា ហោតិ បរបរិសញ្ច ឯវំ បុគ្គលោ សកគវចណ្ឌោ ច ហោតិ បរគវចណ្ឌោ ច សេយ្យថាបិ សោ ពលិពទ្ទោ សកគវចណ្ឌោ ច បរគវចណ្ឌោ ច តថូបមោ អយំ បុគ្គលោ ។ កថញ្ច បុគ្គលោ នេវ សកគវចណ្ឌោ ហោតិ នោ បរគវចណ្ឌោ ។ ឥធេកច្ចោ បុគ្គលោ នេវ សកបរិសំ ឧព្ពេជិតា ហោតិ នោ បរបរិសំ ឯវំ បុគ្គលោ នេវ សកគវចណ្ឌោ ហោតិ នោ បរគវចណ្ឌោ សេយ្យថាបិ សោ ពលិពទ្ទោ នេវ សកគវចណ្ឌោ នោ បរគវចណ្ឌោ



បុគ្គលនេះ ក៏មានឧបមេយ្យយ៉ាងនោះដែរ ។ បុគ្គលដូចគោកាចក្នុងហ្វូងគោដទៃ មិនកាចក្នុងហ្វូងគោរបស់ខ្លួន តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ជាអ្នកញុំាងបរិស័ទអ្នកដទៃឲ្យតក់ស្លុត មិនញុំាងបរិស័ទរបស់ខ្លួនឲ្យតក់ស្លុត បុគ្គលដូចគោកាចក្នុងហ្វូងគោដទៃ មិនកាចក្នុងហ្វូងគោរបស់ខ្លួន យ៉ាងនេះឯង គោបម្រើនោះ កាចក្នុងហ្វូងគោដទៃ មិនកាចក្នុងហ្វូងគោរបស់ខ្លួន មានឧបមាយ៉ាងណាមិញ បុគ្គលនេះ ក៏មានឧបមេយ្យយ៉ាងនោះដែរ ។ បុគ្គលដូចគោកាចក្នុងហ្វូងគោរបស់ខ្លួន ទាំងកាចក្នុងហ្វូងគោដទៃ តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ជាអ្នកញុំាងបរិស័ទរបស់ខ្លួន ឲ្យតក់ស្លុតផង ញុំាងបរិស័ទអ្នកដទៃ ឲ្យតក់ស្លុតផង បុគ្គលដូចគោកាច ក្នុងហ្វូងគោរបស់ខ្លួនផង កាចក្នុងហ្វូងគោដទៃផង យ៉ាងនេះឯង គោបម្រើនោះ កាចក្នុងហ្វូងគោរបស់ខ្លួនទាំងកាចក្នុងហ្វូងគោដទៃ មានឧបមាយ៉ាងណាមិញ បុគ្គលនេះ ក៏មានឧបមេយ្យយ៉ាងនោះដែរ ។ បុគ្គលដូចគោមិនកាចក្នុងហ្វូងគោរបស់ខ្លួន ទាំងមិនកាចក្នុងហ្វូងគោដទៃ តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ជាអ្នកមិនញុំាងបរិស័ទរបស់ខ្លួន ឲ្យតក់ស្លុត ទាំងមិនញុំាងបរិស័ទអ្នកដទៃ ឲ្យតក់ស្លុត បុគ្គលដូចគោមិនកាចក្នុងហ្វូងគោរបស់ខ្លួន ទាំងមិនកាចក្នុងហ្វូងគោដទៃ យ៉ាងនេះឯង គោបម្រើនោះ មិនកាចក្នុងហ្វូងគោរបស់ខ្លួន ទាំងមិនកាចក្នុងហ្វូងគោដទៃ មានឧបមាយ៉ាងណាមិញ

តថូបមោ អយំ បុគ្គលោ ។ ឥមេ ចត្តារោ ពលិពទ្ទូបមា បុគ្គលា សន្តោ សំវិជ្ជមានា លោកស្មឹំ ។

[១៦៣] តត្ថ កតមេ ចត្តារោ អាសីវិសូបមា បុគ្គលា ។ ចត្តារោ អាសីវិសា អាគតវិសោ ន ឃោរវិសោ ឃោរវិសោ ន អាគតវិសោ អាគតវិសោ ច ឃោរវិសោ ច នេវ អាគតវិសោ ន ឃោរវិសោ ។

[១៦៤] ឯវមេវ ចត្តារោមេ អាសីវិសូបមា បុគ្គលា សន្តោ សំវិជ្ជមានា លោកស្មឹំ ។ កតមេ ចត្តារោ ។ អាគតវិសោ ន ឃោរវិសោ ឃោរវិសោ ន អាគតវិសោ អាគតវិសោ ច ឃោរវិសោ ច នេវ អាគតវិសោ ន ឃោរវិសោ ។ កថញ្ច បុគ្គលោ អាគតវិសោ ហោតិ ន ឃោរវិសោ ។ ឥធេកច្ចោ បុគ្គលោ អភិណ្ហំ កុជ្ឈតិ សោ ច ខ្វស្ស កោធោ ន ទីឃរត្តំ អនុសេតិ ឯវំ បុគ្គលោ អាគតវិសោ ហោតិ ន ឃោរវិសោ សេយ្យថាបិ សោ អាសីវិសោ អាគតវិសោ ន ឃោរវិសោ តថូបមោ អយំ បុគ្គលោ ។



បុគ្គលនេះ ក៏មានឧបមេយ្យយ៉ាងនោះដែរ ។ នេះ បុគ្គល ៤ ពួក ប្រៀបដោយគោបម្រើ តែងមានក្នុងលោក ។

[១៦៣] បណ្ដាបុគ្គលទាំងនោះ បុគ្គល ៤ ពួក ប្រៀបដោយសត្វអាសិរពិស តើដូចម្ដេច ។ សត្វអាសិរពិសមាន ៤ ពួក គឺ អាសិរពិស មានពិសស្រួកន់ មានពិសមិនពន្លឹក ១ មានពិសដ៏ពន្លឹក មានពិសមិនស្រួកន់ ១ មានពិសស្រួកន់ ទាំងមានពិសដ៏ពន្លឹក ១ មិនមានពិសស្រួកន់ ទាំងមិនមានពិសដ៏ពន្លឹក ១ ។

[១៦៤] បុគ្គល ៤ ពួក ប្រៀបដោយសត្វអាសិរពិសនេះ តែងមានក្នុងលោក គឺយ៉ាងនេះឯង ។ បុគ្គល ៤ ពួក តើដូចម្ដេច ។ បុគ្គលដូចអាសិរពិស មានពិសស្រួកន់ មិនមានពិសដ៏ពន្លឹក ១ មានពិសដ៏ពន្លឹក មិនមានពិសស្រួកន់ ១ មានពិសស្រួកន់ ទាំងមានពិសដ៏ពន្លឹក ១ មិនមានពិសស្រួកន់ទាំងមិនមានពិសដ៏ពន្លឹក ១ ។ បុគ្គលដូចអាសិរពិស មានពិសស្រួកន់ មិនមានពិសដ៏ពន្លឹក តើដូចម្ដេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ក្រោធរឿយៗ តែសេចក្ដីក្រោធនោះ របស់បុគ្គលនោះ មិនបានដេកត្រាំនៅ អស់កាលយូរអង្វែងទេ ។ បុគ្គលដូចអាសិរពិស មានពិសស្រួកន់ មិនមានពិសដ៏ពន្លឹក យ៉ាងនេះឯង សត្វអាសិរពិសនោះ មានពិសស្រួកន់ មិនមានពិសដ៏ពន្លឹក មានឧបមា យ៉ាងណាមិញ បុគ្គលនេះ ក៏មានឧបមេយ្យយ៉ាងនោះដែរ ។

ឯវរូបោ អយំ បុគ្គលោ ។ ឥមេ ចត្តារោ អាសីវិសូបមា បុគ្គលា សន្តោ សំវិជ្ជមានា លោកស្មឹ ។

(១៦៨) កថញ្ច បុគ្គលោ អននុវិច្ច អបរិយោគាហេត្វា អវណ្ណារហស្ស វណ្ណំ ភាសិតា ហោតិ ។ ឥធេកច្ចោ បុគ្គលោ ទុប្បដិបន្នានំ មិច្ឆាបដិបន្នានំ តិត្ថិយានំ តិត្ថិយសាវកានំ វណ្ណំ ភាសតិ សុប្បដិបន្នា ឥតិបិ សម្មាបដិបន្នា ឥតិបីតិ ឯវំ បុគ្គលោ អននុវិច្ច អបរិយោគាហេត្វា អវណ្ណារហស្ស វណ្ណំ ភាសិតា ហោតិ ។ កថញ្ច បុគ្គលោ អននុវិច្ច អបរិយោគាហេត្វា វណ្ណារហស្ស អវណ្ណំ ភាសិតា ហោតិ ។ ឥធេកច្ចោ បុគ្គលោ សុប្បដិបន្នានំ សម្មាបដិបន្នានំ ពុទ្ធានំ ពុទ្ធសាវកានំ អវណ្ណំ ភាសតិ ទុប្បដិបន្នា ឥតិបិ មិច្ឆាបដិបន្នា ឥតិបីតិ ឯវំ បុគ្គលោ អននុវិច្ច អបរិយោគាហេត្វា វណ្ណារហស្ស អវណ្ណំ ភាសិតា ហោតិ ។ កថញ្ច បុគ្គលោ អននុវិច្ច អបរិយោគាហេត្វា អប្បសាទនីយេ ឋានេ បសាទំ ឧបទំសិតា ហោតិ ។ ឥធេកច្ចោ បុគ្គលោ



បុគ្គលនេះ ក៏មានឧបមាយ៉ាងនោះដែរ ។ នេះ បុគ្គល ៤ ពួក ប្រៀបដោយសត្វអាសិរពិស ៤ តែងមានក្នុងលោក ។

(១៦៨) បុគ្គលមិនពិចារណា មិនស្ទង់មើល ហើយពោលសរសើរបុគ្គលដែលគួរតិះដៀល តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ពោលសរសើរពួកតិរ្ថិយ ទាំងពួកសាវករបស់តិរ្ថិយ ដែលប្រតិបត្តិអាក្រក់ ប្រតិបត្តិខុស ថាជាអ្នកប្រតិបត្តិល្អ ដូច្នេះក្តី ថាជាអ្នកប្រតិបត្តិត្រូវ ដូច្នេះក្តី បុគ្គលមិនពិចារណា មិនស្ទង់មើល ហើយពោលសរសើរបុគ្គលដែលគួរតិះដៀល យ៉ាងនេះឯង ។ បុគ្គលមិនពិចារណា មិនស្ទង់មើល ហើយពោលតិះដៀលបុគ្គលដែលគួរសរសើរ តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ពោលតិះដៀលព្រះពុទ្ធ ទាំងសាវករបស់ព្រះពុទ្ធ ដែលប្រតិបត្តិល្អ ប្រតិបត្តិត្រូវ ថាជាអ្នកប្រតិបត្តិអាក្រក់ ដូច្នេះក្តី ថាជាអ្នកប្រតិបត្តិខុស ដូច្នេះក្តី បុគ្គលមិនពិចារណា មិនស្ទង់មើល ហើយពោលតិះដៀលបុគ្គលដែលគួរសរសើរ យ៉ាងនេះឯង ។ បុគ្គលមិនពិចារណា មិនស្ទង់មើល ហើយសំដែងសេចក្តីជ្រះថ្លា ក្នុងទីដែលមិនគួរជ្រះថ្លា តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ

ទុប្បដិបទាយ មិច្ឆាបដិបទាយ បសាទំ ឧបទំសេតិ សុប្បដិបទា ឥតិបិ សម្មាបដិបទា ឥតិបិ អយំ បុគ្គលោ អននុវិច្ច អបរិយោគាហេត្វា អប្បសាទនីយេ ឋានេ បសាទំ ឧបទំសិតា ហោតិ ។ កតមោ ច បុគ្គលោ អននុវិច្ច អបរិយោគាហេត្វា បសាទនីយេ ឋានេ អប្បសាទំ ឧបទំសិតា ហោតិ ។ ឥធេកច្ចោ បុគ្គលោ សុប្បដិបទាយ សម្មាបដិបទាយ អប្បសាទំ ឧបទំសេតិ ទុប្បដិបទា ឥតិបិ មិច្ឆាបដិបទា ឥតិបិ អយំ បុគ្គលោ អននុវិច្ច អបរិយោគាហេត្វា បសាទនីយេ ឋានេ អប្បសាទំ ឧបទំសិតា ហោតិ ។

(១៦៦) កតមោ ច បុគ្គលោ អនុវិច្ច បរិយោគាហេត្វា អវណ្ណារហស្ស អវណ្ណំ ភាសិតា ហោតិ ។ ឥធេកច្ចោ បុគ្គលោ ទុប្បដិបន្នានំ មិច្ឆាបដិបន្នានំ តិត្ថិយានំ តិត្ថិយសាវកានំ អវណ្ណំ ភាសតិ ទុប្បដិបន្នា ឥតិបិ មិច្ឆាបដិបន្នា ឥតិបិ អយំ បុគ្គលោ អនុវិច្ច បរិយោគាហេត្វា អវណ្ណារហស្ស អវណ្ណំ ភាសិតា ហោតិ ។ កតមោ ច បុគ្គលោ អនុវិច្ច បរិយោគាហេត្វា វណ្ណារហស្ស វណ្ណំ ភាសិតា ហោតិ ។



ញុំាងសេចក្តីជ្រះថ្លាឲ្យកើត ក្នុងផ្លូវប្រតិបត្តិអាក្រក់ ក្នុងផ្លូវប្រតិបត្តិខុស ថាជាផ្លូវប្រតិបត្តិល្អដូច្នេះក្តី ថាជាផ្លូវប្រតិបត្តិត្រូវដូច្នេះក្តី បុគ្គលមិនពិចារណា មិនស្ទង់មើល ហើយសំដែងសេចក្តីជ្រះថ្លា ក្នុងទីដែលមិនគួរជ្រះថ្លា យ៉ាងនេះឯង ។ បុគ្គលមិនពិចារណា មិនស្ទង់មើល ហើយសំដែងសេចក្តីមិនជ្រះថ្លា ក្នុងទីដែលគួរជ្រះថ្លា តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ញុំាងសេចក្តីមិនជ្រះថ្លាឲ្យកើត ក្នុងផ្លូវប្រតិបត្តិល្អ ក្នុងផ្លូវប្រតិបត្តិត្រូវ ថាជាផ្លូវប្រតិបត្តិអាក្រក់ដូច្នេះក្តី ថាជាផ្លូវប្រតិបត្តិខុសដូច្នេះក្តី បុគ្គលមិនពិចារណា មិនស្ទង់មើល ហើយសំដែងសេចក្តីមិនជ្រះថ្លា ក្នុងទីដែលគួរជ្រះថ្លា យ៉ាងនេះឯង ។

(១៦៦) បុគ្គលពិចារណា ស្ទង់មើល ហើយពោលតិះដៀលបុគ្គលដែលគួរតិះដៀល តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ពោលតិះដៀលពួកតិរ្ថិយ និងពួកសាវ័ករបស់តិរ្ថិយ ដែលប្រតិបត្តិអាក្រក់ ប្រតិបត្តិខុស ថាជាអ្នកប្រតិបត្តិអាក្រក់ដូច្នេះក្តី ថាជាអ្នកប្រតិបត្តិខុសដូច្នេះក្តី បុគ្គលពិចារណា ស្ទង់មើល ហើយពោលតិះដៀលបុគ្គលដែលគួរតិះដៀល យ៉ាងនេះឯង ។ បុគ្គលពិចារណា ស្ទង់មើលហើយពោលសរសើរបុគ្គល ដែលគួរសរសើរ តើដូចម្តេច ។

ឥធេកច្ចោ បុគ្គលោ សុប្បដិបន្នានំ សម្មាបដិបន្នានំ ពុទ្ធានំ ពុទ្ធសាវកានំ វណ្ណំ ភាសតិ សុប្បដិបន្នា ឥតិបិ សម្មាបដិបន្នា ឥតិបីតិ ឯវំ បុគ្គលោ អនុវិច្ច បរិយោគាហេត្វា វណ្ណារហស្ស វណ្ណំ ភាសិតា ហោតិ ។ កថញ្ច បុគ្គលោ អនុវិច្ច បរិយោគាហេត្វា អប្បសាទនីយេ ឋានេ អប្បសាទំ ឧបទំសិតា ហោតិ ។ ឥធេកច្ចោ បុគ្គលោ ទុប្បដិបទាយ មិច្ឆាបដិបទាយ អប្បសាទំ ជនេតិ ទុប្បដិបទា ឥតិបិ មិច្ឆាបដិបទា ឥតិបីតិ ឯវំ បុគ្គលោ អនុវិច្ច បរិយោគាហេត្វា អប្បសាទនីយេ ឋានេ អប្បសាទំ ឧបទំសិតា ហោតិ ។ កថញ្ច បុគ្គលោ អនុវិច្ច បរិយោគាហេត្វា បសាទនីយេ ឋានេ បសាទំ ឧបទំសិតា ហោតិ ។ ឥធេកច្ចោ បុគ្គលោ សុប្បដិបទាយ សម្មាបដិបទាយ បសាទំ ជនេតិ សុប្បដិបទា ឥតិបិ សម្មាបដិបទា ឥតិបីតិ ឯវំ បុគ្គលោ អនុវិច្ច បរិយោគាហេត្វា បសាទនីយេ ឋានេ បសាទំ ឧបទំសិតា ហោតិ ។



បុគ្គលខ្លះ ក្នុងលោកនេះ ពោលសរសើរព្រះពុទ្ធ ឬពួកសាវ័ករបស់ព្រះពុទ្ធដែលប្រតិបត្តិល្អ ប្រតិបត្តិត្រូវ ថាជាអ្នកប្រតិបត្តិល្អដូច្នេះក្តី ថាជាអ្នកប្រតិបត្តិត្រូវដូច្នេះក្តី បុគ្គលពិចារណា ស្ទង់មើល ហើយពោលសរសើរបុគ្គលដែលគួរសរសើរ យ៉ាងនេះឯង ។ បុគ្គលពិចារណា ស្ទង់មើល ហើយសំដែងសេចក្តីមិនជ្រះថ្លា ក្នុងទីដែលមិនគួរជ្រះថ្លា តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ញុំាងសេចក្តីមិនជ្រះថ្លាឲ្យកើត ក្នុងផ្លូវប្រតិបត្តិអាក្រក់ ក្នុងផ្លូវប្រតិបត្តិខុស ថាជាផ្លូវប្រតិបត្តិអាក្រក់ដូច្នេះក្តី ថាជាផ្លូវប្រតិបត្តិខុសដូច្នេះក្តី បុគ្គលពិចារណា ស្ទង់មើល ហើយសំដែងសេចក្តីមិនជ្រះថ្លា ក្នុងទីដែលមិនគួរជ្រះថ្លា យ៉ាងនេះឯង ។ បុគ្គលពិចារណា ស្ទង់មើល ហើយសំដែងនូវសេចក្តីជ្រះថ្លា ក្នុងទីដែលគួរជ្រះថ្លា តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ញុំាងសេចក្តីជ្រះថ្លាឲ្យកើត ក្នុងផ្លូវប្រតិបត្តិល្អ ក្នុងផ្លូវប្រតិបត្តិត្រូវ ថាជាផ្លូវប្រតិបត្តិល្អដូច្នេះក្តី ថាជាផ្លូវប្រតិបត្តិត្រូវដូច្នេះក្តី បុគ្គលពិចារណា ស្ទង់មើល ហើយសំដែងសេចក្តីជ្រះថ្លា ក្នុងទីដែលគួរជ្រះថ្លា យ៉ាងនេះឯង ។

(១៤៧) កថញ្ច បុគ្គលោ អវណ្ណារហស្ស អវណ្ណំ ភាសិតា ហោតិ ភូតំ តច្ឆំ កាលេន នោ ច ខោ វណ្ណារហស្ស វណ្ណំ ភាសិតា ហោតិ ភូតំ តច្ឆំ កាលេន ។ ឥធេកច្ចោ បុគ្គលោ វណ្ណាបិ សំវិជ្ជតិ អវណ្ណាបិ សំវិជ្ជតិ យោ តត្ថ អវណ្ណោ តំ ភណតិ ភូតំ តច្ឆំ កាលេន យោ តត្ថ វណ្ណោ តំ ន ភណតិ ភូតំ តច្ឆំ កាលេន ឯវំ បុគ្គលោ អវណ្ណារហស្ស អវណ្ណំ ភាសិតា ហោតិ ភូតំ តច្ឆំ កាលេន នោ ច ខោ វណ្ណារហស្ស វណ្ណំ ភាសិតា ហោតិ ភូតំ តច្ឆំ កាលេន ។ កថញ្ច បុគ្គលោ វណ្ណារហស្ស វណ្ណំ ភាសិតា ហោតិ ភូតំ តច្ឆំ កាលេន នោ ច ខោ អវណ្ណារហស្ស អវណ្ណំ ភាសិតា ហោតិ ភូតំ តច្ឆំ កាលេន ។ ឥធេកច្ចោ បុគ្គលោ វណ្ណាបិ សំវិជ្ជតិ អវណ្ណាបិ សំវិជ្ជតិ យោ តត្ថ វណ្ណោ តំ ភណតិ ភូតំ តច្ឆំ កាលេន យោ តត្ថ អវណ្ណោ តំ ន ភណតិ ភូតំ តច្ឆំ កាលេន ឯវំ បុគ្គលោ វណ្ណារហស្ស វណ្ណំ ភាសិតា ហោតិ ភូតំ តច្ឆំ កាលេន នោ ច ខោ អវណ្ណារហស្ស អវណ្ណំ ភាសិតា ហោតិ





(១៤៧) បុគ្គលពោលតិះដៀល ឱ្យបុគ្គល ដែលគួរតិះដៀល ពិតប្រាកដ តាមកាលគួរ មិនពោលសរសើរ ឱ្យបុគ្គលដែលគួរសរសើរ ពិតប្រាកដ តាមកាលគួរ តើដូចម្តេច ។ គុណគួរសរសើរក៏មាន ទោសគួរតិះដៀលក៏មាន បុគ្គលខ្លះ ក្នុងលោកនេះ ទោសគួរតិះដៀលណា មានក្នុងបុគ្គលនោះ ក៏ពោលឱ្យទោសនោះ ពិតប្រាកដ តាមកាលគួរ គុណគួរសរសើរណា មានក្នុងបុគ្គលនោះ ក៏មិនពោលឱ្យគុណនោះ ពិតប្រាកដ តាមកាលគួរទេ បុគ្គលពោលតិះដៀល ឱ្យបុគ្គលដែលគួរតិះដៀល ពិតប្រាកដតាមកាលគួរ មិនពោលសរសើរ ឱ្យបុគ្គលដែលគួរសរសើរ ពិតប្រាកដ តាមកាលគួរ យ៉ាងនេះឯង ។ បុគ្គលពោលសរសើរ ឱ្យបុគ្គលដែលគួរសរសើរ ពិតប្រាកដ តាមកាលគួរ មិនពោលតិះដៀល ឱ្យបុគ្គលដែលគួរតិះដៀល ពិតប្រាកដ តាមកាលគួរ តើដូចម្តេច ។ គុណគួរសរសើរក៏មាន ទោសគួរតិះដៀលក៏មាន បុគ្គលខ្លះ ក្នុងលោកនេះ គុណគួរសរសើរណា មានក្នុងបុគ្គលនោះ ក៏ពោលឱ្យគុណនោះ ពិតប្រាកដតាមកាលគួរ ទោសគួរតិះដៀលណា មានក្នុងបុគ្គលនោះ មិនពោលឱ្យទោសនោះ ពិតប្រាកដតាមកាលគួរទេ បុគ្គលពោលសរសើរ ឱ្យបុគ្គលដែលគួរសរសើរ ពិតប្រាកដតាមកាលគួរ តែមិនពោលតិះដៀល ឱ្យបុគ្គលដែលគួរតិះដៀល

ភូតំ តច្ឆំ កាលេន ។ កតមោ ច បុគ្គលោ អវណ្ណា-
រហស្ស ច អវណ្ណំ ភាសិតា ហោតិ ភូតំ តច្ឆំ
កាលេន វណ្ណារហស្ស ច វណ្ណំ ភាសិតា ហោតិ
ភូតំ តច្ឆំ កាលេន ។ ឥធេកច្ចោ បុគ្គលោ វណ្ណោបិ
សំវិជ្ជតិ អវណ្ណោបិ សំវិជ្ជតិ យោ តត្ថ អវណ្ណោ តំ
ភណតិ ភូតំ តច្ឆំ កាលេន យោ តត្ថ វណ្ណោ
តម្បិ ភណតិ ភូតំ តច្ឆំ កាលេន តត្ថ កាលញ្ញូ
ហោតិ តស្ស បញ្ហស្ស វេយ្យាករណាយ ឯវំ បុគ្គ-
លោ អវណ្ណារហស្ស ច អវណ្ណំ ភាសិតា ហោតិ
ភូតំ តច្ឆំ កាលេន វណ្ណារហស្ស ច វណ្ណំ ភាសិតា
ហោតិ ភូតំ តច្ឆំ កាលេន ។ កតមោ ច បុគ្គលោ
នេវ អវណ្ណារហស្ស អវណ្ណំ ភាសិតា ហោតិ ភូតំ
តច្ឆំ កាលេន នោបិ វណ្ណារហស្ស វណ្ណំ ភាសិតា
ហោតិ ភូតំ តច្ឆំ កាលេន ។ ឥធេកច្ចោ បុគ្គលោ
វណ្ណោបិ សំវិជ្ជតិ អវណ្ណោបិ សំវិជ្ជតិ យោ តត្ថ
អវណ្ណោ តំ ន ភណតិ ភូតំ តច្ឆំ កាលេន យោបិ
តត្ថ វណ្ណោ តម្បិ ន ភណតិ ភូតំ តច្ឆំ កាលេន



ពិតប្រាកដតាមកាលគួរ យ៉ាងនេះឯង ។ បុគ្គល ពោលតិះដៀល
នូវបុគ្គលដែលគួរតិះដៀល ពិតប្រាកដតាមកាលគួរផង ពោលសរសើរ
នូវបុគ្គលដែលគួរសរសើរ ពិតប្រាកដតាមកាលគួរផង តើដូចម្តេច ។
គុណគួរសរសើរក៏មាន ទោសគួរតិះដៀលក៏មាន បុគ្គលខ្លះ ក្នុង
លោកនេះ ទោសគួរតិះដៀលណា មានក្នុងបុគ្គលនោះ ក៏ពោល
នូវទោសនោះ ពិតប្រាកដតាមកាលគួរ គុណគួរសរសើរណា មាន
ក្នុងបុគ្គលនោះ ក៏ពោលនូវគុណនោះ ពិតប្រាកដតាមកាលគួរ ជា
អ្នកដឹង នូវកាលគួរ ដើម្បីព្យាករណ៍នូវបញ្ហានោះ ក្នុងដំណើរនោះ
បុគ្គលពោលតិះដៀល នូវបុគ្គលដែលគួរតិះដៀល ពិតប្រាកដតាមកាល
គួរផង ពោលសរសើរ នូវបុគ្គលដែលគួរសរសើរ ពិតប្រាកដតាម
កាលគួរផង យ៉ាងនេះឯង ។ បុគ្គលមិនពោលតិះដៀល នូវបុគ្គល
ដែលគួរតិះដៀល ពិតប្រាកដតាមកាលគួរផង មិនពោលសរសើរនូវ
បុគ្គលដែលគួរសរសើរ ពិតប្រាកដតាមកាលគួរផង តើដូចម្តេច ។
គុណគួរសរសើរក៏មាន ទោសគួរតិះដៀលក៏មាន បុគ្គលខ្លះ ក្នុង
លោកនេះ ទោសគួរតិះដៀលណា មានក្នុងបុគ្គលនោះ មិនពោលនូវ
ទោសនោះ ពិតប្រាកដតាមកាលគួរផង គុណគួរសរសើរណា មាន
ក្នុងបុគ្គលនោះ មិនពោលនូវគុណនោះ ពិតប្រាកដតាមកាលគួរផង

ឧបេក្ខកោ វិហរតិ សតោ សម្បជានោ ឯវំ បុគ្គលោ នេវ អវណ្ណារហស្ស អវណ្ណំ ភាសិតា ហោតិ ភូតំ តច្ឆំ កាលេន នោបិ វណ្ណារហស្ស វណ្ណំ ភាសិតា ហោតិ ភូតំ តច្ឆំ កាលេន ។

(១៦៨) កតមោ ច បុគ្គលោ ឧដ្ឋានផលូបជីវី នោ បុញ្ញផលូបជីវី ។ យស្ស បុគ្គលស្ស ឧដ្ឋហតោ ឃដតោ វាយមតោ អាជីវោ អភិនិព្វត្តតិ នោ បុញ្ញតោ អយំ វុច្ចតិ បុគ្គលោ ឧដ្ឋានផលូបជីវី នោ បុញ្ញផលូបជីវី ។ កតមោ ច បុគ្គលោ បុញ្ញផលូបជីវី នោ ឧដ្ឋានផលូបជីវី ។ បរនិម្មិតវសវត្តី ទេវេ ឧបាទាយ តទុបរិ ទេវា បុញ្ញផលូបជីវិនោ នោ ឧដ្ឋានផលូបជីវិនោ ។ កតមោ ច បុគ្គលោ ឧដ្ឋានផលូបជីវី ច បុញ្ញផលូបជីវី ច ។ យស្ស បុគ្គលស្ស ឧដ្ឋហតោ ឃដតោ វាយមតោ អាជីវោ អភិនិព្វត្តតិ បុញ្ញតោ ច អយំ វុច្ចតិ បុគ្គលោ ឧដ្ឋានផលូបជីវី ច បុញ្ញផលូបជីវី ច ។ កតមោ ច បុគ្គលោ នេវ ឧដ្ឋានផលូបជីវី នោ បុញ្ញផលូបជីវី ។



ជាបុគ្គលមានឧបេក្ខា មានស្មារតីដឹងខ្លួន បុគ្គលមិនពោលតិះដៀល ឲ្យបុគ្គលដែលគួរតិះដៀល តាមពិតប្រាកដតាមកាលគួរផង មិនពោលសរសើរ ឲ្យបុគ្គលដែលគួរសរសើរ តាមពិតប្រាកដតាមកាលគួរផង យ៉ាងនេះឯង ។

(១៦៨) បុគ្គលចិញ្ចឹមជីវិតដោយផលនៃការព្យាយាម មិនចិញ្ចឹមជីវិតដោយផលបុណ្យ តើដូចម្ដេច ។ កាលបុគ្គលណា ខំសង្វាត ប្រឹងប្រែង ព្យាយាម ការចិញ្ចឹមជីវិត ទើបកើតចំរើនឡើង មិនមែនកើតចំរើនឡើងដោយផលបុណ្យទេ នេះហៅថា បុគ្គលចិញ្ចឹមជីវិតដោយផលនៃការព្យាយាម មិនចិញ្ចឹមជីវិតដោយផលបុណ្យ ។ បុគ្គលចិញ្ចឹមជីវិតដោយផលបុណ្យ មិនចិញ្ចឹមជីវិតដោយផលនៃការព្យាយាម តើដូចម្ដេច ។ សំដៅយកពួកបរនិម្មិតវសវត្តីទេវតា ចំណែកទេវតាជាន់លើនៃពួកបរនិម្មិតវសវត្តីទេវតានោះ ឈ្មោះថា បុគ្គលចិញ្ចឹមជីវិតដោយផលបុណ្យ មិនចិញ្ចឹមជីវិតដោយផលនៃការព្យាយាម ។ បុគ្គលចិញ្ចឹមជីវិតដោយផលនៃការព្យាយាម ផងចិញ្ចឹមជីវិតដោយផលបុណ្យ តើដូចម្ដេច ។ កាលបុគ្គលណា ខំសង្វាត ប្រឹងប្រែង ព្យាយាម ការចិញ្ចឹមជីវិត ទើបកើតចំរើនឡើង ផងកើតចំរើនឡើង ដោយផលបុណ្យ នេះហៅថា បុគ្គលចិញ្ចឹមជីវិតដោយផលនៃការព្យាយាម ផងចិញ្ចឹមជីវិតដោយផលបុណ្យ ។ បុគ្គលមិនចិញ្ចឹមជីវិតដោយផលនៃការព្យាយាម ផងមិនចិញ្ចឹមជីវិតដោយផលបុណ្យ តើដូចម្ដេច ។

## ចតុក្កនិទ្ទេសោ

ទុគ្គតិំ វិនិបាតំ និរយំ ឧបបជ្ជតិ ឯវំ បុគ្គលោ តមោ ហោតិ តមបរាយនោ ។ កថញ្ច បុគ្គលោ តមោ ហោតិ ជោតិបរាយនោ ។ ឥធេកច្ចោ បុគ្គលោ នីចេ កុលេ បច្ចាជាតោ ហោតិ ចណ្ឌាលកុលេ វា នេសាទកុលេ វា វេណកុលេ វា រថការកុលេ វា បុក្កុសកុលេ វា ទលិទ្ទេ អប្បន្នបានភោជនេ កសិរវុត្តិកេ យត្ថ កសិរេន ឃាសច្ឆាទោ លព្ភតិ សោ ច ហោតិ ទុព្វណ្ណោ ទុទ្ទសិកោ ឱកោដិមកោ ពវ្ហាពាធោ កាណោ វា កុណី វា ខញ្ជោ វា បក្ខហតោ វា ន លាភី អន្នស្ស បានស្ស វត្ថស្ស យានស្ស មាលាគន្ធវិលេបនស្ស សេយ្យាវសថបទីបេយ្យស្ស សោ កាយេន សុចរិតំ ចរតិ វាចាយ សុចរិតំ ចរតិ មនសា សុចរិតំ ចរតិ សោ កាយេន សុចរិតំ ចរិត្វា វាចាយ សុចរិតំ ចរិត្វា មនសា សុចរិតំ ចរិត្វា កាយស្ស ភេទា បរម្មរណា សុគតិំ សគ្គំ លោកំ ឧបបជ្ជតិ ឯវំ បុគ្គលោ តមោ ហោតិ ជោតិបរាយនោ ។



## ចតុក្កនិទ្ទេស

ទុគ្គតិ វិនិបាត និរយ បុគ្គលងងឹត មានងងឹតប្រព្រឹត្តទៅខាងមុខ យ៉ាងនេះឯង ។ បុគ្គលងងឹត មានពន្លឺប្រព្រឹត្តទៅខាងមុខ តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ កើតក្នុងត្រកូលទាប គឺត្រកូលចណ្ឌាលក្តី ត្រកូលអ្នកនេសាទក្តី ត្រកូលអ្នកត្បាញផែងក្តី ត្រកូលជាងរទេះក្តី ត្រកូលអ្នកចាក់សម្រាមក្តី ជាត្រកូលខ្សត់ មានបាយទឹកនិងភោជនតិច ប្រព្រឹត្តចិញ្ចឹមជីវិតបានដោយលំបាក ដែលជាត្រកូលគេបាយនិងសំពត់ស្លៀកដណ្តប់បានដោយក្រ បុគ្គលនោះឯង ជាមនុស្សមានសម្បុរអាក្រក់ លំបាកមើល ជាបុគ្គលទាបទៀ មានអាពាធច្រើន ខ្វាក់ក្តី វិកលក្តី ខ្វិនខ្ទិន ជាអ្នកមិនបានបាយ ទឹក សំពត់ យាន ផ្កាកម្រង គ្រឿងក្រអូប គ្រឿងលាប ទីដេក ទីសំណាក់អាស្រ័យ គ្រឿងប្រទីប តែបុគ្គលនោះ ប្រព្រឹត្តសុចរិតដោយកាយ ប្រព្រឹត្តសុចរិតដោយវាចា ប្រព្រឹត្តសុចរិតដោយចិត្ត បុគ្គលនោះ លុះប្រព្រឹត្តសុចរិតដោយកាយ ប្រព្រឹត្តសុចរិតដោយវាចា ប្រព្រឹត្តសុចរិតដោយចិត្តហើយ លុះដល់បែកធ្លាយរាងកាយស្លាប់ទៅ តែងទៅកើត ក្នុងសុគតិសួគ៌ទេវលោក បុគ្គលងងឹត មានពន្លឺប្រព្រឹត្តទៅខាងមុខ យ៉ាងនេះឯង ។

កតមោ ច បុគ្គលោ ជោតិ ហោតិ តមបរាយណោ ។
ឥធេកច្ចោ បុគ្គលោ ឧច្ចេ កុលេ បច្ចាជាតោ
ហោតិ ខត្តិយមហាសាលកុលេ វា ព្រាហ្មណមហា-
សាលកុលេ វា គហបតិមហាសាលកុលេ វា អឌ្ឍេ
មហទ្ធនេ មហាភោគេ បហូតជាតរូបរជតេ បហូត-
វិត្តូបករណេ បហូតធនធញ្ញេ សោ ច ហោតិ អភិ-
រូបោ ទស្សនីយោ បាសាទិកោ បរមាយ វណ្ណ-
បោក្ខរតាយ សមន្នាគតោ លាភី អន្នស្ស បានស្ស
វត្ថស្ស យានស្ស មាលាគន្ធវិលេបនស្ស សេយ្យា-
វសថបទីបេយ្យស្ស សោ កាយេន ទុច្ចរិតំ ចរតិ
វាចាយ ទុច្ចរិតំ ចរតិ មនសា ទុច្ចរិតំ ចរតិ សោ
កាយេន ទុច្ចរិតំ ចរិត្វា វាចាយ ទុច្ចរិតំ ចរិត្វា
មនសា ទុច្ចរិតំ ចរិត្វា កាយស្ស ភេទា បរម្ម-
រណា អបាយំ ទុគ្គតឹ វិនិបាតំ និរយំ ឧបបជ្ជតិ
ឯវំ បុគ្គលោ ជោតិ ហោតិ តមបរាយណោ ។
កតមោ ច បុគ្គលោ ជោតិ ហោតិ ជោតិបរាយណោ ។



បុគ្គលក្តី មានពន្លឺតប្រព្រឹត្តទៅខាងមុខ តើដូចម្តេច ។ បុគ្គលខ្លះក្នុង
លោកនេះ កើតក្នុងត្រកូលខ្ពង់ខ្ពស់ គឺ ត្រកូលខត្តិយមហាសាលក្តី
ត្រកូលព្រាហ្មណមហាសាលក្តី ត្រកូលគហបតិមហាសាលក្តី ជាត្រ-
កូលស្តុកស្តម្ភ មានទ្រព្យច្រើន មានភោគៈច្រើន មានមាសនិងប្រាក់
ច្រើន មានទ្រព្យនិងគ្រឿងប្រើប្រាស់ច្រើន មានទ្រព្យនិងស្រូវច្រើន
បុគ្គលនោះ មានរូបល្អ គួរមើលរមិល គួរជ្រះថ្លា ប្រកបដោយ
សម្បុរនៃសរីរៈល្អក្រៃលែង ជាអ្នកបានបាយទឹក សំពត់ យាន ផ្កា
កម្រង គ្រឿងក្រអូប គ្រឿងលាប ទីដេក ទីសំណាក់អាស្រ័យ
និងគ្រឿងប្រទីប តែបុគ្គលនោះ ប្រព្រឹត្តទុច្ចរិតដោយកាយ ប្រព្រឹត្ត
ទុច្ចរិតដោយវាចា ប្រព្រឹត្តទុច្ចរិតដោយចិត្ត បុគ្គលនោះ លុះប្រព្រឹត្ត
ទុច្ចរិតដោយកាយ ប្រព្រឹត្តទុច្ចរិតដោយវាចា ប្រព្រឹត្តទុច្ចរិតដោយចិត្ត
ហើយ លុះដល់បែកធ្លាយរាងកាយស្លាប់ទៅ តែងទៅកើតក្នុងអបាយ
ទុគ្គតិ វិនិបាត នរក បុគ្គលក្តី មានពន្លឺតប្រព្រឹត្តទៅខាងមុខ យ៉ាង
នេះឯង ។ បុគ្គលក្តី មានពន្លឺប្រព្រឹត្តទៅខាងមុខ តើដូចម្តេច ។

ឥធេកច្ចោ បុគ្គលោ ឧច្ចេ កុលេ បច្ចាជាតោ ហោតិ ខត្តិយមហាសាលកុលេ វា ព្រាហ្មណមហាសាលកុលេ វា គហបតិមហាសាលកុលេ វា អឌ្ឍេ មហទ្ធនេ មហាភោគេ បហូតជាតរូបរជតេ បហូតវិត្តូបករណេ បហូតធនធញ្ញេ សោ ច ហោតិ អភិរូបោ ទស្សនីយោ បាសាទិកោ បរមាយ វណ្ណបោក្ខរតាយ សមន្នាគតោ លាភី អន្នស្ស បានស្ស វត្ថស្ស យានស្ស មាលាគន្ធវិលេបនស្ស សេយ្យាវសថបទីបេយ្យស្ស សោ កាយេន សុចរិតំ ចរតិ វាចាយ សុចរិតំ ចរតិ មនសា សុចរិតំ ចរតិ សោ កាយេន សុចរិតំ ចរិត្វា វាចាយ សុចរិតំ ចរិត្វា មនសា សុចរិតំ ចរិត្វា កាយស្ស ភេទា បរម្មរណា សុគតឹ សគ្គំ លោកំ ឧបបជ្ជតិ ឯវំ បុគ្គលោ ជោតិ ហោតិ ជោតិបរាយណោ ។

(១៣០) កថញ្ច បុគ្គលោ ឱណតោណតោ ហោតិ ។បេ។ ឯវំ បុគ្គលោ ឱណតោណតោ ហោតិ ។ កថញ្ច បុគ្គលោ ឱណតុណ្ណតោ ហោតិ ។បេ។ ឯវំ បុគ្គលោ ឱណតុណ្ណតោ ហោតិ ។



បុគ្គលខ្លះ ក្នុងលោកនេះ កើតក្នុងត្រកូលខ្ពង់ខ្ពស់ គឺត្រកូលខត្តិយមហាសាលក្តី ត្រកូលព្រាហ្មណមហាសាលក្តី ត្រកូលគហបតិមហាសាលក្តី ជាត្រកូលស្តុកស្តម្ភ មានទ្រព្យច្រើន មានភោគៈច្រើន មានមាសនិងប្រាក់ច្រើន មានទ្រព្យនិងគ្រឿងប្រើប្រាស់ច្រើន មានទ្រព្យនិងស្រូវច្រើន បុគ្គលនោះ មានរូបល្អ គួរមើល គួរជ្រះថ្លា ប្រកបដោយសម្បុរនិងសរីរៈល្អក្រៃលែង ជាអ្នកបានបាយ ទឹក សំពត់ យាន ផ្កាកម្រង គ្រឿងក្រអូប គ្រឿងលាប ទីដេក ទីសំណាក់អាស្រ័យ និងគ្រឿងប្រទីប បុគ្គលនោះ ប្រព្រឹត្តសុចរិតដោយកាយ ប្រព្រឹត្តសុចរិតដោយវាចា ប្រព្រឹត្តសុចរិតដោយចិត្ត បុគ្គលនោះ លុះប្រព្រឹត្តសុចរិតដោយកាយ ប្រព្រឹត្តសុចរិតដោយវាចា ប្រព្រឹត្តសុចរិតដោយចិត្ត ហើយ លុះបែកធ្លាយរាងកាយស្លាប់ទៅ តែងទៅកើតក្នុងសុគតិសួគ៌ទេវលោក បុគ្គលនេះ មានពន្លឺប្រព្រឹត្តទៅខាងមុខ យ៉ាងនេះឯង ។

(១៣០) បុគ្គលឱនចុះហើយនៅឱនចុះទៀត តើដូចម្តេច ។បេ។ បុគ្គលឱនចុះហើយនៅឱនចុះទៀត យ៉ាងនេះឯង ។ បុគ្គលឱនចុះហើយងើបឡើង តើដូចម្តេច ។បេ។ បុគ្គលឱនចុះហើយងើបឡើង យ៉ាងនេះឯង ។

កតមញ្ច បុគ្គលោ ឧណ្ណតោណតោ ហោតិ ។ បេ ។
ឯវំ បុគ្គលោ ឧណ្ណតោណតោ ហោតិ ។ កតមញ្ច
បុគ្គលោ ឧណ្ណតុណ្ណតោ ហោតិ ។ បេ ។ ឯវំ បុគ្គលោ
ឧណ្ណតុណ្ណតោ ហោតិ ។

(១៣១) តត្ថ កតមេ ចត្តារោ រុក្ខូបមា បុគ្គលា ។
ចត្តារោ រុក្ខា ផេគ្គុ សារបរិវារោ សារោ ផេគ្គុបរិវារោ
ផេគ្គុ ផេគ្គុបរិវារោ សារោ សារបរិវារោ ។

(១៣២) ឯវមេវ ចត្តារោមេ រុក្ខូបមា បុគ្គលា
សន្តោ សំវិជ្ជមានា លោកស្មឹ ។ កតមេ ចត្តារោ ។
ផេគ្គុ សារបរិវារោ សារោ ផេគ្គុបរិវារោ ផេគ្គុ ផេគ្គុ-
បរិវារោ សារោ សារបរិវារោ ។ កតមញ្ច បុគ្គលោ
ផេគ្គុ ហោតិ សារបរិវារោ ។ ឥធេកច្ចោ បុគ្គលោ
ទុស្សីលោ ហោតិ បាបធម្មោ បរិសា ច ខ្វស្ស
ហោតិ សីលវតី កល្យាណធម្មា ឯវំ បុគ្គលោ ផេគ្គុ
ហោតិ សារបរិវារោ សេយ្យថាបិ សោ រុក្ខោ
ផេគ្គុ សារបរិវារោ តថូបមោ អយំ បុគ្គលោ ។



បុគ្គលដើរឡើងហើយ ចុះទៅវិញ តើដូចម្តេច ។ បេ ។ បុគ្គល
ដើរឡើងហើយ ចុះទៅវិញ យ៉ាងនេះឯង ។ បុគ្គលដើរឡើង
ហើយ ដើរឡើងទៀត តើដូចម្តេច ។ បេ ។ បុគ្គលដើរឡើង
ហើយ ដើរឡើងទៀត យ៉ាងនេះឯង ។

(១៣១) បណ្តាបុគ្គលទាំងនោះ បុគ្គល ៤ ពួក ប្រៀបដោយ
ដើមឈើ តើដូចម្តេច ។ ឈើមាន ៤ ពួក គឺឈើស្រាយមានឈើ
ខ្លឹមជាបរិវារ ១ ឈើខ្លឹមមានឈើស្រាយជាបរិវារ ១ ឈើស្រាយមាន
ឈើស្រាយជាបរិវារ ១ ឈើខ្លឹមមានឈើខ្លឹមជាបរិវារ ១ ។

(១៣២) បុគ្គល ៤ ពួក ប្រៀបដោយដើមឈើនេះ រមែងមាន
ក្នុងលោក យ៉ាងនេះឯង ។ បុគ្គល ៤ ពួក តើដូចម្តេច ។ គឺ
បុគ្គលដូចឈើស្រាយមានឈើខ្លឹមជាបរិវារ ១ បុគ្គលដូចឈើខ្លឹមមានឈើ
ស្រាយជាបរិវារ ១ បុគ្គលដូចឈើស្រាយមានឈើស្រាយជាបរិវារ ១
បុគ្គលដូចឈើខ្លឹមមានឈើខ្លឹមជាបរិវារ ១ ។ បុគ្គលដូចឈើស្រាយមាន
ឈើខ្លឹមជាបរិវារ តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ជាអ្នក
ទ្រុស្តសីល មានធម៌អាក្រក់ តែបរិស័ទរបស់បុគ្គលនោះ មានសីល
មានធម៌ល្អ បុគ្គលដូចឈើស្រាយមានឈើខ្លឹមជាបរិវារ យ៉ាងនេះឯង
ឈើនោះស្រាយ មានឈើខ្លឹមជាបរិវារ មានឧបមា យ៉ាងណាមិញ
បុគ្គលនេះ ក៏មានឧបមេយ្យ យ៉ាងនោះដែរ ។ បុគ្គលដូចឈើខ្លឹម

[ ១៣៣ ] កតមោ ច បុគ្គលោ រូបប្បមាណោ រូបប្បសន្នោ ។ ឥធេកច្ចោ បុគ្គលោ អារោហំ វា ទិស្វា បរិណាហំ វា ទិស្វា សណ្ឋានំ វា ទិស្វា បារិបូរឹ វា ទិស្វា តត្ថ បមាណំ គហេត្វា បសាទំ ជនេតិ អយំ វុច្ចតិ បុគ្គលោ រូបប្បមាណោ រូបប្បសន្នោ ។ កតមោ ច បុគ្គលោ ឃោសប្បមាណោ ឃោសប្បសន្នោ ។ ឥធេកច្ចោ បុគ្គលោ បរវណ្ណនាយ បរថោមនាយ បរបសំសនាយ បរវណ្ណហារិកាយ តត្ថ បមាណំ គហេត្វា បសាទំ ជនេតិ អយំ វុច្ចតិ បុគ្គលោ ឃោសប្បមាណោ ឃោសប្បសន្នោ ។ កតមោ ច បុគ្គលោ លូខប្បមាណោ លូខប្បសន្នោ ។ ឥធេកច្ចោ បុគ្គលោ ចីវរលូខំ វា ទិស្វា បត្តលូខំ វា ទិស្វា សេនាសនលូខំ វា ទិស្វា វិវិធំ វា ទុក្ករការិកំ ទិស្វា តត្ថ បមាណំ គហេត្វា បសាទំ ជនេតិ អយំ វុច្ចតិ បុគ្គលោ លូខប្បមាណោ លូខប្បសន្នោ ។



[ ១៣៣ ] បុគ្គលកាន់តាមគន្លងរូប ជ្រះថ្លាព្រោះរូប តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ឃើញកំពស់ក្តី ឃើញទំហំក្តី ឃើញទ្រង់ទ្រាយក្តី ឃើញរូបដ៏ពេញលេញក្តី ក៏កាន់យកនូវសេចក្តីប៉ាន់ ក្នុងចំណែក មានកំពស់ជាដើមនោះ ហើយញុំាងសេចក្តីជ្រះថ្លា ឲ្យកើត នេះហៅថា បុគ្គលកាន់តាមគន្លងរូប ជ្រះថ្លាព្រោះរូប ។ បុគ្គលកាន់តាមគន្លងសំឡេង ជ្រះថ្លាព្រោះសំឡេង តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ កាលបើមានការពណ៌នារបស់បុគ្គលដទៃ ការលើកតំកើងរបស់បុគ្គលដទៃ ការសរសើររបស់បុគ្គលដទៃ ការនាំទៅនូវគុណរបស់បុគ្គលដទៃ ក៏កាន់យកនូវសេចក្តីប៉ាន់ ក្នុងចំណែកមានការពណ៌នារបស់បុគ្គលដទៃជាដើមនោះ ហើយញុំាងសេចក្តីជ្រះថ្លា ឲ្យកើត នេះហៅថា បុគ្គលកាន់តាមគន្លងសំឡេង ជ្រះថ្លាព្រោះសំឡេង ។ បុគ្គលកាន់តាមគន្លងគ្រឿងសៅហ្មង ជ្រះថ្លាព្រោះគ្រឿងសៅហ្មង តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ឃើញចីវរសៅហ្មងក្តី ឃើញបាត្រសៅហ្មងក្តី ឃើញសេនាសនៈសៅហ្មងក្តី ឃើញអំពើដែលបុគ្គលធ្វើបានដោយកម្រមានប្រការផ្សេងៗក្តី ក៏កាន់យកសេចក្តីប៉ាន់ ក្នុងចំណែកមានចីវរសៅហ្មងជាដើមនោះ ហើយញុំាងសេចក្តីជ្រះថ្លា ឲ្យកើត នេះហៅថា បុគ្គលកាន់តាមគន្លងគ្រឿងសៅហ្មង ជ្រះថ្លាព្រោះគ្រឿងសៅហ្មង ។

អត្តនា ន សីលសម្បន្នោ ហោតិ បរំ សីលសម្បទាយ សមាទបេតិ អត្តនា ន សមាធិសម្បន្នោ ហោតិ បរំ សមាធិសម្បទាយ សមាទបេតិ អត្តនា ន បញ្ញាសម្បន្នោ ហោតិ បរំ បញ្ញាសម្បទាយ សមាទបេតិ អត្តនា ន វិមុត្តិសម្បន្នោ ហោតិ បរំ វិមុត្តិសម្បទាយ សមាទបេតិ អត្តនា ន វិមុត្តិញាណទស្សនសម្បន្នោ ហោតិ បរំ វិមុត្តិញាណទស្សនសម្បទាយ សមាទបេតិ អយំ បុគ្គលោ បរហិតាយ បដិបន្នោ ហោតិ នោ អត្តហិតាយ ។ កតមោ ច បុគ្គលោ អត្តហិតាយ ចេវ បដិបន្នោ ហោតិ បរហិតាយ ច ។ ឥធេកច្ចោ បុគ្គលោ អត្តនា ច សីលសម្បន្នោ ហោតិ បរញ្ច សីលសម្បទាយ សមាទបេតិ អត្តនា ច សមាធិសម្បន្នោ ហោតិ បរញ្ច សមាធិសម្បទាយ សមាទបេតិ អត្តនា ច បញ្ញាសម្បន្នោ ហោតិ បរញ្ច បញ្ញាសម្បទាយ សមាទបេតិ អត្តនា ច វិមុត្តិសម្បន្នោ ហោតិ បរញ្ច វិមុត្តិសម្បទាយ សមាទបេតិ អត្តនា ច វិមុត្តិញាណទស្សនសម្បន្នោ ហោតិ



ជាអ្នកមិនបរិបូណ៌សីលដោយខ្លួនឯង បបួលអ្នកដទៃ ឲ្យបរិបូណ៌សីល មិនបរិបូណ៌សមាធិដោយខ្លួនឯង បបួលអ្នកដទៃ ឲ្យបរិបូណ៌សមាធិ មិនបរិបូណ៌បញ្ញាដោយខ្លួនឯង បបួលអ្នកដទៃ ឲ្យបរិបូណ៌បញ្ញា មិនបរិបូណ៌វិមុត្តិដោយខ្លួនឯង បបួលអ្នកដទៃ ឲ្យបរិបូណ៌វិមុត្តិ មិនបរិបូណ៌វិមុត្តិញាណទស្សនៈដោយខ្លួនឯង បបួលអ្នកដទៃ ឲ្យបរិបូណ៌វិមុត្តិញាណទស្សនៈ បុគ្គលប្រតិបត្តិ ដើម្បីប្រយោជន៍បុគ្គលដទៃ មិនប្រតិបត្តិ ដើម្បីប្រយោជន៍ខ្លួនឯង យ៉ាងនេះឯង ។ បុគ្គលប្រតិបត្តិ ដើម្បីប្រយោជន៍ខ្លួនផង ដើម្បីប្រយោជន៍បុគ្គលដទៃផង តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ជាអ្នកបរិបូណ៌សីលដោយខ្លួនឯងផង បបួលអ្នកដទៃ ឲ្យបរិបូណ៌សីលផង បរិបូណ៌សមាធិដោយខ្លួនឯងផង បបួលអ្នកដទៃ ឲ្យបរិបូណ៌សមាធិផង បរិបូណ៌បញ្ញាដោយខ្លួនឯងផង បបួលអ្នកដទៃ ឲ្យបរិបូណ៌បញ្ញាផង បរិបូណ៌វិមុត្តិដោយខ្លួនឯងផង បបួលអ្នកដទៃឲ្យបរិបូណ៌វិមុត្តិផង បរិបូណ៌វិមុត្តិញាណទស្សនៈដោយខ្លួនឯងផង

បរញ្ច វិមុត្តិញាណទស្សនសម្បទាយ សមាទបេតិ អយំ បុគ្គលោ អត្តហិតាយ ចេវ បដិបន្នោ ហោតិ បរហិតាយ ច ។ កតមោ ច បុគ្គលោ នេវ អត្តហិតាយ បដិបន្នោ ហោតិ នោ បរហិតាយ ។ ឥធេកច្ចោ បុគ្គលោ អត្តនា ន សីលសម្បន្នោ ហោតិ នោ បរំ សីលសម្បទាយ សមាទបេតិ អត្តនា ន សមាធិសម្បន្នោ ហោតិ នោ បរំ សមាធិសម្បទាយ សមាទបេតិ អត្តនា ន បញ្ញាសម្បន្នោ ហោតិ នោ បរំ បញ្ញាសម្បទាយ សមាទបេតិ អត្តនា ន វិមុត្តិសម្បន្នោ ហោតិ នោ បរំ វិមុត្តិសម្បទាយ សមាទបេតិ អត្តនា ន វិមុត្តិញាណទស្សនសម្បន្នោ ហោតិ នោ បរំ វិមុត្តិញាណទស្សនសម្បទាយ សមាទបេតិ អយំ បុគ្គលោ នេវ អត្តហិតាយ បដិបន្នោ ហោតិ នោ បរហិតាយ ។

(១៣៨) កតមោ ច បុគ្គលោ អត្តន្តបោ ហោតិ អត្តបរិតាបនានុយោគមនុយុត្តោ ។ ឥធេកច្ចោ បុគ្គលោ អចេលកោ ហោតិ មុត្តាចារោ ហត្ថាវលេខនោ



បបួលអ្នកដទៃឲ្យបរិបូណ៌វិមុត្តិញាណទស្សនៈផង បុគ្គលប្រតិបត្តិ ដើម្បីប្រយោជន៍ខ្លួនឯងផង ប្រតិបត្តិ ដើម្បីប្រយោជន៍បុគ្គលដទៃផង យ៉ាងនេះឯង ។ បុគ្គលមិនប្រតិបត្តិ ដើម្បីប្រយោជន៍ខ្លួនឯង ទាំងមិនប្រតិបត្តិ ដើម្បីប្រយោជន៍បុគ្គលដទៃ តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ មិនបរិបូណ៌សីលដោយខ្លួនឯង ទាំងមិនបបួលអ្នកដទៃឲ្យបរិបូណ៌សីល មិនបរិបូណ៌សមាធិដោយខ្លួនឯង ទាំងមិនបបួលអ្នកដទៃ ឲ្យបរិបូណ៌សមាធិ មិនបរិបូណ៌បញ្ញាដោយខ្លួនឯង ទាំងមិនបបួលអ្នកដទៃឲ្យបរិបូណ៌បញ្ញា មិនបរិបូណ៌វិមុត្តិដោយខ្លួនឯង ទាំងមិនបបួលអ្នកដទៃឲ្យបរិបូណ៌វិមុត្តិ មិនបរិបូណ៌វិមុត្តិញាណទស្សនៈដោយខ្លួនឯង ទាំងមិនបបួលអ្នកដទៃ ឲ្យបរិបូណ៌វិមុត្តិញាណទស្សនៈ បុគ្គលមិនប្រតិបត្តិ ដើម្បីប្រយោជន៍ខ្លួនឯង ទាំងមិនប្រតិបត្តិ ដើម្បីប្រយោជន៍បុគ្គលដទៃ យ៉ាងនេះឯង ។

(១៣៨) បុគ្គល ដុតកំដៅខ្លួនឯង ប្រកបរឿយៗការព្យាយាមដុតកំដៅខ្លួនឯង តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ គ្មានសំពត់ (អចេលក) លះបង់មារយាទល្អ ស៊ីលិទ្ធដៃ ( ទាំង [illegible] ដោយ

## អភិធម្មបិដកេ បុគ្គលបញ្ញត្តិ

ន ឯហិភទន្តិកោ ន តិដ្ឋភទន្តិកោ នាភិហដំ ន ឧទ្ទិស្សកតំ ន និមន្តនំ សាទិយតិ សោ ន កុម្ភិមុខា បដិគ្គណ្ហាតិ ន កឡោបិមុខា បដិគ្គណ្ហាតិ ន ឯឡកមន្តរំ ន ទណ្ឌមន្តរំ ន មុសលមន្តរំ ន ទ្វិន្នំ ភុញ្ជមានានំ ន គព្ភិនិយា ន បាយមានាយ ន បុរិសន្តរគតាយ ន សង្កិត្តីសុ ន យត្ថ សា ឧបដ្ឋិតោ ហោតិ ន យត្ថ មក្ខិកា សណ្ឌសណ្ឌចារិនី ន មច្ឆំ ន មំសំ ន សុរំ ន មេរយំ ន ថុសោទកំ បិវតិ សោ ឯកាគារិកោ វា ហោតិ ឯកាលោបិកោ ទ្វាគារិកោ វា ហោតិ ទ្វាលោបិកោ ។បេ។ សត្តាគារិកោ វា ហោតិ សត្តាលោបិកោ ឯកិស្សាបិ ទត្តិយា យាបេតិ ទ្វីហិបិ ទត្តីហិ យាបេតិ ។បេ។ សត្តហិបិ ទត្តីហិ

## អភិធម្មបិដក បុគ្គលបញ្ញត្តិ

(ប្រាមដៃ) បើមានគេហៅថា ចូរចូលមក ក៏មិនមក បើគេឃាត់ថា ចូរឈប់ ក៏មិនឈប់ មិនត្រេកអរនឹងភត្តដែលគេនាំមកមុន មិនត្រេកអរនឹងភត្តដែលគេធ្វើចំពោះខ្លួន មិនត្រេកអរនឹងកិច្ចនិមន្ត បុគ្គលនោះមិនទទួលភត្តអំពីមាត់ឆ្នាំង មិនទទួលភត្តអំពីមាត់កញ្ជើ មិនទទួលភត្តដែលគេនាំមកកន្លងនឹងធរណីទ្វារ មិនទទួលភត្តដែលគេនាំមកកន្លងនឹងកំណាត់ឈើ មិនទទួលភត្តដែលគេនាំមកកន្លងនឹងអង្រែ មិនទទួលភត្តរបស់មនុស្សពីរនាក់កំពុងបរិភោគ មិនទទួលភត្តរបស់ស្ត្រីមានគភ៌ មិនទទួលភត្តរបស់ស្ត្រីដែលកំពុងបំបៅកូន មិនទទួលភត្តរបស់ស្ត្រីដែលកំពុងនៅរួមនឹងបុរស មិនទទួលភត្តដែលអ្នកស្រុកនាំគ្នាសន្សំសមក មិនទទួលភត្តក្នុងទីដែលមានឆ្កែចាំ មិនទទួលភត្តក្នុងទីដែលមានរុយរោម មិនស៊ីត្រី មិនស៊ីសាច់ មិនផឹកស្រា មិនផឹកមេរ័យ មិនផឹកទឹកចង្រាំដែលត្រាំដោយស្រូវទាំងកន្ទក់ បុគ្គលនោះទទួលភត្តចំពោះតែផ្ទះមួយ ញ៉ាំងអត្តភាពឲ្យប្រព្រឹត្តទៅដោយដុំបាយមួយពំនូតខ្លះ ទទួលភត្តចំពោះតែផ្ទះពីរ ញ៉ាំងអត្តភាព ឲ្យប្រព្រឹត្តទៅដោយដុំបាយពីរពំនូតខ្លះ ។បេ។ ទទួលភត្តចំពោះតែផ្ទះ ៧ ញ៉ាំងអត្តភាពឲ្យប្រព្រឹត្តទៅដោយដុំបាយ ៧ ពំនូតខ្លះ ញ៉ាំងអត្តភាពឲ្យប្រព្រឹត្តទៅដោយភត្ត ១ ភាជន៍តូចខ្លះ ញ៉ាំងអត្តភាពឲ្យប្រព្រឹត្តទៅដោយភត្ត ២ ភាជន៍តូចខ្លះ ។បេ។ ញ៉ាំងអត្តភាពឲ្យប្រព្រឹត្តទៅដោយភត្ត ៧ ភាជន៍តូចខ្លះ

យាបេតិ ឯកាហិកម្បិ អាហារំ អាហារេតិ ទ្វីហិ-
កម្បិ អាហារំ អាហារេតិ ។បេ។ សត្តាហិកម្បិ
អាហារំ អាហារេតិ ឥតិ ឯវរូបំ អឌ្ឍមាសិកម្បិ
បរិយាយភត្តភោជនានុយោគមនុយុត្តោ វិហរតិ សោ
សាកភក្ខោបិ ហោតិ សាមាកភក្ខោបិ ហោតិ
នីវារភក្ខោបិ ហោតិ ទទ្ទុលភក្ខោបិ ហោតិ
ហដភក្ខោ(១)បិ ហោតិ កណភក្ខោបិ ហោតិ
អាចាមភក្ខោបិ ហោតិ បិញ្ញាកភក្ខោបិ ហោតិ
តិណភក្ខោបិ ហោតិ គោមយភក្ខោបិ ហោតិ
វនមូលផលាហារោ យាបេតិ បវត្តផលភោជី សោ
សាណានិបិ ធារេតិ មសាណានិបិ ធារេតិ ឆវទុ-
ស្សានិបិ ធារេតិ បំសុកូលានិបិ ធារេតិ តិរីដានិបិ
ធារេតិ អជិនម្បិ ធារេតិ អជិនក្ខិបម្បិ ធារេតិ កុស-
ចីរម្បិ ធារេតិ វាកចីរម្បិ ធារេតិ ផលកចីរម្បិ ធារេតិ
កេសកម្ពលម្បិ ធារេតិ វាលកម្ពលម្បិ ធារេតិ

១ ឱ. ហតភក្ខោ ។



ស៊ីអាហាររំលង ១ ថ្ងៃខ្លះ ស៊ីអាហាររំលង ២ ថ្ងៃខ្លះ ។បេ។ ស៊ី
អាហាររំលង ៧ ថ្ងៃខ្លះ បុគ្គលប្រកបខ្លួនសេចក្តីព្យាយាម ក្នុងការផ្លាស់
ប្តូរការបរិភោគភត្តរំលងកន្លះខែខ្លះ មានសភាពយ៉ាងនេះ ដូច្នេះឯង
បុគ្គលនោះ មានបន្លែស្រស់ជាអាហារខ្លះ មានពុកស្រងែជាអាហារខ្លះ
មានស្កួយជាអាហារខ្លះ មានកំទេចស្បែក (ចំរៀកស្បែក) ជាអា-
ហារខ្លះ មានស្លែ ឬសារាយជាអាហារខ្លះ មានកន្ទក់ជាអាហារខ្លះ
មានបាយក្តាំងជាអាហារខ្លះ មានម្សៅជាអាហារខ្លះ មានស្មៅជាអាហារ
ខ្លះ មានអាចម៍គោស្រស់ជាអាហារខ្លះ មានមើមនិងផ្លែឈើក្នុងព្រៃជា
អាហារខ្លះ បរិភោគតែផ្លែឈើដែលជ្រុះឯងខ្លះ បុគ្គលនោះ ទ្រទ្រង់
សំពត់សំបកធ្មៃខ្លះ ទ្រទ្រង់សំពត់ដែលគេត្បាញលាយគ្នាខ្លះ ទ្រទ្រង់
សំពត់ដែលបកចេញអំពីសាកសពខ្លះ ទ្រទ្រង់សំពត់បង្សុកូលខ្លះ ទ្រ-
ទ្រង់សំពត់សំបកឈើខ្លះ ទ្រទ្រង់ស្បែកខ្លាខ្លះ ទ្រទ្រង់ស្បែកខ្លាទាំង
ក្រចកខ្លះ ទ្រទ្រង់ស្បូវក្រង់ខ្លះ ទ្រទ្រង់សំពត់ត្បាញដោយសំបកព្រៅខ្លះ
ទ្រទ្រង់ចម្រៀកក្តារជាសំពត់ខ្លះ ទ្រទ្រង់សំពត់កម្ពលដែលត្បាញដោយ
សក់មនុស្សខ្លះ ទ្រទ្រង់សំពត់កម្ពលដែលត្បាញ ដោយកន្ទុយសេះខ្លះ

ឧលូកបក្ខម្បិ ធារេតិ កេសមស្សុលោចកោបិ[1] ហោតិ កេសមស្សុលោចនានុយោគមនុយុត្តោ ឧព្ភដ្ឋកោបិ ហោតិ អាសនប្បដិក្ខិត្តោ ឧក្កុដិកោបិ ហោតិ ឧក្កុដិកប្បធានមនុយុត្តោ កណ្ដកាបស្សយិកោបិ ហោតិ កណ្ដកាបស្សយេ សេយ្យំ កប្បេតិ សាយំតតិយកម្បិ ឧទកោរោហនានុយោគមនុយុត្តោ វិហរតិ ឥតិ ឯវរូបំ អនេកវិហិតំ កាយស្ស អាតាបនបរិតាបនានុយោគមនុយុត្តោ វិហរតិ ឯវំ បុគ្គលោ អត្តន្តបោ ហោតិ អត្តបរិតាបនានុយោគមនុយុត្តោ ។ កថញ្ច បុគ្គលោ បរន្តបោ ហោតិ បរបរិតាបនានុយោគមនុយុត្តោ ។ ឥធេកច្ចោ បុគ្គលោ ឱរព្ភិកោ ហោតិ សូករិកោ មាគវិកោ សាកុណិកោ លុទ្ទោ មច្ឆឃាតកោ ចោរោ ចោរឃាតកោ គោឃាតកោ ពន្ធនាគារិកោ យេ វា បនញ្ញេបិ កេចិ កុរូរកម្មន្តា

១ ម. កេសមស្សុលោចនោបិ ។



ទ្រទ្រង់សំពត់ដែលត្បាញ ដោយស្លាបមៀមខ្លះ ដុតសក់និងពុកមាត់ ប្រព្រឹត្តកាន់វត្តកិរិយាព្យាយាមដុតសក់និងពុកមាត់ខ្លះ ឈរច្រើន ហាមឃាត់នូវអាសនៈខ្លះ អង្គុយច្រហោង ប្រព្រឹត្តកាន់វត្តកិរិយាព្យាយាមអង្គុយច្រហោងខ្លះ ដេកលើបន្លា សម្រេចការដេកលើបន្លាខ្លះ ប្រព្រឹត្តកាន់វត្តចុះត្រាំទឹក ១ ថ្ងៃ ៣ ដង គឺព្រឹក ថ្ងៃត្រង់ ល្ងាចខ្លះ បុគ្គលប្រកបនូវការព្យាយាមដុតកំដៅកាយច្រើនប្រការ មានសភាពយ៉ាងនេះ ដូច្នេះឯង បុគ្គល ដុតកំដៅខ្លួនឯង ប្រកបនូវការព្យាយាម ដើម្បីដុតកំដៅខ្លួនឯង យ៉ាងនេះឯង ។ បុគ្គល ដុតកំដៅអ្នកដទៃ ប្រកបនូវការព្យាយាមដើម្បីដុតកំដៅអ្នកដទៃ តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ជាអ្នកសម្លាប់ចៀម សម្លាប់ជ្រូក សម្លាប់ម្រឹគ សម្លាប់សត្វស្លាប ជាព្រាន សម្លាប់ត្រី ជាចោរ ជាអ្នកសម្លាប់ចោរ សម្លាប់គោ ជានាយគុក ពុំនោះសោត បុគ្គលដទៃណាមួយ ជាអ្នកធ្វើការអាក្រក់

ឯវំ បុគ្គលោ បរន្តបោ ហោតិ បរបរិតាបនានុយោគមនុយុត្តោ ។ កតមោ ច បុគ្គលោ អត្តន្តបោ ច ហោតិ អត្តបរិតាបនានុយោគមនុយុត្តោ បរន្តបោ ច បរបរិតាបនានុយោគមនុយុត្តោ ។ ឥធេកច្ចោ បុគ្គលោ រាជា វា ហោតិ ខត្តិយោ មុទ្ធាភិសិត្តោ ព្រាហ្មណោ វា មហាសាលោ ។ សោ បុរត្ថិមេន នគរស្ស នវំ សន្ថាគារំ ការាបេត្វា កេសមស្សុំ ឱហារេត្វា ខរាជិនំ និវាសេត្វា សប្បិតេលេន កាយំ អព្ភញ្ជិត្វា មគវិសាណេន បិដ្ឋិំ កណ្ឌុវមានោ សន្ថាគារំ(១) បវិសតិ សទ្ធិំ មហេសិយា ព្រាហ្មណេន ច បុរោហិតេន ។ សោ តត្ថ អនន្តរហិតាយ ភូមិយា ហរិតុបលិត្តាយ សេយ្យំ កប្បេតិ ។ ឯកិស្សា គាវិយា សរូបវច្ឆាយ យំ ឯកិស្សា ថនេ ខីរំ ហោតិ តេន រាជា យាបេតិ ។ យំ ទុតិយស្សា ថនេ ខីរំ ហោតិ តេន មហេសី យាបេតិ ។ យំ តតិយស្សា ថនេ ខីរំ ហោតិ តេន ព្រាហ្មណោ បុរោហិតោ យាបេតិ ។ យំ ចតុត្ថស្សា

១ ម. យញ្ញាគារំ ។



បុគ្គលដុតកំដៅអ្នកដទៃ ប្រកបខ្ជាប់ការព្យាយាម ដើម្បីដុតកំដៅអ្នកដទៃ យ៉ាងនេះឯង ។ បុគ្គលដុតកំដៅខ្លួនឯង ប្រកបខ្ជាប់ការព្យាយាម ដើម្បីដុតកំដៅខ្លួនឯង ដុតកំដៅអ្នកដទៃ ប្រកបខ្ជាប់ការព្យាយាមដើម្បីដុតកំដៅអ្នកដទៃផង តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ជាក្សត្រទ្រង់រាជ្យ ដែលបានមុទ្ធាភិសេករួចហើយក្តី ជាព្រាហ្មណមហាសាលក្តី ព្រះរាជា ឬព្រាហ្មណ៍នោះ ឲ្យគេសាងរោងសម្រាប់ខ្លួនធ្វើយញ្ញ ទិសខាងកើតនៃនគរ ហើយកោរសក់ ពុកមាត់ និងពុកចង្កា ស្លៀកដណ្តប់ស្បែកខ្លាទាំងក្រចក លាបប្រឡាក់កាយដោយទឹកដោះថ្លា និងប្រេង អេះខ្នងដោយស្នែងទ្រើង ហើយចូលទៅកាន់រោងសម្រាប់ធ្វើយញ្ញ ព្រមទាំងមហេសីនិងព្រាហ្មណ៍ជាបុរោហិត ព្រះរាជា ឬព្រាហ្មណ៍នោះ ក៏សម្រេចនូវការដេកលើផែនដី ប្រាសចាកកម្រាល ដែលគេលាបពណ៌ខៀវក្នុងទីនោះ ទឹកដោះណា មានក្នុងដោះទី ១ នៃមេគោទ្រុំដែលមានកូនខ្ចី ព្រះរាជាក៏ចិញ្ចឹមជីវិត ដោយទឹកដោះនោះ ទឹកដោះណា មានក្នុងដោះទី ២ មហេសីក៏ចិញ្ចឹមជីវិត ដោយទឹកដោះនោះ ទឹកដោះណា មានក្នុងដោះទី ៣ ព្រាហ្មណ៍ជាបុរោហិតក៏ចិញ្ចឹមជីវិតដោយទឹកដោះនោះ ទឹកដោះណា មានក្នុងដោះទី ៤ ក៏បូជាភ្លើងដោយទឹកដោះនោះ

ព្រហ្មភូតេន អត្តនា វិហរតិ ។ ឥធ តថាគតោ លោកេ ឧប្បជ្ជតិ អរហំ សម្មាសម្ពុទ្ធោ វិជ្ជាចរណសម្បន្នោ សុគតោ លោកវិទូ អនុត្តរោ បុរិសទម្មសារថិ សត្ថា ទេវមនុស្សានំ ពុទ្ធោ ភគវា ។ សោ ឥមំ លោកំ សទេវកំ សមារកំ សព្រហ្មកំ សស្សមណព្រាហ្មណឹ បជំ សទេវមនុស្សំ សយំ អភិញ្ញា សច្ឆិកត្វា បវេទេតិ ។ សោ ធម្មំ ទេសេតិ អាទិកល្យាណំ មជ្ឈេកល្យាណំ បរិយោសានកល្យាណំ សាត្ថំ សព្យញ្ជនំ កេវលបរិបុណ្ណំ បរិសុទ្ធំ ព្រហ្មចរិយំ បកាសេតិ ។ តំ ធម្មំ សុណាតិ គហបតិ វា គហបតិបុត្តោ វា អញ្ញតរស្មឹ វា កុលេ បច្ចាជាតោ ។ សោ តំ ធម្មំ សុត្វា តថាគតេ សទ្ធំ បដិលភតិ ។





សម្រេចសម្រាន្តទៅក្នុងបច្ចុប្បន្ន តើដូចម្តេច ។ ព្រះតថាគត កើតឡើងក្នុងលោកនេះ ព្រះអង្គឆ្ងាយចាកសេចក្ដីសៅហ្មងគ្រប់យ៉ាង ព្រះអង្គត្រាស់ដឹងនូវញេយ្យធម៌ទាំងពួង ដោយប្រពៃចំពោះព្រះអង្គ ព្រះអង្គបរិបូណ៌ដោយវិជ្ជានិងចរណៈ ព្រះអង្គមានដំណើរល្អទៅកាន់ព្រះនិព្វាន ព្រះអង្គទ្រង់ជ្រាបច្បាស់នូវត្រៃលោក ព្រះអង្គប្រសើរដោយសីលាទិគុណរកបុគ្គលណាមួយស្មើគ្មាន ព្រះអង្គជាអ្នកទូន្មាននូវបុរសដែលគួរទូន្មានបាន ដូចនាយសារថី ព្រះអង្គជាគ្រូនៃទេវតានិងមនុស្សទាំងឡាយ ព្រះអង្គបានត្រាស់ដឹងនូវអរិយសច្ចធម៌ ព្រះអង្គលែងវិលត្រឡប់មកកាន់ភពថ្មីទៀត ព្រះតថាគតនោះ ទ្រង់បានធ្វើឲ្យជាក់ច្បាស់ដោយប្រាជ្ញាដ៏ឧត្តមនៃព្រះអង្គនូវលោកនេះ ព្រមទាំងទេវលោក មារលោក ព្រហ្មលោក នូវពពួកសត្វ ព្រមទាំងសមណព្រាហ្មណ៍ ទាំងមនុស្សជាសម្មតិទេពនិងមនុស្សដ៏សេស ហើយប្រកាសបាន ព្រះអង្គសំដែងធម៌ពីរោះបទដើម ពីរោះបទកណ្ដាល និងពីរោះបទចុង ទ្រង់ប្រកាសព្រហ្មចរិយធម៌ ព្រមទាំងអត្ថទាំងព្យញ្ជនៈ ពេញបរិបូណ៌បរិសុទ្ធទាំងអស់ ។ គហបតិក្ដី កូនគហបតីក្ដី បុគ្គលកើតក្នុងត្រកូលណាមួយក្ដី តែងស្ដាប់ធម៌នោះ ។ លុះបុគ្គលនោះ ស្ដាប់ធម៌នោះហើយ តែងបានចំពោះនូវសទ្ធាក្នុងព្រះតថាគត ។

សោ តេន សទ្ធាបដិលាភេន សមន្នាគតោ ឥតិ
បដិសញ្ចិក្ខតិ សម្ពាធោ ឃរាវាសោ រជាបថោ(១) អព្ភោ-
កាសោ បព្វជ្ជា ន យិទំ សុករំ អគារំ អជ្ឈាវ-
សតា ឯកន្តបរិបុណ្ណំ ឯកន្តបរិសុទ្ធំ សង្ខលិខិតំ
ព្រហ្មចរិយំ ចរិតុំ យន្នូនាហំ កេសមស្សុំ ឱហារេត្វា
កាសាយានិ វត្ថានិ អច្ឆាទេត្វា អគារស្មា អនគា-
រិយំ បព្វជេយ្យន្តិ ។ សោ អបរេន សមយេន
អប្បំ វា ភោគក្ខន្ធំ បហាយ មហន្តំ វា ភោគក្ខន្ធំ
បហាយ អប្បំ វា ញាតិបរិវដ្ដំ បហាយ មហន្តំ វា
ញាតិបរិវដ្ដំ បហាយ កេសមស្សុំ ឱហារេត្វា កាសា-
យានិ វត្ថានិ អច្ឆាទេត្វា អគារស្មា អនគារិយំ
បព្វជតិ ។ សោ ឯវំ បព្វជិតោ សមានោ ភិក្ខូនំ
សិក្ខាសាជីវសមាបន្នោ បាណាតិបាតំ បហាយ
បាណាតិបាតា បដិវិរតោ ហោតិ និហិតទណ្ឌោ
និហិតសត្ថោ លជ្ជី ទយាបន្នោ សព្វបាណភូតហិតា-
នុកម្បី វិហរតិ អទិន្នាទានំ បហាយ អទិន្នាទានា

---
១ ឱ. ម. រជោបថោ ។



បុគ្គលនោះប្រកបដោយការបានចំពោះ នូវសទ្ធានោះហើយ ក៏ពិចារណា
ដូច្នេះថា ការនៅគ្រប់គ្រងផ្ទះ ចង្អៀតចង្អល់ណាស់ ជាផ្លូវចូលមកនៃ
ធូលី គឺកិលេស មានតែបព្វជ្ជាទើបមានទីវាលទូលាយ បុគ្គលដែលនៅ
គ្រប់គ្រងផ្ទះ មិនងាយនឹងប្រព្រឹត្តព្រហ្មចរិយធម៌ ឲ្យបរិបូណ៌តែម្យ៉ាង ឲ្យ
បរិសុទ្ធតែម្យ៉ាង ឲ្យដូចជាស័ង្ខដែលគេខាត់ជូតឡើយ បើដូច្នោះ គួរតែ
អាត្មាអញ កោរសក់ពុកមាត់ និងពុកចង្កា ហើយស្លៀកដណ្ដប់សំពត់
កាសាយៈ ចេញចាកផ្ទះចូលទៅកាន់ផ្នួស ។ លុះសម័យខាងក្រោយមក
បុគ្គលនោះ ក៏លះបង់គំនរភោគៈតិចក្ដី លះបង់គំនរភោគៈច្រើនក្ដី លះ
បង់ញាតិវង្សតិចក្ដី លះបង់ញាតិវង្សច្រើនក្ដី ហើយកោរសក់ពុកមាត់
និងពុកចង្កា ស្លៀកដណ្ដប់សំពត់កាសាយៈ ចេញចាកផ្ទះចូលទៅកាន់
ផ្នួស ។ កាលបើបុគ្គលនោះ បួសយ៉ាងនេះហើយ ក៏សមាទាននូវសិក្ខា
និងសាជីវៈ របស់ភិក្ខុទាំងឡាយ លះបង់នូវបាណាតិបាត វៀរចាកបា-
ណាតិបាត មានដំបងដាក់ចុះហើយ មានគ្រឿងសស្ត្រាដាក់ចុះហើយ
មានសេចក្ដីខ្មាសអៀន ដល់នូវសេចក្ដីអាណិត ជាអ្នកអនុគ្រោះផ្ដល់
ប្រយោជន៍ដល់សត្វទាំងអស់ លះបង់នូវអទិន្នាទាន វៀរចាកអទិន្នាទាន

សម្ផប្បលាបំ បហាយ សម្ផប្បលាបា បដិវិរតោ ហោតិ កាលវាទី ភូតវាទី អត្ថវាទី ធម្មវាទី វិនយវាទី និធានវតឹ វាចំ ភាសិតា កាលេន សាបទេសំ បរិយន្តវតឹ អត្ថសញ្ហិតំ ។ សោ ពីជគាមភូតគាមសមារម្ភា បដិវិរតោ ហោតិ ឯកភត្តិកោ ហោតិ រត្តូបរតោ វិរតោ វិកាលភោជនា នច្ចគីតវាទិតវិសូកទស្សនា បដិវិរតោ ហោតិ មាលាគន្ធវិលេបនធារណមណ្ឌនវិភូសនដ្ឋានា បដិវិរតោ ហោតិ ឧច្ចាសយនមហាសយនា បដិវិរតោ ហោតិ ជាតរូបរជតបដិគ្គហណា បដិវិរតោ ហោតិ អាមកធញ្ញបដិគ្គហណា បដិវិរតោ ហោតិ អាមកមំសបដិគ្គហណា បដិវិរតោ ហោតិ ឥត្ថីកុមារិកបដិគ្គហណា បដិវិរតោ ហោតិ ទាសីទាសបដិគ្គហណា បដិវិរតោ ហោតិ អជេឡកបដិគ្គហណា បដិវិរតោ ហោតិ កុក្កុដសូករបដិគ្គហណា បដិវិរតោ ហោតិ ហត្ថិគវស្សវឡវបដិគ្គហណា បដិវិរតោ ហោតិ ខេត្តវត្ថុបដិគ្គហណា បដិវិរតោ ហោតិ ទូតេយ្យបហិណគមនានុយោគា បដិវិរតោ ហោតិ កយវិក្កយា បដិវិរតោ ហោតិ



លះបង់សម្ផប្បលាបៈ វៀរចាកសម្ផប្បលាបៈ ពោលតាមកាលគួរ ពោលពាក្យពិត ពោលតែអត្ថ ពោលតែធម៌ ពោលតែវិន័យ ពោលតែសំដីដែលគួរកប់ទុកក្នុងហឫទ័យ ជាសំដីប្រកបដោយហេតុ ប្រកបដោយគ្រឿងប្រៀបធៀបដោយកាលគួរ មានដើមមានចុង ប្រកបដោយប្រយោជន៍ ។ បុគ្គលនោះវៀរចាកការផ្តាច់ផ្តិលនូវពីជគាមនិងភូតគាម ជាអ្នកបរិភោគតែមួយពេល វៀរចាកការបរិភោគក្នុងរាត្រី វៀរចាកការបរិភោគក្នុងកាលខុស វៀរចាកការរាំ ច្រៀង ប្រគំ និងការមើលល្បែងផ្សេង ៗ ដែលជាសត្រូវដល់សាសនា ជាអ្នកវៀរចាកការប្រដាប់តាក់តែងកាយ ដោយផ្កាកម្រងនិងគ្រឿងក្រអូប គ្រឿងលាបផ្សេង ៗ វៀរចាកការដេកលើទីសេនាសនៈខ្ពស់ និងទីសេនាសនៈដ៏ប្រសើរ វៀរចាកការទទួលមាសនិងប្រាក់ វៀរចាកការទទួលធញ្ញជាតិស្រស់ វៀរចាកការទទួលសាច់ស្រស់ វៀរចាកការទទួលស្ត្រីនិងនាងកុមារី វៀរចាកការទទួលខ្ញុំស្រីនិងខ្ញុំប្រុស វៀរចាកការទទួលពពែនិងចៀម វៀរចាកការទទួលមាន់និងជ្រូក វៀរចាកការទទួលដំរី គោ សេះឈ្មោលនិងសេះញី វៀរចាកការទទួលស្រែនិងចម្ការ វៀរចាកកិរិយាប្រកបរឿយ ៗ នូវទូតកម្មគឺនាំសំបុត្រ ឬពាក្យបណ្តាំរបស់គ្រហស្ថ វៀរចាកកិរិយាលក់ដូរ

សមន្នាគតោ ឥមិនា ច អរិយេន ឥន្ទ្រិយសំវ-
រេន សមន្នាគតោ ឥមិនា ច អរិយេន សតិ-
សម្បជញ្ញេន សមន្នាគតោ ឥមាយ ច អរិយាយ
សន្តុដ្ឋិយា សមន្នាគតោ វិវិត្តំ សេនាសនំ ភជតិ
អរញ្ញំ រុក្ខមូលំ បព្វតំ កន្ទរំ គិរិគុហំ សុសានំ
វនបត្ថំ អព្ភោកាសំ បលាលបុញ្ជំ ។ សោ បច្ឆាភត្តំ
បិណ្ឌបាតប្បដិក្កន្តោ និសីទតិ បល្លង្កំ អាភុជិត្វា
ឧជុំ កាយំ បណិធាយ បរិមុខំ សតឹ ឧបដ្ឋបេត្វា ។
សោ អភិជ្ឈំ លោកេ បហាយ វិគតាភិជ្ឈេន
ចេតសា វិហរតិ អភិជ្ឈាយ ចិត្តំ បរិសោធេតិ
ព្យាបាទបទោសំ បហាយ អព្យាបន្នចិត្តោ វិហរតិ
សព្វបាណភូតហិតានុកម្បី ព្យាបាទបទោសា ចិត្តំ
បរិសោធេតិ ថីនមិទ្ធំ បហាយ វិគតថីនមិទ្ធោ វិហ-
រតិ អាលោកសញ្ញី សតោ សម្បជានោ ថីនមិទ្ធា
ចិត្តំ បរិសោធេតិ ឧទ្ធច្ចកុក្កុច្ចំ បហាយ អនុទ្ធតោ
វិហរតិ អជ្ឈត្តំ វូបសន្តចិត្តោ ឧទ្ធច្ចកុក្កុច្ចា ចិត្តំ



ដ៏ប្រសើរនេះផង ប្រកបដោយការសង្រួម ឥន្ទ្រិយដ៏ប្រសើរនេះផង
ប្រកបដោយសតិនិងសម្បជញ្ញៈ ដ៏ប្រសើរនេះផង ប្រកបដោយសេចក្តី
សន្តោស ដ៏ប្រសើរនេះផង តែងគប់កាន់នូវសេនាសនៈស្ងាត់ គឺ ព្រៃ
គល់ឈើ ភ្នំ ជ្រោះភ្នំ ព្រៃស្មសាន ព្រៃធំ ទីវាល គំនរចំបើង ។ ភិក្ខុ
នោះលុះត្រឡប់ពីបិណ្ឌបាតហើយ ក្នុងវេលាក្រោយភត្ត ក៏អង្គុយពែនភ្នែន
តម្រង់កាយឲ្យត្រង់ ផ្គងស្មារតីឲ្យមានមុខឆ្ពោះទៅកាន់កម្មដ្ឋាន ។ ភិក្ខុនោះ
លះបង់អភិជ្ឈា ក្នុងលោក មានចិត្តប្រាសចាកអភិជ្ឈា ជម្រះចិត្ត
ឲ្យស្អាតចាកអភិជ្ឈា លះបង់ព្យាបាទជាគ្រឿងប្រទូស្ត មានចិត្តមិនប្រកប
ដោយព្យាបាទ មានសេចក្តីអនុគ្រោះដោយប្រយោជន៍ ដល់សព្វសត្វ
ជម្រះចិត្តឲ្យស្អាតចាកព្យាបាទ ជាគ្រឿងប្រទូស្ត លះបង់ថីនមិទ្ធៈ
ប្រាសចាកថីនមិទ្ធៈ មានសេចក្តីសំគាល់ក្នុងពន្លឺ មានសតិនិងសម្បជញ្ញៈ
ជម្រះចិត្តឲ្យស្អាតចាកថីនមិទ្ធៈ លះបង់ឧទ្ធច្ចកុក្កុច្ចៈ មិនមានសេចក្តីរា-
យមាយ មានចិត្តស្ងប់ស្ងាត់ក្នុងសន្តាន ជម្រះចិត្តឲ្យស្អាតចាកឧទ្ធច្ចកុក្កុច្ចៈ

ទុក្ខស្ស ច បហានា បុព្វេវ សោមនស្សទោមន-
ស្សានំ អត្ថង្គមា អទុក្ខមសុខំ ឧបេក្ខាសតិបា-
រិសុទ្ធឹ ចតុត្ថំ ឈានំ ឧបសម្បជ្ជ វិហាសឹ ។ សោ
ឯវំ សមាហិតេ ចិត្តេ បរិសុទ្ធេ បរិយោទាតេ
អនង្គណេ វិគតូបក្កិលេសេ មុទុភូតេ កម្មនិយេ
ឋិតេ អានេញ្ជប្បត្តេ បុព្វេនិវាសានុស្សតិញាណាយ
ចិត្តំ អភិនិន្នាមេសឹ ។ សោ អនេកវិហិតំ បុព្វេនិ-
វាសំ អនុស្សរាមិ ។ សេយ្យថីទំ ។ ឯកម្បិ ជាតឹ
ទ្វេបិ ជាតិយោ តិស្សោបិ ជាតិយោ ចតស្សោបិ
ជាតិយោ បញ្ចបិ ជាតិយោ ទសបិ ជាតិយោ វីសម្បិ
ជាតិយោ តឹសម្បិ ជាតិយោ ចត្តាលីសម្បិ ជាតិយោ
បញ្ញាសម្បិ ជាតិយោ ជាតិសតម្បិ ជាតិសហស្សម្បិ
ជាតិសតសហស្សម្បិ អនេកេបិ សំវដ្ដកប្បេ អនេ-
កេបិ វិវដ្ដកប្បេ អនេកេបិ សំវដ្ដវិវដ្ដកប្បេ អមុត្រា-
សឹ ឯវំនាមោ ឯវំគោត្តោ ឯវំវណ្ណោ ឯវមាហារោ
ឯវំសុខទុក្ខប្បដិសំវេទី ឯវមាយុបរិយន្តោ សោ តតោ
ចុតោ អមុត្រ ឧទបាទឹ តត្រាបាសឹ ឯវំនាមោ





លះបង់ទុក្ខផង ព្រោះសោមនស្សនិងទោមនស្សរលត់ទៅ ក្នុងកាលមុនផង
ទើបបានដល់ ចតុត្ថជ្ឈាន មានអារម្មណ៍មិនមែនទុក្ខ មិនមែន
សុខ គឺជាឧបេក្ខា មានស្មារតីបរិសុទ្ធដោយឧបេក្ខា ហើយសម្រេច
សម្រាន្តនៅ ។ កិច្ចនោះ កាលបើចិត្តតាំងនៅខាងបរិសុទ្ធផូរផង់ មិន
មានទីទួលគឺកិលេស ប្រាសចាកឧបក្កិលេស មានសភាពជាចិត្តទន់ គួរ
ដល់ការងារកម្ម ជាចិត្តនឹងធឹង មិនញាប់ញ័រទៅតាមអារម្មណ៍ យ៉ាងនេះ
ហើយ ក៏បង្អោនចិត្តទៅ ដើម្បីបុព្វេនិវាសានុស្សតិញ្ញាណ គឺប្រាជ្ញារលឹក
ឃើញ នូវខន្ធដែលអាស្រ័យនៅក្នុងកាលមុន ។ កិច្ចនោះ រលឹកឃើញ
នូវបុព្វេនិវាសជាច្រើនប្រការ ។ រលឹកឃើញ ដូចម្តេចខ្លះ ។ គឺរលឹក
ឃើញបាន ១ ជាតិខ្លះ ២ ជាតិខ្លះ ៣ ជាតិខ្លះ ៤ ជាតិខ្លះ ៥ ជាតិ
ខ្លះ ១០ ជាតិខ្លះ ២០ ជាតិខ្លះ ៣០ ជាតិខ្លះ ៤០ ជាតិខ្លះ ៥០ ជាតិ
ខ្លះ ១០០ ជាតិខ្លះ ១ ពាន់ជាតិខ្លះ ១ សែនជាតិខ្លះ ច្រើនសំវដ្ដ-
កប្បខ្លះ ច្រើនវិវដ្ដកប្បខ្លះ ច្រើនសំវដ្ដវិវដ្ដកប្បខ្លះ ថា អាត្មាអញ
បានកើតក្នុងទីឯណោះ មានឈ្មោះយ៉ាងនេះ មានគោត្រយ៉ាងនេះ មាន
សម្បុរយ៉ាងនេះ មានអាហារយ៉ាងនេះ សោយសុខនិងទុក្ខយ៉ាងនេះ មាន
កំណត់អាយុប៉ុណ្ណោះ លុះអាត្មាអញច្យុតចាកទីនោះហើយ បានទៅកើត
ក្នុងទីឯណោះទៀត អាត្មាអញទៅកើតក្នុងទីនោះ ក៏មានឈ្មោះយ៉ាងនេះ

ឯវំគោត្តោ ឯវំវណ្ណោ ឯវមាហារោ ឯវំសុខទុក្ខប្ប-
ដិសំវេទី ឯវមាយុបរិយន្តោ សោ តតោ ចុតោ
ឥធូបបន្នោតិ ។ ឥតិ សាការំ សឧទ្ទេសំ អនេកវិ-
ហិតំ បុព្វេនិវាសំ អនុស្សរតិ ។ សោ ឯវំ សមា-
ហិតេ ចិត្តេ បរិសុទ្ធេ បរិយោទាតេ អនង្គណេ
វិគតូបក្កិលេសេ មុទុភូតេ កម្មនិយេ ឋិតេ អានេ-
ញ្ជប្បត្តេ សត្តានំ ចុតូបបាតញ្ញាណាយ ចិត្តំ អភិ-
និន្នាមេតិ ។ សោ ទិព្វេន ចក្ខុនា វិសុទ្ធេន អតិ-
ក្កន្តមានុសកេន សត្តេ បស្សតិ ចវមានេ ឧបប-
ជ្ជមានេ ហីនេ បណីតេ សុវណ្ណេ ទុព្វណ្ណេ សុគតេ
ទុគ្គតេ យថាកម្មូបគេ សត្តេ បជានាតិ ឥមេ វត
ភោន្តោ សត្តា កាយទុច្ចរិតេន សមន្នាគតា វចី-
ទុច្ចរិតេន សមន្នាគតា មនោទុច្ចរិតេន សមន្នាគតា
អរិយានំ ឧបវាទកា មិច្ឆាទិដ្ឋិកា មិច្ឆាទិដ្ឋិកម្មស-
មាទានា តេ កាយស្ស ភេទា បរម្មរណា អបាយំ





មានគោត្រ យ៉ាងនេះ មានសម្បុរ យ៉ាងនេះ មានអាហារ យ៉ាងនេះ
ទទួលសុខនិងទុក្ខ យ៉ាងនេះ មានកំណត់អាយុប៉ុណ្ណោះ អាត្មាអញច្យុត
អំពីទីនោះ ក៏បានមកកើត ក្នុងទីនេះ ។ ភិក្ខុនោះ រលឹកឃើញនូវ
បុព្វេនិវាសច្រើនប្រការ ព្រមទាំងអាការៈ គឺរូបនិងអាហារជាដើម
ព្រមទាំងឧទ្ទេស គឺឈ្មោះនិងគោត្រ ដោយប្រការដូច្នេះ ។ ភិក្ខុ
នោះកាលបើចិត្តតាំងនៅខ្ជាប់ បរិសុទ្ធផូរផង់ ឥតមានទីទួល គឺកិលេស
ប្រាសចាកឧបក្កិលេស មានសភាពជាចិត្តទន់ គួរដល់ការងារកម្ម ជាចិត្ត
នឹងធឹង មិនញាប់ញ័រទៅតាមអារម្មណ៍ យ៉ាងនេះហើយ ក៏បង្អោនចិត្ត
ទៅដើម្បីចុតូបបាតញ្ញាណ គឺប្រាជ្ញាដឹងនូវចុតិនិងបដិសន្ធិ របស់សត្វ
ទាំងឡាយ ។ ភិក្ខុនោះ មានចក្ខុទិព្វ ដ៏បរិសុទ្ធវិសេស កន្លង
ចក្ខុរបស់មនុស្សធម្មតា តែងឃើញនូវសត្វ កំពុងច្យុត កំពុងកើត ជា
សត្វថោកទាប ខ្ពង់ខ្ពស់ មានសម្បុរល្អ មានសម្បុរអាក្រក់ មានគតិ
ល្អ មានគតិអាក្រក់ ដឹងច្បាស់នូវពួកសត្វ ដែលទៅតាមយថា-
កម្មថា អើហ្ន៎ + សត្វទាំងនេះ ប្រកបដោយកាយទុច្ចរិត ប្រកបដោយ
វចីទុច្ចរិត ប្រកបដោយមនោទុច្ចរិត តិះដៀលព្រះអរិយបុគ្គល មាន
សេចក្តីយល់ខុស ប្រកាន់អំពើដែលយល់ខុស លុះសត្វទាំងអម្បាលនោះ
បែកធ្លាយនៃកាយស្លាប់ទៅ ក៏ទៅកើតក្នុងទីកំណើតនៃតិរច្ឆាន ប្រេត

អយំ ទុក្ខនិរោធគាមិនី បដិបទាតិ យថាភូតំ បជានាតិ ឥមេ អាសវាតិ យថាភូតំ បជានាតិ អយំ អាសវសមុទយោតិ យថាភូតំ បជានាតិ អយំ អាសវនិរោធោតិ យថាភូតំ បជានាតិ អយំ អាសវនិរោធគាមិនី បដិបទាតិ យថាភូតំ បជានាតិ ។ តស្ស ឯវំ ជានតោ ឯវំ បស្សតោ កាមាសវាបិ ចិត្តំ វិមុច្ចតិ ភវាសវាបិ ចិត្តំ វិមុច្ចតិ អវិជ្ជាសវាបិ ចិត្តំ វិមុច្ចតិ ។ វិមុត្តស្មឹ វិមុត្តមិតិ ញាណំ ហោតិ ។ ខីណា ជាតិ វុសិតំ ព្រហ្មចរិយំ កតំ ករណីយំ នាបរំ ឥត្ថត្តាយាតិ បជានាតិ ។ ឯវំ បុគ្គលោ នេវ អត្តន្តបោ ហោតិ ន អត្តបរិតាបនានុយោគមនុយុត្តោ ន បរន្តបោ ន បរបរិតាបនានុយោគមនុយុត្តោ ។ សោ អនត្តន្តបោ អបរន្តបោ ទិដ្ឋេវ ធម្មេ និច្ឆាតោ និព្វុតោ សីតិភូតោ សុខប្បដិសំវេទី ព្រហ្មភូតេន អត្តនា វិហរតិ ។



ដឹងច្បាស់តាមពិតថា នេះផ្លូវប្រតិបត្តិទៅកាន់ធម៌រលត់ទុក្ខ ដឹងច្បាស់តាមពិតថា នេះអាសវៈ ដឹងច្បាស់តាមពិតថា នេះហេតុឲ្យកើតអាសវៈ ដឹងច្បាស់តាមពិតថា នេះធម៌រលត់អាសវៈ ដឹងច្បាស់តាមពិតថា នេះផ្លូវប្រតិបត្តិទៅកាន់ធម៌រលត់អាសវៈ ។ កាលបើភិក្ខុនោះ ដឹងយ៉ាងនេះ ឃើញយ៉ាងនេះហើយ ចិត្តក៏រួចចាកកាមាសវៈផង ចិត្តក៏រួចចាកភវាសវៈផង ចិត្តក៏រួចចាកអវិជ្ជាសវៈផង ។ កាលបើចិត្តរួចផុតស្រឡះហើយ ប្រាជ្ញាញាណ ក៏កើតមានឡើងថា ចិត្តអាត្មាអញផុតស្រឡះហើយ ។ ភិក្ខុនោះដឹងច្បាស់ថា ជាតិរបស់អាត្មាអញអស់ហើយ ព្រហ្មចរិយធម៌ អាត្មាអញបានប្រព្រឹត្តហើយ សោឡសកិច្ច អាត្មាអញបានធ្វើស្រេចហើយ មគ្គភាវនាកិច្ចដទៃ ប្រព្រឹត្តទៅ ដើម្បីសោឡសកិច្ចនេះទៀត មិនមានឡើយ ។ បុគ្គលមិនដុតកំដៅខ្លួនឯង មិនប្រកបខ្លួនក្នុងការព្យាយាម ដើម្បីដុតកំដៅខ្លួនឯង ទាំងមិនដុតកំដៅអ្នកដទៃ មិនប្រកបខ្លួនក្នុងការព្យាយាម ដើម្បីដុតកំដៅអ្នកដទៃ បុគ្គលនោះ មិនដុតកំដៅខ្លួនឯង មិនដុតកំដៅអ្នកដទៃ ជាអ្នកមិនមានសេចក្តីស្រេកឃ្លាន មានកិលេសរលត់ទុក្ខ ត្រជាក់ត្រជុំ ទទួលសេចក្តីសុខ មានខ្លួនប្រសើរ សម្រេចសម្រាន្តនៅក្នុងបច្ចុប្បន្ន យ៉ាងនេះឯង ។

ចេតោសមថស្ស ។ ឥធេកច្ចោ បុគ្គលោ លាភី
ហោតិ លោកុត្តរមគ្គស្ស វា ផលស្ស វា ន លាភី
រូបសហគតានំ វា អរូបសហគតានំ វា សមាបត្តីនំ
ឯវំ បុគ្គលោ លាភី ហោតិ អធិបញ្ញាធម្មវិបស្សនាយ
ន លាភី អធិចិត្តំ ចេតោសមថស្ស ។ កថញ្ច
បុគ្គលោ លាភី ចេវ ហោតិ អធិចិត្តំ ចេតោសម-
ថស្ស លាភី ច អធិបញ្ញាធម្មវិបស្សនាយ ។ ឥធេ-
កច្ចោ បុគ្គលោ លាភី ហោតិ រូបសហគតានំ
វា អរូបសហគតានំ វា សមាបត្តីនំ លាភី លោកុ-
ត្តរមគ្គស្ស វា ផលស្ស វា ឯវំ បុគ្គលោ លាភី
ចេវ ហោតិ អធិចិត្តំ ចេតោសមថស្ស លាភី ច
អធិបញ្ញាធម្មវិបស្សនាយ ។ កថញ្ច បុគ្គលោ នេវ
លាភី ហោតិ អធិចិត្តំ ចេតោសមថស្ស ន លាភី
អធិបញ្ញាធម្មវិបស្សនាយ ។ ឥធេកច្ចោ បុគ្គលោ
នេវ លាភី ហោតិ រូបសហគតានំ វា អរូបសហគ-
តានំ វា សមាបត្តីនំ ន លាភី លោកុត្តរមគ្គស្ស វា
ផលស្ស វា ឯវំ បុគ្គលោ នេវ លាភី ហោតិ អធិចិត្តំ
ចេតោសមថស្ស ន លាភី អធិបញ្ញាធម្មវិបស្សនាយ ។



តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ជាអ្នកបានលោកុត្តរមគ្គ ឬ
លោកុត្តរផល តែមិនបានសមាបត្តិ ប្រកបដោយរូបក្តី ប្រកបដោយ
អរូបក្តី បុគ្គលជាអ្នកបានអធិប្បញ្ញាធម្មវិបស្សនា តែមិនបានចេតោសមថៈ
ក្នុងសន្តាន យ៉ាងនេះឯង ។ បុគ្គលជាអ្នកបានចេតោសមថៈក្នុងសន្តាន
ទាំងបានអធិប្បញ្ញាធម្មវិបស្សនា តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ
ជាអ្នកបានសមាបត្តិ ប្រកបដោយរូបក្តី ប្រកបដោយអរូបក្តី បានលោ-
កុត្តរមគ្គឬលោកុត្តរផល បុគ្គលជាអ្នកបានចេតោសមថៈ ក្នុងសន្តានផង
បានអធិប្បញ្ញាធម្មវិបស្សនាផង យ៉ាងនេះឯង ។ បុគ្គលជាអ្នកមិនបានចេ-
តោសមថៈក្នុងសន្តាន ទាំងមិនបានអធិប្បញ្ញាធម្មវិបស្សនា តើដូចម្តេច ។
បុគ្គលខ្លះ ក្នុងលោកនេះ ជាអ្នកមិនបានសមាបត្តិ ប្រកបដោយរូបក្តី
ប្រកបដោយអរូបក្តី ទាំងមិនបានលោកុត្តរមគ្គ ឬលោកុត្តរផល បុគ្គល
ជាអ្នកមិនបានចេតោសមថៈ ក្នុងសន្តាន ទាំងមិនបានអធិប្បញ្ញាធម្ម-
វិបស្សនា យ៉ាងនេះឯង ។

ចតុក្កនិទ្ទេសោ

[១៣៨] កតមោ ច បុគ្គលោ អនុសោតគាមី ។ ឥធេកច្ចោ បុគ្គលោ កាមេ ច បដិសេវតិ បាបញ្ច កម្មំ ករោតិ អយំ វុច្ចតិ បុគ្គលោ អនុសោតគាមី ។ កតមោ ច បុគ្គលោ បដិសោតគាមី ។ ឥធេកច្ចោ បុគ្គលោ កាមេ ន ច បដិសេវតិ បាបញ្ច កម្មំ ន ករោតិ សោ សហាបិ ទុក្ខេន សហាបិ ទោមនស្សេន អស្សុមុខោបិ រុទមានោ បរិបុណ្ណំ បរិសុទ្ធំ ព្រហ្មចរិយំ ចរតិ អយំ វុច្ចតិ បុគ្គលោ បដិសោតគាមី ។ កតមោ ច បុគ្គលោ ឋិតត្តោ ។ ឥធេកច្ចោ បុគ្គលោ បញ្ចន្នំ ឱរម្ភាគិយានំ សញ្ញោជនានំ បរិក្ខយា ឱបបាតិកោ ហោតិ តត្ថ បរិនិព្វាយី អនាវត្តិធម្មោ តស្មា លោកា អយំ វុច្ចតិ បុគ្គលោ ឋិតត្តោ ។ កតមោ ច បុគ្គលោ តិណ្ណោ បារង្គតោ ថលេ តិដ្ឋតិ ព្រាហ្មណោ ។ ឥធេកច្ចោ បុគ្គលោ អាសវានំ ខយា អនាសវំ ចេតោវិមុត្តឹ បញ្ញាវិមុត្តឹ ទិដ្ឋេវ ធម្មេ សយំ អភិញ្ញា សច្ឆិកត្វា ឧបសម្បជ្ជ វិហរតិ អយំ វុច្ចតិ បុគ្គលោ តិណ្ណោ បារង្គតោ ថលេ តិដ្ឋតិ ព្រាហ្មណោ ។



ចតុក្កនិទ្ទេស

(១៣៨) បុគ្គលទៅតាមខ្សែទឹក តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ សេពកាមគុណផង ធ្វើបាបកម្មផង នេះហៅថា បុគ្គលទៅតាមខ្សែទឹក ។ បុគ្គលទៅច្រាសខ្សែទឹក តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ មិនសេពកាមគុណផង មិនធ្វើបាបកម្មផង បុគ្គលនោះ ប្រព្រឹត្តព្រហ្មចរិយធម៌ឲ្យបរិសុទ្ធពេញលេញ ទាំងប្រកបដោយទុក្ខខ្លះ ទាំងប្រកបដោយទោមនស្សខ្លះ ទាំងមានមុខទទឹកដោយទឹកភ្នែកទួញយំខ្លះ នេះហៅថា បុគ្គលទៅច្រាសខ្សែទឹក ។ បុគ្គលមានខ្លួនតាំងនៅនឹង តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ជាឧបបាតិកកំណើត ព្រោះការអស់ទៅនៃសញ្ញោជនៈ ជាចំណែកខាងក្រោម ៥ ជាអ្នកបរិនិព្វានក្នុងសុទ្ធាវាស-ព្រហ្មលោកនោះ មានសភាពមិនត្រឡប់ ពីលោកនោះវិញ នេះហៅថា បុគ្គលមានខ្លួនតាំងនៅនឹង ។ បុគ្គលឆ្លងទៅដល់ត្រើយ ជាព្រាហ្មណ៍ឋិតនៅលើគោក តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ធ្វើឲ្យជាក់ច្បាស់ សម្រេច ដោយបញ្ញាដ៏ឧត្តមខ្លួនឯងក្នុងបច្ចុប្បន្ន នូវចេតោវិមុត្តិនិងបញ្ញាវិមុត្តិ ដែលមិនមានអាសវៈ ព្រោះអស់ទៅនៃអាសវៈទាំងឡាយ នេះហៅថា បុគ្គលឆ្លងទៅដល់ត្រើយ ជាព្រាហ្មណ៍ឋិតនៅលើគោក ។

(១៣៩) កថញ្ច បុគ្គលោ អប្បស្សុតោ ហោតិ សុតេន អនុបបន្នោ ។ ឥធេកច្ចស្ស បុគ្គលស្ស អប្បកំ សុតំ ហោតិ សុត្តំ គេយ្យំ វេយ្យាករណំ គាថំ ឧទានំ ឥតិវុត្តកំ ជាតកំ អព្ភូតធម្មំ វេទល្លំ សោ តស្ស អប្បកស្ស សុតស្ស ន អត្ថមញ្ញាយ ន ធម្មមញ្ញាយ ន ធម្មានុធម្មប្បដិបន្នោ ហោតិ ឯវំ បុគ្គលោ អប្បស្សុតោ ហោតិ សុតេន អនុបបន្នោ ។ កថញ្ច បុគ្គលោ អប្បស្សុតោ ហោតិ សុតេន ឧបបន្នោ ។ ឥធេកច្ចស្ស បុគ្គលស្ស អប្បកំ សុតំ ហោតិ សុត្តំ គេយ្យំ វេយ្យាករណំ គាថំ ឧទានំ ឥតិវុត្តកំ ជាតកំ អព្ភូតធម្មំ វេទល្លំ សោ តស្ស អប្បកស្ស សុតស្ស អត្ថមញ្ញាយ ធម្មមញ្ញាយ ធម្មានុធម្មប្បដិបន្នោ ហោតិ ឯវំ បុគ្គលោ អប្បស្សុតោ ហោតិ សុតេន ឧបបន្នោ ។ កថញ្ច បុគ្គលោ ពហុស្សុតោ ហោតិ សុតេន អនុបបន្នោ ។ ឥធេកច្ចស្ស បុគ្គលស្ស ពហុកំ សុតំ ហោតិ សុត្តំ គេយ្យំ វេយ្យាករណំ គាថំ ឧទានំ ឥតិវុត្តកំ ជាតកំ



(១៣៩) បុគ្គលជាអ្នកចេះដឹងតិច មិនប្រតិបត្តិតាមដោយការចេះដឹង តើដូចម្ដេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ជាអ្នកមានពុទ្ធវចនៈ គឺ សុត្តៈ គេយ្យៈ វេយ្យាករណៈ គាថា ឧទានៈ ឥតិវុត្តកៈ ជាតកៈ អព្ភូតធម្មៈ វេទល្លៈ មានប្រមាណតិច បុគ្គលនោះ មិនដឹងខ្លឹមអត្ថនៃពុទ្ធវចនៈដែលមានប្រមាណតិចនោះ មិនដឹងខ្លឹមធម៌ មិនប្រតិបត្តិធម៌ តាមសមគួរដល់ធម៌ បុគ្គលជាអ្នកចេះដឹងតិច មិនប្រតិបត្តិតាមដោយការចេះដឹង យ៉ាងនេះឯង ។ បុគ្គល ជាអ្នកចេះដឹងតិច តែប្រតិបត្តិតាមដោយការចេះដឹង តើដូចម្ដេច ។ បុគ្គលខ្លះ ក្នុងលោកនេះ មានពុទ្ធវចនៈ គឺ សុត្តៈ គេយ្យៈ វេយ្យាករណៈ គាថា ឧទានៈ ឥតិវុត្តកៈ ជាតកៈ អព្ភូតធម្មៈ វេទល្លៈ មានប្រមាណតិច តែបុគ្គលនោះ ដឹងខ្លឹមអត្ថនៃពុទ្ធវចនៈមានប្រមាណតិចនោះ ដឹងខ្លឹមធម៌ ហើយប្រតិបត្តិធម៌តាមសមគួរដល់ធម៌ បុគ្គល ជាអ្នកចេះដឹងតិច តែប្រតិបត្តិតាមដោយការចេះដឹង យ៉ាងនេះឯង ។ បុគ្គល ជាអ្នកចេះដឹងច្រើន តែមិនប្រតិបត្តិតាមដោយការចេះដឹង តើដូចម្ដេច ។ បុគ្គលខ្លះ ក្នុងលោកនេះ មានពុទ្ធវចនៈគឺសុត្តៈ គេយ្យៈ វេយ្យាករណៈ គាថា ឧទានៈ ឥតិវុត្តកៈ ជាតកៈ

អព្ភុតធម្មំ វេទល្លំ សោ តស្ស ពហុកស្ស សុតស្ស ន អត្ថមញ្ញាយ ន ធម្មមញ្ញាយ ន ធម្មានុធម្មប្បដិបន្នោ ហោតិ ឯវំ បុគ្គលោ ពហុស្សុតោ ហោតិ សុតេន អនុបបន្នោ ។ កថញ្ច បុគ្គលោ ពហុស្សុតោ ហោតិ សុតេន ឧបបន្នោ ។ ឥធេកច្ចស្ស បុគ្គលស្ស ពហុកំ សុតំ ហោតិ សុត្តំ គេយ្យំ វេយ្យាករណំ គាថំ ឧទានំ ឥតិវុត្តកំ ជាតកំ អព្ភុតធម្មំ វេទល្លំ សោ តស្ស ពហុកស្ស សុតស្ស អត្ថមញ្ញាយ ធម្មមញ្ញាយ ធម្មានុធម្មប្បដិបន្នោ ហោតិ ឯវំ បុគ្គលោ ពហុស្សុតោ ហោតិ សុតេន ឧបបន្នោ ។

[១៦០] កតមោ ច បុគ្គលោ សមណមចលោ ។ ឥធេកច្ចោ បុគ្គលោ តិណ្ណំ សញ្ញោជនានំ បរិក្ខយា សោតាបន្នោ ហោតិ អវិនិបាតធម្មោ និយតោ សម្ពោធិបរាយណោ អយំ វុច្ចតិ បុគ្គលោ សមណមចលោ ។ កតមោ ច បុគ្គលោ សមណបទុមោ ។



អព្ភូតធម្មៈ វេទល្លៈ មានប្រមាណច្រើន តែបុគ្គលនោះ មិនដឹងនូវអត្ថនៃភាសិតនោះមានប្រមាណច្រើននោះ មិនដឹងនូវធម៌ មិនប្រតិបត្តិធម៌តាមសមគួរដល់ធម៌ បុគ្គល ជាអ្នកចេះដឹងច្រើន តែមិនប្រតិបត្តិតាមដោយការចេះដឹង យ៉ាងនេះឯង ។ បុគ្គលជាអ្នកចេះដឹងច្រើន តាំងប្រតិបត្តិតាមដោយការចេះដឹង តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ មានភាសិតនេះ គឺ សុត្តៈ គេយ្យៈ វេយ្យាករណៈ គាថា ឧទានៈ ឥតិវុត្តកៈ ជាតកៈ អព្ភូតធម្មៈ វេទល្លៈ មានប្រមាណច្រើន តែបុគ្គលនោះ ដឹងនូវអត្ថនៃភាសិតនោះមានប្រមាណច្រើន ដឹងនូវធម៌ ហើយប្រតិបត្តិធម៌តាមសមគួរដល់ធម៌ បុគ្គលជាអ្នកចេះដឹងច្រើន តាំងប្រតិបត្តិតាមដោយការចេះដឹង យ៉ាងនេះឯង ។

[១៦០] បុគ្គលជាសមណៈមិនកម្រើក តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ជាអ្នកដល់នូវសោតៈ មានកិរិយាមិនធ្លាក់ចុះជាធម្មតា ជាបុគ្គលទៀងទាត់ មានការត្រាស់ដឹង ប្រព្រឹត្តទៅខាងមុខ ព្រោះអស់ទៅនៃសញ្ញោជនៈ ៣ នេះហៅថា បុគ្គលជាសមណៈមិនកម្រើក ។ បុគ្គលជាសមណៈដូចផ្កាឈូកក្រហម តើដូចម្តេច ។

ឥធេកច្ចោ បុគ្គលោ តិណ្ណំ សញ្ញោជនានំ បរិក្ខយា រាគទោសមោហានំ តនុត្តា សកទាគាមី ហោតិ សកិទេវ ឥមំ លោកំ អាគន្ត្វា ទុក្ខស្សន្តំ ករោតិ អយំ វុច្ចតិ បុគ្គលោ សមណបទុមោ ។ កតមោ ច បុគ្គលោ សមណបុណ្ឌរីកោ ។ ឥធេកច្ចោ បុគ្គលោ បញ្ចន្នំ ឱរម្ភាគិយានំ សញ្ញោជនានំ បរិក្ខយា ឱបបាតិកោ ហោតិ តត្ថ បរិនិព្វាយី អនាវត្តិធម្មោ តស្មា លោកា អយំ វុច្ចតិ បុគ្គលោ សមណបុណ្ឌរីកោ ។ កតមោ ច បុគ្គលោ សមណេសុ សមណសុខុមាលោ ។ ឥធេកច្ចោ បុគ្គលោ អាសវានំ ខយា អនាសវំ ចេតោវិមុត្តិំ បញ្ញាវិមុត្តិំ ទិដ្ឋេវ ធម្មេ សយំ អភិញ្ញា សច្ឆិកត្វា ឧបសម្បជ្ជ វិហរតិ អយំ វុច្ចតិ បុគ្គលោ សមណេសុ សមណសុខុមាលោ ។

ចតុក្កនិទ្ទេសោ និដ្ឋិតោ ។

---



បុគ្គលខ្លះ ក្នុងលោកនេះ ជាសកទាគាមី មកកាន់លោកនេះអស់វារៈម្តងទៀត ហើយធ្វើនូវទីបំផុតនៃទុក្ខបាន ព្រោះការអស់ទៅនៃសញ្ញោជនៈ ៣ ព្រោះសេចក្តីស្រាលស្តើងនៃរាគៈ ទោសៈ និងមោហៈ នេះហៅថា បុគ្គលជាសមណៈ ដូចផ្កាឈូកក្រហម ។ បុគ្គលជាសមណៈ ដូចផ្កាឈូកស តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ជាឱបបាតិកៈកំណើត ព្រោះការអស់ទៅនៃសញ្ញោជនៈ ជាចំណែកខាងក្រោម ៥ ជាអ្នកបរិនិព្វាន ក្នុងសុទ្ធាវាសព្រហ្មលោកនោះ មានសភាពមិនត្រឡប់ចាកលោកនោះវិញ នេះហៅថា បុគ្គលជាសមណៈ ដូចផ្កាឈូកស ។ បុគ្គលជាសមណៈចម្រើនដោយសុខ ក្នុងពួកសមណៈ តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ធ្វើឲ្យជាក់ច្បាស់សម្រេច ដោយបញ្ញាដ៏ឧត្តមដោយខ្លួនឯង ក្នុងបច្ចុប្បន្ន នូវចេតោវិមុត្តិ និងបញ្ញាវិមុត្តិ ដែលមិនមានអាសវៈ ព្រោះការអស់ទៅនៃអាសវៈទាំងឡាយ នេះហៅថា បុគ្គលជាសមណៈចម្រើនដោយសុខ ក្នុងពួកសមណៈ ។

ចប់ ចតុក្កនិទ្ទេស ។

## បញ្ចកនិទ្ទេសោ

(១៤១) តត្រ យ្វាយំ បុគ្គលោ អារភតិ ច វិប្បដិសារី ច ហោតិ តញ្ច ចេតោវិមុត្តឹ បញ្ញាវិមុត្តឹ យថាភូតំ នប្បជានាតិ យត្ថស្ស តេ ឧប្បន្នា បាបកា អកុសលា ធម្មា អបរិសេសា និរុជ្ឈន្តិ សោ ឯវមស្ស វចនីយោ អាយស្មតោ ខោ អារម្ភជា អាសវា សំវិជ្ជន្តិ វិប្បដិសារជា អាសវា បវឌ្ឍន្តិ សាធុ វតាយស្មា អារម្ភជេ អាសវេ បហាយ វិប្បដិសារជេ អាសវេ បដិវិនោទេត្វា ចិត្តំ បញ្ញញ្ច ភាវេតុ ឯវមាយស្មា អមុនា បញ្ចមេន បុគ្គលេន សមសមោ ភវិស្សតីតិ ។ តត្រ យ្វាយំ បុគ្គលោ អារភតិ ន វិប្បដិសារី ហោតិ តញ្ច ចេតោវិមុត្តឹ បញ្ញាវិមុត្តឹ យថាភូតំ នប្បជានាតិ យត្ថស្ស តេ ឧប្បន្នា បាបកា អកុសលា ធម្មា អបរិសេសា និរុជ្ឈន្តិ សោ ឯវមស្ស វចនីយោ អាយស្មតោ



## បញ្ចកនិទ្ទេស

(១៤១) បណ្ដាបុគ្គលទាំងនោះ បុគ្គលណា ប្រព្រឹត្តល្មើសផង ជាអ្នកមានសេចក្ដីក្ដៅក្រហាយផង មិនដឹងច្បាស់តាមពិត នូវចេតោវិមុត្តិនិងបញ្ញាវិមុត្តិនោះ ដែលជាហេតុធ្វើឲ្យពួកអកុសលធម៌ដ៏លាមកទាំងនោះ របស់បុគ្គលនោះ ដែលកើតឡើងហើយ ឲ្យរលត់ទៅវិញ មិនមានសេសសល់ផង បុគ្គលនោះ គួរឲ្យគេស្ដីបានយ៉ាងនេះថា លោកមានអាយុ អាសវៈទាំងឡាយ ដែលកើតអំពីការប្រព្រឹត្តល្មើស កើតមាន ទាំងអាសវៈទាំងឡាយ ដែលកើតអំពីសេចក្ដីក្ដៅក្រហាយ ចម្រើនដុះដាល (ព្រោះហេតុនោះ) សូមលោកមានអាយុ លះបង់នូវពួកអាសវៈ ដែលកើតអំពីការប្រព្រឹត្តល្មើស បន្ទោបង់នូវពួកអាសវៈ ដែលកើតអំពីសេចក្ដីក្ដៅក្រហាយចោលចេញ ហើយចម្រើន នូវចិត្តនិងបញ្ញាតទៅ កាលបើយ៉ាងនេះ លោកមានអាយុ នឹងជាអ្នកស្មើដោយបុគ្គលទី ៥ ឯណោះ ។ បណ្ដាបុគ្គលទាំងនោះ បុគ្គលណា ប្រព្រឹត្តល្មើស តែជាអ្នកមិនមានសេចក្ដីក្ដៅក្រហាយ ទាំងមិនដឹងតាមពិត នូវចេតោវិមុត្តិនិងបញ្ញាវិមុត្តិនោះ ដែលជាហេតុធ្វើឲ្យពួកអកុសលធម៌ ដ៏លាមកទាំងនោះ របស់បុគ្គលនោះ ដែលកើតឡើងហើយ ឲ្យរលត់ទៅវិញ មិនមានសេសសល់ បុគ្គលនោះ គួរឲ្យគេស្ដីបានយ៉ាងនេះថា

ខោ អារម្ភជា អាសវា សំវិជ្ជន្តិ វិប្បដិសារជា អា-
សវា បវឌ្ឍន្តិ សាធុ វតាយស្មា អារម្ភជេ អាសវេ
បហាយ ចិត្តំ បញ្ញញ្ច ភាវេតុ ឯវមាយស្មា អមុនា
បញ្ចមេន បុគ្គលេន សមសមោ ភវិស្សតីតិ ។
តត្រ យ្វាយំ បុគ្គលោ ន អារម្ភតិ វិប្បដិសារី
ហោតិ តញ្ច ចេតោវិមុត្តិំ បញ្ញាវិមុត្តិំ យថាភូតំ
នប្បជានាតិ យត្ថស្ស តេ ឧប្បន្នា បាបកា អកុ-
សលា ធម្មា អបរិសេសា និរុជ្ឈន្តិ សោ ឯវមស្ស
វចនីយោ អាយស្មតោ ខោ អារម្ភជា អាសវា ន
សំវិជ្ជន្តិ វិប្បដិសារជា អាសវា បវឌ្ឍន្តិ សាធុ
វតាយស្មា វិប្បដិសារជេ អាសវេ បដិវិនោទេត្វា ចិត្តំ
បញ្ញញ្ច ភាវេតុ ឯវមាយស្មា អមុនា បញ្ចមេន
បុគ្គលេន សមសមោ ភវិស្សតីតិ ។ តត្រ យ្វាយំ
បុគ្គលោ ន អារម្ភតិ ន វិប្បដិសារី ហោតិ



លោកមានអាយុ មានអាសវៈទាំងឡាយ ដែលកើតអំពីការប្រព្រឹត្ត
ល្មើសកើតមាន តែមានអាសវៈទាំងឡាយ ដែលកើតអំពីសេចក្ដីក្ដៅ
ក្រហាយ មិនចម្រើនដុះដាលទេ (ព្រោះហេតុនោះ) សូមលោកមាន
អាយុ លះបង់នូវអាសវៈ ដែលកើតអំពីការប្រព្រឹត្តល្មើសចេញ ហើយ
ចម្រើននូវចិត្តនិងបញ្ញាតទៅ កាលបើយ៉ាងនេះ លោកមានអាយុ នឹង
ជាអ្នកស្មើដោយបុគ្គលទី ៥ ឯណោះ ។ បណ្ដាបុគ្គលទាំងនោះ បុគ្គល
ណា មិនប្រព្រឹត្តល្មើសទេ តែមានសេចក្ដីក្ដៅក្រហាយ ទាំងមិនដឹង
ច្បាស់តាមពិត នូវចេតោវិមុត្តិនិងបញ្ញាវិមុត្តិនោះ ដែលជាហេតុធ្វើឲ្យពួក
អកុសលធម៌លាមកទាំងនោះ របស់បុគ្គលនោះ ដែលកើតឡើងហើយ
ឲ្យរលត់ទៅវិញ មិនមានសេសសល់ បុគ្គលនោះ គួរឲ្យគេស្ដីថា
យ៉ាងនេះថា លោកមានអាយុ មានអាសវៈទាំងឡាយ ដែលកើតអំពី
ការប្រព្រឹត្តល្មើស មិនកើតឡើងទេ តែមានអាសវៈទាំងឡាយ ដែល
កើតអំពីសេចក្ដីក្ដៅក្រហាយ ចម្រើនដុះដាល (ព្រោះហេតុនោះ) សូម
លោកមានអាយុ បន្ទោបង់នូវអាសវៈ ដែលកើតអំពីសេចក្ដីក្ដៅក្រហាយ
ចោលចេញ ហើយចម្រើននូវចិត្តនិងបញ្ញាតទៅ កាលបើយ៉ាងនេះ លោក
មានអាយុ នឹងជាអ្នកស្មើដោយបុគ្គលទី៥ឯណោះ ។ បណ្ដាបុគ្គល
ទាំងនោះ បុគ្គលណា មិនប្រព្រឹត្តល្មើស មិនមានសេចក្ដីក្ដៅក្រហាយទេ

តត្ថ ចេតោវិមុត្តឹ បញ្ញាវិមុត្តឹ យថាភូតំ នប្បជានាតិ យត្ថស្ស តេ ឧប្បន្នា បាបកា អកុសលា ធម្មា អបរិសេសា និរុជ្ឈន្តិ សោ ឯវមស្ស វចនីយោ អាយស្មតោ ខោ អារម្ភជា អាសវា ន សំវិជ្ជន្តិ វិប្បដិសារជា អាសវា នប្បវឌ្ឍន្តិ សាធុ វតាយស្មា ចិត្តំ បញ្ញញ្ច ភាវេតុ ឯវមាយស្មា អមុនា បញ្ចមេន បុគ្គលេន សមសមោ ភវិស្សតីតិ ។ ឥមេ ចត្តារោ បុគ្គលា អមុនា បញ្ចមេន បុគ្គលេន ឯវំ ឱវទិយមានា ឯវមនុសាសិយមានា អនុបុព្វេន អាសវានំ ខយំ បាបុណន្តិ ។

(១៦៦) កតមោ ច បុគ្គលោ ទត្វា អវជានាតិ ។ ឥធេកច្ចោ បុគ្គលោ យស្ស បុគ្គលស្ស ទេតិ ចីវរបិណ្ឌបាតសេនាសនគិលានប្បច្ចយភេសជ្ជបរិក្ខារំ តស្ស ឯវំ ហោតិ អហំ ទម្មិ អយំ បន បដិគ្គណ្ហាតីតិ តមេនំ ទត្វា អវជានាតិ ឯវំ បុគ្គលោ ទត្វា អវជានាតិ ។ កតមោ ច បុគ្គលោ សំវាសេន



តែមិនដឹងច្បាស់តាមពិត នូវចេតោវិមុត្តិ និងបញ្ញាវិមុត្តិនោះ ដែលជាហេតុធ្វើឲ្យពួកអកុសលធម៌ដ៏លាមកទាំងនោះ របស់បុគ្គលនោះ ដែលកើតឡើងហើយ ឲ្យរលត់ទៅវិញ មិនមានសេសសល់ បុគ្គលនោះ គួរឲ្យគេស្តីបន្ទោសយ៉ាងនេះថា លោកមានអាយុ មានអាសវៈទាំងឡាយ ដែលកើតអំពីការប្រព្រឹត្តិល្មើសមិនកើតមាន ទាំងមានអាសវៈទាំងឡាយ ដែលកើតអំពីសេចក្តីក្តៅក្រហាយ ក៏មិនចម្រើនដុះដាលឡើយ (ព្រោះហេតុនោះ) សូមលោកមានអាយុ ចម្រើននូវចិត្តនិងបញ្ញាទៅ កាលបើយ៉ាងនេះ លោកមានអាយុ នឹងជាអ្នកស្មើដោយបុគ្គលទី ៥ ឯណោះ ។ នេះ បុគ្គល ៤ ពួក ដែលបុគ្គលជាទី ៥ ឯណោះ កាលទូន្មានយ៉ាងនេះ ប្រៀនប្រដៅយ៉ាងនេះហើយ រមែងដល់នូវការអស់ទៅនៃអាសវៈទាំងឡាយ តាមលំដាប់ ។

(១៦៦) បុគ្គលឲ្យហើយត្រឡប់មើលងាយវិញ តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ឲ្យនូវចីវរ បិណ្ឌបាត សេនាសនៈ និងគិលានប្បច្ច័យភេសជ្ជបរិក្ខារ ដល់បុគ្គលណា បុគ្គលអ្នកឲ្យនោះ មានសេចក្តីត្រិះរិះយ៉ាងនេះថា អាត្មាអញឲ្យ ឯបុគ្គលនេះទទួលយក លុះឲ្យហើយ ត្រឡប់មើលងាយបុគ្គលនោះវិញ បុគ្គលឲ្យហើយ ត្រឡប់មើលងាយវិញ យ៉ាងនេះឯង ។ បុគ្គលមើលងាយ ព្រោះការនៅរួម

ឥធេកច្ចោ យោធាជីវោ ហោតិ អយំ ចតុត្ថោ យោធាជីវោ សន្តោ សំវិជ្ជមានោ លោកស្មឹ ។ បុន ចបរំ ឥធេកច្ចោ យោធាជីវោ សហតិ រជគ្គំ សហតិ ធជគ្គំ សហតិ ឧស្សារណំ សហតិ សម្បហារំ សោ តំ សង្គាមំ អភិវិជិនិត្វា វិជិតសង្គាមោ តមេវ សង្គាមសីសំ អជ្ឈាវសតិ ឯវរូបោបិ ឥធេកច្ចោ យោធាជីវោ ហោតិ អយំ បញ្ចមោ យោធាជីវោ សន្តោ សំវិជ្ជមានោ លោកស្មឹ ។ ឥមេ បញ្ច យោធាជីវា សន្តោ សំវិជ្ជមានា លោកស្មឹ ។

[១៤៤] ឯវមេវ បញ្ចិមេ យោធាជីវូបមា បុគ្គលា សន្តោ សំវិជ្ជមានា ភិក្ខូសុ ។ កតមេ បញ្ច ។ ឥធេកច្ចោ ភិក្ខុ រជគ្គញ្ញេវ ទិស្វា សំសីទតិ វិសីទតិ ន សន្ថម្ភតិ ន សក្កោតិ ព្រហ្មចរិយំ សន្តានេតុំ(១) សិក្ខាទុព្ពល្យំ អាវិកត្វា សិក្ខំ បច្ចក្ខាយ ហីនាយាវត្តតិ ។ កិមស្ស រជគ្គស្មឹ ។ ឥធ ភិក្ខុ សុណាតិ អមុកស្មឹ នាម គាមេ វា

១ ម. សន្ថាបេតុំ ។



ទាហានខ្លះ ក្នុងលោកនេះ មានសភាពយ៉ាងនេះឯង នេះទាហានទី ៤ រមែងមានក្នុងលោក ។ មួយទៀត ទាហានខ្លះ ក្នុងលោកនេះ អត់ទ្រាំនូវចុងនៃធូលី អត់ទ្រាំនូវចុងនៃទង់ជ័យ អត់ទ្រាំនូវសំឡេងហ៊ោ អត់ទ្រាំនូវការប្រហារគ្នា ទាហាននោះ ឈ្នះសង្គ្រាមនោះ មានសង្គ្រាមឈ្នះស្រឡះហើយ ក៏នៅគ្រប់គ្រងក្បាលសង្គ្រាម(១)នោះឯង ទាហានខ្លះ ក្នុងលោកនេះ មានសភាពយ៉ាងនេះឯង នេះទាហានទី ៥ រមែងមានក្នុងលោក ។ នេះ ទាហាន ៥ ពួក រមែងមានក្នុងលោក ។

[១៤៤] បុគ្គល ៥ ពួក ប្រៀបដោយទាហាននេះ រមែងមានក្នុងពួកភិក្ខុ ក៏យ៉ាងនោះឯង ។ ភិក្ខុ ៥ ពួក តើដូចម្តេច ។ ភិក្ខុខ្លះ ក្នុងសាសនានេះ គ្រាន់តែឃើញចុងនៃធូលី ក៏ស្រុត ថយក្រោយ មិនតទល់ មិនអាចបន្តនូវព្រហ្មចរិយធម៌ ធ្វើឲ្យប្រាកដនូវភាពថយកម្លាំងក្នុងសិក្ខា លះបង់នូវសិក្ខា វិលត្រឡប់មកកាន់ភេទថោកទាបវិញ ។ ចុះក្នុងចុងនៃធូលីរបស់ភិក្ខុនោះ ។ ភិក្ខុក្នុងសាសនានេះ បានឮថា ក្នុងស្រុកក្តី

១ ប្រែថា សេនាមុខ ក៏បាន ។

និគមេ វា ឥត្ថី វា កុមារី វា អភិរូបា ទស្សនីយា បាសាទិកា បរមាយ វណ្ណបោក្ខរតាយ សមន្នាគតាតិ អបិច ខោ សាមំ បស្សតិ ឥត្ថឹ វា កុមារឹ វា អភិរូបំ ទស្សនីយំ បាសាទិកំ បរមាយ វណ្ណបោក្ខរតាយ សមន្នាគតំ សោ តំ ទិស្វា សំសីទតិ វិសីទតិ ន សន្ថម្ភតិ ន សក្កោតិ ព្រហ្មចរិយំ សន្ធារេតុំ សិក្ខាទុព្ពល្យំ អាវិកត្វា សិក្ខំ បច្ចក្ខាយ ហីនាយាវត្តតិ ។ ឥទមស្ស ធជគ្គស្មឹ ។ សេយ្យថាបិ សោ យោធាជីវោ សហតិ រជគ្គំ អបិច ខោ ធជគ្គញ្ញេវ ទិស្វា សំសីទតិ វិសីទតិ ន សន្ថម្ភតិ ន សក្កោតិ សង្គាមំ ឱតរិតុំ តថូបមោ អយំ បុគ្គលោ ។ ឯវរូបោបិ ឥធេកច្ចោ បុគ្គលោ ហោតិ ។ អយំ ទុតិយោ យោធាជីវូបមោ បុគ្គលោ សន្តោ សំវិជ្ជមានោ ភិក្ខូសុ ។ បុន ចបរំ ឥធេកច្ចោ ភិក្ខុ សហតិ រជគ្គំ សហតិ ធជគ្គំ អបិច ខោ ឧស្សារណញ្ញេវ សុត្វា សំសីទតិ វិសីទតិ ន សន្ថម្ភតិ





គឺនិគមក្តី ឯណោះ មានស្រី ឬកុមារីមានរូបល្អ គួររមិលមើល គួរជ្រះថ្លា ប្រកបដោយពណ៌នៃសម្បុរដ៏ល្អក្រៃលែង ដូច្នេះ តែបានឃើញដោយខ្លួនឯង នូវស្រីឬកុមារី ដែលមានរូបល្អ គួររមិលមើល គួរជ្រះថ្លា ប្រកបដោយពណ៌នៃសម្បុរដ៏ល្អក្រៃលែង ភិក្ខុនោះ លុះបានឃើញនូវស្រី ឬកុមារីនោះហើយ ក៏ស្រុត ថយក្រោយ មិនហ៊ានតទល់ មិនអាចបន្តនូវព្រហ្មចរិយធម៌ ធ្វើឲ្យប្រាកដ នូវភាពជាអ្នកថយកម្លាំងគឺសិក្ខា លះបង់នូវសិក្ខា វិលត្រឡប់មកកាន់ភេទដ៏ថោកទាបវិញ នេះឈ្មោះថា ចុងនៃទង់ជ័យ របស់ភិក្ខុនោះ ។ ទាហាននោះ អត់ទ្រាំនូវចុងនៃធូលីបានដែរ តែលុះបានឃើញនូវចុងនៃទង់ជ័យ ក៏ស្រុត ថយក្រោយ មិនហ៊ានតទល់ មិនអាចចូលកាន់សង្គ្រាម មានឧបមាយ៉ាងណាមិញ បុគ្គលនេះ ក៏មានឧបមេយ្យយ៉ាងនោះដែរ ។ បុគ្គលខ្លះក្នុងសាសនានេះ មានសភាពយ៉ាងនេះឯង ។ នេះបុគ្គលទី ២ ប្រៀបដោយទាហាន រមែងមានក្នុងពួកភិក្ខុ ។ មួយទៀត ភិក្ខុខ្លះ ក្នុងសាសនានេះ អត់ទ្រាំនូវចុងនៃធូលី អត់ទ្រាំនូវចុងនៃទង់ជ័យបានដែរ តែលុះបានឮសំឡេងហ៊ោ (នៃបច្ចាមិត្ត) ក៏ស្រុត ថយក្រោយ មិនហ៊ានតទល់

សហតិ ធជគ្គំ សហតិ ឧស្សាទនំ អបិច ខោ សម្បហារេ ហញ្ញតិ ព្យាបជ្ជតិ ។ កិមស្ស សម្បហារស្មឹ ។ ឥធ ភិក្ខុ អរញ្ញគតោ វា រុក្ខមូលគតោ វា សុញ្ញាគារគតោ វា មាតុគ្គាមោ ឧបសង្កមិត្វា អភិនិសីទតិ អភិនិបជ្ជតិ អជ្ឈោត្ថរតិ ។ សោ មាតុគ្គាមេន អភិនិសីទិយមានោ អភិនិបជ្ជិយមានោ អជ្ឈោត្ថរិយមានោ សិក្ខំ អបច្ចក្ខាយ ទុព្វល្យំ អនាវិកត្វា មេថុនំ ធម្មំ បដិសេវតិ ឥទមស្ស សម្បហារស្មឹ ។ សេយ្យថាបិ សោ យោធាជីវោ សហតិ រជគ្គំ សហតិ ធជគ្គំ សហតិ ឧស្សាទនំ អបិច ខោ សម្បហារេ ហញ្ញតិ ព្យាបជ្ជតិ តថូបមោ អយំ បុគ្គលោ ។ ឯវរូបោបិ ឥធេកច្ចោ បុគ្គលោ ហោតិ ។ អយំ ចតុត្ថោ យោធាជីវូបមោ បុគ្គលោ សន្តោ សំវិជ្ជមានោ ភិក្ខូសុ ។ បុន ចបរំ ឥធេកច្ចោ ភិក្ខុ សហតិ រជគ្គំ សហតិ ធជគ្គំ សហតិ ឧស្សាទនំ សហតិ សម្បហារំ សោ តំ សង្គាមំ អភិវិជិនិត្វា វិជិតសង្គាមោ តមេវ សង្គាមសីសំ អជ្ឈាវសតិ ។



អត់ទ្រាំនូវចុងនៃទង់ជ័យ អត់ទ្រាំនូវសំឡេងហ៊ោបានផង តែត្រូវគេបៀតបៀន ក៏វិនាសស្លាប់ខ្លួន ព្រោះការប្រហារ (របស់បច្ចាមិត្ត) ។ ចុះម្ដេច ជាការប្រហាររបស់ភិក្ខុនោះ ។ មាតុគ្រាម ចូលទៅរកភិក្ខុក្នុងសាសនានេះ ដែលនៅក្នុងព្រៃក្ដី នៅទៀបគល់ឈើក្ដី នៅក្នុងផ្ទះស្ងាត់ក្ដី ហើយអង្គុយកៀកកើយ ដេកជិត ឱបរឹត ភិក្ខុនោះកាលបើត្រូវមាតុគ្រាម អង្គុយកៀកកើយ ដេកជិត ឱបរឹតហើយ ក៏មិនបានលាលែងនូវសិក្ខា មិនបានធ្វើឲ្យប្រាកដនូវភាពជាអ្នកថយកម្លាំងទេ ហើយសេពនូវមេថុនធម្ម (និងមាតុគ្រាមនោះ) នេះជាការប្រហាររបស់ភិក្ខុនោះ ។ ទាហាននោះ អត់ទ្រាំនូវចុងនៃធូលី អត់ទ្រាំនូវចុងនៃទង់ជ័យ អត់ទ្រាំនូវសំឡេងហ៊ោ (នៃបច្ចាមិត្ត) បានផង តែត្រូវគេបៀតបៀន ក៏វិនាសស្លាប់ខ្លួនក្នុងសង្គ្រាម ពាក្យឧបមាយ៉ាងណាមិញ បុគ្គលនេះ ក៏មានឧបមេយ្យយ៉ាងនោះដែរ ។ បុគ្គលខ្លះ ក្នុងសាសនានេះ មានសភាពយ៉ាងនេះឯង ។ នេះ បុគ្គលទី ៤ ប្រៀបដោយទាហាន រមែងមានក្នុងពួកភិក្ខុ ។ មួយវិញទៀត ភិក្ខុខ្លះ ក្នុងសាសនានេះ អត់ទ្រាំនូវចុងនៃធូលី អត់ទ្រាំនូវចុងនៃទង់ជ័យ អត់ទ្រាំនូវសំឡេងហ៊ោ អត់ទ្រាំនូវការប្រហារបាន ភិក្ខុនោះ ឈ្នះនូវសង្គ្រាមនោះ បានសង្គ្រាមឈ្នះស្រេចហើយ ក៏នៅគ្រប់គ្រងនូវក្បាលសង្គ្រាមជ័យនោះឯង ។

កិមស្ស សង្គាមវិជយស្មឹ ។ ៩៩ ភិក្ខុំ អរញ្ញគតំ វា រុក្ខមូលគតំ វា សុញ្ញាគារគតំ វា មាតុគាមោ ឧបសង្កមិត្វា អភិនិសីទតិ អភិនិបជ្ជតិ អជ្ឈោត្ថរតិ ។ សោ មាតុគាមេន អភិនិសីទិយមានោ អភិនិបជ្ជិយមានោ អជ្ឈោត្ថរិយមានោ វិនិវេឋេត្វា វិនិមោចេត្វា យេន កាមំ បក្កមតិ ។ សោ វិវិត្តំ សេនាសនំ ភជតិ អរញ្ញំ រុក្ខមូលំ បព្វតំ កន្ទរំ គិរិគុហំ សុសានំ វនបត្ថំ អព្ភោកាសំ បលាលបុញ្ជំ ។ សោ អរញ្ញគតោ វា រុក្ខមូលគតោ វា សុញ្ញាគារគតោ វា និសីទតិ បល្លង្កំ អាភុជិត្វា ឧជុំ កាយំ បណិធាយ បរិមុខំ សតិំ ឧបដ្ឋបេត្វា ។ សោ អភិជ្ឈំ លោកេ បហាយ វិគតាភិជ្ឈេន ចេតសា វិហរតិ អភិជ្ឈាយ ចិត្តំ បរិសោធេតិ ព្យាបាទប្បទោសំ បហាយ អព្យាបន្នចិត្តោ វិហរតិ សព្វបាណភូតហិតានុកម្បី





ចុះអ្វី ជាការឈ្នះសង្គ្រាម របស់ភិក្ខុនោះ ។ មាតុគ្រាមចូលទៅរកភិក្ខុ ក្នុងសាសនានេះ ដែលទៅក្នុងព្រៃក្តី នៅទៀបគល់ឈើក្តី នៅក្នុងផ្ទះស្ងាត់ក្តី ហើយអង្គុយកៀកកើយ ដេកជិត ឧបឹត ។ ភិក្ខុនោះ កាលបើត្រូវមាតុគ្រាម អង្គុយកៀកកើយ ដេកជិត ឧបឹតហើយ ក៏ព្រាទះចេញដោះខ្លួន ហៀសចេញទៅតាមប្រាថ្នា ។ ភិក្ខុនោះគប់រក ទីសេនាសនៈស្ងាត់ គឺព្រៃ គល់ឈើ ភ្នំ ជ្រោកភ្នំ រូងភ្នំ ព្រៃស្មសាន ព្រៃធំ ទីវាល គំនរចំបើង ។ ភិក្ខុនោះ នៅក្នុងព្រៃក្តី នៅទៀបគល់ឈើក្តី នៅក្នុងផ្ទះស្ងាត់ក្តី ក៏អង្គុយពែនភ្នែន តម្រង់កាយឲ្យត្រង់ ផ្ចង់ស្មារតី ឲ្យមានមុខឆ្ពោះទៅរកកម្មដ្ឋាន ។ ភិក្ខុនោះ លះបង់នូវអភិជ្ឈា ក្នុងលោក មានចិត្តប្រាសចាកអភិជ្ឈា ជម្រះចិត្តឲ្យស្អាតចាកអភិជ្ឈា លះបង់ព្យាបាទជាគ្រឿងប្រទូស្ត មានចិត្តមិនប្រែគប-ដោយព្យាបាទ មានសេចក្តីអនុគ្រោះដោយប្រយោជន៍ ដល់សព្វសត្វ

ព្យាបាទប្បទោសា ចិត្តំ បរិយោទបេតិ ថីនមិទ្ធំ បហាយ វិគតថីនមិទ្ធោ វិហរតិ អាលោកសញ្ញី សតោ សម្បជានោ ថីនមិទ្ធា ចិត្តំ បរិយោទបេតិ ឧទ្ធច្ចកុក្កុច្ចំ បហាយ អនុទ្ធតោ វិហរតិ អជ្ឈត្តំ វូបសន្តចិត្តោ ឧទ្ធច្ចកុក្កុច្ចា ចិត្តំ បរិយោទបេតិ វិចិកិច្ឆំ បហាយ តិណ្ណវិចិកិច្ឆោ វិហរតិ អកថំកថី កុសលេសុ ធម្មេសុ វិចិកិច្ឆាយ ចិត្តំ បរិយោទបេតិ ។ សោ ឥមេ បញ្ច នីវរណេ បហាយ ចេតសោ ឧបក្កិលេសេ បញ្ញាយ ទុព្វលីករណេ វិវិច្ចេវ កាមេហិ វិវិច្ច អកុសលេហិ ធម្មេហិ សវិតក្កំ សវិចារំ វិវេកជំ បីតិសុខំ បឋមំ ឈានំ ឧបសម្បជ្ជ វិហរតិ វិតក្កវិចារានំ វូបសមាយ ទុតិយំ ឈានំ តតិយំ ឈានំ ចតុត្ថំ ឈានំ ឧបសម្បជ្ជ វិហរតិ ។ សោ ឯវំ សមាហិតេ ចិត្តេ បរិសុទ្ធេ បរិយោទាតេ អនង្គណេ វិគតូបក្កិលេសេ មុទុភូតេ កម្មនិយេ ឋិតេ អានេញ្ជប្បត្តេ អាសវានំ ខយញាណាយ ចិត្តំ អភិនិន្នាមេតិ ។ សោ ឥទំ ទុក្ខន្តិ យថាភូតំ បជានាតិ អយំ ទុក្ខសមុទយោតិ យថាភូតំ បជានាតិ



ជម្រះចិត្តឲ្យស្អាតចាកព្យាបាទជាគ្រឿងប្រទូស្ត លះបង់ថីនមិទ្ធៈ ប្រាសចាកថីនមិទ្ធៈ មានសេចក្តីសំគាល់នូវពន្លឺ មានសតិ មានសម្បជញ្ញៈ ជម្រះចិត្តឲ្យស្អាតចាកថីនមិទ្ធៈ លះបង់ឧទ្ធច្ចកុក្កុច្ចៈ មានចិត្តមិនរវើរវាយ មានចិត្តស្ងប់ស្ងាត់ក្នុងសន្តាន ជម្រះចិត្តឲ្យស្អាត ចាកឧទ្ធច្ចកុក្កុច្ចៈ លះបង់វិចិកិច្ឆា មានវិចិកិច្ឆាឆ្លងផុតហើយ មិនមានសេចក្តីងឿងឆ្ងល់ក្នុងកុសលធម៌ទាំងឡាយ ជម្រះចិត្តឲ្យស្អាតចាកវិចិកិច្ឆា ។ ភិក្ខុនោះ លះបង់នីវរណៈទាំង ៥ នេះ ដែលជាឧបក្កិលេសរបស់ចិត្ត ជាធម្មជាតធ្វើបញ្ញាឲ្យមានកម្លាំងថយថមហើយ ក៏ស្ងាត់ចាកកាមទាំងឡាយ ស្ងាត់ចាកអកុសលធម៌ ក៏បានដល់នូវបឋមជ្ឈាន ប្រកបដោយវិតក្កៈនិងវិចារៈ មានបីតិនិងសុខ ដែលកើតអំពីសេចក្តីស្ងាត់ ហើយសម្រេចសម្រាន្តនៅ ព្រោះរម្ងាប់នូវវិតក្កៈនិងវិចារៈអស់ហើយ ក៏បានដល់នូវទុតិយជ្ឈាន នូវតតិយជ្ឈាន នូវចតុត្ថជ្ឈាន ហើយសម្រេចសម្រាន្តនៅ ។ ភិក្ខុនោះ កាលបើចិត្តតាំងនៅមាំ បរិសុទ្ធផូរផង់ មិនមានទីទួលគឺកិលេស ប្រាសចាកឧបក្កិលេស មានសភាពជាចិត្តទន់ គួរដល់ការងារកម្ម ជាចិត្តនឹងនឹង មិនញាប់ញ័រទៅតាមអារម្មណ៍ ដោយប្រការដូច្នេះហើយ ក៏បង្អោនចិត្តទៅដើម្បីញាណជាទីអស់ទៅ នៃអាសវៈទាំងឡាយ ។ ភិក្ខុនោះ ដឹងច្បាស់តាមពិតថា នេះទុក្ខ ដឹងច្បាស់តាមពិតថា នេះហេតុនាំឲ្យកើតទុក្ខ

អយំ ទុក្ខនិរោធោតិ យថាភូតំ បជានាតិ អយំ ទុក្ខនិរោធគាមិនី បដិបទាតិ យថាភូតំ បជានាតិ ឥមេ អាសវាតិ យថាភូតំ បជានាតិ អយំ អាសវសមុទយោតិ យថាភូតំ បជានាតិ អយំ អាសវនិរោធោតិ យថាភូតំ បជានាតិ អយំ អាសវនិរោធគាមិនី បដិបទាតិ យថាភូតំ បជានាតិ ។ តស្ស ឯវំ ជានតោ ឯវំ បស្សតោ កាមាសវាបិ ចិត្តំ វិមុច្ចតិ ភវាសវាបិ ចិត្តំ វិមុច្ចតិ អវិជ្ជាសវាបិ ចិត្តំ វិមុច្ចតិ ។ វិមុត្តស្មឹ វិមុត្តមិតិ ញាណំ ហោតិ ខីណា ជាតិ វុសិតំ ព្រហ្មចរិយំ កតំ ករណីយំ នាបរំ ឥត្ថត្តាយាតិ បជានាតិ ។ ឥទមស្ស សង្គាមវិជយស្មឹ ។ សេយ្យថាបិ សោ យោធាជីវោ សហតិ រជគ្គំ សហតិ ធជគ្គំ សហតិ ឧស្សារណំ សហតិ សម្បហារំ សោ តំ សង្គាមំ អភិវិជិនិត្វា វិជិតសង្គាមោ តមេវ សង្គាមសីសំ អជ្ឈាវសតិ តថូបមោ អយំ បុគ្គលោ ។ ឯវរូបោបិ ឥធេកច្ចោ បុគ្គលោ ហោតិ ។





ដឹងច្បាស់តាមពិតថា នេះនិរោធទុក្ខ ដឹងច្បាស់តាមពិតថា នេះផ្លូវប្រតិបត្តិទៅកាន់ធម៌រលត់ទុក្ខ ដឹងច្បាស់តាមពិតថា នេះអាសវៈ ដឹងច្បាស់តាមពិតថា នេះហេតុនាំឲ្យកើតអាសវៈ ដឹងច្បាស់តាមពិតថា នេះនិរោធអាសវៈ ដឹងច្បាស់តាមពិតថា នេះផ្លូវប្រតិបត្តិទៅកាន់ធម៌រលត់អាសវៈ ។ កាលបើភិក្ខុនោះ ដឹងយ៉ាងនេះ ឃើញយ៉ាងនេះហើយ ចិត្តក៏រួចចាកកាមាសវៈផង ចិត្តក៏រួចចាកភវាសវៈផង ចិត្តក៏រួចចាកអវិជ្ជាសវៈផង ។ កាលបើចិត្តរួចផុតស្រឡះហើយ សេចក្តីដឹងថា ចិត្តរួចផុតស្រឡះហើយ ក៏កើតមានប្រាកដ ភិក្ខុនោះ ដឹងច្បាស់ថា ជាតិ (របស់អាត្មាអញ) អស់ហើយ មគ្គព្រហ្មចរិយធម៌ អាត្មាអញប្រព្រឹត្តហើយ សោឡសកិច្ច អាត្មាអញបានធ្វើរួចហើយ មគ្គភាវនាកិច្ចដទៃ ប្រព្រឹត្តទៅដើម្បីសោឡសកិច្ចនេះទៀត មិនមានឡើយ ។ នេះឈ្មោះថា ការឈ្នះសង្គ្រាមរបស់ភិក្ខុនោះ ។ ពលទាហាននោះ អត់ទ្រាំនូវចុងនៃធូលី អត់ទ្រាំនូវចុងនៃទង់ជ័យ អត់ទ្រាំនូវសំឡេងហ៊ោ អត់ទ្រាំនូវការប្រហារ (របស់បច្ចាមិត្ត) បាន ពលទាហាននោះ បានឈ្នះនូវសង្គ្រាមនោះ មានសង្គ្រាមឈ្នះស្រឡះហើយ ក៏នៅគ្រប់គ្រងក្បាលសង្គ្រាមនោះឯង មានឧបមាយ៉ាងណាមិញ បុគ្គលនេះ ក៏មានឧបមេយ្យយ៉ាងនោះដែរ ។ បុគ្គលពួកក្នុងសាសនានេះ មានសភាពយ៉ាងនេះឯង ។

អយំ វុច្ចតិ យោធាជីវូបមោ បុគ្គលោ សន្តោ សំវិជ្ជមានោ ភិក្ខូសុ ។ ឥមេ បញ្ច យោធាជីវូបមា បុគ្គលា សន្តោ សំវិជ្ជមានា ភិក្ខូសុ ។

[១៦៤] តត្ថ កតមេ បញ្ច បិណ្ឌបាតិកា ។ មន្ទត្តា មោមូហត្តា បិណ្ឌបាតិកោ ហោតិ បាបិច្ឆោ ឥច្ឆាបកតោ បិណ្ឌបាតិកោ ហោតិ ឧម្មាទា ចិត្តក្ខេបា បិណ្ឌបាតិកោ ហោតិ វណ្ណិតំ ពុទ្ធេហិ ពុទ្ធសាវកេហីតិ បិណ្ឌបាតិកោ ហោតិ អបិច អប្បិច្ឆំយេវ(១) និស្សាយ សន្តុដ្ឋិំយេវ និស្សាយ សល្លេខំយេវ និស្សាយ ឥទមត្ថិតំយេវ និស្សាយ បិណ្ឌបាតិកោ ហោតិ ។ តត្រ យ្វាយំ បិណ្ឌបាតិកោ អប្បិច្ឆំយេវ និស្សាយ សន្តុដ្ឋិំយេវ និស្សាយ សល្លេខំយេវ និស្សាយ ឥទមត្ថិតំយេវ និស្សាយ បិណ្ឌបាតិកោ អយំ ឥមេសំ បញ្ចន្នំ បិណ្ឌបាតិកានំ អគ្គោ ច សេដ្ឋោ ច បាមោក្ខោ ច ឧត្តមោ ច បវរោ ច ។ សេយ្យថាបិ គវា ខីរំ ខីរម្ហា

១ ម. អប្បិច្ឆតញ្ញេវ និស្សាយ ។



នេះបុគ្គលទី ៥ ប្រៀបដោយទាហាន រមែងមានក្នុងពួកភិក្ខុ ។ នេះបុគ្គល ៥ ពួក ប្រៀបដោយទាហាន រមែងមានក្នុងពួកភិក្ខុ ។

(១៦៤) បណ្ដាបុគ្គលទាំងនោះ បុគ្គល ៥ ពួក ជាអ្នកប្រព្រឹត្តបិណ្ឌបាតិកធុតង្គ តើដូចម្ដេច ។ ភិក្ខុជាអ្នកប្រព្រឹត្តបិណ្ឌបាតិកធុតង្គ ព្រោះតែខ្លៅខ្លៅ ជាបុគ្គលល្ងង់ ជាបុគ្គលវង្វេង ១ ភិក្ខុមានសេចក្ដីប្រាថ្នាលាមក ត្រូវសេចក្ដីប្រាថ្នាគ្របសង្កត់ហើយ ជាអ្នកប្រព្រឹត្តបិណ្ឌបាតិកធុតង្គ ១ ភិក្ខុប្រព្រឹត្តបិណ្ឌបាតិកធុតង្គ ព្រោះការឆ្កួតនិងការរាយមាយចិត្ត ១ ភិក្ខុប្រព្រឹត្តបិណ្ឌបាតិកធុតង្គ ដោយគិតថា បិណ្ឌបាតិកង្គ ជាកិច្ចដែលព្រះពុទ្ធនិងពុទ្ធសាវ័កទាំងឡាយ សរសើរហើយ ១ មួយវិញទៀត ភិក្ខុអាស្រ័យសេចក្ដីប្រាថ្នាតិច អាស្រ័យសេចក្ដីសន្ដោស អាស្រ័យការជុសខាត់ចិត្ត អាស្រ័យសេចក្ដីប្រតិបត្តិជាប្រយោជន៍ ហើយជាអ្នកប្រព្រឹត្តបិណ្ឌបាតិកធុតង្គ ១ ។ បណ្ដាភិក្ខុទាំងនោះ បិណ្ឌបាតិកភិក្ខុណា អាស្រ័យសេចក្ដីប្រាថ្នាតិច អាស្រ័យសេចក្ដីសន្ដោស អាស្រ័យការជុសខាត់ចិត្ត អាស្រ័យសេចក្ដីប្រតិបត្តិជាប្រយោជន៍ ហើយជាអ្នកប្រព្រឹត្តបិណ្ឌបាតិកធុតង្គ បណ្ដាបិណ្ឌបាតិកភិក្ខុទាំង ៥ ពួកនេះ ភិក្ខុនេះ លើសលុបផង វិសេសវិសាលផង ជាប្រធានផង ខ្ពង់ខ្ពស់ផង ប្រសើរជាងគេផង ។ ដូចជាទឹកដោះស្រស់ កើតអំពីមេគោ

ទធិ ទធិម្ហា នវនីតំ នវនីតម្ហា សប្បិ សប្បិម្ហា សប្បិមណ្ឌោ សប្បិមណ្ឌំ តត្ថ អគ្គមក្ខាយតិ ឯវមេវ យ្វាយំ បិណ្ឌបាតិកោ អប្បិច្ឆំយេវ និស្សាយ សន្តុដ្ឋឹយេវ និស្សាយ សល្លេខំយេវ និស្សាយ ឥទមត្ថិតំយេវ និស្សាយ បិណ្ឌបាតិកោ ហោតិ អយំ ឥមេសំ បញ្ចន្នំ បិណ្ឌបាតិកានំ អគ្គោ ច សេដ្ឋោ ច បាមោក្ខោ ច ឧត្តមោ ច បវរោ ច ។ ឥមេ បញ្ច បិណ្ឌបាតិកា ។

(១៦៦) តត្ថ កតមេ បញ្ច ខលុបច្ឆាភត្តិកា បញ្ច ឯកាសនិកា បញ្ច បំសុកូលិកា បញ្ច តេចីវរិកា បញ្ច អារញ្ញិកា បញ្ច រុក្ខមូលិកា បញ្ច អព្ភោកាសិកា បញ្ច នេសជ្ជិកា បញ្ច យថាសន្ថតិកា ។ តត្ថ កតមេ បញ្ច សោសានិកា ។



ទឹកដោះជូរ កើតអំពីទឹកដោះស្រស់ ទឹកដោះខាប់ កើតអំពីទឹកដោះជូរ ទឹកដោះរាវ កើតអំពីទឹកដោះខាប់ ទឹកដោះថ្លា កើតអំពីទឹកដោះរាវ បណ្ដាទឹកដោះទាំងនោះ ទឹកដោះថ្លា ប្រាកដជាប្រសើរជាង យ៉ាងណាមិញ បិណ្ឌបាតិកភិក្ខុណា ដែលអាស្រ័យសេចក្ដីប្រាថ្នាតិច អាស្រ័យសេចក្ដីសន្ដោស អាស្រ័យការផុសខាត់ចិត្ត អាស្រ័យការប្រព្រឹត្តជាប្រយោជន៍ ហើយជាអ្នកប្រព្រឹត្តបិណ្ឌបាតិកធុតង្គ បណ្ដាបិណ្ឌបាតិកភិក្ខុទាំង ៥ ពួកនេះ ភិក្ខុនេះ លើសលុបផង វិសេសវិសាលផង ជាប្រធានផង ខ្ពង់ខ្ពស់ផង ប្រសើរជាងគេផង ក៏យ៉ាងនោះដែរ ។ នេះ បុគ្គល ៥ ពួក ជាអ្នកប្រព្រឹត្តបិណ្ឌបាតិកធុតង្គ ។

(១៦៦) បណ្ដាបុគ្គលទាំងនោះ បុគ្គល ៥ ពួក ជាអ្នកប្រព្រឹត្តខលុបច្ឆាភត្តិកធុតង្គ បុគ្គល ៥ ពួក ជាអ្នកប្រព្រឹត្តឯកាសនិកធុតង្គ បុគ្គល ៥ ពួក ជាអ្នកប្រព្រឹត្តបំសុកូលិកធុតង្គ បុគ្គល ៥ ពួក ជាអ្នកប្រព្រឹត្តតេចីវរិកធុតង្គ បុគ្គល ៥ ពួក ជាអ្នកប្រព្រឹត្តអារញ្ញិកធុតង្គ បុគ្គល ៥ ពួក ជាអ្នកប្រព្រឹត្តរុក្ខមូលិកធុតង្គ បុគ្គល ៥ ពួក ជាអ្នកប្រព្រឹត្តអព្ភោកាសិកធុតង្គ បុគ្គល ៥ ពួក ជាអ្នកប្រព្រឹត្តនេសជ្ជិកធុតង្គ បុគ្គល ៥ ពួក ជាអ្នកប្រព្រឹត្តយថាសន្ថតិកធុតង្គ តើដូចម្ដេច ។ បណ្ដាបុគ្គលទាំងនោះ បុគ្គល ៥ ពួក ជាអ្នកប្រព្រឹត្តសោសានិកធុតង្គ តើដូចម្ដេច ។

មន្ទត្តា មោមូហត្តា សោសានិកោ ហោតិ បា-
បិច្ឆោ ឥច្ឆាបកតោ សោសានិកោ ហោតិ ឧម្មាទា
ចិត្តក្ខេបា សោសានិកោ ហោតិ វណ្ណិតំ ពុទ្ធេហិ
ពុទ្ធសាវកេហីតិ សោសានិកោ ហោតិ អបិច
អប្បិច្ឆំយេវ និស្សាយ សន្តុដ្ឋឹយេវ និស្សាយ សល្លេខំ-
យេវ និស្សាយ ឥទមត្ថិតំយេវ និស្សាយ សោសា-
និកោ ហោតិ ។ តត្រ យ្វាយំ សោសានិកោ
អប្បិច្ឆំយេវ និស្សាយ សន្តុដ្ឋឹយេវ និស្សាយ សល្លេខំ-
យេវ និស្សាយ ឥទមត្ថិតំយេវ និស្សាយ សោសា-
និកោ អយំ ឥមេសំ បញ្ចន្នំ សោសានិកានំ អគ្គោ
ច សេដ្ឋោ ច បាមោក្ខោ ច ឧត្តមោ ច បវរោ
ច ។ សេយ្យថាបិ នាម គវា ខីរំ ខីរម្ហា ទធិ
ទធិម្ហា នវនីតំ នវនីតម្ហា សប្បិ សប្បិម្ហា សប្បិ-
មណ្ឌោ សប្បិមណ្ឌំ តត្ថ អគ្គមក្ខាយតិ ឯវមេវ
យ្វាយំ សោសានិកោ អប្បិច្ឆំយេវ និស្សាយ



កិច្ចប្រព្រឹត្តសោសានិកធុតង្គ ព្រោះតែការខ្លួនជាមនុស្សល្ងង់ ជាមនុស្ស
វង្វេង ១ កិច្ចមានសេចក្ដីប្រាថ្នាលាមក ត្រូវសេចក្ដីប្រាថ្នាគ្របសង្កត់
ហើយ ជាអ្នកប្រព្រឹត្តសោសានិកធុតង្គ ១ កិច្ចប្រព្រឹត្តសោសានិកធុតង្គ
ព្រោះតែវង្វេងចិត្ត និងការរើរាយចិត្ត ១ កិច្ចប្រព្រឹត្តសោសានិកធុតង្គ
ដោយគិតថា សោសានិកធុតង្គនេះ ជាកិច្ចដែលព្រះពុទ្ធនិងពុទ្ធសាវក
ទាំងឡាយសរសើរហើយ ១ មួយវិញទៀត កិច្ចអាស្រ័យសេចក្ដីប្រាថ្នា
តិច អាស្រ័យសេចក្ដីសន្ដោស អាស្រ័យការជុសខាត់ចិត្ត អាស្រ័យ
សេចក្ដីប្រតិបត្តិជាប្រយោជន៍ ហើយជាអ្នកប្រព្រឹត្តសោសានិកធុតង្គ ១ ។
បណ្ដាកិច្ចទាំងនោះ សោសានិកកិច្ចណា អាស្រ័យសេចក្ដីប្រាថ្នាតិច
អាស្រ័យសេចក្ដីសន្ដោស អាស្រ័យការជុសខាត់ចិត្ត អាស្រ័យសេចក្ដី
ប្រតិបត្តិជាប្រយោជន៍ ហើយជាអ្នកប្រព្រឹត្តសោសានិកធុតង្គ បណ្ដាសោ-
សានិកកិច្ចទាំង ៥ ពួកនេះ កិច្ចនេះ លើសលុបផង វិសេសវិសាល
ផង ជាប្រធានផង ខ្ពង់ខ្ពស់ផង ប្រសើរជាងគេផង ។ ទឹកដោះ
ស្រស់ កើតអំពីមេគោ ទឹកដោះជូរ កើតអំពីទឹកដោះស្រស់ ទឹកដោះ
ខាប់ កើតអំពីទឹកដោះជូរ ទឹកដោះរាវ កើតអំពីទឹកដោះខាប់ ទឹកដោះថ្លា
កើតអំពីទឹកដោះរាវ បណ្ដាទឹកដោះទាំងនោះ ទឹកដោះថ្លាប្រាកដជាប្រសើរ
ជាង យ៉ាងណាមិញ សោសានិកកិច្ចណា អាស្រ័យសេចក្ដីប្រាថ្នាតិច

សន្តុដ្ឋឹយេវ និស្សាយ សល្លេខំយេវ និស្សាយ ឥទមត្ថិតំយេវ និស្សាយ សោសានិកោ ហោតិ អយំ ឥមេសំ បញ្ចន្នំ សោសានិកានំ អគ្គោ ច សេដ្ឋោ ច បាមោក្ខោ ច ឧត្តមោ ច បវរោ ច ។ ឥមេ បញ្ច សោសានិកាតិ ។

បញ្ចកនិទ្ទេសោ និដ្ឋិតោ ។

---

## ឆក្កនិទ្ទេសោ

[ ១៤៧ ] តត្រ យ្វាយំ បុគ្គលោ បុព្វេ អននុស្សុតេសុ ធម្មេសុ សាមំ សច្ចានិ អភិសម្ពុជ្ឈតិ តត្ថ ច សព្វញ្ញុតំ បាបុណាតិ ពលេសុ ច វសីភាវំ សម្មាសម្ពុទ្ធោ តេន ទដ្ឋព្វោ ។ តត្រ យ្វាយំ បុគ្គលោ បុព្វេ អននុស្សុតេសុ ធម្មេសុ សាមំ សច្ចានិ អភិសម្ពុជ្ឈតិ ន ច តត្ថ សព្វញ្ញុតំ បាបុណាតិ ន ពលេសុ ច វសីភាវំ បច្ចេកសម្ពុទ្ធោ តេន ទដ្ឋព្វោ ។



អាស្រ័យសេចក្តីសន្តោស អាស្រ័យការផ្សួសកាត់ចិត្ត អាស្រ័យសេចក្តីប្រតិបត្តិជាប្រយោជន៍ ហើយជាអ្នកប្រព្រឹត្តសោសានិកធុតង្គ បណ្តាសោសានិកភិក្ខុទាំង ៥ ពួកនេះ ភិក្ខុនេះ លើសលុបផង វិសេសវិសាលផង ជាប្រធានផង ខ្ពង់ខ្ពស់ផង ប្រសើរជាងគេផង ក៏យ៉ាងនោះដែរ ។ នេះ បុគ្គល ៥ ពួក ជាអ្នកប្រព្រឹត្តសោសានិកធុតង្គ ។

ចប់ បញ្ចកនិទ្ទេស ។

---

## ឆក្កនិទ្ទេស

[ ១៤៧ ] បណ្តាបុគ្គលទាំងនោះ បុគ្គលណា ត្រាស់ដឹងដោយខ្លួនឯង នូវសច្ចៈ ក្នុងធម៌ទាំងឡាយ ដែលខ្លួនមិនធ្លាប់ឮ ក្នុងកាលមុន ក៏ដល់នូវសព្វញ្ញុតញ្ញាណ ក្នុងធម៌ទាំងនោះផង ដល់នូវភាពស្ទាត់ ក្នុងទសពលញ្ញាណផង បណ្ឌិតគប្បីជ្រាបថា បុគ្គលនោះ គឺព្រះសម្មាសម្ពុទ្ធ ដោយហេតុនោះ ។ បណ្តាបុគ្គលទាំងនោះ បុគ្គលណា ត្រាស់ដឹងដោយខ្លួនឯង នូវសច្ចៈ ក្នុងធម៌ទាំងឡាយ ដែលខ្លួនមិនធ្លាប់ឮ ក្នុងកាលមុន តែមិនដល់នូវសព្វញ្ញុតញ្ញាណ ក្នុងធម៌ទាំងនោះផង មិនដល់នូវភាពស្ទាត់ ក្នុងទសពលញ្ញាណផង បណ្ឌិតគប្បីជ្រាបថា បុគ្គលនោះ គឺព្រះបច្ចេកសម្ពុទ្ធ ដោយហេតុនោះ ។ បណ្តាបុគ្គល

តត្រ យ្វាយំ បុគ្គលោ បុព្វេ អននុស្សុតេសុ ធម្មេសុ សាមំ សច្ចានិ អនភិសម្ពុជ្ឈតិ ទិដ្ឋេវ ធម្មេ ទុក្ខស្សន្តការោ ហោតិ សាវកបារមិញ្ច បាបុណាតិ សារីបុត្តមោគ្គល្លានា តេន ទដ្ឋព្វា ។ តត្រ យ្វាយំ បុគ្គលោ បុព្វេ អននុស្សុតេសុ ធម្មេសុ សាមំ សច្ចានិ អនភិសម្ពុជ្ឈតិ ទិដ្ឋេវ ធម្មេ ទុក្ខស្សន្តការោ ហោតិ ន ច សាវកបារមឹ បាបុណាតិ អវសេសា អរហន្តោ តេន ទដ្ឋព្វា ។ តត្រ យ្វាយំ បុគ្គលោ បុព្វេ អននុស្សុតេសុ ធម្មេសុ សាមំ សច្ចានិ អនភិសម្ពុជ្ឈតិ ន ច ទិដ្ឋេវ ធម្មេ ទុក្ខស្សន្តការោ ហោតិ អនាគាមី ហោតិ អនាគន្ត្វា ឥត្ថត្តំ អនាគាមី តេន ទដ្ឋព្វោ ។ តត្រ យ្វាយំ បុគ្គលោ បុព្វេ អននុស្សុតេសុ ធម្មេសុ សាមំ សច្ចានិ អនភិសម្ពុជ្ឈតិ ន ច ទិដ្ឋេវ ធម្មេ ទុក្ខស្សន្តការោ ហោតិ



ទាំងនោះ បុគ្គលណា មិនត្រាស់ដឹងដោយខ្លួនឯង នូវសច្ចៈ ក្នុងធម៌ទាំងឡាយ ដែលខ្លួនមិនធ្លាប់ឮក្នុងកាលមុន តែជាអ្នកធ្វើនូវទីបំផុតនៃកងទុក្ខ ក្នុងបច្ចុប្បន្នផង ដល់នូវសាវកបារមីញាណផង បណ្ឌិតគប្បីជ្រាបថា បុគ្គលនោះ គឺព្រះសារីបុត្តនិងព្រះមោគ្គល្លាន ដោយហេតុនោះ ។ បណ្ដាបុគ្គលទាំងនោះ បុគ្គលណា មិនត្រាស់ដឹង ដោយខ្លួនឯង នូវសច្ចៈ ក្នុងធម៌ទាំងឡាយ ដែលខ្លួនមិនធ្លាប់ឮក្នុងកាលមុន ជាអ្នកធ្វើនូវទីបំផុតនៃកងទុក្ខ ក្នុងបច្ចុប្បន្នបាន តែមិនដល់នូវសាវកបារមីញាណឡើយ បណ្ឌិតគប្បីជ្រាបថា បុគ្គលនោះ គឺពួកព្រះអរហន្តដ៏សេស ដោយហេតុនោះ ។ បណ្ដាបុគ្គលទាំងនោះ បុគ្គលណា មិនត្រាស់ដឹង ដោយខ្លួនឯងនូវសច្ចៈ ក្នុងធម៌ទាំងឡាយ ដែលខ្លួនមិនធ្លាប់ឮក្នុងកាលមុនផង ជាអ្នកមិនទាន់ធ្វើនូវទីបំផុតនៃកងទុក្ខ ក្នុងបច្ចុប្បន្នផង ជាអនាគាមិបុគ្គល ព្រោះមិនមកកាន់មនុស្សលោកនេះទៀតផង បណ្ឌិតគប្បីជ្រាបថា បុគ្គលនោះ គឺអនាគាមិបុគ្គល ដោយហេតុនោះ ។ បណ្ដាបុគ្គលទាំងនោះ បុគ្គលណា មិនត្រាស់ដឹង ដោយខ្លួនឯង នូវសច្ចៈ ក្នុងធម៌ទាំងឡាយ ដែលខ្លួនមិនធ្លាប់ឮក្នុងកាលមុនផង ជាអ្នកមិនទាន់ធ្វើនូវទីបំផុតនៃកងទុក្ខ ក្នុងបច្ចុប្បន្ន នៅតែមក

អាគន្ត្វា ឥត្ថត្តំ សោតាបន្នសកទាគាមិនោ នេច ឆដ្ឋា ។

ឆក្កនិទ្ទេសោ និដ្ឋិតោ ។

---

# សត្តកនិទ្ទេសោ

(១៤៨) កតមោ ច បុគ្គលោ សកឹ និមុគ្គោ និមុគ្គោវ ហោតិ ។ ឥធេកច្ចោ បុគ្គលោ សមន្នាគតោ ហោតិ ឯកន្តកាឡកេហិ អកុសលេហិ ធម្មេហិ ឯវំ បុគ្គលោ សកឹ និមុគ្គោ និមុគ្គោវ ហោតិ ។ កតមោ ច បុគ្គលោ ឧម្មុជ្ជិត្វា និមុជ្ជតិ ។ ឥធេកច្ចោ បុគ្គលោ ឧម្មុជ្ជតិ សាហុ សទ្ធា កុសលេសុ ធម្មេសុ ឧម្មុជ្ជតិ សាហុ ហិរី កុសលេសុ ធម្មេសុ ឧម្មុជ្ជតិ សាហុ ឱត្តប្បំ កុសលេសុ ធម្មេសុ ឧម្មុជ្ជតិ សាហុ វីរិយំ កុសលេសុ ធម្មេសុ ឧម្មុជ្ជតិ សាហុ បញ្ញា កុសលេសុ ធម្មេសូតិ តស្ស សា សទ្ធា នេវ តិដ្ឋតិ នោ វឌ្ឍតិ ហាយតិយេវ តស្ស សា ហិរី នេវ តិដ្ឋតិ នោ វឌ្ឍតិ ហាយតិយេវ





កាន់មនុស្សលោកនេះទៀតផង បណ្ឌិតគប្បីជ្រាបថា បុគ្គលនោះ គឺ ព្រះសោតាបន្នបុគ្គលនិងព្រះសកទាគាមិបុគ្គល ដោយហេតុនោះ ។

ចប់ ឆក្កនិទ្ទេស ។

---

# សត្តកនិទ្ទេស

(១៤៨) បុគ្គលមុជចុះតែម្តង ហើយនៅតែមុជចុះទៅទៀត តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ប្រកបដោយអកុសលធម៌ ខ្មៅតែម្យ៉ាង បុគ្គលមុជចុះតែម្តង ហើយនៅតែមុជចុះទៅទៀត យ៉ាងនេះឯង ។ បុគ្គលងើបឡើងហើយមុជចុះទៅវិញ តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ងើបឡើងក្នុងធម៌ជាកុសល ប្រកបដោយសទ្ធាដ៏ប្រពៃ ងើបឡើងក្នុងធម៌ជាកុសល ប្រកបដោយហិរិដ៏ប្រពៃ ងើបឡើងក្នុងធម៌ជាកុសល ប្រកបដោយឱត្តប្បៈដ៏ប្រពៃ ងើបឡើងក្នុងធម៌ជាកុសល ប្រកបដោយវិរិយៈដ៏ប្រពៃ ងើបឡើងក្នុងធម៌ជាកុសល ប្រកបដោយបញ្ញាដ៏ប្រពៃ តែសទ្ធានោះ របស់បុគ្គលនោះ មិននៅនឹង មិនចំរើនឡើង តែងសាបសូន្យទៅវិញ ហិរិនោះ របស់បុគ្គលនោះ មិននៅនឹង មិនចំរើនឡើង តែងសាបសូន្យទៅវិញ

តស្ស តំ ឱត្តប្បំ នេវ តិដ្ឋតិ នោ វឌ្ឍតិ ហាយតិយេវ តស្ស តំ វីរិយំ នេវ តិដ្ឋតិ នោ វឌ្ឍតិ ហាយតិយេវ តស្ស សា បញ្ញា នេវ តិដ្ឋតិ នោ វឌ្ឍតិ ហាយតិយេវ ឯវំ បុគ្គលោ ឧម្មុជ្ជិត្វា និមុជ្ជតិ ។

កថញ្ច បុគ្គលោ ឧម្មុជ្ជិត្វា ឋិតោ ហោតិ ។ ឥធេកច្ចោ បុគ្គលោ ឧម្មុជ្ជតិ សាហុ សទ្ធា កុសលេសុ ធម្មេសុ . . . សាហុ ហិរិ កុសលេសុ ធម្មេសុ សាហុ ឱត្តប្បំ កុសលេសុ ធម្មេសុ សាហុ វីរិយំ កុសលេសុ ធម្មេសុ សាហុ បញ្ញា កុសលេសុ ធម្មេសុ ។ តស្ស សា សទ្ធា នេវ ហាយតិ នោ វឌ្ឍតិ ឋិតា ហោតិ តស្ស សា ហិរិ នេវ ហាយតិ នោ វឌ្ឍតិ ឋិតា ហោតិ តស្ស តំ ឱត្តប្បំ នេវ ហាយតិ នោ វឌ្ឍតិ ឋិតំ ហោតិ តស្ស តំ វីរិយំ នេវ ហាយតិ នោ វឌ្ឍតិ ឋិតំ ហោតិ តស្ស សា បញ្ញា នេវ ហាយតិ នោ វឌ្ឍតិ ឋិតា ហោតិ ឯវំ បុគ្គលោ ឧម្មុជ្ជិត្វា ឋិតោ ហោតិ ។ កថញ្ច បុគ្គលោ ឧម្មុជ្ជិត្វា វិបស្សតិ វិលោកេតិ ។ ឥធេកច្ចោ បុគ្គលោ





ឱត្តប្បៈនោះ របស់បុគ្គលនោះ មិននៅនឹង មិនចំរើនឡើង តែងសាបសូន្យទៅវិញ វីរិយៈនោះ របស់បុគ្គលនោះ មិននៅនឹង មិនចំរើនឡើង តែងសាបសូន្យទៅវិញ បញ្ញានោះ របស់បុគ្គលនោះ មិននៅនឹង មិនចំរើនឡើង តែងសាបសូន្យទៅវិញ បុគ្គលងើបឡើងហើយមុជចុះទៅវិញ យ៉ាងនេះឯង ។ បុគ្គលងើបឡើងហើយឋិតនៅ តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ងើបឡើងក្នុងធម៌ជាកុសល ប្រកបដោយសទ្ធាដ៏ប្រពៃ ... ក្នុងធម៌ជាកុសល ប្រកបដោយហិរិដ៏ប្រពៃ ក្នុងធម៌ជាកុសល ប្រកបដោយឱត្តប្បៈដ៏ប្រពៃ ក្នុងធម៌ជាកុសល ប្រកបដោយវីរិយៈដ៏ប្រពៃ ក្នុងធម៌ជាកុសល ប្រកបដោយបញ្ញាដ៏ប្រពៃ សទ្ធានោះ របស់បុគ្គលនោះ មិនសាបសូន្យទៅ មិនចំរើនឡើង ឋិតនៅនឹងដដែល ហិរិនោះ របស់បុគ្គលនោះ មិនសាបសូន្យ មិនចំរើនឡើង ឋិតនៅនឹងដដែល ឱត្តប្បៈនោះ របស់បុគ្គលនោះ មិនសាបសូន្យ មិនចំរើនឡើង ឋិតនៅនឹងដដែល វីរិយៈនោះ របស់បុគ្គលនោះ មិនសាបសូន្យ មិនចំរើនឡើង ឋិតនៅនឹងដដែល បញ្ញានោះ របស់បុគ្គលនោះ មិនសាបសូន្យ មិនចំរើនឡើង ឋិតនៅនឹងដដែល បុគ្គលងើបឡើងហើយឋិតនៅ យ៉ាងនេះឯង ។ បុគ្គលងើបឡើងហើយរមិលមើល ក្រឡេកមើល តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ

ឥធេកច្ចោ បុគ្គលោ ឧម្មុជ្ជតិ សាហុ សទ្ធា កុសលេសុ ធម្មេសុ ... សាហុ ហិរី កុសលេសុ ធម្មេសុ សាហុ ឱត្តប្បំ កុសលេសុ ធម្មេសុ សាហុ វីរិយំ កុសលេសុ ធម្មេសុ សាហុ បញ្ញា កុសលេសុ ធម្មេសូតិ សោ បញ្ចន្នំ ឱរម្ភាគិយានំ សំយោជនានំ បរិក្ខយា ឱបបាតិកោ ហោតិ តត្ថ បរិនិព្វាយី អនាវត្តិធម្មោ តស្មា លោកា ឯវំ បុគ្គលោ ឧម្មុជ្ជិត្វា បដិគាធប្បត្តោ ហោតិ ។ កថញ្ច បុគ្គលោ ឧម្មុជ្ជិត្វា តិណ្ណោ ហោតិ បារគតោ ថលេ តិដ្ឋតិ ព្រាហ្មណោ ។ ឥធេកច្ចោ បុគ្គលោ ឧម្មុជ្ជតិ សាហុ សទ្ធា កុសលេសុ ធម្មេសុ ឧម្មុជ្ជតិ សាហុ ហិរី កុសលេសុ ធម្មេសុ ឧម្មុជ្ជតិ សាហុ ឱត្តប្បំ កុសលេសុ ធម្មេសុ ឧម្មុជ្ជតិ សាហុ វីរិយំ កុសលេសុ ធម្មេសុ ឧម្មុជ្ជតិ សាហុ បញ្ញា កុសលេសុ ធម្មេសូតិ សោ អាសវានំ ខយា អនាសវំ ចេតោវិមុត្តឹ បញ្ញាវិមុត្តឹ ទិដ្ឋេវ ធម្មេ សយំ អភិញ្ញា សច្ឆិកត្វា ឧបសម្បជ្ជ វិហរតិ ឯវំ បុគ្គលោ ឧម្មុជ្ជិត្វា តិណ្ណោ ហោតិ បារគតោ ថលេ តិដ្ឋតិ ព្រាហ្មណោ ។



បុគ្គលខ្លះ ក្នុងលោកនេះ ងើបឡើង ក្នុងធម៌ជាកុសល ប្រកបដោយសទ្ធាដ៏ប្រពៃ ... ក្នុងធម៌ជាកុសល ប្រកបដោយហិរិដ៏ប្រពៃ ក្នុងធម៌ជាកុសល ប្រកបដោយឱត្តប្បៈដ៏ប្រពៃ ក្នុងធម៌ជាកុសល ប្រកបដោយវីរិយៈដ៏ប្រពៃ ក្នុងធម៌ជាកុសល ប្រកបដោយបញ្ញាដ៏ប្រពៃ បុគ្គលនោះ ជាឱបបាតិកកំណើត ព្រោះអស់ទៅនៃសញ្ញោជនៈ ជាចំណែកខាងក្រោម ៥ បរិនិព្វានក្នុងសុទ្ធាវាសព្រហ្មលោកនោះ មានសភាពមិនវិលត្រឡប់ចាកព្រហ្មលោកនោះវិញ បុគ្គលងើបឡើង ដល់កំពង់ហើយឋិតនៅ យ៉ាងនេះឯង ។ បុគ្គលងើបឡើង ឆ្លងដល់ត្រើយ ជាព្រាហ្មណ៍ឋិតនៅលើគោក តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ងើបឡើងក្នុងធម៌ជាកុសល ប្រកបដោយសទ្ធាដ៏ប្រពៃ ងើបឡើងក្នុងធម៌ជាកុសល ប្រកបដោយហិរិដ៏ប្រពៃ ងើបឡើងក្នុងធម៌ជាកុសល ប្រកបដោយឱត្តប្បៈដ៏ប្រពៃ ងើបឡើងក្នុងធម៌ជាកុសល ប្រកបដោយវីរិយៈដ៏ប្រពៃ ងើបឡើងក្នុងធម៌ជាកុសល ប្រកបដោយបញ្ញាដ៏ប្រពៃ បុគ្គលនោះ ធ្វើឲ្យជាក់ច្បាស់ សម្រេច ដោយបញ្ញាដ៏ឧត្តមដោយខ្លួនឯង ក្នុងបច្ចុប្បន្ន នូវចេតោវិមុត្តិ បញ្ញាវិមុត្តិ ដែលមិនមានអាសវៈ ព្រោះអស់ទៅនៃអាសវៈទាំងឡាយ ហើយសម្រេចសម្រាន្តនៅ បុគ្គលងើបឡើងឆ្លងដល់ត្រើយ ជាព្រាហ្មណ៍ឋិតនៅលើគោក យ៉ាងនេះឯង ។

[១៦៤] កតមោ ច បុគ្គលោ ឧភតោភាគវិមុត្តោ ។ ឥធេកច្ចោ បុគ្គលោ អដ្ឋ វិមោក្ខេ កាយេន ផុសិត្វា វិហរតិ បញ្ញាយ ចស្ស ទិស្វា អាសវា បរិក្ខីណា ហោន្តិ អយំ វុច្ចតិ បុគ្គលោ ឧភតោភាគវិមុត្តោ ។ កតមោ ច បុគ្គលោ បញ្ញាវិមុត្តោ កាយសក្ខី ទិដ្ឋិប្បត្តោ សទ្ធាវិមុត្តោ ធម្មានុសារី ។ កតមោ ច បុគ្គលោ សទ្ធានុសារី ។ យស្ស បុគ្គលស្ស សោតាបត្តិផលសច្ឆិកិរិយាយ បដិបន្នស្ស សទ្ធិន្ទ្រិយំ អធិមត្តំ ហោតិ សទ្ធាវាហី សទ្ធាបុព្វង្គមំ អរិយមគ្គំ ភាវេតិ អយំ វុច្ចតិ បុគ្គលោ សទ្ធានុសារី ។ សោតាបត្តិផលសច្ឆិកិរិយាយ បដិបន្នោ បុគ្គលោ សទ្ធានុសារី ។ ផលេ ឋិតោ សទ្ធាវិមុត្តោតិ ។

សត្តកនិទ្ទេសោ និដ្ឋិតោ ។

---





[១៦៤] បុគ្គលជាឧភតោភាគវិមុត្ត តើដូចម្ដេច ។ បុគ្គលខ្លះ ក្នុងលោកនេះ បានទូវវិមោក្ខ ៨ ដោយនាមកាយ ទាំងអាសវៈ របស់បុគ្គលនោះ ក៏អស់រលីង ព្រោះបានឃើញដោយបញ្ញា នេះហៅថា បុគ្គលជាឧភតោភាគវិមុត្ត ។ បុគ្គលជាបញ្ញាវិមុត្ត ជាកាយសក្ខី ជាទិដ្ឋិប្បត្តៈ ជាសទ្ធាវិមុត្ត ជាធម្មានុសារី តើដូចម្ដេច ។ បុគ្គលជាសទ្ធានុសារី តើដូចម្ដេច ។ បុគ្គលណា ប្រតិបត្តិ ដើម្បីធ្វើឲ្យជាក់ច្បាស់ នូវសោតាបត្តិផល មានសទ្ធិន្ទ្រិយដ៏លើសលុប បុគ្គលនោះ ចំរើននូវអរិយមគ្គ មានសទ្ធាជាគ្រឿងនាំទៅ មានសទ្ធាជាប្រធាន នេះហៅថា បុគ្គលជាសទ្ធានុសារី ។ បុគ្គលដែលប្រតិបត្តិ ដើម្បីធ្វើឲ្យជាក់ច្បាស់ នូវសោតាបត្តិផល ហៅថា សទ្ធានុសារី ។ បុគ្គលដែលតាំងនៅក្នុងផល ហៅថា សទ្ធាវិមុត្ត ។

ចប់សត្តកនិទ្ទេស ។

## អដ្ឋកនិទ្ទេសោ

[១៨០] កតមេ ចត្តារោ មគ្គសមង្គិនោ ចត្តារោ ផលសមង្គិនោ បុគ្គលា ។ សោតាបន្នោ សោតាបត្តិផលសច្ឆិកិរិយាយ បដិបន្នោ សកទាគាមី សកទាគាមិផលសច្ឆិកិរិយាយ បដិបន្នោ អនាគាមី អនាគាមិផលសច្ឆិកិរិយាយ បដិបន្នោ អរហា អរហត្តាយ បដិបន្នោ ។ ឥមេ ចត្តារោ មគ្គសមង្គិនោ ឥមេ ចត្តារោ ផលសមង្គិនោ បុគ្គលា ។

អដ្ឋកនិទ្ទេសោ និដ្ឋិតោ ។

---

## នវកនិទ្ទេសោ

[១៨១] កតមោ ច បុគ្គលោ សម្មាសម្ពុទ្ធោ ។ ឥធេកច្ចោ បុគ្គលោ បុព្វេ អននុស្សុតេសុ ធម្មេសុ សាមំ សច្ចានិ អភិសម្ពុជ្ឈតិ តត្ថ ច សព្វញ្ញុតំ បាបុណាតិ ពលេសុ ច វសីភាវំ អយំ វុច្ចតិ



## អដ្ឋកនិទ្ទេស

[១៨០] បុគ្គល ៤ ពួក ព្រមព្រៀងដោយមគ្គ បុគ្គល ៤ ពួក ព្រមព្រៀងដោយផល តើដូចម្តេច ។ សោតាបន្នបុគ្គល ១ បុគ្គលប្រតិបត្តិ ដើម្បីធ្វើឲ្យជាក់ច្បាស់នូវសោតាបត្តិផល ១ សកទាគាមិបុគ្គល ១ បុគ្គលប្រតិបត្តិ ដើម្បីធ្វើឲ្យជាក់ច្បាស់ នូវសកទាគាមិផល ១ អនាគាមិបុគ្គល ១ បុគ្គលប្រតិបត្តិ ដើម្បីធ្វើឲ្យជាក់ច្បាស់ នូវអនាគាមិផល ១ ព្រះអរហន្ត ១ បុគ្គលប្រតិបត្តិ ដើម្បីភាពជាព្រះអរហន្ត ១ ។ នេះ បុគ្គល ៤ ពួក ព្រមព្រៀងដោយមគ្គ នេះ បុគ្គល ៤ ពួក ព្រមព្រៀងដោយផល ។

ចប់ អដ្ឋកនិទ្ទេស ។

---

## នវកនិទ្ទេស

[១៨១] បុគ្គលជាព្រះសម្មាសម្ពុទ្ធ តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ត្រាស់ដឹងដោយខ្លួនឯង នូវសច្ចៈ ក្នុងធម៌ទាំងឡាយ ដែលខ្លួនមិនធ្លាប់ឮក្នុងកាលមុន ទាំងដល់នូវសព្វញ្ញុតញ្ញាណក្នុងធម៌ទាំងនោះផង ដល់នូវភាពស្ទាត់ក្នុងវសីក្នុងពលញ្ញាណផង នេះហៅថា

## អភិធម្មបិដក បុគ្គលប្បញ្ញត្តិ

អយំ វុច្ចតិ បុគ្គលោ កាយសក្ខី ។ កតមោ ច បុគ្គលោ ទិដ្ឋិប្បត្តោ ។ ឥធេកច្ចោ បុគ្គលោ ឥទំ ទុក្ខន្តិ យថាភូតំ បជានាតិ ។ បេ ។ អយំ ទុក្ខនិរោធគាមិនី បដិបទាតិ យថាភូតំ បជានាតិ តថាគតប្បវេទិតា ចស្ស ធម្មា បញ្ញាយ វោទិដ្ឋា ហោន្តិ វោចរិតា បញ្ញាយ ចស្ស ទិស្វា ឯកច្ចេ អាសវា បរិក្ខីណា ហោន្តិ អយំ វុច្ចតិ បុគ្គលោ ទិដ្ឋិប្បត្តោ ។ កតមោ ច បុគ្គលោ សទ្ធាវិមុត្តោ ។ ឥធេកច្ចោ បុគ្គលោ ឥទំ ទុក្ខន្តិ យថាភូតំ បជានាតិ ។ បេ ។ អយំ ទុក្ខនិរោធគាមិនី បដិបទាតិ យថាភូតំ បជានាតិ តថាគតប្បវេទិតា ចស្ស ធម្មា បញ្ញាយ វោទិដ្ឋា ហោន្តិ វោចរិតា បញ្ញាយ ចស្ស ទិស្វា ឯកច្ចេ អាសវា បរិក្ខីណា ហោន្តិ នោ ច ខោ យថា ទិដ្ឋិប្បត្តស្ស អយំ វុច្ចតិ បុគ្គលោ សទ្ធាវិមុត្តោ ។ កតមោ ច បុគ្គលោ ធម្មានុសារី ។ យស្ស បុគ្គលស្ស សោតាបត្តិផលសច្ឆិកិរិយាយ បដិបន្នស្ស បញ្ញិន្ទ្រិយំ អធិមត្តំ ហោតិ



## អភិធម្មបិដក បុគ្គលប្បញ្ញត្តិ

នេះហៅថា បុគ្គលជាកាយសក្ខី ។ បុគ្គលជាទិដ្ឋិប្បត្តៈ តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ដឹងច្បាស់តាមពិតថា នេះទុក្ខ ។ បេ ។ ដឹងច្បាស់តាមពិតថា នេះផ្លូវប្រតិបត្តិ ទៅកាន់ធម៌រលត់ទុក្ខ ទាំងពួកធម៌ ដែលព្រះតថាគតទ្រង់សំដែងហើយ បុគ្គលនោះ ក៏បានឃើញល្អ ប្រព្រឹត្តល្អ ដោយបញ្ញា ទាំងអាសវៈពួកខ្លះ របស់បុគ្គលនោះ ក៏អស់ហើយ ព្រោះបានឃើញដោយបញ្ញា នេះហៅថា បុគ្គលជាទិដ្ឋិប្បត្តៈ ។ បុគ្គលជាសទ្ធាវិមុត្ត តើដូចម្តេច ។ បុគ្គលខ្លះ ក្នុងលោកនេះ ដឹងច្បាស់តាមពិតថា នេះទុក្ខ ។ បេ ។ ដឹងច្បាស់តាមពិតថា នេះផ្លូវប្រតិបត្តិទៅកាន់ធម៌រលត់ទុក្ខ ទាំងពួកធម៌ដែលព្រះតថាគតទ្រង់សំដែងហើយ បុគ្គលនោះ ក៏បានឃើញល្អ ប្រព្រឹត្តល្អ ដោយបញ្ញា ទាំងអាសវៈពួកខ្លះ របស់បុគ្គលនោះ ក៏អស់ទៅ ព្រោះបានឃើញដោយបញ្ញា តែមិនដូចជាទិដ្ឋិប្បត្តៈបុគ្គលទេ នេះហៅថា បុគ្គលជាសទ្ធាវិមុត្ត ។ បុគ្គលជាធម្មានុសារី តើដូចម្តេច ។ បុគ្គលណា ប្រតិបត្តិ ដើម្បីធ្វើឲ្យជាក់ច្បាស់ នូវសោតាបត្តិផល មានបញ្ញិន្ទ្រិយដ៏លើសលុប

បញ្ញាវាហី បញ្ញាបុព្វង្គមំ អរិយមគ្គំ ភាវេតិ អយំ វុច្ចតិ បុគ្គលោ ធម្មានុសារី ។ សោតាបត្តិផលសច្ឆិកិរិយាយ បដិបន្នោ បុគ្គលោ ធម្មានុសារី ។ ផលេ ឋិតោ ទិដ្ឋិប្បត្តោ ។ កតមោ ច បុគ្គលោ សទ្ធានុសារី ។ យស្ស បុគ្គលស្ស សោតាបត្តិផលសច្ឆិកិរិយាយ បដិបន្នស្ស សទ្ធិន្ទ្រិយំ អធិមត្តំ ហោតិ សទ្ធាវាហី សទ្ធាបុព្វង្គមំ អរិយមគ្គំ ភាវេតិ អយំ វុច្ចតិ បុគ្គលោ សទ្ធានុសារី ។ សោតាបត្តិផលសច្ឆិកិរិយាយ បដិបន្នោ បុគ្គលោ សទ្ធានុសារី ។ ផលេ ឋិតោ សទ្ធាវិមុត្តោ ។

នវកនិទ្ទេសោ និដ្ឋិតោ ។

## ទសកនិទ្ទេសោ

(១៩២) កតមេសំ បញ្ចន្នំ ឥធ និដ្ឋា ។ សត្តក្ខត្តុំបរមស្ស កោលំកោលស្ស ឯកពីជិស្ស



បុគ្គលនោះ ចំរើននូវអរិយមគ្គ មានបញ្ញាជាគ្រឿងនាំទៅ មានបញ្ញាជាប្រធាន នេះហៅថា បុគ្គលជាធម្មានុសារី ។ បុគ្គលដែលប្រតិបត្តិដើម្បីធ្វើឲ្យជាក់ច្បាស់ នូវសោតាបត្តិផល ឈ្មោះថាធម្មានុសារី ។ បុគ្គលដែលតាំងនៅក្នុងផល ឈ្មោះថា ទិដ្ឋិប្បត្តៈ ។ បុគ្គលជាសទ្ធានុសារី តើដូចម្តេច ។ បុគ្គលណា ប្រតិបត្តិដើម្បីធ្វើឲ្យជាក់ច្បាស់ នូវសោតាបត្តិផល មានសទ្ធិន្ទ្រិយដ៏លើសលុប បុគ្គលនោះ ចំរើន នូវអរិយមគ្គ មានសទ្ធាជាគ្រឿងនាំទៅ មានសទ្ធាជាប្រធាន នេះហៅថា បុគ្គលជាសទ្ធានុសារី ។ បុគ្គលប្រតិបត្តិដើម្បីធ្វើឲ្យជាក់ច្បាស់ នូវសោតាបត្តិផល ឈ្មោះថាសទ្ធានុសារី ។ បុគ្គលដែលតាំងនៅក្នុងផល ឈ្មោះថា សទ្ធាវិមុត្ត ។

ចប់ នវកនិទ្ទេស ។

## ទសកនិទ្ទេស

(១៩២) បុគ្គល ៥ ពួក មានការសម្រេចក្នុងកាមាវចរភូមិនេះ តើដូចម្តេច ។ សត្តក្ខត្តុំបរមបុគ្គល ១ កោលំកោលបុគ្គល ១ ឯកពីជិបុគ្គល ១

សកទាគាមិស្ស យោ ច ទិដ្ឋេវ ធម្មេ អរហា ឥមេសំ បញ្ចន្នំ ឥធ និដ្ឋា ។ កតមេសំ បញ្ចន្នំ ឥធ វិហាយ និដ្ឋា ។ អន្តរាបរិនិព្វាយិស្ស ឧបហច្ចបរិនិព្វាយិស្ស អសង្ខារបរិនិព្វាយិស្ស សសង្ខារបរិនិព្វាយិស្ស ឧទ្ធំសោតស្ស អកនិដ្ឋគាមិនោ ឥមេសំ បញ្ចន្នំ ឥធ វិហាយ និដ្ឋាតិ ។

ទសកនិទ្ទេសោ និដ្ឋិតោ ។

ឯត្តាវតា បុគ្គលានំ បុគ្គលបញ្ញត្តិ ។

បុគ្គលបញ្ញត្តិប្បករណំ ឆភាណវារំ និដ្ឋិតំ ។

---



សកទាគាមិបុគ្គល ១ និងបុគ្គលដែលជាព្រះអរហន្តក្នុងបច្ចុប្បន្ន ១ នេះ បុគ្គល ៥ ពួក មានការសម្រេចក្នុងកាមាវចរភូមិនេះ ។ បុគ្គល ៥ ពួក មានការសម្រេច ព្រោះលះបង់នូវអត្តភាពក្នុងកាមាវចរភូមិនេះ តើដូចម្តេច ។ អន្តរាបរិនិព្វាយិបុគ្គល ១ ឧបហច្ចបរិនិព្វាយិបុគ្គល ១ អសង្ខារបរិនិព្វាយិបុគ្គល ១ សសង្ខារបរិនិព្វាយិបុគ្គល ១ ឧទ្ធំសោតអកនិដ្ឋគាមិបុគ្គល ១ នេះ បុគ្គល ៥ ពួក មានការសម្រេច ព្រោះលះបង់នូវអត្តភាពក្នុងកាមាវចរភូមិនេះ ។

ចប់ ទសកនិទ្ទេស ។

បុគ្គលបញ្ញត្តិ នៃបុគ្គលទាំងឡាយ មានប្រមាណប៉ុណ្ណេះ ។

ចប់ បុគ្គលបញ្ញត្តិបករណៈ ឆភាណវារៈ ។

---

# អភិធម្មបិដកេ ធាតុកថា

## មាតិកាបត្តានិ



# អភិធម្មបិដក ធាតុកថា

## សន្លឹកប្រាប់មាតិកា

## មាតិកាបត្តិ





## សន្លឹកប្រាប់មាតិកា

# សទ្ទិការប្រាប់ពាក្យខុស-ត្រូវ

| ពាក្យខុស | ពាក្យត្រូវ | ទំព័រ | បន្ទាត់ |
|---|---|---|---|
| បុគ្គលប្បត្តិ | បុគ្គលប្បញ្ញត្តិ | ៤១៦ | ១ |
| ទៅលោក | ទៅលោក | ៤៤៤ | ១៨ |
| តាមមគិតថា | តាមគិតថា | ៣១០ | ៩ |
| នេះបដិបត្តាជាដំណើរទៅ | ដឹងច្បាស់តាមពិតថា នេះ | | |
| កាន់ធម៌រលត់ទុក្ខ | បដិបត្តាជាដំណើរទៅកាន់ | | |
| | ធម៌រលត់ទុក្ខ | ៣១៨ | ១៣ |
| ហើល | ហើយ | ៣៤៤ | ១៤ |
| វិមុត្តញាណទស្សៈ | វិមុត្តិញាណទស្សនៈ | ៣៣៧ | ១៣ |
| តើដូ ម្ដេច | តើដូចម្ដេច | ៣៦៤ | ៦ |
| ឲ្យរលត់ទៅវិញ | រលត់ទៅវិញ | ៣៦៣ | ៥ |
| ឲ្យរលត់ទៅវិញ | រលត់ទៅវិញ | ,, | ១៦ |
| ឲ្យរលត់ទៅវិញ | រលត់ទៅវិញ | ៣៦៤ | ១១ |
| ឲ្យរលត់ទៅវិញ | រលត់ទៅវិញ | ៣៦៥ | ៤ |
| ប្រាកចាក | ប្រាសចាក | ៩៣ | ៧ |